

ក្រសួងអប់រំ យុវជន និងកីឡា

សម្រាប់លក់

# ភាសាខ្មែរ

# អាន-សរសេរ

៣



## ក្រសួងអប់រំ យុវជន និងកីឡា

# ភាសាខ្មែរ

# អាន_សរសេរ

## ថ្នាក់ទី ៣

បានទទួលការអនុញ្ញាតឱ្យបោះពុម្ពផ្សាយពី ក្រសួងអប់រំ យុវជន និងកីឡា តាមប្រកាស
លេខ ២៧៦៥អយក.ប្រក. ចុះថ្ងៃទី ១៨ ខែកក្កដា ឆ្នាំ ២០១៣ ដើម្បីប្រើប្រាស់នៅតាមសាលារៀន។



បោះពុម្ពលើកទី៨ ឆ្នាំ២០២០ ចំនួន៩០ ០០០ ច្បាប់

ISBN 9-789-995-002-152

## គណៈកម្មការគ្រប់គ្រងកម្មវិធី

ឯកឧត្តម អ៊ុម សិទ្ធី

ឯកឧត្តម ណាត ប៊ុនរឿន

លោកជំទាវ ទន់ សាអ៊ិម

ឯកឧត្តម ថោង បូរ៉ាន់

ឯកឧត្តម អ៊ឹម កុច

ឯកឧត្តម សំ សេរីរតន៍

លោក ចាន់ សុភា

## គណៈកម្មការនិពន្ធ

លោក យិន ស៊ីដា

លោក យិន ធី

លោកស្រី ម៉ៅ តាន់ណារី

លោកស្រី ផាន់ សុជាតា

លោក ទៀង ផល្លា

លោក មួង ចាន់ទូច

លោក ការ នាង

លោកស្រី ម៉េង ផាន់ណូរ៉ា

លោក តឹក វណ្ណារ៉េត

លោក ស៊ុន សុផល

លោក យ៉ង់កំស៊ាន

លោក អ៊ូច សេង

លោក គាំ សេងមុនី

លោក វ៉ែន ថុល

លោក ជិន សុកហេង

លោក អ៊ុល រុន

លោក ងិន សុតារ៉ា

លោក សួ ស៊ីផុន

លោក ចី មុនី

លោកស្រី ឈឹន ស៊ីវឡេង

លោក ប៉ិច ប៊ុនណា

លោក សុខ បូរេត

លោកស្រី លី សាខុន

លោក យិត សុភ័ក្ត្រ

លោក ងិន រិត

លោកស្រី ណែត ពេជ្រចិន្តា

លោក អេប ឧត្តម

លោក រ័ត្ន ប៊ុណ្ណា

## គណៈកម្មការរៀបរៀង វិចិត្រករ និងរចនាទំព័រ

លោក យិន ស៊ីដា

លោក ហ៊ឹម សុមេធ

លោក រ័ត្ន ប៊ុណ្ណា

លោកស្រី ម៉ុន ស្ងួត្រ

លោក ឡុង សុវណ្ណា(វិចិត្រករ)

លោក ញេប ប៊ុនស្រេង

លោកស្រី ឈិន រួចឆេង

លោក ហុង ពិដោរ

លោក តន់ ជាតិ(វិចិត្រករ)

លោក សឿង សុខ

លោក កាន់ ពុទ្ធី

លោក គុយ ច័ន្ទមង្គល

លោក គង់ ចិត្រា

## គណៈកម្មការពិនិត្យ

លោក ចាន់ សុភា

លោក លាង សេងហាក់

លោក ហ៊ិន ស៊ីមហួន

លោក បេង ស៊ីម៉េត

លោក អេង គឹមលី

លោក កាន់ កាល់

លោក ជុំ ចាន់រ៉ា

លោក ជុំ សុផល

លោក កែវ សារ៉ាត់

លោក យិន សៀងសុមេធ

# អារម្ភកថា

សៀវភៅភាសាខ្មែរ "អាន-សរសេរ" ថ្នាក់ទី ៣ នេះត្រូវបានរៀបចំឡើងដោយគណៈកម្មការនិពន្ធរបស់ ក្រសួងអប់រំ យុវជន និងកីឡា ដែលមានការចូលរួមសហការពីនាយកដ្ឋានបឋមសិក្សា នាយកដ្ឋានបណ្តុះបណ្តាល និងវិក្រឹតការ នាយកដ្ឋានអភិវឌ្ឍកម្មវិធីសិក្សា និងអ្នកពាក់ព័ន្ធមួយចំនួន ដែលស្ថិតនៅក្រោមគម្រោងកម្មវិធីសកម្មភាពពង្រឹកការគាំទ្រវិស័យអប់រំនៅកម្ពុជា (ESSSUAP/FTI) ។

សៀវភៅនេះត្រូវបានបង្កើតឡើង ក្នុងគោលបំណងសម្រួលដល់ការរៀនអក្សរ របស់សិស្សថ្នាក់ទី ៣ ដោយមានការផ្សារភ្ជាប់មេរៀនមួយចំនួនពីថ្នាក់ទី ២ ហើយងាយប្រើដោយមានលំណែនាំបង្រៀនជាជំនួយដល់ការបង្រៀនរបស់គ្រូ ។ ខ្លឹមសារសំខាន់ៗ នៃឯកសារនេះ មានការរៀបចំតាមលំដាប់ពីតិចទៅច្រើន ពីងាយទៅលំបាក ដើម្បីជួយដល់ការរៀនអក្សររបស់សិស្សឱ្យចេះអាន និងចេះសរសេរបានត្រឹមត្រូវ តាមរយៈការហាត់អាន សរសេរ និងធ្វើកិច្ចការផ្ទះ ។ ទម្រង់សំខាន់ៗនៃមេរៀនថ្នាក់ទី ៣នេះ ត្រូវបានរៀបចំចងក្រងទៅតាមផ្នែក ឬសមត្ថភាពសំខាន់ៗ ដើម្បីងាយបង្រៀន និងរៀន មានដូចជាមេរៀនអំណាន និងសំណេរ ការស្តាប់ ការនិយាយ បំណិន (អក្សរសិល្ប៍) វេយ្យាករណ៍ និងមេរៀនតែងសេចក្តី ។ ពិសេស គឺផ្តោតទៅលើការពង្រឹងសមត្ថភាពអាន និងសរសេរ ដែលជាមូលដ្ឋានគ្រឹះសម្រាប់ជួយឱ្យសិស្សមានសមត្ថភាពអាន និងសរសេររឹងមាំ និងអាចបន្តការសិក្សាទៅថ្នាក់បន្ទាប់ទៀតប្រកបដោយគុណភាពពិតប្រាកដ ។

គណៈកម្មការនិពន្ធសង្ឃឹមថា សៀវភៅនេះនឹងបានជាប្រយោជន៍ច្រើនដល់ការរៀន និងបង្រៀនរបស់គ្រូ ។ ពិសេស សហគមន៍ និងអ្នកពាក់ព័ន្ធ អាចចូលរួមចំណែកក្នុងការលើកកម្ពស់គុណភាពរៀន និងបង្រៀនប្រកបដោយប្រសិទ្ធភាព ។

**គណៈកម្មការនិពន្ធ**

# មាតិកា

# សេចក្ដីណែនាំ

## សេចក្ដីផ្ដើម

ផ្អែកតាមលទ្ធផលសិក្សារបស់សិស្សប៉ុន្មានឆ្នាំកន្លងមកនេះ យើងឃើញថា សិស្សបឋមសិក្សាមានមូលដ្ឋាននៃការអាន និងសរសេរនៅមានកម្រិតទាបគួរឱ្យបារម្ភ។ ក្រសួងអប់រំ យុវជន និងកីឡា បានរិះរកយុទ្ធវិធីដើម្បីពង្រឹងគុណភាពនៃការអាន និងសរសេរឱ្យបានកាន់តែប្រសើរឡើង ដោយធ្វើការសម្របសម្រួលវិធីសាស្ត្រ និងកែលម្អឯកសារសម្រាប់បង្រៀនភាសាខ្មែរឱ្យឆាប់ចេះ ក្នុងទិសដៅឆ្លើយតបទៅនឹងគោលនយោបាយសម្រាប់អភិវឌ្ឍន៍កម្មវិធីសិក្សា និងដើម្បីធ្វើឱ្យសម្រេចតាមស្ដង់ដារកម្មវិធីសិក្សាថ្នាក់ទី៣ ដែលបានចែងថា សិស្សថ្នាក់ទី ១ ដល់ថ្នាក់ទី ៣ ត្រូវមានបំណិនមូលដ្ឋានរឹងមាំផ្នែកភាសាខ្មែរ និងគណិតវិទ្យា ពោលគឺចេះអាន សរសេរ និងគិតលេខបានច្បាស់លាស់។

សៀវភៅសម្រាប់បង្រៀនអក្សរថ្នាក់ទី ៣ថ្មីនេះ រៀបរៀងឡើងដើម្បីសម្រួលដល់ការរៀន និងការបង្រៀនភាសាខ្មែរ ដោយធ្វើបច្ចុប្បន្នភាពឱ្យបានស្របតាមបរិបទថ្មីៗ ដើម្បីឱ្យសិស្សមានគ្រឹះរឹងមាំមុននឹងអានអត្ថបទ។

យោងតាមលទ្ធផលនៃការសាកល្បងពេញមួយឆ្នាំសិក្សា ប្រកបដោយជោគជ័យនៅតាមសាលារៀនគោលដៅនៃរាជធានី ខេត្តមួយចំនួន។ ក្រសួងអប់រំ យុវជន និងកីឡាប្រើប្រាស់សៀវភៅនេះ ដើម្បីអនុវត្តនៅទូទាំងប្រទេស។

ដើម្បីជំនួយដល់គ្រូក្នុងការប្រើប្រាស់សៀវភៅនេះបានត្រឹមត្រូវ គណៈកម្មការនិពន្ធបានរៀបចំសេចក្ដីណែនាំអមក្នុងសៀវភៅនេះ ដោយផ្ដោតលើខ្លឹមសារសំខាន់ៗមួយចំនួនដូចជា ៖

១. ការប្រើប្រាស់ម៉ោងសិក្សា

២. វិធីសាស្ត្របង្រៀន

៣. ការប្រើប្រាស់សម្ភារឧបទេស

៤. ការវាយតម្លៃ

៥. ការដាក់កិច្ចការផ្ទះ

៦. លំនាំបង្រៀន។

## ១. ការប្រើប្រាស់ម៉ោងសិក្សា

កម្មវិធីសិក្សាថ្មីថ្នាក់ទី ៣នេះ តម្រូវឱ្យសិស្សសិក្សាភាសាខ្មែរចំនួន ១៣ម៉ោងក្នុងមួយសប្តាហ៍ ហើយក្នុង ១ម៉ោងសិក្សាមានរយៈពេល ៤០នាទី ។ ក្នុងមួយឆ្នាំសិក្សាសិស្សត្រូវរៀន ៣៨សប្តាហ៍ ។ ដូច្នេះម៉ោងសម្រាប់រៀនភាសាខ្មែរស្មើនឹង ៤៩៤ម៉ោង ។

ខាងក្រោមនេះជាកាលវិភាគសម្រាប់មុខវិជ្ជាភាសាខ្មែរក្នុង១សប្តាហ៍ ៖

| ថ្ងៃ | ចំនួនម៉ោងសិក្សា |
|---|---|
| ចន្ទ | ០៣ម៉ោង |
| អង្គារ | ០២ម៉ោង |
| ពុធ | ០៣ម៉ោង |
| សុក្រ | ០២ម៉ោង |
| សៅរ៍ | ០៣ម៉ោង |
| សរុប | ១៣ម៉ោង |

ចំនួនម៉ោងបង្រៀននៅតាមទំព័រមេរៀននីមួយៗខុសៗគ្នា ។ ខ្លឹមសារមេរៀនខ្លះត្រូវបង្រៀន ៣ម៉ោងសិក្សា ខ្លះ ៥ម៉ោងសិក្សា ខ្លះ ៨ម៉ោងសិក្សា និងខ្លះទៀត ១០ម៉ោងសិក្សាក៏មាន ។ អាស្រ័យហេតុនេះ មុនពេលរៀបចំការបង្រៀន អ្នកគ្រូ លោកគ្រូគប្បីមើលតារាងបែងចែកម៉ោងសិក្សាខាងក្រោមជាមុនសិន ។

# តារាងបែងចែកម៉ោងសិក្សា

| មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា | មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា |
|---|---|---|---|---|---|---|---|
| | មេរៀនរំឭក | ១ | ០៥ម៉ោង | | | | |
| ១ | អំណាន និងសំណេរ " សាលាកុមារមេត្រី " | ២ | ១០ម៉ោង | ២ | បំណិន " វេវចនសព្ទ " | ៦ | ០៣ម៉ោង |
| ៣ | អំណាន និងសំណេរ " សិស្សឧស្សាហ៍ " | ៧ | ១០ម៉ោង | ៤ | អំណាន និងសំណេរ " ការសម្អាតថ្នាក់រៀន " | ១២ | ១០ម៉ោង |
| ៥ | បំណិន " ពាក្យចួន " | ១៦ | ០៥ម៉ោង | ៦ | អំណាន និងសំណេរ " ពេលគោរពទង់ជាតិ " | ១៧ | ១០ម៉ោង |
| ៧ | ការនិយាយ " ការប្រាប់ព័ត៌មានផ្ទាល់ខ្លួន " | ២២ | ០៣ម៉ោង | ៨ | អំណាន និងសំណេរ " រឿងទឹកចិត្តដ៏ប្រពៃ" | ២៤ | ១០ម៉ោង |
| ៩ | អំណាន និងសំណេរ " សិស្សគំរូ " | ២៨ | ១០ម៉ោង | ១០ | អំណាន និងសំណេរ " សមាជិកគ្រួសារខ្ញុំ " | ៣២ | ១០ម៉ោង |
| ១១ | បំណិន " បដិសព្ទ " | ៣៧ | ០៣ម៉ោង | ១២ | អំណាន និងសំណេរ "គុណម្ដាយឪពុក " | ៣៩ | ១០ម៉ោង |
| ១៣ | តែងសេចក្ដី " ការពណ៌នាអំពីមនុស្ស " | ៤៣ | ១០ម៉ោង | ១៤ | អំណាន និងសំណេរ " រឿងគោ ក្របីគ្មានធ្មេញលើ " | ៤៧ | ១០ម៉ោង |

| | | | | | | | |
|---|---|---|---|---|---|---|---|
| ១៥ | វេយ្យាករណ៍ " អំពីនាម " | ៥១ | ០៥ម៉ោង | ១៦ | ការស្ដាប់ " អ្នកមានគុណ " | ៥៣ | ០៥ម៉ោង |
| ១៧ | អំណាន និងសំណេរ " អនាម័យ " | ៥៦ | ១០ម៉ោង | ១៨ | អំណាន និងសំណេរ " កិច្ចការយើងនៅផ្ទះ " | ៦១ | ១០ម៉ោង |

## សរុបម៉ោងក្នុងត្រីមាសទី ១

- ម៉ោងសរុប : ១៣ម៉ោង x ១៣សប្ដាហ៍ = ១៦៩ ម៉ោងសិក្សា
- ម៉ោងបង្រៀន : = ១៤៩ ម៉ោងសិក្សា
- ម៉ោងបម្រុង : = ២០ ម៉ោងសិក្សា

| មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា | មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា |
|---|---|---|---|---|---|---|---|
| ១៩ | បំណិន " តួអង្គ " | ៦៥ | ០៣ម៉ោង | ២០ | អំណាន និងសំណេរ " មេសូត្រ : មេរៀនកូនចាំ " | ៦៧ | ០៨ម៉ោង |
| ២១ | វេយ្យាករណ៍ " សញ្ញាខណ្ឌ ។ " | ៧១ | ០៣ម៉ោង | ២២ | ការស្ដាប់ " រឿងកុមារចេះសន្សំសំចៃ " | ៧៣ | ០៥ម៉ោង |
| ២៣ | តែងសេចក្ដី " ការពណ៌នាអំពីសត្វ " | ៧៤ | ១០ម៉ោង | ២៤ | អំណាន និងសំណេរ " អ្នកជិតខាងល្អ " | ៧៦ | ០៨ម៉ោង |
| ២៥ | បំណិន " សទិសសព្ទ " | ៨០ | ០៣ម៉ោង | ២៦ | អំណាន និងសំណេរ " ពិធីបុណ្យដារលាននៅភូមិខ្ញុំ " | ៨២ | ០៨ម៉ោង |

| | | | | | | | |
|---|---|---|---|---|---|---|---|
| ២៧ | វេយ្យាករណ៍ " អំពីគុណនាម " | ៨៦ | ០៥ម៉ោង | ២៨ | អំណាន និងសំណេរ " ល្បែងបោះអង្គញ់ " | ៨៨ | ០៨ម៉ោង |
| ២៩ | ការនិយាយ " ការណែនាំទីកន្លែងទេសចរណ៍ក្នុងភូមិ " | ៩២ | ០៣ម៉ោង | ៣០ | ការស្ដាប់ " ទឹកជំនន់នៅភូមិខ្ញុំ " | ៩៤ | ០៥ម៉ោង |
| ៣១ | បំណិន " ការស្គាល់ហេតុ និងផល " | ៩៦ | ០៣ម៉ោង | ៣២ | អំណាន និងសំណេរ " មុខរបរចិញ្ចឹមត្រី " | ៩៨ | ០៨ម៉ោង |
| ៣៣ | ការនិយាយ " ការរៀបរាប់ពីសុខភាព និងអាកាសធាតុ " | ១០៤ | ០៣ម៉ោង | ៣៤ | អំណាន និងសំណេរ " ការលក់ដូរ " | ១០៦ | ០៨ម៉ោង |
| ៣៥ | វេយ្យាករណ៍ " អំពីកិរិយា " | ១១២ | ០៥ម៉ោង | ៣៦ | អំណាន និងសំណេរ " ការហាត់ប្រាណ " | ១១៤ | ០៨ម៉ោង |
| ៣៧ | អំណាន និងសំណេរ " យើងទៅមណ្ឌលសុខភាព " | ១១៨ | ០៨ម៉ោង | ៣៨ | តែងសេចក្ដី " ពណ៌នាអំពីព្រឹត្តិការណ៍ " | ១២២ | ០៨ម៉ោង |
| ៣៩ | អំណាន និងសំណេរ " ទោសនៃគ្រឿងញៀន " | ១២៦ | ០៨ម៉ោង | ៤០ | ការនិយាយ " រៀបរាប់ពីសមាជិកគ្រួសារ និងមុខរបរ " | ១៣០ | ០៣ម៉ោង |
| ៤១ | អំណាន និងសំណេរ " ឥទ្ធិពលនៃគ្រឿងស្រវឹង" | ១៣២ | ០៨ម៉ោង | ៤២ | វេយ្យាករណ៍ " សញ្ញាសួរ ? " | ១៣៨ | ០៣ម៉ោង |

| | | | | | | | |
|---|---|---|---|---|---|---|---|
| ៤៣ | អំណាន និងសំណេរ<br>" សិប្បកម្មថ្មកែវ " | ១៤០ | ០៨ម៉ោង | | | | |

## សរុបម៉ោងក្នុងត្រីមាសទី ២

- ម៉ោងសរុប : ១៣ម៉ោង x ១៣សប្តាហ៍ = ១៦៩ ម៉ោងសិក្សា
- ម៉ោងបង្រៀន : = ១៥០ ម៉ោងសិក្សា
- ម៉ោងបម្រុង : = ១៩ ម៉ោងសិក្សា

| មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា | មេរៀន | ខ្លឹមសារមេរៀន | ទំព័រ | ចំនួនម៉ោងសិក្សា |
|---|---|---|---|---|---|---|---|
| ៤៤ | ការស្តាប់<br>" ដំណាំដំឡូងមី " | ១៤៤ | ០៥ម៉ោង | ៤៥ | តែងសេចក្តី<br>" ការពណ៌នាពីទីកន្លែង " | ១៤៦ | ១០ម៉ោង |
| ៤៦ | អំណាន និងសំណេរ<br>" សុជីវធម៌តាមទីសាធារណៈ " | ១៤៨ | ០៨ម៉ោង | ៤៧ | វេយ្យាករណ៍<br>" មូសិកទន្តឬធ្មេញកណ្តុរ (៉) " | ១៥២ | ០៣ម៉ោង |
| ៤៨ | ការនិយាយ<br>" បកស្រាយភ្លើងនិងផ្លាកសញ្ញាចរាចរណ៍ " | ១៥៤ | ០៣ម៉ោង | ៤៩ | អំណាន និងសំណេរ<br>" ផ្លាកសញ្ញាសុវត្ថិភាពនានា " | ១៥៦ | ០៨ម៉ោង |
| ៥០ | អំណាន និងសំណេរ<br>" សមិទ្ធផលថ្មីៗ " | ១៦០ | ០៨ម៉ោង | ៥១ | អំណាន និងសំណេរ<br>" រឿងទឹកចិត្តប៉ូលិស " | ១៦៤ | ០៨ម៉ោង |
| ៥២ | វេយ្យាករណ៍<br>" ត្រីសព្ទ ឬសញ្ញាសក់ ក (៊) " | ១៦៨ | ០៣ម៉ោង | ៥៣ | អំណាន និងសំណេរ<br>" បុណ្យសមុទ្រ " | ១៧០ | ០៨ម៉ោង |

| | | | | | | | |
|---|---|---|---|---|---|---|---|
| ៥៤ | ការស្ដាប់ “ រឿងភាពស្មោះត្រង់ ” | ១៧៤ | ០៥ម៉ោង | ៥៥ | ការនិយាយ បកស្រាយរូបភាព “ ការសម្អាតបរិស្ថាន ” | ១៧៨ | ០៣ម៉ោង |
| ៥៦ | អំណាន និងសំណេរ “ កន្លែងទេសចរណ៍ក្នុងប្រទេសកម្ពុជា ” | ១៨០ | ០៨ម៉ោង | ៥៧ | វេយ្យាករណ៍ “ បន្តក់ (◌់) ” | ១៨៤ | ០៣ម៉ោង |
| ៥៨ | អំណាន និងសំណេរ “ ធនធានធម្មជាតិ ” | ១៨៥ | ០៨ម៉ោង | ៥៩ | អំណាន និងសំណេរ “ បំណងខ្ញុំ ” | ១៩០ | ០៨ម៉ោង |
| ៦០ | ការស្ដាប់ “ រឿងភូមិ ឃុំ មានសុវត្ថិភាព ” | ១៩៤ | ០៥ម៉ោង | ៦១ | អំណាន និងសំណេរ “ ឧបករណ៍តន្ត្រីខ្មែរ ” | ១៩៦ | ០៨ម៉ោង |
| ៦២ | អំណាន និងសំណេរ “ ខ្ញុំស្រឡាញ់ទឹកដីខ្មែរ ” | ២០០ | ០៨ម៉ោង | ៦៣ | អំណាន និងសំណេរ “ ផលប្រយោជន៍នៃបច្ចេកវិទ្យាព័ត៌មាន ” | ២០៤ | ០៨ម៉ោង |
| ៦៤ | អំណាន និងសំណេរ “ សមាគមអាស៊ាន ” | ២០៨ | ០៨ម៉ោង | | | | |

## សរុបម៉ោងក្នុងត្រីមាសទី ៣

- ម៉ោងសរុប : ១៣ម៉ោង x ១២សប្ដាហ៍ = ១៥៦ ម៉ោងសិក្សា
- ម៉ោងបង្រៀន : = ១៣៦ ម៉ោងសិក្សា
- ម៉ោងបម្រុង : = ២០ ម៉ោងសិក្សា

## សរុបម៉ោងក្នុងមួយឆ្នាំសិក្សា

- ម៉ោងសរុប : ១៣ម៉ោង x ៣៨សប្ដាហ៍ = ៤៩៤ ម៉ោងសិក្សា
- ម៉ោងបង្រៀន : = ៤៣៥ ម៉ោងសិក្សា
- ម៉ោងបម្រុង : = ៥៩ ម៉ោងសិក្សា

ដូច្នេះ សូមអ្នកគ្រូ លោកគ្រូ គប្បីរៀបចំចំនួនម៉ោងសិក្សាដែលបានកំណត់ខាងលើឱ្យមានលក្ខណៈទន់ភ្លន់ និងមានប្រសិទ្ធភាព ។

## ២. វិធីសាស្ត្របង្រៀន

មុននឹងចាប់ផ្ដើមបង្រៀនមេរៀននីមួយៗ អ្នកគ្រូ លោកគ្រូ គប្បីយល់ពីខ្លឹមសារអត្ថបទ គោលបំណងនៃការបង្រៀន និងរៀនភាសាខ្មែរនៅថ្នាក់ទី ៣ ដែលសិស្សត្រូវមានសមត្ថភាពស្ដាប់ និយាយ ពិសេសសង្កត់ធ្ងន់លើការអាន និងសរសេរ ឱ្យបានត្រឹមត្រូវ ។ ដូច្នេះ ការបង្រៀនត្រូវយកចិត្តទុកដាក់ទៅលើការអនុវត្តរបស់សិស្សដោយផ្ទាល់ ចៀសវាងគ្រូអនុវត្ត ហើយសិស្សចាំតែអង្គុយមើល ពោលគឺត្រូវមានសកម្មភាពអន្តរកម្មគ្នារវាងគ្រូ និងសិស្ស ។ ពិសេសត្រូវអនុវត្តគោលវិធីសិស្សមជ្ឈមណ្ឌលជាប្រចាំ ដើម្បីទទួលបានលទ្ធផលល្អប្រសើរ ។ ក្នុងការបង្រៀន អ្នកគ្រូ លោកគ្រូត្រូវ ៖

- ចេះលើកទឹកចិត្តសិស្ស ហើយមិនត្រូវនិយាយបន្ទុះបង្អាប់សិស្សទេ
- មានឥរិយាបថទន់ភ្លន់តែម៉ឺងម៉ាត់ និងចេះយោគយល់អធ្យាស្រ័យរាល់កំហុសដែលសិស្សប្រព្រឹត្តដោយចេតនា ឬអចេតនាក្ដី
- មានភាពច្បាស់លាស់ក្នុងតួនាទីរបស់ខ្លួនក្នុងការគ្រប់គ្រងសិស្ស និងសួរខ្លួនឯងថា ថ្ងៃនេះម៉ោងសិក្សានេះ សិស្សរបស់ខ្លួនទទួលបាននូវចំណេះដឹងអ្វីខ្លះ ?

## ៣. ការប្រើប្រាស់សម្ភារឧបទេស

ការបង្រៀនត្រូវប្រើប្រាស់សម្ភារឧបទេស ដើម្បីបញ្ជាក់នូវន័យរបស់ពាក្យនីមួយៗ ។ អ្នកគ្រូ លោកគ្រូត្រូវឱ្យសិស្សហាត់ប្រើសម្ភារៈដោយខ្លួនឯងទៅតាមខ្លឹមសារមេរៀន ដើម្បីឱ្យសិស្សកាន់តែ ចេះអានសរសេរ និងយល់ច្បាស់ខ្លឹមសារមេរៀនដែលបានបង្រៀនរួច ។ កត្តាសំខាន់ទៀតនោះមុននឹងបង្រៀន គ្រូត្រូវរៀបចំកិច្ចតែងការបង្រៀនដោយកំណត់វត្ថុបំណងមេរៀន ផ្សារភ្ជាប់ទៅនឹងសម្ភារៈគ្រប់គ្រាន់សម្រាប់បង្រៀនដូចជា តួអក្សរចល័ត (ព្យញ្ជនៈ ឬស្រៈ) តារាងព្យញ្ជនៈទាំង ៣៣តួនិងជើង តារាងស្រៈនិស្ស័យ បណ្ណពាក្យ បណ្ណល្បះ ក្ដារខៀនថត ឬក្ដារខៀនតូចដែលអាចបិទភ្ជាប់អក្សរចល័ត ឬរូបភាពបានសម្រាប់សកម្មភាពក្នុងថ្នាក់ ព្រមទាំងអត្ថបទដែលត្រូវយកមកបង្រៀនដោយត្រូវបានសរសេររួចជាស្រេចលើក្រដាសផ្ទាំងធំ ហើយបិទទុកនៅលើក្ដារខៀន ។

ក្រៅពីនេះ គ្រូ សិស្សអាចប្រើកាយវិការជាក់ស្ដែងច្រើនទៀត តម្រូវទៅតាមពាក្យដែលត្រូវយកមកបង្រៀន និងរៀន ។

## ៤. ការវាយតម្លៃ

នៅពេលបង្រៀនមេរៀនចប់ អ្នកគ្រូ លោកគ្រូត្រូវធ្វើការវាយតម្លៃ ដើម្បីវាស់ស្ទង់លទ្ធផលនៃការសិក្សារបស់សិស្ស ។ ការវាយតម្លៃត្រូវធ្វើជាប្រចាំតាមដំណាក់រហូតបញ្ចប់ និងការប្រឡងប្រចាំខែ

ប្រចាំត្រីមាស ប្រចាំឆមាស ។ ការវាយតម្លៃត្រូវឱ្យសមស្របទៅនឹងកម្រិតលទ្ធផលសិក្សាថ្នាក់ទី ៣ ដូចជាការវាយតម្លៃអំណាន សិស្សត្រូវអានឱ្យបានត្រឹមត្រូវ និងយល់ន័យចៀសវាងការប្រកបក្នុងពេលអានអត្ថបទ ។ ចំណែកការវាយតម្លៃសំណេរ ត្រូវឱ្យសិស្សសរសេរតាមអាន សរសេរកន្សោមពាក្យងាយៗ និងសរសេរចំណងជើងរូបភាព ។ល ។

## ៥. ការដាក់កិច្ចការផ្ទះ

ការដាក់កិច្ចការផ្ទះ ជាមធ្យោបាយមួយសំខាន់សម្រាប់ជួយសិស្សឱ្យឆាប់ចេះអាន សរសេរ និងជាទម្លាប់មួយឱ្យសិស្សចេះរៀនដោយខ្លួនឯង និងចូលចិត្តរៀន ។ គ្រូត្រូវដាក់កិច្ចការឱ្យសិស្សជាប្រចាំ និងរាល់ថ្ងៃ ។ កិច្ចការផ្ទះសម្រាប់ថ្នាក់ទី ៣ ក្នុងមេរៀនថ្មីនេះអាចធ្វើបានដូចជា ៖

- លំហាត់ដែលមាននៅចុងបញ្ចប់មេរៀននីមួយៗ
- អក្សរផ្ចង់ដែលគ្រូដាក់ឱ្យតាមលំដាប់ មានព្យញ្ជនៈ ពាក្យ និងកន្សោមពាក្យ
- ឱ្យសិស្សរៀនមេរៀនថ្មីត្រៀមទុកជាមុន
- ការដាក់កិច្ចការឱ្យសិស្សស្រាវជ្រាវ និងសរសេរតែងសេចក្តី តែងកថាខណ្ឌអំពីប្រធានបទទាក់ទងនឹងព្រឹត្តិការណ៍នានាដូចជា បាតុភូតក្នុងសហគមន៍ ភ្លៀង ខ្យល់ព្យុះ កសិកម្ម ពិធីបុណ្យផ្សេងៗ ។ល ។
- ពាក្យ ឬឃ្លាណាដែលគ្រូមិនបានបង្រៀនក្នុងថ្នាក់ គ្រូត្រូវដាក់កិច្ចការផ្ទះបន្ថែមឱ្យសិស្សធ្វើ មិនត្រូវភ្លេចកែឡើងវិញនៅថ្ងៃរៀនបន្ទាប់នោះឡើយ ។ គ្រប់កិច្ចការទាំងអស់ដែលដាក់ឱ្យសិស្សធ្វើ គ្រូត្រូវត្រួតពិនិត្យ និងកែឱ្យបានទៀងទាត់ ។

## ៦. លំនាំបង្រៀន

### ៦.១ លំនាំបង្រៀនវិពួកស្រៈនិស្ស័យ ស្រៈពេញតួ និងព្យញ្ជនៈ

#### វត្ថុបំណង

- ប្រាប់បានឡើងវិញអំពីស្រៈ ( ស្រៈនិស្ស័យ ស្រៈពេញតួ ) ព្យញ្ជនៈ និងជើងទាំងអស់បានត្រឹមត្រូវតាមរយៈការបង្ហាញ ។
- អាន និងសរសេរស្រៈ និងព្យញ្ជនៈ ជើងព្យញ្ជនៈបានច្បាស់លាស់ត្រឹមត្រូវ តាមរយៈការហាត់អាន សរសេរតួស្រៈ ព្យញ្ជនៈ និងជើងព្យញ្ជនៈទាំងអស់នៅលើក្តារឆ្នួន ក្តារខៀន ។
- មានទំនុកចិត្តក្នុងការអានសរសេរស្រៈ ព្យញ្ជនៈ និងជើងព្យញ្ជនៈបានច្បាស់ ។

### ក. លំនាំបង្រៀនរំឭកស្រៈនិស្ស័យ

- បង្ហាញស្រៈចល័តម្ដងមួយៗឱ្យសិស្សអាន
- គ្រូបិទតារាងស្រៈនិស្ស័យលើក្ដារខៀន ។ គ្រូចង្អុលស្រៈតាមលំដាប់ ហើយឱ្យសិស្សអានច្បាស់ៗទាំងអស់គ្នា រួចគ្រូចង្អុលបញ្ច្រាសមកវិញដោយឱ្យសិស្សអានពីស្រៈ េ□ាះ → □ា
- គ្រូចង្អុលស្រៈមិនតាមលំដាប់ឱ្យសិស្សអាន រួចសរសេរលើក្ដារឆ្នួន ហើយផ្ទៀងផ្ទាត់ក្នុងសៀវភៅជាមួយសិស្សជិតខាង
- គ្រូឱ្យសិស្សអានស្រៈជាដៃគូដោយប្រើសៀវភៅរបស់គេលើកទី ១ អានរួមគ្នា ។ លើកទី ២ ម្នាក់ចង្អុលឆ្លាស់ចុះឡើង ម្នាក់ទៀតអាន រួចដូរវេនគ្នាចង្អុលឱ្យកាន់តែលឿន ។

### ខ. លំនាំបង្រៀនរំឭកស្រៈពេញតួ

- គ្រូបង្ហាញស្រៈពេញតួចល័ត ម្ដងមួយៗតាមលំដាប់ ឱ្យសិស្សអានរហូតដល់គ្រប់ ១៥តួ
- គ្រូបិទតារាងស្រៈពេញតួ ឬសរសេរលើក្ដារខៀន
- គ្រូចង្អុលស្រៈពេញតួមិនតាមលំដាប់ ឱ្យសិស្សអាន រួចសរសេរលើក្ដារឆ្នួនហើយផ្ទៀងផ្ទាត់ក្នុងសៀវភៅជាមួយសិស្សជិតខាង
- គ្រូឱ្យសិស្សអានស្រៈពេញតួតាមលំដាប់ទាំង ១៥តួជាដៃគូ ។ ដំបូងអានរួមគ្នា បន្ទាប់មកម្នាក់ចង្អុលឆ្លាស់ចុះឡើង ម្នាក់អានរួចដូរវេនគ្នា ។

### គ. លំនាំបង្រៀនរំឭកព្យញ្ជនៈ និងជើងព្យញ្ជនៈ

- គ្រូបង្ហាញព្យញ្ជនៈចល័តម្ដងមួយៗឱ្យសិស្សអាន
- គ្រូបិទតារាងព្យញ្ជនៈ ហើយគ្រូចង្អុលឱ្យសិស្សអានតាមលំដាប់ រួចបញ្ច្រាសមកវិញ
- គ្រូចង្អុលព្យញ្ជនៈឆ្លាស់ចុះឡើងឱ្យសិស្សអាន រួចសរសេរលើក្ដារឆ្នួន
- គ្រូបង្ហាញជើងព្យញ្ជនៈឱ្យសិស្សអាន
- ឱ្យសិស្សអានសៀវភៅជាដៃគូព្រមគ្នា រួចដូរវេនគ្នាអាន និងចង្អុលព្យញ្ជនៈឆ្លាស់ចុះឡើងឱ្យច្រើនសា ។

## ៦.២ លំនាំបង្រៀន អំណាន មេសូត្រ ឬកំណាព្យ និងចម្រៀង

### វត្ថុបំណង

- សិស្សអាន សូត្រ ច្រៀង បានត្រឹមត្រូវតាមបែបបទ ចេះលើកដាក់សំឡេង គោរពសញ្ញាសម្ព័ន្ធ និងធ្វើកាយវិការបានត្រឹមត្រូវ តាមរយៈការហ្វឹកហាត់តាមគ្រូ ការហ្វឹកហាត់ជាបុគ្គល ជាដៃគូ និងជាក្រុម ។
- សិស្សអានអត្ថបទនិងយល់ន័យអត្ថបទបានច្បាស់លាស់ តាមរយៈការហ្វឹកហាត់តាមក្រុម ជាដៃគូនិងជាបុគ្គល ។

- សិស្សប្រាប់បំណិនផ្សេងៗ ដែលមាននៅក្នុងខ្លឹមសារអត្ថបទដូចជា ពាក្យចួន តួអង្គ ដំបូន្មាន រឿង ឬ អត្ថបទ វេយ្យាករណ៍ជាដើមបានត្រឹមត្រូវ តាមរយៈការឆ្លើយសំណួររបស់គ្រូ ការធ្វើលំហាត់ជាបុគ្គល ជាដៃគូ និងជាក្រុម ។
- សិស្សមានទំនុកចិត្តក្នុងការសូត្រកំណាព្យ និងបណ្ដុះទឹកចិត្តឱ្យចូលចិត្តកំណាព្យ ។

## លំនាំបង្រៀន

### មុនពេលអាន

- គ្រូសួរសំណួរ ដើម្បីផ្សារភ្ជាប់ចំណេះដឹងមានស្រាប់ ឬបទពិសោធរបស់សិស្សទៅនឹងមេរៀនថ្មី
- គ្រូសរសេរចំណងជើងអត្ថបទដាក់លើក្ដារខៀន ។ គ្រូឱ្យសិស្សអានចំណងជើង រួចសួរសិស្សអំពីអត្ថន័យនៃចំណងជើងនោះ
- គ្រូឱ្យសិស្សសង្កេតរូបភាពនៅក្នុងសៀវភៅសិស្ស រួចក៏សួរសំណួរមួយចំនួនអំពីរូបភាពនោះ
- គ្រូឱ្យសិស្សប៉ាន់ស្មានខ្លឹមសារអត្ថបទដោយសួរសិស្សថា តើអត្ថបទនេះនិយាយពីអ្វី ?
- គ្រូឱ្យសិស្សអានអត្ថបទដោយស្ងៀមស្ងាត់ និងរហ័សបំផុត ដើម្បីរកពាក្យពិបាកអាន និងពិបាកយល់ន័យ ។ បន្ទាប់មក គ្រូឱ្យសិស្សឡើងសរសេរពាក្យទាំងនោះនៅលើក្ដារខៀន ។
- គ្រូដឹកនាំសិស្សធ្វើការរៀនពាក្យ (អំណានពាក្យ) ដោយឱ្យសិស្សហ្វឹកហាត់ញែកព្យាង្គ និងអានពាក្យដោយមិនប្រកប ។ ចំពោះពាក្យដែលត្រូវចំណាំដូចជា ដើរ ប្រយោជន៍ សៅរ៍ និងពាក្យដូរសូរដូចជា ហេតុ ផល គ្រូគប្បីប្រាប់សិស្សឱ្យចំណាំ
- គ្រូដឹកនាំសិស្សធ្វើការរៀនពាក្យ (ពន្យល់ពាក្យ) ដោយប្រើវិធីផ្សេងៗដូចជា សំណួរបំផុស ការលើកឧទាហរណ៍ ការប្រើរូបភាព ការធ្វើកាយវិការ ឬការធ្វើសកម្មភាពផ្សេងៗ ទាក់ទងនឹងន័យរបស់ពាក្យ ដើម្បីធ្វើឱ្យសប្បាយរីករាយ ។

*បញ្ជាក់ : ក្នុងករណីពាក្យពិបាកអាន និងពិបាកយល់ន័យដែលសិស្សបានប្រាប់ខុសពីអំណានពាក្យដែលមានក្នុងមេរៀន គ្រូគប្បីដឹកនាំសិស្សធ្វើអំណានពាក្យ និងពន្យល់ពាក្យនោះបន្ថែម ។*

- គ្រូដឹកនាំសិស្សធ្វើការរៀនពាក្យ (បដិសព្ទ វេវចនសព្ទ និងសទិសសព្ទ) ។

### អំឡុងពេលអាន

- គ្រូអាន សូត្រ ច្រៀងអត្ថបទតាមបែបបទនៃអត្ថបទ កំណាព្យ និង ចម្រៀងជាគំរូមួយចប់ឱ្យសិស្សស្ដាប់

- គ្រូដឹកនាំសិស្សហ្វឹកហាត់ អាន សូត្រ ច្រៀង ជារួម ជាបុគ្គល ជាដៃគូ និងជាក្រុមដោយផ្ដោតលើបែបបទ ការចេះលើកដាក់សំឡេង ការគោរពសញ្ញាសម្ព័ន្ធ និងការធ្វើកាយវិការបានត្រឹមត្រូវ
- គ្រូឱ្យសិស្សអានសំណួរក្នុងសៀវភៅសិស្ស ។ គ្រូបញ្ជាក់ប្រាប់សិស្សថា សិស្សនឹងត្រូវឆ្លើយសំណួរទាំងនេះ នៅពេលអានអត្ថបទដោយស្ងៀមស្ងាត់ចប់
- គ្រូឱ្យសិស្សអានអត្ថបទដោយស្ងៀមស្ងាត់ ដើម្បីស្វែងយល់ខ្លឹមសារអត្ថបទ ។ ក្នុងការអានស្ងាត់នេះ គ្រូត្រូវកំណត់ពេលវេលាសម្រាប់ឱ្យសិស្សអានឱ្យបានច្បាស់លាស់
- គ្រូសួរសំណួរក្នុងសៀវភៅឱ្យសិស្សឆ្លើយ ដើម្បីបញ្ជាក់ពីការខ្លឹមសារអត្ថបទរបស់សិស្ស ។ គ្រូអាចសួរសំណួរបន្ថែមទៀតក្រៅពីសំណួរក្នុងសៀវភៅ ។ មុនពេលសួរសំណួរគ្រូត្រូវឱ្យសិស្សបិទសៀវភៅ ។ បើមានសំណួរណាសិស្សឆ្លើយខុស គ្រូឱ្យសិស្សបើកសៀវភៅអានផ្ទៀងផ្ទាត់ត្រង់ចំណុចនោះឡើងវិញ
- គ្រូឱ្យសិស្សធ្វើលំហាត់ក្នុងសៀវភៅ ជាបុគ្គល ជាដៃគូ ជាក្រុម ។ គ្រូអាចដាក់លំហាត់បន្ថែមទៀតតាមការចាំបាច់
- គ្រូធ្វើការបូកសរុប និងសង្ខេបខ្លឹមសារមេរៀន ។

**ក្រោយពេលអាន**

- គ្រូឱ្យសិស្សរៀនយឺតអាន សូត្រ ច្រៀងអត្ថបទ
- គ្រូឱ្យសិស្សអាន សូត្រ ច្រៀងអត្ថបទបណ្ដាក់គ្នា
- គ្រូឱ្យសិស្សសង្ខេបអត្ថបទឡើងវិញ
- គ្រូឱ្យសិស្សសម្ដែងតួតាមខ្លឹមសារអត្ថបទ ឬសាច់រឿង
- គ្រូនាំសិស្សលេងល្បែងសិក្សាផ្សេងៗ ដែលទាក់ទងនឹងខ្លឹមសារអត្ថបទ
- គ្រូឱ្យសិស្សធ្វើលំហាត់បន្ថែម ឬដាក់លំហាត់ឱ្យសិស្សធ្វើនៅផ្ទះ
- គ្រូឱ្យសិស្សចម្លងមេរៀនដាក់ក្នុងសៀវភៅរៀងខ្លួនៗ ។

## ៦.៣ លំនាំបង្រៀនអក្សរផ្ចង់

### វត្ថុបំណង

- កំណត់បានច្បាស់ពីរូបរាងព្យញ្ជនៈ និងពាក្យដែលត្រូវសរសេរ ។
- សរសេរតួអក្សរ និងពាក្យនីមួយៗបានស្អាត ច្បាស់ ទៅតាមទំហំ និងទម្រង់អក្សរ (អក្សរជ្រៀង) តាមរយៈការហ្វឹកហាត់សរសេរអក្សរផ្ចង់ ។

- មានទម្លាប់ធ្វើកិច្ចការដោយផ្ចិតផ្ចង់ អំណត់ ព្យាយាម មានបម្រុងប្រយ័ត្នក្នុងការសរសេរ និងស្រឡាញ់សោភ័ណ (ភាពស្អាតនៃអក្សរ) ។

## លំនាំបង្រៀន

គ្រូគូសបន្ទាត់ផ្ដេកនៅលើក្ដារខៀនតាមទម្រង់ ១/២ ដូចគំរូខាងក្រោម ៖

- គ្រូណែនាំសិស្សអំពីរបៀបគូសបន្ទាត់តាមគំរូខាងក្រោម ។ នៅក្នុងសៀវភៅសិស្សមានក្រឡាបន្ទាត់ស្រេចហើយ គ្រូគ្រាន់តែនាំសិស្សគូសបន្ទាត់ទ្រេតតាមក្រឡាបន្ទាត់ក្នុងសៀវភៅសិស្សតែប៉ុណ្ណោះ
- គ្រូសរសេរអក្សរគំរូនៅលើក្ដារខៀនយឺតៗតាមចលនានីមួយៗឱ្យសិស្សសង្កេត ។ ដំបូងគ្រូសរសេរអក្សរ " អ " ដោយកំណត់កម្ពស់ ៤/៤(ពេញបន្ទាត់) ទទឹង ២/៣ ជួរទី ១ បន្ទាប់មកសរសេរតួអក្សរ " អ " ដោយ កំណត់យកកម្ពស់ ២/៤ ទទឹង ១/៣ ។ ជួរទី ៣ សរសេរតួអក្សរ " អ " ដោយ កំណត់កម្ពស់ ១/៤ទទឹង ...
- គ្រូឱ្យសិស្សហាត់សរសេរអក្សរនៅលើក្ដារឆ្នួនតាមគំរូនៅលើក្ដារខៀន ។ គ្រូត្រួតពិនិត្យ និងកែលម្អ
- គ្រូឱ្យសិស្សហាត់សរសេរអក្សរផ្ចង់នៅក្នុងសៀវភៅរៀងៗខ្លួន
- គ្រូប្រមូលសៀវភៅមកកែដាក់ពិន្ទុ ។




# ៦.៤ លំនាំបង្រៀនសរសេរតាមអាន

## វត្ថុបំណង

- កំណត់បានសូរអក្សរ និងន័យរបស់ពាក្យបានត្រឹមត្រូវ ។
- សរសេរពាក្យ កន្សោមពាក្យ ល្បះ និងអត្ថបទខ្លីៗតាមអក្ខរាវិរុទ្ធ និងក្បួនវេយ្យាករណ៍បានត្រឹមត្រូវ តាមរយៈការហៅរបស់គ្រូ និងការហ្វឹកហាត់សរសេរលើក្ដារឆ្នួន ។
- មានទម្លាប់ចំណាំពាក្យ និងន័យរបស់ពាក្យដែលបានរៀនរួច ។

### សរសេរតាមអានមាន ៣ យ៉ាងគឺ ៖

- សរសេរតាមអានចម្លង (សម្រាប់តែថ្នាក់ទី ១)
- សរសេរតាមអានរៀបចំ (សម្រាប់ថ្នាក់ទី ១ ដល់ថ្នាក់ទី ៦)
- សរសេរតាមអានត្រួតពិនិត្យ (សម្រាប់ថ្នាក់ទី ១ដល់ថ្នាក់ទី ៦)។

### ការរៀបចំ

- គ្រូត្រូវយកអត្ថបទអំណានដែលសិស្សរៀនរួច (សម្រាប់សរសេរតាមអានត្រួតពិនិត្យ)
- ជ្រើសរើសពាក្យពិបាកសរសេរ ពាក្យទាក់ទងវេយ្យាករណ៍ ពាក្យចំណាំ ( *ឧទាហរណ៍* ភូមិ មាន ◌ិ ដើរ មាន រ )
- គ្រូបង្កើតសំណួរទាក់ទងនឹងអត្ថបទ ចាប់ពីថ្នាក់ទី ៣ ឡើងទៅ។

### ក. លំនាំបង្រៀនសរសេរតាមអានរៀបចំ

- គ្រូបិទផ្ទាំងអត្ថបទនៅលើក្ដារខៀន ឬសរសេរអត្ថបទលើក្ដារខៀន ដោយប្រើដីសពណ៌សម្រាប់ពាក្យពិបាក ឬគូសពីក្រោមពាក្យពិបាក។ គ្រូអាចបិទបណ្ណពាក្យ ឬសរសេរពាក្យពិបាកដាក់ក្ដារខៀន ដោយប្រើដីសពណ៌ចំពោះអក្សរដែលត្រូវចំណាំ
- គ្រូអានពាក្យពិបាក ឬពាក្យគន្លឹះម្ដងមួយៗ ឱ្យសិស្សអានតាម។ បន្ទាប់មកឱ្យសិស្សអានពាក្យនីមួយៗទាំងអស់គ្នា
- គ្រូអានពាក្យម្ដងមួយៗឡើងវិញឱ្យសិស្សចាំស្ដាប់ ហើយឱ្យសិស្សប្រាប់ថា ក្នុងពាក្យនោះមានអក្សរអ្វីខ្លះ ? (ធ្វើអក្ខរាវិរុទ្ធ) ហើយឱ្យសិស្សសរសេរពាក្យនោះលើក្ដារឆ្នួនដោយសម្លឹងមើលអក្សរនីមួយៗក្នុងពាក្យ
  - ចំពោះពាក្យចំណាំ ៖ គប្បីសួរសិស្សថា តើពាក្យនេះប្អូនចំណាំដូចម្ដេច ?
    *ឧទាហរណ៍* ភូមិ ចំណាំមានស្រៈ ◌ិ នៅលើអក្សរ ម
  - ចំពោះពាក្យពីរ ឬច្រើនព្យាង្គ ៖ គ្រូគប្បីឱ្យសិស្សចាំស្ដាប់សូរ គ្រូទះដៃ តាមចំនួនព្យាង្គ
    *ឧទាហរណ៍* ព្យា (ទះដៃ) យាម (ទះដៃ)។ គួរសួរសិស្សថា ព្យាយាម មានប៉ុន្មានព្យាង្គ ? (២ព្យាង្គ)
  - ចំពោះពាក្យមានសូរដូចគ្នា។ *ឧទាហរណ៍* កា ការ ការណ៍ គួរសួរសិស្សថា " តើការសម្គាល់អ្វី ? " " ការណ៍សម្គាល់អ្វី ? " ដើម្បីឱ្យសិស្សចំណាំច្បាស់។
- គ្រូពន្យល់ពាក្យ មួយ ឬពីរពាក្យ ដោយឱ្យសិស្សគិតជាដៃគូអំពីន័យ ហើយឆ្លើយប្រាប់គ្រូ (ពាក្យដែលមិនទាន់បានពន្យល់នៅពេលរៀនអត្ថបទ)
- គ្រូអានអត្ថបទយឺតៗមួយចប់ឱ្យសិស្សស្ដាប់

- គ្រូបិទអត្ថបទឱ្យជិត រួចហៅពាក្យ ឬឃ្លាខ្លីៗ (២-៣ពាក្យ) ឱ្យសិស្សសរសេរ ។ គ្រូគប្បីចាត់តាំងសិស្សម្នាក់សរសេរលឿន ឱ្យថាតាមក្រោយគ្រូ និងសិស្សម្នាក់ទៀតដែលសរសេរយឺតឱ្យថាតាមនៅពេលខ្លួនសរសេរ ពាក្យ ឬឃ្លានោះចប់
- គ្រូហៅពាក្យ ឬឃ្លាដដែលម្តងទៀត រួចទើបហៅពាក្យ ឬឃ្លាបន្តទៀត ។ ធ្វើបែបនេះរហូតដល់ចប់
- គ្រូហៅសំណួរនិងលំហាត់ ឬគ្រូសរសេរសំណួរនិងលំហាត់លើក្តារខៀនឱ្យសិស្សកត់និងឱ្យសិស្សធ្វើ (បើគ្មានពេល គ្រូអាចទុកលំហាត់ខ្លះឱ្យសិស្សធ្វើនៅផ្ទះ)
- គ្រូអានអត្ថបទឡើងវិញយឺតៗឱ្យសិស្សផ្ទៀង រួចទុកពេលឱ្យសិស្សពិនិត្យ និងកែតម្រូវ
- គ្រូឱ្យសិស្សកែកំហុសដោយខ្លួនឯង ឬដូរគ្នាកែ ផ្ទៀបនឹងអត្ថបទក្នុងសៀវភៅសិស្ស ឬអត្ថបទនៅក្តារខៀន មួយល្បះម្តងៗ ហើយគូសពីក្រោមពាក្យដែលខុស រួចប្រគល់សៀវភៅឱ្យម្ចាស់ដើមវិញ
- គ្រូប្រមូលសៀវភៅដាក់ពិន្ទុ ហើយប្រគល់ទៅឱ្យសិស្សកែកំហុសផ្ទាល់ខ្លួន ។ សិស្សសរសេរពាក្យត្រូវ ពីលើពាក្យដែលខុស ឬនៅខាងឆ្វេងរឹមទំព័រ ។ ចំពោះសិស្សខុស ចាប់ពីដប់ពាក្យឡើងទៅត្រូវចម្លងអត្ថបទឡើងវិញ ។

## ខ. លំនាំបង្រៀនសរសេរតាមអានត្រួតពិនិត្យ

- គ្រូអានពាក្យ កន្សោមពាក្យ ល្បះ ឬអត្ថបទច្បាស់ៗឱ្យសិស្សស្តាប់មួយចប់
- គ្រូហៅពាក្យ ឬឃ្លាខ្លីៗចំនួន ៣ដងឱ្យសិស្សសរសេរ ឬឱ្យសិស្សម្នាក់ថាតាមគ្រូមុនសរសេរ ហើយម្នាក់ទៀតថាតាមក្រោយ ពេលខ្លួនសរសេរចប់
- គ្រូអានពាក្យ ឬអត្ថបទឡើងវិញឱ្យសិស្សផ្ទៀង ។ ទុកពេលឱ្យសិស្សកែតម្រូវ ឬបំពេញចំណុចខ្វះខាត
- គ្រូហៅសំណួរនិងលំហាត់ឱ្យសិស្សកត់ ឬគ្រូកត់សំណួរនិងលំហាត់លើក្តារខៀនឱ្យសិស្សធ្វើ (បើគ្មានពេលអាចទុកលំហាត់ខ្លះឱ្យសិស្សធ្វើនៅផ្ទះ)
- គ្រូប្រមូលសៀវភៅឱ្យសិស្សដូរគ្នាកែ រួចណែនាំសិស្សពីរបៀបកែដោយផ្ទៀបទៅនឹងពាក្យល្បះនៅក្នុងសៀវភៅសិក្សាគោល
- គ្រូឱ្យសិស្សប្រគល់សៀវភៅឱ្យម្ចាស់ដើមវិញ ដើម្បីកែតម្រូវកំហុសរបស់គេម្នាក់ៗ
- គ្រូប្រមូលសៀវភៅដាក់ពិន្ទុ ។

## ៦.៥ លំនាំបង្រៀនជ្រើសរើសពាក្យបំពេញចន្លោះល្បះ

### វត្ថុបំណង

- កំណត់ន័យរបស់ពាក្យ និងន័យរបស់ល្បះបានត្រឹមត្រូវ តាមរយៈការអានពាក្យក្នុងប្រអប់ល្បះគំរូ ។
- បំពេញល្បះបានត្រឹមត្រូវ មានន័យពេញលេញ តាមរយៈសំណួររបស់គ្រូ និងការហ្វឹកហាត់បំពេញល្បះជាបុគ្គល ដៃគូ ឬក្រុម ។
- មានទំនុកចិត្តក្នុងការជ្រើសរើសពាក្យបំពេញចន្លោះល្បះ ។

### លំនាំបង្រៀន

- គ្រូចម្លងល្បះទី ១ នៅលើក្ដារខៀន (ល្បះដែលត្រូវបំពេញ)
- គ្រូឱ្យសិស្សអានការណែនាំលំហាត់ក្នុងសៀវភៅ រួចគ្រូសួរ ៖ តើលំហាត់នេះចង់ឱ្យកូនធ្វើអ្វី ?
- គ្រូឱ្យសិស្សអានពាក្យនៅក្នុងប្រអប់ (ពាក្យដែលត្រូវជ្រើសរើស) នៅពីលើល្បះ
- គ្រូប្រាប់សិស្សថា ពាក្យទាំងនេះដកចេញពីក្នុងល្បះនេះ ។ តើអ្នកណាអាចរកកន្លែងត្រឹមត្រូវដើម្បីបំពេញពាក្យទាំងនេះបានដែរឬទេ ?
- គ្រូអានល្បះទី ១ រួចឱ្យសិស្សទាំងអស់គ្នាអានល្បះនេះ
- គ្រូសួរ ៖ តើល្បះនេះមានន័យស្ដាប់បានហើយឬនៅ ?
- គ្រូឱ្យសិស្សមើលពាក្យនៅក្នុងប្រអប់សៀវភៅសិស្ស រួចជ្រើសរើសពាក្យណាមួយដែលមានន័យត្រូវនឹងល្បះនោះ រួចឱ្យសិស្សសរសេរពាក្យដែលខ្លួនបានជ្រើសរើសនៅលើក្ដារឆ្នួន ។ គ្រូសរសេរពាក្យនោះនៅក្នុងចន្លោះល្បះ
- គ្រូអាចនាំសិស្សបំពេញល្បះទី ១ ជាគំរូ ដោយគ្រូយកពាក្យទី១មកបំពេញល្បះ រួចសួរសិស្ស ៖ តើល្បះនេះមានន័យគ្រប់គ្រាន់ស្ដាប់បានហើយឬនៅ ? គ្រូធ្វើដូចគ្នាចំពោះពាក្យទី ២ ទី ៣ ... រហូតទាល់តែសិស្ស ឆ្លើយថា ល្បះនេះមានន័យត្រឹមត្រូវហើយ ទើបឈប់
- គ្រូឱ្យសិស្សអានល្បះដែលបំពេញរួចនេះទាំងអស់គ្នា ។

#### ការហ្វឹកហាត់

- គ្រូឱ្យសិស្សបំពេញល្បះផ្សេងទៀត ជាដៃគូ ឬជាបុគ្គល ដាក់ក្នុងសៀវភៅកិច្ចការ ។ គ្រូដើរមើល និងជួយសិស្សជួបការលំបាក ។ គ្រូអាចឱ្យសិស្សផ្ដល់ចម្លើយ ដោយគ្រាន់តែសរសេរលេខ ល្បះ និងពាក្យដែលត្រូវបំពេញ ប្រសិនបើមិនមានពេលគ្រប់គ្រាន់

- គ្រូឱ្យសិស្សដូរសៀវភៅគ្នា ដើម្បីផ្ទៀងផ្ទាត់ចម្លើយគ្នាទៅវិញទៅមក
- គ្រូឱ្យសិស្សអានល្បះដែលបំពេញបានត្រឹមត្រូវជាដៃគូ ។ ប្រាប់ឱ្យសិស្សចម្លងល្បះដាក់ក្នុងសៀវភៅរៀងៗខ្លួន ពេលត្រឡប់ទៅផ្ទះវិញ ។

*បញ្ជាក់ : ចំពោះការបំពេញល្បះតាមរូបភាព គ្រូត្រូវណែនាំសិស្សឱ្យអានល្បះ រួចមើលរូបភាពដើម្បីឱ្យដឹងថា រូបភាពនោះនិយាយអំពីអ្វីខ្លះ ហើយត្រូវយកពាក្យអ្វីទៅបំពេញល្បះទាំងនោះ ។*

## ៦.៦ លំនាំបង្រៀនតែងល្បះតាមរូបភាព

### វត្ថុបំណង

- ប្រាប់សកម្មភាពក្នុងរូបភាពបានច្បាស់លាស់ តាមរយៈការសង្កេតរូបភាព និងសំណួររបស់គ្រូ ។
- តែងល្បះតាមរូបភាពបានសមស្របតាមរយៈការហ្វឹកហាត់តែងជាបុគ្គល ដៃគូ ឬជាក្រុម ។
- មានទំនុកចិត្តក្នុងការសរសេរបកស្រាយរូបភាពងាយៗ ជាល្បះមានន័យពេញលេញ ។

### លំនាំបង្រៀន

- គ្រូប្រាប់សិស្សថា ពួកគេនឹងហ្វឹកហាត់សរសេរល្បះតាមរូបភាព
- គ្រូបង្ហាញរូបភាព រួចសួរសំណួរបំផុសរកពាក្យគន្លឹះ ដោយសរសេរពាក្យនោះនៅលើក្ដារខៀន

  *ឧទាហរណ៍* - តើកូនឃើញអ្វីខ្លះនៅក្នុងរូបភាពនេះ ?

  - តើមនុស្សនៅក្នុងរូបភាពកំពុងធ្វើអ្វី ?
- គ្រូធ្វើដូចគ្នានឹងរូបភាពទី ១ដែរ សម្រាប់រូបភាពផ្សេងទៀត(ប្រសិនបើមានរូបភាពច្រើន)
- គ្រូបំផុសសំណួរបន្ថែម ដើម្បីបង្កើតល្បះសម្រាប់រូបភាពទី ១

  *ឧទាហរណ៍* រូបភាពបុរសម្នាក់កំពុងស្ទូចត្រី ។

  **គ្រូសួរ** : តើបុរសនេះកំពុងធ្វើអ្វី ?

  **សិស្សឆ្លើយ** : ស្ទូចត្រី ។

  **គ្រូថាឡើងវិញ** : គាត់កំពុងស្ទូចត្រី ។

  **សិស្សថាតាម** : គាត់កំពុងស្ទូចត្រី ។

  **គ្រូសួរ** : តើគាត់កំពុងស្ទូចត្រីនៅឯណា ?

  **សិស្សឆ្លើយ** : នៅមាត់ទន្លេ ។

  **គ្រូអាចនិយាយថា** : តើយើងអាចតម្រៀបពាក្យទាំងនេះ ជាល្បះយ៉ាងដូចម្ដេច ?
  គាត់កំពុងស្ទូចត្រីនៅឯមាត់ទន្លេ ។
- គ្រូធ្វើជាគំរូក្នុងការសរសេរ និងតែងល្បះ
- គ្រូនិយាយ ៖ ឥឡូវនេះយើងនាំគ្នាសាកល្បងសរសេរល្បះនេះ

- គ្រូសរសេរល្បះនៅលើក្តារខៀនឱ្យសិស្សមើល
- គ្រូឱ្យសិស្សអានល្បះទាំងអស់គ្នានៅពេលគ្រូសរសេរចប់ ។

- គ្រូនាំសិស្សហ្វឹកហាត់សរសេរពាក្យក្នុងល្បះ
  - គ្រូជួយសិស្សក្នុងការសរសេរពាក្យទាំងអស់គ្នា

    **គ្រូថា** : ឥឡូវនេះកូនទាំងអស់គ្នាសាកល្បងសរសេរ ។

    **គ្រូថា** : តើពាក្យទី ១ ជាពាក្យអ្វី ?

    **សិស្សឆ្លើយ** : គាត់ ។

    **គ្រូសួរ** : តើកូនសរសេរពាក្យនេះដូចម្តេច ? តើពាក្យគាត់ មានអក្សរអ្វីខ្លះ ?
  - គ្រូអាចឱ្យសិស្សទះដៃតាមចំនួនព្យាង្គ
  - គ្រូនាំសិស្សធ្វើបន្តសម្រាប់ពាក្យដទៃទៀតនៅក្នុងល្បះ " គាត់កំពុងស្ទូចត្រីនៅឯមាត់ទន្លេ "
  - គ្រូលើកទឹកចិត្តឱ្យសិស្សអានពាក្យ ខណៈដែលសរសេរពាក្យនីមួយៗ ។
- គ្រូឱ្យសិស្សអានល្បះដែលបានសរសេររួចទាំងអស់គ្នា
- គ្រូលុបពាក្យលើក្តារខៀន រួចឱ្យសិស្សសាកល្បងសរសេរល្បះឡើងវិញដោយខ្លួនឯងដាក់ក្នុងសៀវភៅរបស់គេ ។

### ការហ្វឹកហាត់

- គ្រូឱ្យសិស្សពិភាក្សាគ្នាពីរូបភាពដដែល ឬរូបភាពផ្សេងៗទៀតជាដៃគូ ។ បន្ទាប់មកសរសេរល្បះដោយប្រើពាក្យគន្លឹះ ដែលមានន័យទាក់ទងនឹងរូបភាព
- គ្រូដើរជួយសម្របសម្រួលនៅពេលសិស្សសរសេរ
- គ្រូឱ្យសិស្សអានល្បះដែលបានសរសេររួច ជាដៃគូ រួចជាបុគ្គល
- គ្រូឱ្យសិស្សដើរមើលកិច្ចការមិត្តភក្តិផ្សេងៗទៀត
- សិស្ស និងគ្រូអាចបន្ថែមគំនិត រួចកែកំហុស ។

## ៦.៧ លំនាំបង្រៀននិយាយ

### វត្ថុបំណង

- ប្រាប់សំនួនពាក្យ និងរបៀបនិយាយរៀបរាប់ ឬសន្ទនាតាមប្រធានបទបានត្រឹមត្រូវតាមរយៈរូបភាព អត្ថបទ សន្ទនាគំរូ និងសំណួររបស់គ្រូ ។
- និយាយរៀបរាប់ ឬសន្ទនាអំពី (ព័ត៌មានផ្ទាល់ខ្លួន សមាជិកក្នុងគ្រួសារ សុខភាព ...) ដោយលើកដាក់សំឡេងបានច្បាស់លាស់  តាមរយៈការហ្វឹកហាត់និយាយជាដៃគូ ក្រុម ឬបុគ្គល ។
- មានទំនុកចិត្ត និងភាពក្លាហានក្នុងការនិយាយអំពីប្រធានបទអ្វីមួយ ។

### លំនាំបង្រៀន

- គ្រូសួរសំណួរផ្សារភ្ជាប់ចំណេះដឹង ឬបទពិសោធរបស់សិស្សទៅនឹងមេរៀនថ្មី
- គ្រូឱ្យសិស្សពិនិត្យរូបភាពក្នុងសៀវភៅសិស្ស រួចគ្រូសួរសំណួរអំពីរូបភាពនោះ
- គ្រូអានអត្ថបទសន្ទនាក្នុងសៀវភៅជាគំរូដោយលើកដាក់សំឡេង ។ គ្រូ និងសិស្សអានអត្ថបទជាមួយគ្នា
- គ្រូចែកសិស្សជាក្រុមតាមចំនួនតួអង្គក្នុងអត្ថបទសន្ទនា រួចឱ្យសិស្សមួយក្រុមអានសម្ដីរបស់តួអង្គមួយ ដោយលើកដាក់សំឡេងឱ្យបានត្រឹមត្រូវ (ប្រសិនបើជាអត្ថបទសន្ទនា) ។ ប្រសិនបើជាអត្ថបទពណ៌នា គ្រូឱ្យសិស្សអានអត្ថបទទាំងអស់គ្នា
- គ្រូសួរសំណួរយល់ដឹងលើអត្ថបទ (សំណួរក្នុងសៀវភៅ) និងសំណួរទាក់ទងនឹងរបៀប សន្ទនា ឬពណ៌នា ។ គ្រូកត់ចម្លើយសំខាន់ៗ ឬពាក្យគន្លឹះដាក់លើក្ដារខៀន ដើម្បីជួយសិស្សក្នុងការហ្វឹកហាត់និយាយដោយខ្លួនឯង ។

### ការហ្វឹកហាត់

- គ្រូចែកសិស្សជាក្រុមតូចៗ រួចពិភាក្សាគ្នារៀបចំខ្លឹមសារថ្មី ទាក់ទងនឹងបទពិសោធរបស់ខ្លួន ដើម្បីត្រៀមឡើងនិយាយ ដោយប្រើឈ្មោះផ្ទាល់ខ្លួន ឬមិត្តភក្តិ ។ គ្រូដើរស្ដាប់ និងសម្របសម្រួលការនិយាយរបស់ពួកគេ
- គ្រូហៅសិស្សឡើងសន្ទនា ឬនិយាយពណ៌នានៅមុខសិស្សឯទៀត ។ គ្រូគប្បីជំរុញលើកទឹកចិត្តសិស្សដែលមិនសូវហ៊ាននិយាយ ។

*បញ្ជាក់ : គ្រូគប្បីទម្លាប់ឱ្យសិស្សនិយាយជាល្បះពេញលេញ មិនត្រូវឱ្យនិយាយកាត់ ឬកំបុតឡើយ ។*

## ៦.៨ លំនាំបង្រៀនវេយ្យាករណ៍

### វត្ថុបំណង

- ប្រាប់បានបញ្ញត្តិ (នាម គុណនាម កិរិយា ឬវណ្ណយុត្តផ្សេងៗ) តាមរយៈការសិក្សាឧទាហរណ៍ និងសំណួររបស់គ្រូ ។
- រក និងប្រើប្រាស់នាម គុណនាម កិរិយា ឬវណ្ណយុត្ត បានត្រឹមត្រូវតាមរយៈការហ្វឹកហាត់ធ្វើលំហាត់ជាបុគ្គល ដៃគូ ឬក្រុម ។
- មានទំនុកចិត្តក្នុងការប្រើប្រាស់ភាសា (នាម គុណនាម កិរិយា ឬវណ្ណយុត្តផ្សេងៗ) តាមក្បួនវេយ្យាករណ៍ក្នុងការនិយាយ និងសរសេរបានត្រឹមត្រូវ ។

### លំនាំបង្រៀន

- គ្រូសួរសំណួរផ្សារភ្ជាប់ចំណេះដឹងមានស្រាប់របស់សិស្សទៅនឹងមេរៀនថ្មី

*ឧទាហរណ៍* អំពីនាម ។ គ្រូបង្ហាញវត្ថុ ឬរូបភាព រួចសួរសិស្ស តើនេះជាអ្វី ? តើវាសម្គាល់មនុស្ស ឬសត្វ ឬវត្ថុ ?

- (ប្រសិនបើឧទាហរណ៍ខ្លី គ្រូគួរចម្លងដាក់លើក្ដារខៀន ។ គ្រូគប្បីប្រើដីសពណ៌ ឬគូសពីក្រោមពាក្យ ឬសញ្ញាដែលត្រូវបង្រៀន)
- គ្រូឱ្យសិស្សអានឧទាហរណ៍ ដោយផ្ដោតលើពាក្យ ឬសញ្ញាដែលប្រើដីសពណ៌ ឬមានគំនូសពីក្រោម
- គ្រូរើសយកពាក្យនីមួយៗមកសួរ ដើម្បីឈានទៅរកបញ្ញត្តិ ។ គ្រូសរសេរចម្លើយសំខាន់ៗនៅលើក្ដារខៀន

*ឧទាហរណ៍* តើពាក្យនេះសម្គាល់អ្វី ? (នាម) តើពាក្យ "..." បញ្ជាក់លក្ខណៈឱ្យពាក្យណា ? (គុណនាម) តើសញ្ញានេះមានឈ្មោះអ្វី ? គេប្រើវាសម្រាប់ធ្វើអ្វី ? គេប្រើវានៅកន្លែងណា ? (វណ្ណយុត្ត)

- គ្រូគប្បីរកឧទាហរណ៍បន្ថែមទៀត ឬឱ្យសិស្សអានអត្ថបទអំណានមុនៗ ហើយសួរសំណួរដើម្បីឱ្យសិស្សយល់ច្បាស់
- គ្រូឱ្យសិស្សពិភាក្សាគ្នាជាក្រុមតូចៗ ឬដៃគូ ដើម្បីរកបញ្ញត្តិរបស់នាម គុណនាម ឬរបៀបប្រើសញ្ញាផ្សេងៗ(បន្តក់ ខណ្ឌ)ដោយសួរថា តើនាមគឺជាអ្វី ? តើគេប្រើសញ្ញាខណ្ឌសម្រាប់ធ្វើអ្វី ? (ឱ្យសិស្សបិទសៀវភៅ)
- គ្រូអានបញ្ញត្តិ ឬរបៀបប្រើសញ្ញានៅក្នុងសៀវភៅសិស្សឱ្យសិស្សស្ដាប់ រួចឱ្យសិស្សអានបញ្ញត្តិ ឬរបៀបប្រើសញ្ញា នៅក្នុងប្រអប់ជាដៃគូ ។ គ្រូឱ្យសិស្សនិយាយប្រាប់បញ្ញត្តិ នោះ ឬរបៀបប្រើសញ្ញា ៣-៤នាក់ ពិសេសសិស្សរៀនយឺត ។

### ការហ្វឹកហាត់

- គ្រូឱ្យសិស្សធ្វើលំហាត់ជាដៃគូ រួចជាបុគ្គល ។ គ្រូដើរជួយសិស្សជួបការលំបាក
- គ្រូឱ្យសិស្សបង្ហាញចម្លើយគ្នាទៅវិញទៅមក ដើម្បីផ្ទៀងផ្ទាត់
- គ្រូធ្វើការកែលម្អ ។

## ៦.៩ លំនាំបង្រៀនបំណិន

បំណិន គឺជាភាពប៉ិនប្រសប់ធ្វើអ្វីមួយបានល្អដោយសារការអនុវត្តដដែលៗ ។ បំណិន គឺអ្វីដែលថ្មី ហើយសំខាន់ត្រូវឱ្យសិស្សរៀន និងចេះយកទៅអនុវត្តយ៉ាងប៉ិនប្រសប់ ដោយការអនុវត្តជាក់ស្ដែង ... ។

## វត្ថុបំណង

- ប្រាប់បានពីបញ្ញត្តិ បំណិន (វេវចនសព្ទ សទិសសព្ទ បដិសព្ទ តួអង្គ ទំនាក់ទំនងរវាងហេតុនិងផល ។ល ។) តាមរយៈការសិក្សាឧទាហរណ៍ និងសំណួររបស់គ្រូ ។
- រកបំណិន (វេវចនសព្ទ សទិសសព្ទ បដិសព្ទ តួអង្គ ទំនាក់ទំនង រវាងហេតុ និងផល ។ល ។) បានត្រឹមត្រូវតាមរយៈការធ្វើលំហាត់ក្នុងមេរៀន ។
- មានទំនុកចិត្តក្នុងការប្រើប្រាស់បំណិន (វេវចនសព្ទ សទិសសព្ទ បដិសព្ទ តួអង្គ ទំនាក់ទំនងរវាងហេតុ និងផល ។)

## លំនាំបង្រៀន

- គ្រូសួរសំណួរផ្សារភ្ជាប់ចំណេះដឹងមានស្រាប់ទៅនឹងមេរៀនថ្មី

  *ឧទាហរណ៍*   វេវចនសព្ទ

  *សំណួរ*   តើពាក្យអ្វីខ្លះមានន័យដូចគ្នានឹងពាក្យ " ញាំ "

  តើពាក្យទាំងនេះគេហៅថាពាក្យអ្វី ? ( វេវចនសព្ទ)
- គ្រូចម្លងឧទាហរណ៍ដាក់លើក្តារខៀន ឬបិទបណ្ណក្រដាស ដែលបានចម្លងឧទាហរណ៍ជាស្រេច ។ គូសពីក្រោម ឬសរសេរពាក្យគន្លឹះដោយដីសពណ៌
- គ្រូអានឧទាហរណ៍ រួចឱ្យសិស្សអានទាំងអស់គ្នា ឬអានជាក្រុមតូចៗ
- គ្រូសួរសំណួរដើម្បីឈានទៅរកបញ្ញត្តិ ។ គ្រូកត់ចម្លើយសំខាន់ៗនៅលើក្តារខៀន ដើម្បីឱ្យសិស្សមើលយកជាគំនិតក្នុងការរកបញ្ញត្តិ
- គ្រូអាចរកឧទាហរណ៍បន្ថែមទៀត ដើម្បីឱ្យសិស្សយល់បានច្បាស់
- គ្រូឱ្យសិស្សពិភាក្សាជាក្រុម រកបញ្ញត្តិ ឬឆ្លើយនឹងសំណួរដោយឱ្យសិស្សបិទ សៀវភៅ (*ឧទាហរណ៍* តើវេវចនសព្ទគឺជាអ្វី ?)
- គ្រូឱ្យសិស្សអានបញ្ញត្តិក្នុងប្រអប់ជាដៃគូ ។ រួចឱ្យពួកគេថា បញ្ញត្តិឡើងវិញ ។

### ការហ្វឹកហាត់

- គ្រូឱ្យសិស្សធ្វើលំហាត់នៅក្នុងសៀវភៅជាដៃគូ និងជាបុគ្គល ។ គ្រូដើរជួយសិស្សដែលជួបការលំបាក
- គ្រូឱ្យសិស្សបង្ហាញចម្លើយគ្នាទៅវិញទៅមក ដើម្បីផ្ទៀងផ្ទាត់ចម្លើយ
- គ្រូធ្វើការកែលម្អ ។

## ៦.១០ លំនាំបង្រៀនអានរឿងនិទានឱ្យសិស្សស្តាប់ (ការស្តាប់)

### វត្ថុបំណង

- ប្រាប់សេចក្តីលម្អិតសំខាន់ៗនៃអត្ថបទ ឬរឿងនិទានបានត្រឹមត្រូវតាមរយៈសំណួរបំផុសរបស់គ្រូ ។
- និទានរឿងឡើងវិញ ឬសម្តែងល្បែងដើរតួបានត្រឹមត្រូវ តាមរយៈការហ្វឹកហាត់ និទានរឿង ។
- មានទម្លាប់យកចិត្តទុកដាក់ស្តាប់អត្ថបទ ឬរឿងនិទាន ដើម្បីយល់អត្ថន័យរបស់អត្ថបទ ។

### មុនពេលស្តាប់

- គ្រូឱ្យសិស្សសង្កេតរូបភាព
- គ្រូសួរសំណួរបំផុសអំពីរូបភាព ៖
  - តើកូនឃើញអ្វីខ្លះ ?
  - តើពួកគេកំពុងធ្វើអ្វី ?
  - តើកូនគិតថា ពួកគេកំពុងនៅឯណា ?
  - តើកូនគិតថា អត្ថបទនេះនិយាយអំពីអ្វី ?
- គ្រូសួរសំណួរផ្សារភ្ជាប់បទពិសោធរបស់សិស្សទៅនឹងសាច់រឿង ។

  *ឧទាហរណ៍* តើកូនមាន ... នៅផ្ទះឬទេ ?
- គ្រូអានចំណងជើងរឿងឬអត្ថបទ ។ គ្រូនាំសិស្សពិភាក្សាពីអត្ថន័យរបស់ពាក្យនៅក្នុងចំណងជើងដែលទាក់ទងនឹងសាច់រឿង
- គ្រូសួរសិស្សថា តើរឿងនេះនឹងនិយាយពីអ្វី ? តើកូនធ្លាប់ដឹងរឿងនេះដែរឬទេ ?

### ពេលស្តាប់

- គ្រូអានអត្ថបទឮៗឱ្យសិស្សស្តាប់ ដោយលើកដាក់សំឡេង ធ្វើកាយវិការ និងប្រើទឹកមុខសមស្របទៅនឹងសាច់រឿងឬខ្លឹមសារអត្ថបទ
- គ្រូផ្អាកការអាន ដើម្បីពន្យល់ពាក្យពិបាកខ្លះ
- គ្រូផ្អាកការអានរឿងត្រង់ផ្នែកសំខាន់ៗ ដើម្បីសួរសំណួរ ៖ តើមានអ្វីនឹងកើតឡើងបន្ទាប់មកទៀត ?

### ក្រោយពេលស្តាប់

- ពេលអានចប់ គ្រូសួរសំណួរមួយចំនួនដើម្បីស្ទាបស្ទង់ការយល់ដឹងរបស់សិស្ស ។

  *ឧទាហរណ៍*

  ក. សំណួរងាយៗដូចជា ៖ អ្នកណា ? អ្វី ? ឯណា ? នៅពេលណា ? នៅកន្លែងណា ?

២. សំណួរកម្រិតខ្ពស់បន្ថែម អាស្រ័យទៅលើខ្លឹមសារសំខាន់ៗនៃរឿង ឬអត្ថបទ ។

- គ្រូសួរសំណួរដើម្បីជួយដល់សិស្សក្នុងការនិយាយរឿងឡើងវិញ ៖
  - តើរឿងនេះមានតួអង្គណាខ្លះ ?
  - តើរឿងនេះបានកើតឡើងនៅពេលណា ? កន្លែងណា ?
  - តើយើងបានឃើញអ្នកណាមុនគេនៅក្នុងសាច់រឿង ?
  - តើដំបូងមានអ្វីកើតឡើង (ឈ្មោះតួអង្គ) ? តើមានអ្វីកើតឡើងបន្ទាប់ ? តើមានបញ្ហាអ្វី ? តើគាត់ដោះស្រាយបញ្ហាតាមរបៀបណា ? តើគាត់បានធ្វើអ្វី ? តើរឿងនេះចប់ដោយរបៀបណា ?
- គ្រូឱ្យសិស្សសង្ខេប ឬនិទានរឿងជាដៃគូ រួចឱ្យអ្នកស្ម័គ្រចិត្តឡើងសង្ខេបរឿងដោយប្រើពាក្យផ្ទាល់ខ្លួន ។

## ៦.១១ លំនាំបង្រៀនតែងសេចក្ដីបែបពណ៌នា

### វត្ថុបំណង

- ប្រាប់បានពីគំនិត ឬខ្លឹមសារសម្រាប់ពណ៌នាអំពីមនុស្ស សត្វ ទីកន្លែង និងព្រឹត្តិការណ៍ តាមរយៈការសិក្សាអត្ថបទគំរូ និងសំណួររបស់គ្រូ ។
- សរសេរតែងសេចក្ដីពណ៌នាអំពីមនុស្ស សត្វ ទីកន្លែង និងព្រឹត្តិការណ៍ផ្សេងៗបានត្រឹមត្រូវ តាមរយៈការហ្វឹកហាត់រៀបរាប់ដោយមាត់ទទេ និងដោយសរសេរតាមគម្រោងតែង ។
- មានទំនុកចិត្តក្នុងការសរសេរតែងសេចក្ដីបែបពណ៌នាអំពីមនុស្ស សត្វ ទីកន្លែង និងព្រឹត្តិការណ៍ផ្សេងៗដោយប្រើគំនិតផ្ទាល់ខ្លួន ។

### លំនាំបង្រៀន

#### ក. ការសិក្សាអត្ថបទគំរូ

- គ្រូសួរសំណួរ ដើម្បីផ្សារភ្ជាប់ចំណេះដឹងមានស្រាប់ ឬបទពិសោធរបស់សិស្សទៅនឹងមេរៀនថ្មី គ្រូសរសេរចំណងជើងអត្ថបទដាក់លើក្ដារខៀន ។ គ្រូឱ្យសិស្សអានចំណងជើង រួចសួរសិស្សអំពីអត្ថន័យនៃចំណងជើងនោះ
- គ្រូឱ្យសិស្សសង្កេតរូបភាពនៅក្នុងសៀវភៅសិស្ស រួចក៏សួរសំណួរមួយចំនួនអំពីរូបភាពនោះ
- គ្រូឱ្យសិស្សប៉ាន់ស្មានខ្លឹមសារអត្ថបទដោយសួរសិស្សថា តើអត្ថបទនេះនិយាយពីអ្វី ?
- គ្រូឱ្យសិស្សអានអត្ថបទដោយស្ងៀមស្ងាត់ និងរហ័សបំផុត ដើម្បីរកពាក្យពិបាកអាន និងពិបាកយល់ន័យ ។ បន្ទាប់មក គ្រូ ឬសិស្សឡើងសរសេរពាក្យទាំងនោះនៅលើក្ដារខៀន ។

- គ្រូដឹកនាំសិស្សធ្វើការហ្វឹកហាត់អានពាក្យ ពន្យល់ន័យនៃពាក្យទាំងនោះ
- គ្រូ ឬសិស្សអានអត្ថបទជាគំរូ
- គ្រូដឹកនាំសិស្សហ្វឹកហាត់អានជារួម ជាបុគ្គល ជាដៃគូ និងជាក្រុម ដោយផ្ដោតលើបែបបទការចេះលើកដាក់សំឡេង ការគោរពសញ្ញាសម្គ័ន្ធ និងការធ្វើកាយវិការបានត្រឹមត្រូវ
- គ្រូឱ្យសិស្សអានសំណួរក្នុងសៀវភៅសិស្ស ។ គ្រូបញ្ជាក់ប្រាប់សិស្សថា សិស្សនឹងត្រូវឆ្លើយសំណួរទាំងនេះ នៅពេលអានអត្ថបទដោយស្ងៀមស្ងាត់ចប់
- គ្រូឱ្យសិស្សអានអត្ថបទដោយស្ងៀមស្ងាត់ដើម្បីស្វែងយល់ខ្លឹមសារអត្ថបទ ។ ក្នុងការអានស្ងាត់នេះ គ្រូត្រូវកំណត់ពេលវេលាសម្រាប់ឱ្យសិស្សអានឱ្យបានច្បាស់លាស់
- គ្រូសួរសំណួរក្នុងសៀវភៅឱ្យសិស្សឆ្លើយ ដើម្បីបញ្ជាក់ពីការយល់ខ្លឹមសារអត្ថបទរបស់សិស្ស ។ មុនពេលសួរសំណួរគ្រូត្រូវឱ្យសិស្សបិទសៀវភៅ ។ បើមានសំណួរណាសិស្សឆ្លើយខុស គ្រូឱ្យសិស្សបើកសៀវភៅអានផ្ទៀងផ្ទាត់ត្រង់ចំណុចនោះឡើងវិញ
- គ្រូសួរសំណួរដើម្បីទាញខ្លឹមសារអត្ថបទមកបញ្ចូលក្នុងគម្រោងតែងសេចក្ដី ៖
  - តើផ្នែកទី១ នៃអត្ថបទគេពណ៌នាពីអ្វីខ្លះ ? តើផ្នែកទី១នេះ គេហៅថាអ្វី ? (សេចក្ដីផ្ដើម)
  - តើផ្នែកទី២ នៃអត្ថបទគេពណ៌នាពីអ្វីខ្លះ ? តើផ្នែកទី២នេះ គេហៅថាអ្វី ? (តួសេចក្ដី)
  - តើផ្នែកទី៣ នៃអត្ថបទគេពណ៌នាពីអ្វីខ្លះ ? តើផ្នែកទី៣នេះ គេហៅថាអ្វី ? (សេចក្ដីបញ្ចប់)
- គ្រូឱ្យសិស្សសង្ខេបខ្លឹមសារមេរៀនឡើងវិញ
- គ្រូធ្វើការបូកសរុបនិងសង្ខេបខ្លឹមសារមេរៀន
- គ្រូឱ្យសិស្សចម្លងមេរៀនដាក់ក្នុងសៀវភៅរៀងៗខ្លួន ។

## ខ. ការសិក្សាគម្រោង

- គ្រូសរសេរប្រធានបទតែងសេចក្ដីនៅលើក្ដារខៀន ។ គូសពីក្រោមពាក្យ ឬឃ្លាសំខាន់ៗ
- គ្រូហៅសិស្សអានប្រធានបទ ២-៣នាក់ ។ គ្រូសួរសំណួរ ៖ តើប្រធានបទនេះចង់ឱ្យអ្នកធ្វើអ្វី ?(ចម្លើយ ៖ ពណ៌នាអំពី ... ) ។ គ្រូប្រាប់សិស្សថា តែងសេចក្ដីបែបពណ៌នាគឺការរៀបរាប់ ឬនិយាយអំពីអ្វីមួយ ឱ្យបានគ្រប់ជ្រុងជ្រោយ ដោយចងក្រងជាអត្ថបទមួយពេញលេញដែលមានផ្នែកធំៗ៣ គឺផ្ដើមសេចក្ដី តួសេចក្ដី និងសេចក្ដីបញ្ចប់ ។ ថ្ងៃនេះ កូននឹងរៀនពណ៌នាអំពី ...
- គ្រូឱ្យសិស្សអានអត្ថបទគំរូជាដៃគូ
- គ្រូសួរសំណួរដើម្បីបង្កើតគម្រោងតែង ហើយសរសេរចម្លើយដាក់ក្នុងគម្រោងបណ្ដើរៗទៅតាមផ្នែកនីមួយៗ ។ *ឧទាហរណ៍* ការពណ៌នាអំពីមនុស្ស

- គ្រូសួរសិស្សដើម្បីប្រមូលគំនិត ៖
  - តើសំណេរនេះចែកចេញជាប៉ុន្មានផ្នែក ?
  - តើផ្នែកទី ១ គេប្រាប់អំពីអ្វីខ្លះ ? (ចម្លើយ ៖ ប្រាប់ឈ្មោះ អាយុ ទីកន្លែង)
  - តើផ្នែកទី ១ នេះគេហៅថាអ្វី ? (សេចក្ដីផ្ដើម)
- គ្រូសរសេរនៅក្នុងគម្រោង
- គ្រូសួរសំណួរបន្ត ៖
  - តើក្នុងផ្នែកទី ២ គេប្រាប់អ្វីខ្លះក្នុងល្បះដំបូង ? (មាឌ កម្ពស់ សម្បុរ សក់ ច្រមុះ ភ្នែក ដៃ ជើង ...)
  - តើបន្ទាប់មកគេប្រាប់អ្វីខ្លះទៀត ? (គុណសម្បត្តិ និងគុណវិបត្តិ)
  - តើផ្នែកទី២នេះគេហៅថាអ្វី ? (តួសេចក្ដី)
  - តើនៅផ្នែកទី៣ គេប្រាប់អ្វី ? (ចំណាប់អារម្មណ៍របស់អ្នកសរសេរ ឬទឹកចិត្តរបស់អ្នកសរសេរ)
  - តើនៅផ្នែកទី៣ គេហៅថាអ្វី ? (សេចក្ដីបញ្ចប់)
- គ្រូសរសេរគម្រោងតែងសេចក្ដីទាំងមូលដាក់លើក្ដារខៀន
- គ្រូគប្បីប្រាប់សិស្សអំពីរបៀបសរសេរអត្ថបទ របៀបចូលបន្ទាត់ ចុះបន្ទាត់នៅតាមផ្នែកនីមួយៗ ។ ប្រសិនបើឱ្យសិស្សសរសេរជាកថាខណ្ឌ មិនចាំបាច់ចុះបន្ទាត់ទេ គឺចូលបន្ទាត់តែម្ដងហើយសរសេរជាប់គ្នារហូត ។
- គ្រូឱ្យសិស្សអានគម្រោងឡើងវិញតាមផ្នែកនីមួយៗ រួចគ្រូសួរសំណួរ ៖
  - តើក្នុងសេចក្ដីផ្ដើមគេប្រាប់អ្វីខ្លះ ?
  - តើនៅក្នុងតួសេចក្ដីចែកជាប៉ុន្មានផ្នែក ? ផ្នែកទី១ត្រូវប្រាប់អ្វីខ្លះ? ផ្នែកទី ២ ត្រូវប្រាប់អ្វីខ្លះ?
  - តើនៅក្នុងសេចក្ដីបញ្ចប់ត្រូវប្រាប់អ្វី ?

### គ. ការហ្វឹកហាត់

- គ្រូសរសេរលំហាត់តែងសេចក្ដីនៅលើក្ដារខៀន ហើយគូសពីក្រោមឃ្លាសំខាន់ ឬពាក្យគន្លឹះ
- គ្រូឱ្យសិស្សអានប្រធានបទ ២-៣នាក់ ។ គ្រូសួរ តើប្រធាននេះតម្រូវឱ្យប្អូនសរសេរអំពីអ្វី ?

- គ្រូសួររំឭកឡើងវិញ អំពីគម្រោងតែងសេចក្ដី ហើយសរសេរចម្លើយលើក្ដារខៀន ឬបិទផ្ទាំងគម្រោងដែលបានសរសេរពីថ្ងៃមុន
- គ្រូនាំសិស្សបង្កើតសេចក្ដីផ្ដើមដោយសរសេរលើក្រដាសព្រាង ។ គ្រូឱ្យសិស្សគិតគ្នាជាដៃគូ រួចគ្រូហៅដៃគូនីមួយៗនិយាយរៀបរាប់តាមគំនិតរបស់ពួកគេ ដោយផ្អែកលើគម្រោង ។ គ្រូជួយកែតម្រូវ ឬបំពេញបន្ថែមឱ្យបានល្អប្រសើរ ប្រសិនបើការរៀបរាប់របស់គេមិនបានត្រឹមត្រូវ
- គ្រូឱ្យសិស្សសាកល្បងសរសេរសេចក្ដីផ្ដើមជាដៃគូតាមលំដាប់លំដោយ នៃចំណុចដែលមាននៅក្នុងគម្រោង ។ គ្រូដើរជួយសម្របសម្រួល ពិសេសសិស្ស ដែលជួបការលំបាក
- គ្រូនាំសិស្សសរសេរតួសេចក្ដី គ្រូឱ្យសិស្សហាត់រៀបរាប់ជាដៃគូដោយមាត់ទទេហើយផ្អែកលើគម្រោង ។ គ្រូហៅសិស្សឱ្យនិយាយ ហើយគ្រូជួយកែសម្រួល
- គ្រូឱ្យសិស្សសាកល្បងសរសេរតួសេចក្ដីតាមលំដាប់លំដោយនៃចំណុចដែលមាននៅក្នុងគម្រោង ។ គ្រូដើរពិនិត្យនិងជួយសម្របសម្រួល
- គ្រូឱ្យសិស្សបន្តធ្វើផ្នែកទីពី ឬសេចក្ដីបញ្ចប់ទៀត ។ គ្រូឱ្យសិស្សហាត់រៀបរាប់ជាដៃគូដោយមាត់ទទេ ហើយផ្អែកលើគម្រោង ។ គ្រូហៅសិស្សឱ្យនិយាយ ហើយគ្រូជួយកែសម្រួល
- គ្រូឱ្យសិស្សសរសេរសេចក្ដីបញ្ចប់តាមលំដាប់លំដោយនៃចំណុចដែលមាននៅក្នុងគម្រោង ។ គ្រូដើរពិនិត្យនិងជួយកែសម្រួល
- គ្រូឱ្យសិស្សដៃគូពិនិត្យអត្ថបទរបស់ខ្លួនឡើងវិញ ទៅតាមសំណួររបស់គ្រូ ឬគ្រូអាចសរសេរនៅលើផ្ទាំងក្រដាសធំ ដើម្បីឱ្យសិស្សមើល ហើយផ្ទៀងផ្ទាត់តាម
  - តើអត្ថបទរបស់អ្នកមានសេចក្ដីផ្ដើម តួសេចក្ដី និង សេចក្ដីបញ្ចប់ហើយឬនៅ ?
  - តើផ្នែកនីមួយៗមានចូលបន្ទាត់ដែរឬទេ ? តើមានចុះបន្ទាត់ដែរឬទេ ?
  - តើក្នុងផ្នែកនីមួយៗមានគ្រប់ចំណុចដូចគម្រោងតែងហើយឬនៅ ?
  - តើល្បះនីមួយៗមានសញ្ញាខណ្ឌដែរឬទេ ?
  - តើពាក្យណាខ្លះដែលអ្នកមិនទាន់ចេះសរសេរ ? ប្រសិនបើមានគ្រូនឹងប្រាប់ ។
- គ្រូឱ្យសិស្សអានស្ងាត់ៗឡើងវិញម្ដងទៀត
- គ្រូហៅសិស្សដែលតែងបានល្អ អានអត្ថបទឱ្យមិត្តភក្តិទាំងអស់ស្ដាប់ ។ គ្រូប្រមូលកិច្ចការសិស្សដាក់ពិន្ទុ ហើយបិទនៅជញ្ជាំង ។

# អត្ថបទស្ដាប់

## មេរៀនទី ១៦ : អ្នកមានគុណ

យើងជាកុលបុត្រ កុលធីតាខ្មែរ ត្រូវចេះគោរពស្រឡាញ់ និងមានចិត្តកតញ្ញូ ចំពោះអ្នកមានគុណរបស់យើង ។

អ្នកមានគុណមានដូចជា ជីដូនជីតា ឪពុកម្ដាយ អាណាព្យាបាល លោកគ្រូ អ្នកគ្រូ ជាដើមដែលបានចិញ្ចឹមបីបាច់ថែរក្សា និងបង្ហាត់បង្រៀនយើងតាំងពីវ័យកុមារ រហូតដល់វ័យសិក្សាមានចំណេះដឹងខ្ពង់ខ្ពស់ មានសេចក្ដីថ្លៃថ្នូរ និងមានអនាគតល្អ ។ អ្នកមានគុណ បានខិតខំរកប្រាក់សម្រាប់ចំណាយចំពោះការសិក្សារបស់កូន ។

ដូច្នេះយើងត្រូវខំសិក្សា និងគោរពលោក ព្រមទាំងជួយចិញ្ចឹមគាត់វិញឱ្យសមជាកូនកតញ្ញូ ។

## មេរៀនទី ២២ : រឿងកុមារចេះសន្សំសំចៃ

ថ្ងៃមួយ ពេលចេញលេង សំណាង និងសុភីបានអង្គុយនិយាយគ្នា ក្រោមម្លប់ឈើ ។ សំណាងនិយាយទៅកាន់សុភី ៖ " សុភី! ពេលដែលខ្ញុំខ្ចីសៀវភៅមេរៀនឯងមើល ខ្ញុំឃើញមានស្នាមហែក និងគូសវាសលេងផ្ដេសផ្ដាសទៀតផង " ។

សុភី : មែនឬ ?

សំណាង : មែន! សុភីឯង មិនត្រូវគូសវាសក្នុងសៀវភៅមេរៀន និងហែកក្រដាសបត់លេង ឬសរសេររំលងសន្លឹកទេ ។ ឯងត្រូវសរសេរឱ្យដល់សន្លឹកចុងក្រោយសិន ចាំប្ដូរសៀវភៅថ្មី ។

សុភី : សំណាង! ខ្ញុំអរគុណឯងណាស់ ដែលបានជួយប្រាប់ និងរំឭកពីរបៀបថែរក្សារបស់ប្រើប្រាស់ និងសន្សំសំចៃ ។ ខ្ញុំនឹងធ្វើតាមឯង ។

ចាប់ពីពេលនោះមក សុភីចេះសន្សំសំចៃ ទាំងប្រាក់កាស និងរបស់របរប្រើប្រាស់ផ្សេងៗ ដូចសំណាងដែរ ។

## មេរៀនទី ៣០ ៖ ទឹកជំនន់នៅភូមិខ្ញុំ

កាលពីខែមុន មានភ្លៀងធំធ្លាក់ជាប់គ្នាច្រើនថ្ងៃឥតស្រាកស្រាន្ត ។

ភូមិមួយចំនួន ត្រូវលិចលង់ស្ទើរតែទាំងអស់ ។ នៅតាមផ្លូវកម្ពស់ទឹកបានឡើងដល់មួយម៉ែត្រ ។ អ្នកភូមិខ្ញុំ បាននាំគ្នាជញ្ជូនកូនចៅ សត្វពាហនៈ គោ ក្របី និងជ្រូក មាន់ ទា ព្រមទាំងសម្ភារៈ ឧបករណ៍ប្រើប្រាស់សំខាន់ៗទៅកាន់ទីទួលសុវត្ថិភាព ។ ទឹកជំនន់ឆ្នាំនេះ បានបង្កគ្រោះមហន្តរាយជាច្រើន ធ្វើឱ្យប៉ះពាល់បាត់បង់អាយុជីវិតមនុស្ស សត្វ ខូចខាតទ្រព្យសម្បត្តិ ផ្ទះសម្បែង សាលារៀន មណ្ឌលសុខភាព ស្រូវ ដំណាំ និងស្ពាន ផ្លូវ យ៉ាងធ្ងន់ធ្ងរ ។ ទឹកជំនន់បាននាំមកជាមួយនូវកាកសំណល់ និងលាមកគ្រប់ប្រភេទដែលជាហេតុបណ្ដាលឱ្យមានជំងឺរាកដល់អ្នកដែលខ្វះអនាម័យ ។ ក្រោយគ្រោះមហន្តរាយនេះ យើងឃើញមានក្រុមសង្គ្រោះ បានរុករកអ្នករងគ្រោះ ។ គណៈកម្មាធិការជាតិគ្រប់គ្រងគ្រោះមហន្តរាយ កាកបាទក្រហមកម្ពុជា អង្គការមនុស្សធម៌ជាតិ អន្តរជាតិ និងសប្បុរសជនជាច្រើនទៀតបានចុះជួយឧបត្ថម្ភស្បៀងអាហារ ថ្នាំពេទ្យ និងសម្ភារៈប្រើប្រាស់ចាំបាច់នានា ដើម្បីសម្រួលទុក្ខលំបាកនៃជនរងគ្រោះ និងបានណែនាំប្រជាជននៅពេលមានទឹកជំនន់ ឱ្យញ៉ាំទឹកឆ្អិនជានិច្ច ។

ដើម្បីត្រៀមបង្ការជាមុន ពេលមានគ្រោះទឹកជំនន់ យើងត្រូវត្រៀមសម្ភារៈ បរិក្ខារសង្គ្រោះ ទីទួលសុវត្ថិភាព សាងសង់ផ្ទះ សាលារៀនឱ្យខ្ពស់ផុតពីទឹក ព្រមទាំងសាងសង់ទំនប់ជាដើម ។

## មេរៀនទី ៤៤ ៖ ដំណាំដំឡូងមី

ដំឡូងមី គឺជាដំណាំដែលប្រជាពលរដ្ឋខ្មែរនិយមដាំនៅតាមភូមិដ្ឋាន ជាអាហារបន្ទាប់បន្សំតាមចម្ការ និងសម្រាប់ឧស្សាហកម្ម ។

បច្ចុប្បន្ននេះ ដំឡូងមីកំពុងមានតម្រូវការខ្ពស់ ។ គេយកមើមដំឡូងមីទៅបញ្ចូលក្នុងរោងចក្រ ដើម្បីកែច្នៃផលិតជាម្សៅមី និងចំណីសត្វ ។ លើសពីនេះ ម្សៅដំឡូងមីមានសារៈសំខាន់បំផុតក្នុងការធ្វើជានំចំណីសម្រាប់បរិភោគដូចជា នំប៉័ង នំប៉ាវ មី ។ល ។ មុខរបរដាំដំឡូងមី ជាជម្រើសមួយរបស់កសិករយើងដើម្បីបង្កើនប្រាក់ចំណូលរបស់ពួកគាត់ ។ ទីផ្សារដំឡូងមីកំពុងផ្តល់ឱកាសដ៏មានសារៈសំខាន់ ដល់ប្រជាជនគ្រប់តំបន់ ។ គេនាំគ្នាដាំដំឡូងមី នៅពេលដែលមានចលនានាំចេញទៅទីផ្សារនៅក្រៅប្រទេស ។ ការកាត់ដើមដំឡូងមីដាំត្រង់ នាំឱ្យបានមើមច្រើនជាងការកាត់ចំហៀង ។ ដើម្បីទុកដំឡូងមីឱ្យបានយូរ គេត្រូវការឡូចំហុយសម្ងួតមើមវា ។

ដំឡូងមី ជាដំណាំយ៉ាងសំខាន់ដែលបានលើកកម្ពស់ជីវភាពប្រជាជន និងសេដ្ឋកិច្ចជាតិឱ្យកាន់តែប្រសើរថែមមួយកម្រិតទៀត ។

## មេរៀនទី៥៩ : រឿងតាពស្មោះត្រង់

នៅក្រុងឡុងដ៍ ប្រទេសអង់គ្លេសសម័យមុន មានសួនចិញ្ចឹមសត្វមួយ ។ បើនរណាចង់ចូលទស្សនា ត្រូវទិញសំបុត្រ ឬគ្មានប្រាក់ទិញអាចយកឆ្កែ ឆ្មាជាចំណីសម្រាប់សត្វធំៗជំនួសវិញ ។

ថ្ងៃមួយ មានបុរសកម្សត់ម្នាក់ចង់ចូលមើលសត្វ តែគ្មានប្រាក់ទិញសំបុត្រក៏ចាប់ឆ្កែតឿតាមផ្លូវប្ដូរថ្លៃសំបុត្រចូលក្នុងសួនសត្វ ។ ឆ្មាំទ្វារបានឱ្យគាត់ចូល រួចយកឆ្កែនោះបោះចូលទៅក្នុងទ្រុងសិង្ហ ។ ឆ្កែឃើញសិង្ហទម្លាក់កន្ទុយ វាក៏ដើរទៅកៀនទ្រុងសិង្ហ ។ សិង្ហដើរហិតឆ្កែយ៉ាងយូរ ឯឆ្កែក៏ផ្ដួលខ្លួន រួចផ្ងារលើកជើងបួនឡើងលើ និងបក់កន្ទុយ ។ សិង្ហលើកជើងស្ទាបខ្លួនឆ្កែបង្វេរចុះឡើង រួចទាញឱ្យក្រោក ។ សិង្ហ និងឆ្កែតឿ លោតហក់លេងសម្ដែងភាពស្និទ្ធស្នាលបំផុត ។ ថ្ងៃមួយ ឆ្មាំបានបោះសាច់ឱ្យវាស៊ី វាហែកចែកឱ្យឆ្កែស៊ីដែរ ។ សត្វទាំងពីររស់នៅជាមួយគ្នាយ៉ាងសុខស្រួលអស់រយៈពេលជិតមួយឆ្នាំ ។ ក្រោយមក ឆ្កែមានជំងឺរហូតដល់ងាប់ ។ សិង្ហស្រែករោទ៍ហក់លោតក្នុងទ្រុងចុះឡើង រហូតអស់កម្លាំងហើយមិនព្រមឱ្យឆ្មាំយកសពឆ្កែចេញពីទ្រុងសោះ ។ ក្រោយមក ឆ្មាំទ្វារក៏យកឆ្កែតឿមួយទៀតបោះចូលក្នុងទ្រុង សិង្ហហក់ខាំឆ្កែថ្មីរហូតងាប់ ។

សិង្ហកើតទុក្ខមិនស៊ីចំណីប្រាំថ្ងៃ ដល់ថ្ងៃទីប្រាំមួយ វាក៏ងាប់បាត់ទៅ ។

## មេរៀនទី ៦០ : រឿងភូមិ ឃុំ មានសុវត្ថិភាព

ថ្ងៃនេះ នៅមុខសាលាឃុំមានមនុស្សជាច្រើនកុះករ កំពុងឈរអើតប្រជ្រៀតគ្នាមើលសេចក្ដីប្រកាសមួយ ។

ស៊ីថា និងប្រុញ្ញ បានចេញពីសាលា ហើយដើរកាត់ទីនោះ ។ ពួកគេឆ្ងល់ក៏នាំគ្នាចូលទៅទីនោះដែរ ។ ស៊ីថាសួរទៅមីងម្នាក់ ៖

"សូមទោសមីង! តើគេកំពុងធ្វើអ្វី ? " មីងឆ្លើយ ៖ " អូ! ក្មួយ គេកំពុងមើលសេចក្ដីប្រកាសព័ត៌មានថ្មី ដែលលោកមេឃុំទើបតែបិទផ្សាយឱ្យប្រជាជនឃុំយើងដឹង "។ ប្រុញ្ញសួរបន្ត ៖ "តើព័ត៌មានអំពីអ្វីទៅមីង ? " មីងឆ្លើយ ៖ " គឺជាព័ត៌មានស្ដីពីភូមិ ឃុំមានសុវត្ថិភាព "។ ស៊ីថាឆ្ងល់សួរទៀត ៖ "តើភូមិ ឃុំមានសុវត្ថិភាពនោះមានន័យដូចម្ដេចទៅមីង ? " មីងពន្យល់ ៖ " អូ! ល្អណាស់ ក្មួយៗចេះឆ្ងល់នេះល្អហើយ "។ ភូមិ ឃុំមានសុវត្ថិភាព មានន័យថា ភូមិ ឃុំ ដែលគ្មានប្រាំបួនប្រការ ដែលតម្រូវឱ្យមេភូមិ ប្រជាការពារ និងសហគមន៍យើងត្រូវរួបរួមសាមគ្គីគ្នា ដើម្បីថែរក្សាភូមិឃុំឱ្យបានសុខសាន្ត ។ ប្រាំបួនប្រការនេះគឺ ៖

១. គ្មានអំពើលួច ឆក់ប្លន់

២. គ្មានការផលិតចែកចាយ និងប្រើប្រាស់គ្រឿងញៀនខុសច្បាប់

៣. គ្មានអំពើអនាចារ ការជួញដូរស្ត្រី កុមារ និងអំពើហិង្សាក្នុងគ្រួសារ

៤. គ្មានក្មេងទំនើង

៥. គ្មានការលេងល្បែងស៊ីសង គ្មានការប្រើប្រាស់អាវុធខុសច្បាប់ និងបទល្មើសគ្រប់ប្រភេទ

៦. គ្មានគ្រោះថ្នាក់ចរាចរណ៍

៧. គ្មានគ្រោះថ្នាក់ដោយសារគ្រាប់យុទ្ធភ័ណ្ឌមិនទាន់ផ្ទុះ

៨. មានវិធានការទប់ស្កាត់ គ្រប់គ្រង និងឆ្លើយតបចំពោះគ្រោះមហន្តរាយប្រកបដោយប្រសិទ្ធភាព

៩. គ្មានការត្រួតពិនិត្យខុសច្បាប់ ។

ក្មេងទាំងពីរភ្ញាក់ព្រើត ញាក់មុខដាក់គ្នារួចឆ្លើយ ៖ " អូ! ពួកខ្ញុំយល់ច្បាស់ហើយមីង! អរគុណមីងច្រើន "។

អ៊ីចឹងខ្ញុំសូមជម្រាបលាមីងហើយ ។ តោះយើងទៅផ្ទះវិញ ។

*" យើងត្រូវចូលរួមរក្សាសុវត្ថិភាពភូមិយើងទាំងអស់គ្នា "*

មេរៀន
# រំឭក

# ស្រៈនិងព្យញ្ជនៈ

## ស្រៈនិស្ស័យ

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ

ៃ ោ ៅ ុំ ំ ាំ ះ ុះ េះ ោះ

## ស្រៈពេញតួ

អ អា ឥ ឦ ឧ ឩ ឪ ឫ ឬ ឭ ឮ ឯ ឰ ឱ ឳ

## ព្យញ្ជនៈ

| ព្យញ្ជនៈ ពួក អ | ព្យញ្ជនៈ ពួក អ៊ |
|---|---|
| ក្ក ខ្ខ | គ្គ ឃ្ឃ ង្ង |
| ច្ច ឆ្ឆ | ជ្ជ ឈ្ឈ ញ្ញ |
| ដ្ដ ឋ្ឋ ណ្ណ | ឌ្ឌ ឍ្ឍ |
| ត្ត ថ្ថ | ទ្ទ ធ្ធ ន្ន |
| ប្ប ផ្ផ | ព្ព ភ្ភ ម្ម |
| ស្ស ហ្ហ ឡ្ឡ អ្អ | យ្យ រ្រ ល្ល វ្វ |

## មេរៀនទី ១

# សាលាកុមារមេត្រី

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




សាលារៀនខ្ញុំ ជាសាលាកុមារមេត្រី ។

សាលារៀននេះសង់លើទីទួល មានបរិវេណធំទូលាយ និងរបងព័ទ្ធជុំវិញ ។ ក្នុងបរិវេណសាលារៀន មានអគារបីខ្នង ដប់ប្រាំបីបន្ទប់ ។ នៅក្នុងទីធ្លា មានដងទង់ជាតិ សួនច្បារ សួនកុមារ ទីលានកីឡា និងដើមឈើធំៗ ។ នៅខាងក្រោយអគារ មានសួនជីវៈចម្រុះ សួនបន្លែ និងបង្គន់អនាម័យសម្រាប់សិស្សប្រុស ស្រីផ្សេងពីគ្នា ។ ក្នុងបន្ទប់នីមួយៗ មានតុ កៅអី ក្ដារខៀន តាមជញ្ជាំងមានរូបភាព ពាក្យស្លោក និងមានតាំងស្នាដៃសិស្ស ។ល។ សាលារៀនខ្ញុំស្អាតគ្មានសំរាម និងមានពណ៌បៃតងស្រស់បំព្រងជានិច្ច ។

សិស្សទាំងអស់ពេញចិត្តនឹងការសិក្សានៅក្នុងសាលារៀននេះណាស់ ។ នៅចុងឆ្នាំ ពួកគេបានឡើងថ្នាក់ទាំងអស់គ្នា ហើយគ្មានសិស្សបោះបង់ចោលការសិក្សាឡើយ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

អគារ អានថា អៈ-គា

បរិវេណ អានថា ប-រិ-វេន

អនាម័យ អានថា អៈ-ណា-ម៉ៃ

ព័ទ្ធ អានថា ពាត់

ជានិច្ច អានថា ជា-និច

ខ. ពន្យល់ពាក្យ

បរិវេណ (ន.) : ទីជិតខាងដែលព័ទ្ធជុំវិញ ។

អគារ (ន.) : មន្ទីរ ផ្ទះ រោង ។

សួនជីវៈចម្រុះ (ន.) : ច្បារដំណាំដែលមានរុក្ខជាតិច្រើនមុខនៅក្នុងសាលារៀន (រុក្ខជាតិគោក អាកាស និងក្នុងទឹក) ។

ពាក្យស្លោក (ន.) : ពាក្យសម្រាប់អប់រំ ទូន្មាន ។

កុមារមេត្រី (គុ.) : ដែលជាទីសប្បាយរីករាយរបស់កុមារ ។

គ. បដិសព្ទ

ធំ ≠ តូច

ស្រស់ ≠ ស្រពោន

ឃ. វេវចនសព្ទនឹងពាក្យ “ មេត្រី ”

មេត្រី ស្រឡាញ់ ស្នេហា ប្រតិព័ទ្ធ រាប់អាន រាប់រក

ង. សទិសសព្ទនឹងពាក្យ “ ជុំ ”

ជុំ (កិ.) : មូលគ្នា ដំណើរវិលមកកន្លែងដដែលវិញ ។ *ឧទាហរណ៍* ដើរមួយជុំ ។

ជំ (កិ.) : ពិគ្រោះ ស្នើឱ្យដឹងការណ៍ ។ *ឧទាហរណ៍* ចាំជំញាតិមើលសិន ។

## សំណួរ

១. តើសាលារៀននេះមានបរិវេណដូចម្ដេច ?

២. តើក្នុងទីធ្លាសាលារៀននេះមានអ្វីខ្លះ ?

៣. តើនៅខាងក្រោយអគារមានអ្វីខ្លះ ?

៤. តើនៅក្នុងបន្ទប់រៀនមានអ្វីខ្លះ ?

៥. តើប្អូនចូលចិត្តរៀននៅសាលានេះដែរឬទេ ? ពីព្រោះអ្វី ?

## លំហាត់

១. ចូរអានពាក្យខាងក្រោមដោយមិនបាច់ផ្សំ និងប្រកបឱ្យបានត្រឹមត្រូវ ។

មេត្រី អគារ ជានិច្ច បរិវេណ សិស្សានុសិស្ស ព័ទ្ធ អនាម័យ

២. ចូរជ្រើសរើសពាក្យដែលទាក់ទងទីកន្លែងក្នុងសាលារៀនដាក់ក្នុងប្រអប់ឱ្យបានត្រឹមត្រូវ ។

| | | | |
|---|---|---|---|
| អគារ | សួនជីវៈចម្រុះ | សៀវភៅ | សួនច្បារ |
| ជ័រលុប | គ្រូ | បង្គន់អនាម័យ | បន្ទាត់ |

សួនច្បារ

# សំណេរ

ក. ចូរសរសេរតាមអានរៀបចំ ពាក្យ កន្សោមពាក្យ និងល្បះខាងក្រោម ។

សួនច្បារ អគារ ជានិច្ច សិស្សានុសិស្ស អនាម័យ

សាលារៀនខ្ញុំ ជាសាលាកុមារមេត្រី ។ សាលារៀននេះសង់លើទីទួល មានបរិវេណធំទូលាយ និងមានរបងព័ទ្ធជុំវិញ ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | |
|---|---|---|
| សួនច្បារ | ទង់ជាតិ | អគារ |

១. សាលារៀននេះមាន ....... បីខ្នង ។

២. នៅមុខអគារនីមួយៗមាន ......... ។

៣. កណ្តាលទីធ្លាមាន ..... ។

គ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | |
|---|---|---|
| ព័ទ្ធជុំវិញ | បរិវេណ | មេត្រី |

១. សាលារៀនខ្ញុំ ជាសាលាកុមារ ............ ។

២. សាលារៀននេះ មានបរិវេណធំទូលាយ និងរបង ........... ។

៣. ក្នុង ..............សាលារៀន មានអគារបីខ្នង ដប់ប្រាំបីបន្ទប់ ។

ឃ. ចូរតែងកថាខណ្ឌតាមសំណួរខាងក្រោម ៖

១. តើសាលារៀនជាកន្លែងអ្វី ?

២. តើសាលារៀនផ្តល់សេវាអ្វីខ្លះ ?

៣. តើចំណុចណាខ្លះ ដែលធ្វើឱ្យអ្នកស្រឡាញ់ចូលចិត្តសាលារៀនអ្នក ?

៤. តើអ្នកត្រូវធ្វើអ្វីខ្លះដើម្បីឱ្យសាលារៀនរបស់អ្នកមានបរិស្ថានល្អស្អាត ?

ង. ចូររំឭកអំពីរបៀបគូសបន្ទាត់សរសេរអក្សរផ្ចង់ ។

## មេរៀនទី ២

# វេវចនសព្ទ

**បំណិន ៖** ចូរអានឧទាហរណ៍ខាងក្រោម ។



១. សុខាសំពះលា ម្ដាយឪពុក មុននឹងទៅសាលារៀន ។

២. ម៉ែជូនកូនទៅចុះឈ្មោះចូលរៀន ។

៣. សុភាពសុំលុយម៉ាក់ទិញសៀវភៅ ។

៤. យើងជាកូន ត្រូវគោរពមាតាបិតា ។

ពាក្យ " ម្ដាយ ម៉ែ ម៉ាក់ មាតា " មានន័យដូចគ្នា គេអាចប្រើជំនួសគ្នាបាន ។ ពាក្យទាំងនេះហៅថា វេវចនសព្ទ ។

*វេវចនសព្ទ គឺជាពាក្យ មានប្រភេទដូចគ្នា និងអាចជំនួសគ្នាបានដោយឥតបណ្ដាលឱ្យ ល្បះមានន័យផ្សេង ។*

## លំហាត់

១. ចូររកវេវចនសព្ទនឹងពាក្យ " រៀន ឪពុក " ។

២. ចូរអានអត្ថបទខាងក្រោម រួចស្រង់ពាក្យដែលជាវេវចនសព្ទនឹងពាក្យ " ប្រញាប់ " ។

ថ្ងៃនេះ ជាថ្ងៃចូលរៀនដំបូង ។ កុមារាកុមារីទាំងឡាយធ្វើដំណើរយ៉ាងប្រញាប់ប្រញាល់សំដៅទៅសាលារៀន ។ លោកគ្រូ អ្នកគ្រូរូតរះទៅសាលារៀន រង់ចាំទទួលសិស្សទាំងឡាយដោយក្ដីរីករាយ ។ គេឃើញ ឪពុកម្ដាយម្ទីម្ទាដឹកដៃកូនចូលក្នុងបរិវេណសាលារៀន ។

៣. ចូរតែងល្បះដោយប្រើវេវចនសព្ទនឹងពាក្យ " រៀន " ។

# មេរៀនទី ៣ សិស្សឧស្សាហ៍

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



សុខា ជាសិស្សឧស្សាហ៍ ។

រាល់ថ្ងៃ នាងទៅរៀនទៀងទាត់ និងទាន់ពេលជានិច្ច ។ សុខាគោរពបទបញ្ជារបស់សាលារៀនបានត្រឹមត្រូវ ។ ក្នុងថ្នាក់រៀន នាងយកចិត្តទុកដាក់ ស្ដាប់គ្រូពន្យល់ និងហ៊ានជម្រាបសួរគ្រូនៅពេលមិនយល់ ។ ពេលខ្លះនាងជួយពន្យល់មិត្តរួមថ្នាក់ ដែលរៀនយឺតទៀតផង ។ សុខាតែងណែនាំមិត្តភក្ដិ កុំឱ្យដើរលេងផ្ដេសផ្ដាស ។ នៅផ្ទះ សុខាខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវ និងជួយធ្វើកិច្ចការផ្ទះ ។

ឪពុកម្ដាយសុខា សប្បាយចិត្តណាស់ ព្រោះឃើញកូនខិតខំរៀនសូត្រ និងទទួលបានលទ្ធផលល្អជាទីគាប់ចិត្ត ។

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| មិត្តភក្តិ | អានថា | មិត - ភាក់ |
| ឧស្សាហ៍ | អានថា | អ៊ុស - សា |
| បទបញ្ជា | អានថា | បត់ - បញ់ - ជា |
| លទ្ធផល | អានថា | ឡាត់ - ធះ - ផល់ |

ខ. ពន្យល់ពាក្យ

មិត្តភក្តិ (ន.) : អ្នកដែលរាប់អាន ស្រឡាញ់គ្នាជិតស្និទ្ធ ។

ឧស្សាហ៍ (គុ.) : ដែលខិតខំ ព្យាយាម ប្រឹងប្រែង ។

បទបញ្ជា (ន.) : ការបង្គាប់ ។

លទ្ធផល (ន.) : ផលដែលសម្រេចបានរួចហើយ ។

គ. បដិសព្ទ

ឧស្សាហ៍ ≠ ខ្ជិល

ផ្តេសផ្តាស ≠ ត្រឹមត្រូវ

ឃ. វេវចនសព្ទនឹងពាក្យ “ មិត្តភក្តិ ”

មិត្តភក្តិ សម្លាញ់ ភ្លើ ម្រាក់ ភឿន គូកន ពួកម៉ាក

ង. សទិសសព្ទនឹងពាក្យ “ ចិត្ត ”

ចិត្ត (ន.) : វិញ្ញាណខាងក្នុងសម្រាប់គិត ។ *ឧទាហរណ៍* ចិត្តល្អ សប្បាយចិត្ត ។

ចិត (កិ.) : កាត់ជាចំណិតៗ ។ *ឧទាហរណ៍* ចិតបន្លែ ។

ចិត្រ (ន.) : ដែលគេធ្វើដោយផ្ចិតផ្ចង់រួចហើយ ។ *ឧទាហរណ៍* វិចិត្រករ ។

## សំណួរ

១. តើសុខាជាសិស្សដូចម្ដេច ?

២. តើនៅសាលារៀន សុខាបានធ្វើអ្វីខ្លះ ?

៣. តើនៅផ្ទះ សុខាបានធ្វើអ្វីខ្លះ ?

៤. ហេតុអ្វីបានជាឪពុកម្ដាយសុខាសប្បាយចិត្ត ?

៥. តើអ្នកត្រូវធ្វើដូចម្ដេចខ្លះ ដើម្បីឱ្យឪពុកម្ដាយអ្នកសប្បាយចិត្ត ?

## លំហាត់

១. ចូរអានពាក្យ កន្សោមពាក្យក្នុងប្រអប់ខាងក្រោម ដោយមិនបាច់ផ្សំ និងប្រកបឱ្យបានត្រឹមត្រូវ ។

ឧស្សាហ៍ មិត្តភក្តិ កិច្ចការ បទបញ្ជា ផ្ដេសផ្ដាស លទ្ធផល

២. ចូរអានល្បះក្នុងប្រអប់ ហើយសរសេរអក្សរ " ខុស " ពីមុខល្បះមិនត្រឹមត្រូវ និងសរសេរអក្សរ " ត្រូវ " ពីមុខល្បះតាមអត្ថបទ ។

" ...... " ពេលខ្លះនាងជជែកជាមួយមិត្តរួមថ្នាក់ ដែលរៀនយឺតក្នុងពេលរៀន ។

" ...... " រាល់ថ្ងៃនាងទៅសាលារៀន ទៀងទាត់ពេលជានិច្ច ។

" ...... " នៅផ្ទះសុខាខំធ្វើលំហាត់ អានសៀវភៅ និងជួយធ្វើកិច្ចការផ្ទះ ។

" ...... " ឪពុកម្ដាយសុខា មិនសប្បាយចិត្ត ព្រោះឃើញកូនមិនខិតខំរៀនសូត្រ ។

៣. ចូររកបដិសព្ទនឹងពាក្យ " យឺត " ។

៤. ចូររកវេវចនសព្ទនឹងពាក្យ " ឧស្សាហ៍ "។

៥. ចូររកសទិសសព្ទនឹងពាក្យ " រៀន "។

៦. តើសុខា ជាសិស្សដូចម្ដេច ? ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់នូវចម្លើយត្រឹមត្រូវ ។

- ☐ ឧស្សាហ៍ដើរលេងច្រើន ។
- ☐ ឧស្សាហ៍តវ៉ា ជាមួយឪពុកម្ដាយ ។
- ☐ ឧស្សាហ៍រៀនសូត្រ ។
- ☐ ឧស្សាហ៍បង្កជម្លោះក្នុងថ្នាក់រៀន ។

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំ ពាក្យ កន្សោមពាក្យ និងល្បះក្នុងប្រអប់ខាងក្រោម ។

ឧស្សាហ៍ បទបញ្ជា មិត្តភក្តិ ផ្ដេសផ្ដាស លទ្ធផល

ក្នុងថ្នាក់រៀននាងយកចិត្តទុកដាក់ស្ដាប់គ្រូពន្យល់ និងសួរគ្រូនៅពេលមិនយល់ ។ នៅផ្ទះសុខាខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវ និងជួយកិច្ចការផ្ទះ ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះតាមរូបភាព ឱ្យបានត្រឹមត្រូវ ។

រៀនយឺត ខំរៀន កិច្ចការ



១. សុខា ........ នៅផ្ទះ ។



២. សុខាជួយធ្វើ .......... ផ្ទះ ។




៣. សុខាជួយមិត្តភក្តិ ........ ។

គ. ចូររៀបពាក្យខាងក្រោមជាល្បះ ឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| ១ | រៀនសូត្រ ។ | សុខា | ឧស្សាហ៍ | ជាសិស្ស |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | យកចិត្ត | ស្តាប់គ្រូ | ទុកដាក់ | ក្នុងថ្នាក់រៀន | សុខា | ពន្យល់ ។ |

ឃ. ចូរសរសេរអក្សរផ្ចង់អំពីព្យញ្ជនៈ “ គ ” ។

## មេរៀនទី ៤

# ការសម្អាតថ្នាក់រៀន

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




ការសម្អាតថ្នាក់រៀន ជាភារកិច្ចរបស់យើងទាំងអស់គ្នា ។

សិស្សថ្នាក់ខ្ញុំ ប្តូរវេនគ្នាសម្អាតបន្ទប់រៀនរៀងរាល់ថ្ងៃ ។ ព្រឹកនេះ ដល់វេនក្រុមខ្ញុំសម្អាតបន្ទប់រៀន ។ មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនមុនម៉ោងសិក្សាដោយយកអំបោស កន្ទប និងធុងទឹកទៅជាមួយផង ។ ពួកយើងនាំគ្នាបោសបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច ។ អ្នកខ្លះ ប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម ។

ថ្នាក់រៀនខ្ញុំស្អាតជានិច្ច ដោយសិស្សក្នុងថ្នាក់ចូលរួមសម្អាតទាំងអស់គ្នា ។ គ្រូតែងសរសើរពួកយើងគ្រប់ៗគ្នា ។

*“ អនាម័យនាំមកនូវសុខភាព ”*

## ការរៀនពាក្យ

ក. អំណានពាក្យ

ភារកិច្ច អានថា ភា-រៈ-កិច

កម្ទេចកម្ទី អានថា កំ-ទេច-កំ-ទី

សមាជិក អានថា សៈ-ម៉ា-ជិក

ខ. ពន្យល់ពាក្យ

ធូលី (ន.) : ផង់ លម្អង លំអង ។ *ឧទាហរណ៍* ធូលីដីហុយទ្រលោម ។

ភារកិច្ច (ន.) : ការទទួលបន្ទុកការងារ ។

សមាជិក (ន.) : អ្នកដែលចូលរួមប្រជុំ ។ *ឧទាហរណ៍* សមាជិកអង្គការ សមាជិកសហគមន៍ សមាជិកគ្រួសារ ។

កន្ទប (ន.) : សំពត់ចាស់ៗប្រើសម្រាប់ជូតសម្អាត ។

គ. បដិសព្ទ

ប្រមូល ≠ ពង្រាយ

មិត្ត ≠ សត្រូវ

ឃ. វេវចនសព្ទនឹងពាក្យ " ទឹក "

ទឹក គង្គា វារី ជល

ង. សទិសសព្ទនឹងពាក្យ " ភក្តិ "

ភក្តិ (ន.) : សេចក្តីរាប់អាន សេចក្តីស្រឡាញ់ សេចក្តីស្មោះត្រង់ ។

ភក្ត្រ (ន.) : មុខ ។

ភ័ក (កិ.) : ឈប់ស្នាក់នៅមួយពេល មួយគ្រា ។

## សំណួរ

១. តើការសម្អាតថ្នាក់រៀនជាភារកិច្ចរបស់អ្នកណាខ្លះ ?

២. តើប្អូនត្រូវមានសម្ភារៈអ្វីខ្លះ សម្រាប់យកទៅសម្អាតថ្នាក់រៀន ?

៣. តើប្អូនត្រូវសម្អាតនៅកន្លែងណាខ្លះ ?

៤. ហេតុអ្វីបានជាត្រូវយកសំរាមទៅដាក់ក្នុងធុងសំរាម ?

៥. តើថ្នាក់រៀនស្អាតផ្តល់ប្រយោជន៍អ្វីខ្លះដល់ប្អូន ?

## លំហាត់

១. ចូរអានពាក្យ កន្សោមពាក្យខាងក្រោមដោយមិនបាច់ផ្ទៀង និងប្រកប ឱ្យបានត្រឹមត្រូវ ។

ភារកិច្ច   កន្ទប   បង្អួច   ស្អាត   បន្ទប់
សរសើរ   កម្ទេចកម្ទី   សម្អាត   ថ្នាក់រៀន

២. តើល្បះណាខ្លះទាក់ទងនឹងខ្លឹមសារអត្ថបទ ? ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ ។

☐ ថ្ងៃនេះយើងត្រូវសម្អាតផ្ទះ ។
☐ ថ្ងៃនេះយើងត្រូវវេនសម្អាតបន្ទប់រៀន ។
☐ ថ្នាក់រៀនខ្ញុំស្អាតជានិច្ច ។
☐ ថ្ងៃនេះយើងត្រូវទៅស្រែ ។

៣. ចូររៀបព្រឹត្តិការណ៍តាមលំដាប់អត្ថបទឡើងវិញ ដោយបង់លេខក្នុងប្រអប់ឱ្យបានត្រឹមត្រូវ ។

☐ អ្នកខ្លះប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម ។
☐ គ្រូបានសរសើរ ពួកយើងគ្រប់ៗគ្នា ។
☐ ពួកយើងនាំគ្នាបោសបន្ទប់រៀន ជូតតុ កៅអី ទ្វារ និងបង្អួច ។
☐ មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនមុនម៉ោងសិក្សា ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យ ពាក្យ កន្សោមពាក្យ និងល្បះខាងក្រោម ។

ភារកិច្ច បង្ហួច ធូលី កម្ទេចកម្ទី សរសើរ

អ្នកខ្លះប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅចោលក្នុងធុងសំរាម ។

ថ្នាក់រៀនខ្ញុំស្អាតជានិច្ច ដោយសារសិស្សក្នុងថ្នាក់ចូលរួមសម្អាតទាំងអស់គ្នា ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

ភារកិច្ច ព្រឹកនេះ ប្រមូល ធូលី

១. ការសម្អាតថ្នាក់រៀនជា ........របស់យើងទាំងអស់គ្នា ។

២. .........ដល់វេនក្រុមខ្ញុំសម្អាតបន្ទប់រៀន ។

៣. អ្នកខ្លះ ......យកសំរាម កម្ទេចកម្ទី កើប ..... យកទៅដាក់ ក្នុងធុងសំរាម ។

គ. ចូររៀបពាក្យ និងកន្សោមពាក្យខាងក្រោម ជាល្បះឱ្យបានត្រឹមត្រូវ ។

| | | | | | | |
|---|---|---|---|---|---|---|
| ១ | ថ្នាក់រៀន | ជា | របស់យើង | ភារកិច្ច | ទាំងអស់គ្នា ។ | ការសម្អាត |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ២ | នេះ | ដល់ | ក្រុម | ខ្ញុំ | បន្ទប់រៀន ។ | សម្អាត | ព្រឹក | វេន |

| | | | | |
|---|---|---|---|---|
| ៣ | ពួកយើង | តែងសរសើរ | គ្រប់ៗគ្នា ។ | គ្រូ |

ឃ. ចូរតែងល្បះតាមរូបភាព ដោយប្រើពាក្យបង្ហាញសកម្មភាពខាងក្រោម ។





១. " សម្អាត " ....................... ។

២. " ជូត " ....................... ។

## មេរៀនទី ៥ ពាក្យចួន

**បំណិន :** ចូរសូត្រមេសូត្រខាងក្រោម រួចសង្កេតមើលពាក្យដែលមានពណ៌ខៀវ ។

### សម្ភារៈសិក្សា (បទកាកគតិ)

ប្រដាប់**ប្រដា** សម្រាប់**សិក្សា** មានច្រើន**អនេក**
ក្ដារបិទសៀវភៅ កាតាបល្អ**ប្លែក** បន្ទាត់ជ័រ**ដែក**
ប្រើគួស**សរសេរ** ។
ជ័រលុបខ្មៅ**ដៃ** ទុកប្រើរាល់**ថ្ងៃ** សប្បាយ**ម្ល៉េះទេ**
ខិតខំសូត្ររៀន មិនចម្លង**គេ** កុំនៅ**ទំនេរ**
ទើបមានប្រយោជន៍ ។

មេសូត្រខាងលើនេះ មានពាក្យចួនគ្នា ៖

វគ្គទី ១ : ប្រដា / ចួននឹង / សិក្សា , អនេក / ចួននឹង / ប្លែក / ចួននឹង / ដែក

វគ្គទី ២ : ដៃ / ចួននឹង / ថ្ងៃ , សរសេរ / ចួននឹង / ទេ / ចួននឹង / គេ / ចួននឹង / ទំនេរ

*ពាក្យចួន គឺជាពាក្យដែលមានសូរស្រៈដូចគ្នា ឬមានសូរស្រៈប្រកបនឹងព្យញ្ជនៈដូចគ្នា នៅក្នុងវគ្គរបស់មេសូត្រ (កំណាព្យ) ។*

### លំហាត់

ចូរសូត្រមេសូត្រខាងក្រោម រួចស្រង់ពាក្យចួនឱ្យបានត្រឹមត្រូវ ។

ប្រដាប់ប្រដា យកមកសិក្សា ប្រើប្រាស់ក្នុងថ្នាក់
បន្ទាត់ជ័រលុប ខ្មៅដៃគួរឆ្លាក់ គួសវាសបណ្ដាក់
សរសេរអក្សរ ។
សំពៀតក្ដារឆ្នួន យើងប្រើថែធួន សំថៃបានល្អ
កូនខំរៀនសូត្រ ពុកម៉ែត្រេកអរ កូនពៅបវរ
គួរឱ្យស្រឡាញ់ ។

មេរៀនទី ៦

# ពេលគោរពទង់ជាតិ

**អំណាន :** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។




## មេសូត្រ : បទកាកគតិ

យើងបុត្រខេមរា
មុនចូលសិក្សា
គោរពទង់ជាតិ
ឈរតម្រង់ជួរ
រូតរះខ្មីឃ្មាត
កុំគេចកុំឆ្វៀត
មកទាន់វេលា ។

ទង់បង្ហូតឡើង
មិននៅចចើង
បែរជជែកគ្នា
មាត់ច្រៀងតាមបទ
ភ្នែកមើលដង្វាលា
ទង់ជាតិប្រជា
សញ្ញាណជាតិខ្មែរ ។

យើងត្រូវគោរព
ដោយក្ដីសញ្ជប់
សញ្ជឹងឥតបែរ
នឹកគុណបុព្វ
បុរសជាតិខ្មែរ
ធ្លាប់មានហូរហែ
តាំងពីយូរយារ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

សញ្ញាណ អានថា ស័ញ-ញ៉ាន

គោរព អានថា គោ-រប់

បុព្វ អានថា បុប-ពៈ

ខេមរា អានថា ខេម៉ៈ-រ៉ា

ខ. ពន្យល់ពាក្យ

សញ្ញាណជាតិ (ន.) : គ្រឿងសញ្ញាសម្គាល់របស់ជាតិ ។

សញ្ជាប់ (កិ.) : ជ្រប់មុខ ស្រពោន ស្រពាប់ ក្រៀមក្រំ ។

បុព្វ (គុ.) : មុន ខាងដើម ពីមុន ។

ជ្វាលា (ន.) : អណ្តាតភ្លើងសេចក្តីរុងរឿង ពន្លឺដែលភ្លឺព្រោងព្រាត ប្រទីបជ្វាលា ។

គ. បដិសព្ទ

រួតរះ ≠ ដំអក់

ជជែក ≠ ស្ងៀមស្ងាត់

ឃ. វេវចនសព្ទនឹងពាក្យ “ ភ្នែក ”

ភ្នែក នេត្រា ចក្ខុ ព្រះនេត្រ

ង. សទិសសព្ទនឹងពាក្យ “ ជាតិ ”

ជាតិ (ន.) : កំណើត មនុស្សដែលមានសញ្ជាតិផ្សេងគ្នា ។

*ឧទាហរណ៍* ជាតិខ្មែរ ជាតិចិន ។ល ។

ជាត (គុ.) : ដែលកើតហើយ ដែលមាន ដែលប្រាកដហើយ ។

## សំណួរ

១. តើសិស្សទាំងអស់ត្រូវគោរពទង់ជាតិនៅពេលណា ?

២. នៅពេលគោរពទង់ជាតិ តើប្អូនៗត្រូវធ្វើដូចម្តេចខ្លះ ?

៣. តើទង់ជាតិ ជាសញ្ញាណតំណាងឱ្យអ្វី ?

៤. ហេតុអ្វីបានជាយើងត្រូវគោរពទង់ជាតិ ?

## លំហាត់

១. ចូរអានពាក្យ និងកន្សោមពាក្យខាងក្រោមដោយមិនបាច់ផ្សំ និងប្រកប ឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| ខេមរា | សញ្ញាណ | សញ្ជប់ | បុព្វបុរស | រូតរះ |
| ខ្មីឃ្មាត | បុត្រខេមរា | ជាតិប្រជា | ជាតិខ្មែរ | |

២. ចូរសូត្រមេសូត្របណ្តាក់គ្នាឡើងវិញ ឱ្យបានត្រឹមត្រូវតាមបទកាកគតិ ។

៣. ចូររកពាក្យជួនក្នុងវគ្គមេសូត្រខាងក្រោម ។

យើងបុត្រខេមរា មុនចូលសិក្សា គោរពទង់ជាតិ

ឈរតម្រង់ជួរ រូតរះខ្មីឃ្មាត កុំគេចកុំឆ្លៀត

មកទាន់វេលា ។

៤. ចូរគូសសញ្ញា " ✓ " នៅក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ ។ តើល្បះមួយណាទាក់ទងនឹងខ្លឹមសារមេសូត្រ ?

☐ យើងត្រូវគោរពឪពុកម្តាយ មុនពេលចេញមកសាលារៀន ។

☐ យើងត្រូវគោរពចាស់ទុំ នៅពេលជួបគាត់តាមផ្លូវ ។

☐ យើងត្រូវគោរពទង់ជាតិមុនចូលរៀន ។

☐ យើងត្រូវគោរពគ្រូមុនពេលចូលរៀន ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យពាក្យ កន្សោមពាក្យ និងល្បះខាងក្រោម ។

ខេមរា សញ្ញាណ សញ្ជប់សញ្ជឹង បុព្វបុរស រូតរះ
ឱឃ្មាត បុត្រខេមរា ជាតិប្រជា ជាតិខ្មែរ
យើងត្រូវគោរពទង់ជាតិ មុនចូលថ្នាក់រៀន ។
ទង់ជាតិជាសញ្ញាណជាតិខ្មែរ ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញក្នុងចន្លោះនៃវគ្គមេសូត្រខាងក្រោម ឱ្យបានត្រឹមត្រូវ ។

ចចើង បង្គួត ច្រៀង ជាតិខ្មែរ ជ្វាលា ជជែក

ទង់ ........ឡើង មិននៅ ........ បែរ ....... គ្នា
មាត់ .......តាមបទ ភ្នែកមើល ....... ទង់ជាតិប្រជា
សញ្ញាណ ......... ។

គ. ចូរតែងល្បះនឹងពាក្យ កន្សោមពាក្យខាងក្រោមឱ្យបានសមស្រប ។

១. ..........................................ទង់ជាតិ ។

២. យើងគោរព .................................... ។

៣. .................. រូតរះ ......................... ។

ឃ. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ ។





.................................. ។ .................................. ។

# មេរៀនទី ៧ ការប្រាប់ព័ត៌មានផ្ទាល់ខ្លួន

**ការនិយាយ :** ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ ។




សុភាព : សួស្តី! ខ្ញុំឈ្មោះ សុភាព ។ ខ្ញុំមានអាយុ ៩ ឆ្នាំ ។ ខ្ញុំរៀននៅថ្នាក់ទី ៣ " ក " នៃសាលាបឋមសិក្សាសម្តេចព្រះរាជអគ្គមហេសី ។

ណារី : សួស្តី សុភាព! នាងខ្ញុំឈ្មោះ ណារី ។ ខ្ញុំមានអាយុ ៩ ឆ្នាំដែរ ។ ខ្ញុំរៀននៅថ្នាក់ទី ៣ " ខ" នៃសាលាបឋមសិក្សាវិហារហ្លួង ។ តើឯងមានទីលំនៅនៅឯណា ?

សុភាព : បាទ! ខ្ញុំរស់នៅភូមិវាំងចាស់ ឃុំវាំងចាស់ ស្រុកឧដុង្គ ខេត្តកំពង់ស្ពឺ ។ ឪពុកខ្ញុំឈ្មោះ បាន សួរ និងម្តាយឈ្មោះ ហុន សុភិន ។ ចុះឯងវិញមានអាសយដ្ឋាននៅឯណាដែរ ?

ណារី : ចាស! នាងខ្ញុំនៅភូមិកំពង់ចុះវារ ឃុំវិហារហ្លួង ស្រុកពញាឮ ខេត្តកណ្ដាល។ ប៉ាខ្ញុំឈ្មោះ ជា សារឿន និងម៉ាក់ឈ្មោះ សំ សូដា។ ន៎ុះ! ប៉ាម៉ាក់ខ្ញុំមកហើយ ខ្ញុំសូមលាសិនហើយ ចាំថ្ងៃក្រោយជួបគ្នា។

សុភាព : បាទ! សូមអញ្ជើញដោយសុខសប្បាយ ថ្ងៃក្រោយជួបគ្នា។

## សំណួរ

១. ពេលជួបណារី តើសុភាពប្រើពាក្យស្វាគមន៍ និងរៀបរាប់ដូចម្ដេចខ្លះ ?

២. តើណារីប្រើពាក្យស្វាគមន៍ និងឆ្លើយដូចម្ដេចខ្លះ ?

៣. ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់សុភាព ?

៤. ចូររៀបរាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់ណារី ?

៥. ដើម្បីប្រាប់ព័ត៌មានផ្ទាល់ខ្លួន តើគេនិយាយផ្ដោតទៅលើចំណុចអ្វីខ្លះ ?

## លំហាត់

ចូរចាប់ដៃគូសន្ទនាគ្នា ដោយប្រាប់ពីព័ត៌មានផ្ទាល់ខ្លួនរបស់អ្នកឱ្យបានច្បាស់លាស់។

មេរៀនទី ៨

# រឿងទឹកចិត្តដ៏ប្រពៃ

**អំណាន :** ចូរអានរឿងខាងក្រោម រួចឆ្លើយនឹងសំណួរ ។




ថ្ងៃមួយស្រីនាថ បានត្រឡប់មកពីសាលារៀនមុនម៉ោង ។

មីងណានឆ្ងល់ក៏សួរ ៖ “ យី! ថ្ងៃនេះម្ដេចក៏កូនចេញពីរៀនមុនម៉ោងដូច្នេះ ? ”។ ស្រីនាថឆ្លើយ ៖ “ ចាសម៉ាក់! ថ្ងៃនេះអ្នកគ្រូខ្ញុំឈឺ ”។ ស្រីនាថបានសុំម្ដាយឱ្យជូននាងទៅសួរសុខទុក្ខអ្នកគ្រូ ដែលកំពុងសម្រាកព្យាបាលនៅឯមណ្ឌលសុខភាព ។ មីងណានឆ្លើយ ៖ “ អើ! ល្អហើយកូន ម៉ាក់ជូនកូនទៅ តែចាំម៉ែរៀបចំផ្លែឈើបន្តិចបន្តួចផ្ញើជូនគាត់ ”។ ឃើញស្រីនាថ និងម្ដាយមកដល់ អ្នកគ្រូសប្បាយចិត្តខ្លាំងណាស់ ។ គាត់និយាយ ៖ “អ្នកគ្រូសូមអរគុណកូនស្រីនាថ និងអ្នកមីងដែលមកសួរសុខទុក្ខខ្ញុំ ”។ មីងណានតប ៖ “ មិនអីទេ! សូមជូនពរអ្នកគ្រូឱ្យឆាប់ជាសះស្បើយ ”។ អ្នកគ្រូ ៖“ចាស! អរគុណ! ”។

*“ គ្រូជាឪពុកម្ដាយទីពីររបស់យើង ”*

## ការរៀនពាក្យ

ក. អំណានពាក្យ

មណ្ឌល អានថា មន់-ឌុល

សុខភាព អានថា សុ-ខៈ-ភាប

ទុក្ខ អានថា ទុក

ខ. ពន្យល់ពាក្យ

មណ្ឌលសុខភាព (ន.) : ទីកន្លែងសម្រាប់ពិនិត្យព្យាបាលអ្នកជំងឺនៅក្នុងឃុំ ។

ព្យាបាល (ន.) : ការថែរក្សាជំងឺ ។

សះស្បើយ (គុ.) : ដែលស្រាក ស្រាលជាពីជំងឺ ។

គ. បដិសព្ទ

គុណ ≠ ទោស

សុខ ≠ ទុក្ខ

ឃ. វេវចនសព្ទនឹងពាក្យ " សប្បាយ "

សប្បាយ ឥតព្រួយ ត្រេកអរ រីករាយ ស្រួលចិត្ត អំណរ ស្រស់ស្រាយ

ង. សទិសសព្ទនឹងពាក្យ " ពរ "

ពរ (ន.) : គុណដ៏ប្រសើរ គុណដែលប្រាថ្នាចង់បាន ។ *ឧទាហរណ៍* ជូនពរ ។

ព (កិ.) : លើកដាក់លើចង្កេះកៀកនឹងដៃ ។ *ឧទាហរណ៍* ពកូន ។

## សំណួរ

១. តើតួអង្គក្នុងរឿងខាងលើមានប៉ុន្មាននាក់ ?

២. តើស្រីនាថ និងម្តាយនាំគ្នាទៅណា ?

៣. តើស្រីនាថមានទឹកចិត្តដូចម្តេចចំពោះអ្នកគ្រូ ?

៤. បើជាអ្នកគ្រូប្អូនវិញ តើប្អូនមានអារម្មណ៍ដូចម្តេចដែរ ?

## លំហាត់

១. ចូរអានពាក្យ កន្សោមពាក្យខាងក្រោមដោយមិនបាច់ផ្សំ និងប្រកប ឱ្យបានត្រឹមត្រូវ ។

| | | | |
|---|---|---|---|
| សុខទុក្ខ | បន្តិចបន្តួច | គោរព | អារម្មណ៍ |
| ត្រេកអរណាស់ | ជាសះស្បើយ | មណ្ឌលសុខភាព | ដឹងគុណគ្រូ |

២. ចូររៀបចំការសម្ដែងតួ តាមខ្លឹមសារអត្ថបទខាងលើ ហើយជ្រើសរើសសិស្សបីនាក់ដើរតួជាស្រីនាថម្នាក់ ម្ដាយម្នាក់ និងអ្នកគ្រូម្នាក់ ។

៣. ចូរស្រង់វេវចនសព្ទនឹងពាក្យ " ម៉ាក់ " ដែលមាននៅក្នុងអត្ថបទ ។

៤. ចូររៀបព្រឹត្តិការណ៍តាមលំដាប់សាច់រឿងឡើងវិញ ដោយបង់លេខតាមលំដាប់នៅក្នុងប្រអប់ខាងក្រោម ។

- ☐ មីងណានតប ៖ " មិនអីទេ! សូមជូនពរអ្នកគ្រូឱ្យឆាប់ជាសះស្បើយ" ។
- ☐ ថ្ងៃមួយស្រីនាថ បានត្រឡប់មកពីសាលារៀនមុនម៉ោង ។
- ☐ ស្រីនាថឆ្លើយ ៖ " ចាសម៉ាក់! ថ្ងៃនេះអ្នកគ្រូខ្ញុំឈឺ " ។
- ☐ មីងណានឆ្ងល់ក៏សួរ ៖ " យី! ថ្ងៃនេះកូនម្ដេចចេញពីរៀនមុនម៉ោងដូច្នេះ ? " ។
- ☐ គាត់និយាយ ៖ " អ្នកគ្រូសូមអរគុណកូនស្រីនាថ និងអ្នកមីងហើយដែលបានមកសួរសុខទុក្ខខ្ញុំ " ។

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម ។

### ទឹកចិត្តដ៏ប្រពៃ

អ្នកគ្រូនិយាយថា សូមអរគុណអ្នកទាំងអស់គ្នា ។ មីងណានឆ្លើយ ៖ " ចាស ! មិនអីទេ ខ្ញុំសូមជូនពរអ្នកគ្រូឱ្យឆាប់ជាសះស្បើយ " ។ អ្នកគ្រូសប្បាយចិត្តណាស់ពេលឃើញសិស្សសម្ដែងនូវទឹកចិត្តគោរពស្រឡាញ់ ដឹងគុណគ្រូបែបនេះ ។

## សំណួរ

១. តើអ្នកគ្រូនិយាយអ្វីខ្លះទៅកាន់មីងណាន និងស្រីនាថ ?

២. តើមីងណាននិយាយទៅកាន់អ្នកគ្រូដូចម្ដេច ?

៣. តើអ្នកគ្រូមានអារម្មណ៍ដូចម្ដេច ? ព្រោះអ្វី ?

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រឹមត្រូវ ។

សួរសុខទុក្ខ មណ្ឌលសុខភាព លើកដៃសំពះ




១. នេះជា ........ ក្នុងឃុំយើង ។




២. ស្រីនាថ និងម្ដាយទៅ ...........អ្នកជំងឺ ។




៣. កុមារី ............... ពេលជួបអ្នកគ្រូ ។

គ. ចូររៀបពាក្យ និងកន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ ។

| | | | | | | | |
|---|---|---|---|---|---|---|---|
| ១ | សិស្ស | មណ្ឌលសុខភាព | ដើម្បី | ទៅ | អ្នកគ្រូ ។ | សុខទុក្ខ | សួរ |

| | | | | | | |
|---|---|---|---|---|---|---|
| ២ | មណ្ឌលសុខភាព ។ | មានជំងឺ | ទៅ | ពេល | យើង | ត្រូវ |

| | | | | |
|---|---|---|---|---|
| ៣ | និយាយថា | អ្នកទាំងអស់គ្នា ។ | គាត់សូមអរគុណ | អ្នកគ្រូ |

ឃ. ចូរសរសេរអក្សរផ្ចង់នឹងព្យញ្ជនៈ " គ " និងពាក្យ " គាត់ " ។

# មេរៀនទី ៩

# សិស្សគំរូ

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




សុធា ជាសិស្សគំរូម្នាក់នៅក្នុងសាលារៀន ។

សុធារៀនពូកែ ហើយតែងជាប់ចំណាត់ថ្នាក់ល្អជារៀងរាល់ខែ ។ ក្រៅពីការរៀនសូត្រ សុធាគោរពវិន័យសាលាយ៉ាងខ្ជាប់ខ្ជួន ។ សុធាតែងស្តាប់ការទូន្មានប្រៀនប្រដៅរបស់អ្នកគ្រូ លោកគ្រូ និងចេះគោរពចាស់ទុំ ទាំងនៅក្នុងសាលារៀន ក៏ដូចជានៅតាមទីសាធារណៈដែរ ។ ដោយសារមានចរិយាមារយាទល្អ ទើបគេជ្រើសរើសសុធាជាសិស្សឆ្នើមប្រចាំសាលា និងជាប្រធានក្រុមប្រឹក្សាកុមារប្រចាំសាលារៀនទៀតផង ។

នាយក អ្នកគ្រូ លោកគ្រូ និងមិត្តភក្តិទាំងអស់ ស្រឡាញ់រាប់អានសុធាគ្រប់ៗគ្នា ។

*" វិន័យនាំមកនូវសេចក្តីថ្លៃថ្នូរ "*

## ការរៀនពាក្យ

ក. អំណានពាក្យ

វិន័យ អានថា វិ-ន៍ៃ

ចរិយា អានថា ចាក់-រិ-យ៉ា

មារយាទ អានថា មា-យាត

ខ. ពន្យល់ពាក្យ

វិន័យ (ន.) : ការដឹកនាំទៅរកផ្លូវល្អ ច្បាប់ប្រដៅឱ្យប្រព្រឹត្តត្រឹមត្រូវ ។

មារយាទ (ន.) : សណ្ដាប់ធ្នាប់ របៀប ឫកពា ។

ទីសាធារណៈ (ន.) : កន្លែងដែលមិនមែនជាកម្មសិទ្ធិរបស់នរណាម្នាក់ ។

ក្រុមប្រឹក្សាកុមារ (ន.) : ក្រុមកុមារដែលសាលារៀនរៀបចំឡើងសម្រាប់ជួយគ្រប់គ្រង និងដឹកនាំកុមារនៅក្នុងសាលារៀន ។

គ. បដិសព្ទ

ពូកែ ≠ ខ្សោយ សាធារណៈ ≠ អសាធារណៈ

ឃ. វេវចនសព្ទនឹងពាក្យ " ទូន្មាន"

ទូន្មាន ប្រដៅ អប់រំ ណែនាំ

ង. សទិសសព្ទនឹងពាក្យ " ទុំ "

ទុំ (គុ.) : ទីទៃពីខ្ចី ។ *ឧទាហរណ៍* ផ្លែឈើទុំ ។

ទំ (កិ.) : ស្ថិតនៅលើទ្រនំ ។ *ឧទាហរណ៍* សត្វទំលើចុងឈើ ។

## សំណួរ

១. តើសុធា រៀនបានជាប់ចំណាត់ថ្នាក់ដូចម្ដេច ?

២. ក្រៅពីការរៀនសូត្រ តើសុធាជាសិស្សយ៉ាងដូចម្ដេច ?

៣. តើនៅក្នុងសាលារៀន និងនៅតាមទីសាធារណៈសុធាធ្វើដូចម្ដេចខ្លះ ?

៤. ហេតុអ្វីគេជ្រើសរើសសុធាជាសិស្សឆ្នើម និងជាប្រធានក្រុមប្រឹក្សាកុមារ ?

៥. តើអ្នកគួរយកតម្រាប់តាមសុធាឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរអានពាក្យ កន្សោមពាក្យខាងក្រោមដោយមិនបាច់ផ្សំ និងប្រកបឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| សាធារណៈ | វិន័យ | ក្រុមប្រឹក្សាកុមារ | ចរិយា | |
| មារយាទ | ទូន្មាន | ប្រៀនប្រដៅ | នាយក | ខ្ជាប់ខ្ជួន |

២. ចូររកបដិសព្ទនឹងពាក្យ " ថ្លៃថ្នូរ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ស្រឡាញ់ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " រៀង " ។

៥. ចូរគូសសញ្ញាព្រួញ → ភ្ជាប់ល្បះដែលត្រូវទៅនឹងរូបភាព ។

សុធា ជាក្មេងខ្ជិលរៀនសូត្រ ។

សុធា ជាសិស្សជួយទុក្ខធុរៈអ្នកដទៃ ។

ពេលទំនេរសុធាចូលចិត្តអានសៀវភៅ ។



## សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម ។

### សិស្សគំរូ

សុធាជាសិស្សរៀនពូកែ ហើយគោរពវិន័យជានិច្ច ។ ស្ទើរតែគ្រប់ពេលគេខំប្រឹងប្រែងរៀនសូត្រ ។ គេតែងស្ដាប់ដំបូន្មាននិងចេះគោរពចាស់ទុំ ។ នៅពេលទំនេរសុធាជួយធ្វើកិច្ចការឪពុកម្ដាយនៅផ្ទះ ។ អ្នកភូមិកោតសរសើរសុធាគ្រប់ៗគ្នា ។

## សំណួរ

១. តើសុធា ជាសិស្សរៀនដូចម្ដេច ?

២. ហេតុអ្វីបានជាយើងត្រូវគោរពវិន័យ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " វិន័យ "។

២. ចូររកបដិសព្ទនឹងពាក្យ " ពូកែ "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ទូន្មាន "។

៤. ចូររកសទិសសព្ទនឹងពាក្យ " ទុំ "។

៦. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមរូបភាពឱ្យបានត្រឹមត្រូវ ។

| | |
|---|---|
| រៀនសូត្រ | បោសសម្អាត |



១. នារីកំពុង ...........មុខផ្ទះ ។



២. សិស្សខិតខំ ........ នៅក្នុងបន្ទប់ ។

មេរៀនទី ១០

# សមាជិកគ្រួសារខ្ញុំ

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



គ្រួសារខ្ញុំ មានសមាជិកជាច្រើននាក់ ហើយម្នាក់ៗមានភារកិច្ចរៀងៗខ្លួន ។

ជីដូនជីតាខ្ញុំនៅផ្ទះថែទាំចៅ ។ ពុកម៉ែខ្ញុំជាមេគ្រួសារ ។ គាត់ប្រកបរបររកស៊ីដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ និងតាមដានការសិក្សារបស់កូន ។ មាមីងរបស់ខ្ញុំ ក៏ទៅធ្វើការដូចពុកម៉ែដែរ ។ ចំណែកបងប្រុស បងស្រី និងខ្ញុំមានភារកិច្ចសំខាន់ជាងគេ គឺខិតខំរៀនសូត្រដើម្បីមានអនាគតល្អ ។ សមាជិកគ្រួសារខ្ញុំ ចេះគោរពស្រឡាញ់គ្នា យោគយល់គ្នា និងជួយទុក្ខធុរៈគ្នាទៅវិញទៅមក ។ ពួកយើងតែងជួបជុំទទួលទានអាហាររួមគ្នា និងជជែកលេងយ៉ាងសប្បាយរីករាយ ។

សមាជិកគ្រួសារខ្ញុំ រស់នៅប្រកបដោយសុភមង្គល ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ជរា អានថា ជៈ-រា

ជីវភាព អានថា ជី-វៈ-ភាប

អនាគត អានថា អៈ-ន៉ា-គត់

សុភមង្គល អានថា សុ-ភៈ-មង់-គល់

ខ. ពន្យល់ពាក្យ

ធុរៈ (ន.) : រវល់ ដំណើរជំពាក់ដោយកិច្ចការ ។

មេគ្រួសារ (ន.) : អ្នកទទួលរ៉ាប់រងគ្រប់បែបយ៉ាងក្នុងគ្រួសារ ។

ផ្គត់ផ្គង់ (កិ.) : គឺទំនុកបម្រុងមិនឱ្យខ្វះខាត ។

បន្ទុក (ន.) : កិច្ចការធុរៈខុសត្រូវសព្វគ្រប់ ។

គ. បដិសព្ទ

ជរា ≠ រឹងមាំ

សុភមង្គល ≠ អពមង្គល

ឃ. វេវចនសព្ទនឹងពាក្យ " ទទួលទាន "

ទទួលទាន ហូប បរិភោគ ញ៉ាំ ស៊ី ឆាន់ សោយ ពិសា ឆី

ង. សទិសសព្ទនឹងពាក្យ " មា "

មា (ន.) : ប្អូនប្រុសរបស់ឪពុក ឬម្ដាយ (ពូ) ។

មារ (ន.) : សេចក្ដីអាក្រក់ ដំណើររារាំង សេចក្ដីស្លាប់ ។

## សំណួរ

១. តើជីដូនជីតានៅផ្ទះមានភារកិច្ចធ្វើអ្វី ?

២. តើពុកម៉ែមានភារកិច្ចធ្វើអ្វី ?

៣. តើអ្នកណាមានភារកិច្ចសំខាន់ជាងគេ ? ធ្វើអ្វី ?

៤. តើសមាជិកគ្រួសារនេះជាមនុស្សដូចម្តេច ?

៥. ដើម្បីឱ្យគ្រួសារមានសុភមង្គល តើប្អូនត្រូវធ្វើដូចម្តេចខ្លះ ?

## លំហាត់

១. ចូរអានពាក្យ កន្សោមពាក្យខាងក្រោម ដោយមិនបាច់ផ្សំ និងប្រកប ឱ្យបានត្រឹមត្រូវ ។

| | | | |
|---|---|---|---|
| ជរា | គ្រួសារ | ជីវភាព | បន្ទុក |
| កិច្ចការ | ទុក្ខធុរៈ | សុភមង្គល | យោគយល់ |

២. ចូរអានអត្ថបទបណ្តាក់គ្នាឡើងវិញឱ្យបានត្រឹមត្រូវ ។

៣. តើសមាជិកគ្រួសារមានភារកិច្ចធ្វើអ្វីខ្លះ ?

៤. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលជាខ្លឹមសារទាក់ទងនឹងអត្ថបទ ។

- ☐ ពុកម៉ែខ្ញុំជាមេគ្រួសារ គាត់រកស៊ីដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ ។
- ☐ គ្រួសារខ្ញុំទៅចូលរួមក្នុងពិធីបុណ្យ ។
- ☐ ជីដូនជីតាចាស់ជរានៅផ្ទះមើលថែចៅ ។
- ☐ កូនៗកំពុងរត់លេងមុខផ្ទះ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### សមាជិកគ្រួសារខ្ញុំ

គ្រួសារខ្ញុំ មានសមាជិកជាច្រើននាក់ ។ ជីដូនជីតាខ្ញុំនៅផ្ទះមើលផែថៅ ។ ពុកម៉ែខ្ញុំជាមេគ្រួសារ គាត់ប្រកបរបររកស៊ីដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ ។ មាមីងខ្ញុំក៏ទៅធ្វើការដូចពុកម៉ែដែរ ។ ពួកយើងតែងទទួលទានអាហាររួមគ្នា ។ កូនៗមានភារកិច្ចសំខាន់ជាងគេគឺខិតខំរៀនសូត្រដើម្បីមានអនាគតល្អ ។

### សំណួរ

១. តើជីដូនជីតានៅផ្ទះធ្វើអ្វី ?

២. តើពុកម៉ែមានភារកិច្ចធ្វើអ្វី ?

៣. តើកូនៗត្រូវធ្វើអ្វីខ្លះ ?

### លំហាត់

១. ចូរពន្យល់ពាក្យ “ ផ្គត់ផ្គង់ ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ សុភមង្គល ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ទទួលទាន ” ។

៤. ចូររកសទិសសព្ទនឹងពាក្យ “ មា ” ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញកថាខណ្ឌខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | | | | | | |
|---|---|---|---|---|---|---|---|
| ទៅមក | យើង | ខ្ញុំ | រួម | រស់នៅ | យោគយល់ | ជជែក | សុភមង្គល |

សមាជិកគ្រួសារ ......... ចេះគោរពស្រឡាញ់គ្នា ........ គ្នា និងជួយទុក្ខធុរៈគ្នាទៅវិញ .......... ។ ពួក ............ តែងជួបជុំទទួលទានអាហារ ...... គ្នានិង .......... .......... លេងយ៉ាងសប្បាយរីករាយ ។ គ្រួសារខ្ញុំ .......... ប្រកបដោយ ............ ។

គ. ចូររៀបពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ ។

| | | | | | | | | | |
|---|---|---|---|---|---|---|---|---|---|
| ១. | ជីដូន | នៅ | ជរា | ជីតាខ្ញុំ | ចាស់ | ថែ | ចៅ ។ | ផ្ទះ | មើល |

| | | | | | | |
|---|---|---|---|---|---|---|
| ២. | សុភមង្គល ។ | ខ្ញុំ | រស់នៅ | គ្រួសារ | ដោយ | ប្រកប |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ៣. | ដែរ ។ | មាមីង | ខ្ញុំ | របស់ | ធ្វើការ | ដូច | ពុកម៉ែ | ក៏ទៅ |

ឃ. ចូរតែងល្បះនឹងពាក្យខាងក្រោម ឱ្យបានក្នុងមួយពាក្យមួយល្បះ ។

១. ទស្សនា : .......................... ។

២. កម្សាន្ត : .......................... ។

# មេរៀនទី ១១ បដិសព្ទ

## បំណិន

ចូរអានឧទាហរណ៍ខាងក្រោម ។

១. គោ**ធំ**ជាងជ្រូក តែ**តូច**ជាងដំរី ។

២. ខ្ញុំ**ពូកែ**ភាសាខ្មែរ តែ**ខ្សោយ**គណិតវិទ្យា ។

៣. សោភា**ស្រឡាញ់**សត្វឆ្កែ តែនាង**ស្អប់**សត្វឆ្មា ។

៤. អ្នកគ្រូ**សរសើរ**អ្នក**ឧស្សាហ៍** គាត់មិនដែល**ស្តីបន្ទោស**អ្នក**ខ្ជិល**ឡើយ ។

តាមរយៈឧទាហរណ៍ក្នុងល្បះទាំងបួនខាងលើយើងឃើញថា ៖

| | | | |
|---|---|---|---|
| ពាក្យ | ធំ | ≠ | តូច |
| | ពូកែ | ≠ | ខ្សោយ |
| | ស្រឡាញ់ | ≠ | ស្អប់ |
| | សរសើរ | ≠ | ស្តីបន្ទោស |
| | ឧស្សាហ៍ | ≠ | ខ្ជិល ។ល ។ |

ពាក្យទាំងអស់ខាងលើនេះ ហៅថាបដិសព្ទ ឬពាក្យផ្ទុយ ។

*បដិសព្ទ : គឺពាក្យទាំងឡាយដែលមានន័យផ្ទុយគ្នា ។*

## លំហាត់

១. ចូរជ្រើសរើសពាក្យដែលជាបដិសព្ទនឹងគ្នា(ន័យផ្ទុយគ្នា)ពីក្នុងប្រអប់ ។

| | | | | |
|---|---|---|---|---|
| ល្អ | យឺត | សុខ | ហ៊ាន | ខ្លាច |
| លឿន | ទុក្ខ | អាក្រក់ | ជិត | ឆ្ងាយ |

២. ចូរគូសសញ្ញាព្រួញភ្ជាប់ពាក្យដែលជាបដិសព្ទនឹងគ្នា ។

| | |
|---|---|
| - ចំណេញ | កើតទុក្ខ |
| - ច្រើន | ខាត |
| - បន្ថែម | តិច |
| - សប្បាយ | បន្ថយ |

៣. ចូររកបដិសព្ទនឹងពាក្យ “ ខ្ពស់ ធ្ងន់ រាក់ ” ។

មេរៀនទី
១២

# គុណម្ដាយឪពុក

**អំណាន ៖** ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ ។

## ចម្រៀង ៖ លំនាំបទខ្ញុំមានមាត់សម្រាប់និយាយ

១. ខ្ញុំមានពុកម៉ែអ្នកមានគុណ ធ្លាប់រែកពុនចិញ្ចឹមគ្រួសារ
ម៉ែដេរប៉ះចម្អិនអាហារ ពុកធ្វើការភ្ជួរចម្ការស្រែ
បន្ទរ ៖ មែនហើយភ្ជួរចម្ការស្រែ ។

២. ពុកម៉ែខ្ញុំខិតខំធ្វើការ ទាំងទ្វេហារពុំដែលត្អូញត្អែរ
ការងាររាជការចម្ការស្រែ ធ្វើហួរហែពុំខ្លាចនឿយហត់
បន្ទរ ៖ មែនហើយពុំខ្លាចនឿយហត់ ។

៣. ខ្ញុំស្រឡាញ់គោរពលោកណាស់ ព្រោះលោកចាស់ពូកែទ្រាំអត់
គុណធំធេងគ្មានដែនកំណត់ ទោះសមុទ្រក៏ប្រៀបពុំបាន
បន្ទរ ៖ មែនហើយក៏ប្រៀបពុំបាន ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ចិញ្ចឹម អានថា ចិញ-ចឹម

សមុទ្រ អានថា សៈ-ម៉ុត

រាជការ អានថា រាជៈ-កា ។

ខ. ពន្យល់ពាក្យ

ដែន (ន.) : រដ្ឋ ប្រទេស ផែនដី ។

ទ្វេហារ (ន.) : ទាំងពីរ ។

ចិញ្ចឹម (កិ.) : គ្រប់គ្រងរក្សាបន្តជីវិត ឱ្យរស់ ឱ្យធំធាត់ ។

រាជការ (ន.) : ការរក្សាប្រទេសជាតិ ធ្វើរាជការ អ្នករាជការ ។

គ. បដិសព្ទ

មាន ≠ គ្មាន

នឿយហត់ ≠ស្រណុក

ឃ. វេវចនសព្ទនឹងពាក្យ " ត្អូញត្អែរ , ទ្វេ "

ត្អូញត្អែរ រអ៊ូរទាំ តម្អូញ

ទ្វេ ទ្វិ ពីរ មួយគូ ភ្លោះ

ង. សទិសសព្ទនឹងពាក្យ " គុណ "

គុណ (ន.) : ដំណើរធ្វើឱ្យចម្រើនកើនឡើង ។ *ឧទាហរណ៍* លេខគុណ ។

គុន (ន.) : ក្បាច់គុន ។

គណ (ន.) : ពួក ក្រុម បន ហ្វូង ។ *ឧទាហរណ៍* មេគណ អនុគណ ។

គន់ (កិ.) : រកមើល ។

## សំណួរ

១. តើពុកម៉ែបានធ្វើអ្វីខ្លះ ដើម្បីចិញ្ចឹមគ្រួសារ ?

២. តើឪពុកម្ដាយមានគុណចំពោះកូនដូចម្ដេច ?

៣. តើកូនត្រូវធ្វើអ្វីខ្លះ ដើម្បីតបស្នងសងគុណចំពោះឪពុកម្ដាយ ?

៤. តើប្អូនស្រឡាញ់ឪពុកម្ដាយប្អូនដែរឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរច្រៀងចម្រៀងខាងលើឡើងវិញ ដោយធ្វើបទឱ្យបានត្រឹមត្រូវ ។

២. ចូររកបដិសព្ទនឹងពាក្យ " អត់ ធំធេង " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ស្រឡាញ់ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ពុន " ។

៥. ចូរគូសសញ្ញាព្រួញភ្ជាប់ឃ្លាខាងក្រោម ឱ្យបានជាវគ្គចម្រៀង ត្រឹមត្រូវ ។

| | |
|---|---|
| ពុកម៉ែខ្ញុំខិតខំធ្វើការ" | "ធ្វើហូរហែពុំខ្លាចនឿយហត់ |
| ខ្ញុំមានពុកម៉ែអ្នកមានគុណ | ពុកធ្វើការភ្ជួរចម្ការស្រែ ។ |
| ការងាររាជការចម្ការស្រែ" | "ទាំងទូហាពុំដែលត្អូញត្អែរ |
| "ម៉ែដេរប៉ះចម្អិនអាហារ | ធ្លាប់រែកពុនចិញ្ចឹមគ្រួសារ |

៦. ចូររកពាក្យចួននឹងពាក្យ " ធ្វើការ "

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំពាក្យ កន្សោមពាក្យ និងល្បះខាងក្រោម ។

| | | | | |
|---|---|---|---|---|
| គុណ | ការងារ | រាជការ | ភ្ជួរ | ស្រែ |
| ចម្ការ | សមុទ្រ | ត្អូញត្អែរ | ទូហារ | ចម្អិន |

យើងត្រូវតបស្នងសងគុណលោក ដោយការខិតខំរៀនសូត្រ ។

ខ្ញុំស្រឡាញ់ពុកម៉ែ ព្រោះគាត់ជាអ្នកមានគុណ បានចិញ្ចឹម និងថែរក្សាខ្ញុំគ្រប់ពេល ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញវគ្គចម្រៀងខាងក្រោម ។

| ខិតខំ រាជការ ទ្វេហារ នឿយហត់ ទ្រាំអត់ គោរព គុណ សមុទ្រ |
|---|

ពុកម៉ែខ្ញុំ ........... ធ្វើការ ទាំង ............... ពុំដែលត្អូញត្អែរ
ការងារ ............ ចម្ការស្រែ ធ្វើហូរហែពុំខ្លាច ...............
បន្ទរ ៖ មែនហើយពុំខ្លាចនឿយហត់ ។
ខ្ញុំស្រឡាញ់ ...... លោកណាស់ ព្រោះលោកចាស់ពូកែ .....
....... ធំធេងគ្មានដែនកំណត់ ទោះ ...... ក៏ប្រៀបពុំបាន
បន្ទរ ៖ មែនហើយក៏ប្រៀបពុំបាន ។

គ. ចូររៀបពាក្យកន្សោមពាក្យក្នុងប្រអប់ឱ្យបានជាល្បះត្រឹមត្រូវ ។

| | | | | | |
|---|---|---|---|---|---|
| ១. | ខ្ញុំ | ណាស់ ។ | អ្នកមានគុណ | ស្រឡាញ់ | គោរព |
| ២. | គុណ | ដែន | គ្មាន | កំណត់ ។ | ធំធេង |

ឃ. ចូរតែងល្បះតាមរូបភាពខាងក្រោមឱ្យបានពីរល្បះ ។



................................................................................ ។

................................................................................ ។

មេរៀនទី ១៣

# ការពណ៌នាអំពីមនុស្ស

**តែងសេចក្តី :** ចូរអានអត្ថបទខាងក្រោម ។ តើអត្ថបទនេះពណ៌នាពីអ្វី ?




ម្តាយខ្ញុំឈ្មោះគន្ធា គាត់មានអាយុសាមសិបប្រាំបីឆ្នាំហើយ ។ សព្វថ្ងៃគ្រួសារខ្ញុំរស់នៅភូមិត្រពាំងត្របែក ឃុំអង្គតាសោម ស្រុកត្រាំកក់ ខេត្តតាកែវ ។

ម្តាយខ្ញុំមានមាឌធំល្មម កម្ពស់ប្រហែលមួយម៉ែត្រហុកសិប សម្បុរខ្មៅស្រអែម សក់វែងស្លូត ច្រមុះស្រួច ភ្នែកធំល្មម ដៃជើងសមនឹងដងខ្លួន ។ គាត់និយាយស្តីមួយៗ តែច្បាស់ ។ នៅពេលមានបុណ្យទានម្តងៗ គាត់ស្លៀកពាក់ហូល ផាមួង អាវប៉ាក់យ៉ាងស្អាត ។ ម្តាយខ្ញុំឧស្សាហ៍ធ្វើការងារណាស់ ។ គាត់ជាអ្នករួសរាយ រាក់ទាក់ចំពោះមនុស្សទូទៅ ។ គាត់ចូលចិត្តនិយាយដាស់តឿនកូនចៅ ឱ្យខិតខំរៀនសូត្រ ។

ខ្ញុំគោរព និងស្រឡាញ់ម្តាយខ្ញុំណាស់ ព្រោះគាត់ជាអ្នកមានគុណ បានបង្កើត បីបាច់ថែរក្សាចិញ្ចឹមខ្ញុំ និងក្រុមគ្រួសារ ។

## សំណួរ

១. តើអត្ថបទនេះ ពណ៌នាពីអ្នកណា ?

២. តើម្ដាយរបស់គេ ឈ្មោះអ្វី ? អាយុប៉ុន្មាន ? រស់នៅឯណា ?

៣. តើម្ដាយរបស់គេមានមាឌ កម្ពស់ សម្បុរ សក់ មុខមាត់ ដៃជើង និយាយដូចម្ដេច ?

៤. តើគាត់មានទំនាក់ទំនង ចំពោះមនុស្សទូទៅយ៉ាងដូចម្ដេច ?

៥. តើគេមានទឹកចិត្តដូចម្ដេច ចំពោះម្ដាយ និងក្រុមគ្រួសាររបស់គេ ?

# គម្រោង

# ការពណ៌នាអំពីមនុស្ស

១. សេចក្តីផ្តើម

បង្ហាញពីមនុស្សនោះដោយប្រាប់ ៖ ឈ្មោះ ភេទ អាយុ ទីលំនៅសព្វថ្ងៃ ។

២. តួសេចក្តី

- រូបរាង : មាឌ(តូច ធំ ស្គម ធាត់ ...) កម្ពស់(ទាប ខ្ពស់ ...) សម្បុរ(ស ខ្មៅ ស្រអែម ...) មុខមាត់(ភ្នែក ច្រមុះ មាត់ ត្រចៀក សក់ ទឹកមុខ ...) ជើង ដៃ (មាំមួន សមនឹងដងខ្លួន វែងខ្លី ...) ។
- អាកប្បកិរិយា ៖ សកម្មភាពផ្សេងៗ ដូចជា ការស្លៀកពាក់ ការនិយាយស្តី ការធ្វើការងារផ្សេងៗ ។ល ។
- ចិត្តគំនិត :

**ចំណុចល្អ :**

- រៀបរាប់ពីសកម្មភាពដែលគាត់បានធ្វើ តើគាត់បានធ្វើអ្វីខ្លះ ?
- ឧស្សាហ៍ព្យាយាម យកចិត្តទុកដាក់(លើការសិក្សា ធ្វើការងារ...)
- ស្លូតត្រង់មានសណ្តាប់ធ្នាប់ ផ្ចិតផ្ចង់ ...
- ឆ្លាតវាងវៃ ឆាប់យល់ ចេះចាំ ...
- ចិត្តទូលាយ ជួយទុក្ខធុរៈអ្នកដទៃ មិត្តភក្តិ ... ។

**ចំណុចមិនល្អ :**

- តើមានចំណុចមិនល្អត្រង់ណាខ្លះ ? *ឧទាហរណ៍* លេងសើច ច្រើន ពេលខ្លះមកសាលារៀនយឺត និយាយឥតប្រយោជន៍ ច្រើន ... ។

៣. សេចក្តីបញ្ចប់

- វាយតម្លៃ : ជាមនុស្សល្អ ចេះជួយគ្នាក្នុងគ្រាក្រ ... ។
- ចំណាប់អារម្មណ៍ : បង្ហាញមនោសញ្ចេតនារបស់អ្នកចំពោះមនុស្សនោះ គោរព ស្រឡាញ់ គួរយកតម្រាប់តាម ... ។

## លំហាត់

ចូរអ្នកសរសេរតែងសេចក្ដីពណ៌នាពីគ្រូរបស់អ្នក ដោយឆ្លើយនឹងសំណួរខាងក្រោម ។

១. តើគ្រូរបស់ប្អូនជាលោកគ្រូ ឬអ្នកគ្រូ ? ឈ្មោះអ្វី ? អាយុប៉ុន្មាន ? រស់នៅឯណា ?

២. តើគ្រូរបស់ប្អូនមានមាឌ កម្ពស់ សម្បុរ សក់ មុខ មាត់ ដៃ ជើង និយាយដូចម្ដេច ?

៣. តើគ្រូរបស់ប្អូន ស្លូត ឬកាច ?

៤. តើគ្រូរបស់ប្អូនធ្វើកិច្ចការអ្វីខ្លះ ?

៥. តើប្អូនចូលចិត្តគ្រូរបស់ប្អូនឬទេ ? ព្រោះអ្វី ?

*កំណត់សម្គាល់ :* ពេលអ្នកសរសេរ ត្រូវសរសេរតាមគម្រោងខាងលើ ។

## មេរៀនទី ១៤

# រឿងគោ ក្របីគ្មានធ្មេញលើ

**អំណាន ៖** ចូរអានអត្ថបទរឿងខាងក្រោម រួចឆ្លើយនឹងសំណួរ ។



កាលពីព្រេងនាយមានខ្លាមួយសួរគោថា ខ្លួនបងគោឯងធំ ហេតុអ្វីក៏ទ្រាំឱ្យមនុស្សទឹមដូច្នេះ ? គោតប ៖ “ មនុស្សតូចមែន! ប៉ុន្តែមានប្រាជ្ញា ”។ ខ្លាឆ្ងល់ក៏សួរកសិករ ៖ “ ពូ! ឯណាប្រាជ្ញារបស់ពូ ? ”។ កសិករតប ៖ “ ប្រាជ្ញាពូទុកនៅឯផ្ទះ ចាំពូទៅយកឱ្យមើល តែពូសុំចងឯងសិន ព្រោះខ្លាចឯងស៊ីគោខ្ញុំ ”។ ខ្លាយល់ព្រមឱ្យកសិករចងខ្លួនជាប់ ។ ពេលនោះកសិករទាញដំបងសំពងខ្លា ហើយប្រាប់ថា នេះហើយប្រាជ្ញាមនុស្ស! គោ និងក្របីឃើញដូច្នោះ ក៏សើចហើយដួល មាត់បុកត្រូវនឹងថ្មបាក់ធ្មេញលើអស់រលីង ។

ហេតុនេះហើយបានជាគោ និងក្របី គ្មានធ្មេញខាងលើរហូតដល់សព្វថ្ងៃនេះ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

កសិករ អានថា កៈ- សិ- ក

ប្រាជ្ញា អានថា ប្រាច- ញ៉ា

ខ. ពន្យល់ពាក្យ

ប្រាជ្ញា (ន.) : ការយល់ដឹងជាក់ច្បាស់ ។

ទឹម (ន.) : ដាក់នឹមលើ- ក បំពាក់ឱ្យសត្វពាហនៈឱ្យអូសនង្គ័ល ។

សំពង (កិ.) : វាយពេញកម្លាំងដៃដោយដំបង ឬកំណាត់ឈើ ។

គ. បដិសព្ទ

ព្រម ≠ បដិសេធ ចង ≠ ស្រាយ

ឃ. វេវចនសព្ទនឹងពាក្យ " ធ្មេញ "

ធ្មេញ ទន្ត

ង. សទិសសព្ទនឹងពាក្យ " សួរ "

សួរ (កិ.) : ពោលពាក្យឆ្ពោះទៅរកអ្នកដទៃឱ្យគេឆ្លើយ ។

*ឧទាហរណ៍* សួរសំណួរ ។

សួគ៌ (ន.) : ឋានទេវ ឋានសួគ៌ ។

សួ (កិ.) : សសៀរនៅលើស្នួ ឬលើអ្វីៗមានគ្រឿងតោង ។

## សំណួរ

១. តើខ្លានិយាយជាមួយគោដូចម្ដេច ?

២. តើខ្លាសួរកសិកររកអ្វី ? តើកសិករឆ្លើយដូចម្ដេច ?

៣. ហេតុអ្វីបានជាគោ និងក្របី បាក់ធ្មេញលើអស់ ?

៤. តើនៅក្នុងរឿងនេះ មានតួអង្គណាខ្លះ ?

៥. បើសិនជាមានបញ្ហាកើតមានចំពោះមុខ តើអ្នកយកអ្វីមកដោះស្រាយ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " សើច "។

២. ចូររកវេវចនសព្ទនឹងពាក្យ " សំពង "។

៣. ចូររកសទិសសព្ទនឹងពាក្យ " សព្វ "។

៤. ក្នុងចំណោមសត្វទាំងអស់ខាងក្រោម តើសត្វណាខ្លះជាសត្វ ពាហនៈ ?

| | | | | | | |
|---|---|---|---|---|---|---|
| គោ | មាន់ | ទា | ដំរី | ឆ្កែ | ជ្រូក | |
| សេះ | ឆ្មា | ក្ងាន | ក្របី | សេក | សារិកា | ស្វា |

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### រឿង គោក្របីគ្មានធ្មេញលើ

ខ្លាឆ្ងល់ក៏សួរកសិករ ៖ "ពូ! ឯណាប្រាជ្ញារបស់ពូ ? "។ កសិករតប ៖ " ប្រាជ្ញាពូទុកនៅឯផ្ទះចាំពូទៅយកឱ្យមើល តែពូសុំចងឯងសិនព្រោះខ្លាចឯងស៊ីគោខ្ញុំ "។ ខ្លាយល់ព្រមឱ្យកសិករចងខ្លួនជាប់ ។ កសិករទាញដំបងសំពងខ្លាហើយប្រាប់ថា នេះហើយប្រាជ្ញាមនុស្ស! គោនិងក្របីឃើញដូច្នោះក៏សើចហើយដួល មាត់បុកត្រូវនឹងថ្មបាក់ធ្មេញលើអស់រលីង ។

## សំណួរ

១. តើខ្លាសួរកសិករដូចម្ដេច ?

២. តើកសិករបានធ្វើដូចម្ដេចខ្លះចំពោះខ្លា ?

៣. តើមានអ្វីកើតឡើងចំពោះគោនិងក្របី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ប្រាជ្ញា សំពង "។

២. ចូររកបដិសព្ទនឹងពាក្យ " ព្រម ចង "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ធ្មេញ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " សួរ "។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញកថាខណ្ឌខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| ពាហនៈ | កម្លាំង | ជីវភាព | ប្រសើរ | ចិញ្ចឹម |

សត្វគោ ក្របី សេះ ជា ............ អូសទាញដ៏សំខាន់របស់កសិករ ។ ក្រៅពីសត្វ .............. កសិករយើងត្រូវចិញ្ចឹមសត្វផ្សេងៗ ដូចជាជ្រូក មាន់ ទា ។ល ។ ដើម្បីបង្កើន ........... គ្រួសារ ។ លើសពីនេះ ការ ........... ត្រី កង្កែប អន្ទង់ សត្វក្រួចជាដើម គឺធ្វើឱ្យជីវភាពគ្រួសារកាន់តែ ........ ឡើង ។

គ. ចូរសរសេរអក្សរផ្តង់ព្យញ្ជនៈ " ព " និងពាក្យ " ពាហនៈ "។



បោះពុម្ពផ្សាយឆ្នាំ ២០២០

មេរៀនទី
១៥

# អំពីនាម

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ខាងក្រោម រួចសង្កេតមើលពាក្យដែលមានពណ៌ក្រហម ៖

**សុខា**ចិញ្ចឹមជ្រូកពីរក្បាល និង**មាន់ ទា**ជាច្រើនក្បាលទៀត ។ គេតែងបោសសម្អាត**ទ្រុងជ្រូក មាន់ ទា** ជារៀងរាល់ថ្ងៃ ដើម្បីកុំឱ្យសត្វទាំងនោះមានជំងឺ ។ សុខាយក**លាមក**សត្វទាំងអស់នោះ ទៅចាក់ក្នុងរណ្ដៅជី ក្បែរ**ដើមស្វាយ** ឯ**ចម្ការ**ក្រោយផ្ទះ ។ នៅពេលបោសសម្អាត សុខាតែងពាក់**ម៉ាស់**ការពារជានិច្ច ។ ក្រោយពេលបោសសម្អាតរួច គេងូត**ទឹក** ដុស**សាប៊ូ**សម្អាតខ្លួនប្រាណ ដើម្បីកុំឱ្យឆ្លងមេរោគ ។

| | | |
|---|---|---|
| ពាក្យ ៖ | - សុខា | ជាពាក្យ សម្គាល់មនុស្ស |
| | - ជ្រូក មាន់ ទា | ជាពាក្យ សម្គាល់សត្វ |
| | - ទ្រុង លាមក ម៉ាស់ ទឹក សាប៊ូ | ជាពាក្យ សម្គាល់វត្ថុ |
| | - ដើមស្វាយ | ជាពាក្យ សម្គាល់រុក្ខជាតិ |
| | - ចម្ការ | ជាពាក្យ សម្គាល់ទីកន្លែង |

ពាក្យទាំងអស់នេះ ជានាម ។

*នាម ជាពាក្យសម្រាប់សម្គាល់ មនុស្ស សត្វ វត្ថុ ទីកន្លែង និងរុក្ខជាតិ ។*

## លំហាត់

១. ក្នុងចំណោមពាក្យខាងក្រោម តើពាក្យណាខ្លះជានាម ?

| | | | | |
|---|---|---|---|---|
| ជីតា | ដើរ | ខ្មៅ | ក្របី | សរសេរ |
| សាលារៀន | ដើមត្នោត | ក្រហម | កាតាប | ប៊ិក |

២. តើពាក្យណាខ្លះ ត្រូវនឹងរូបភាព ? ចូរគូសសញ្ញាព្រួញភ្ជាប់ពាក្យទៅនឹងរូបភាពឱ្យបានត្រឹមត្រូវ ហើយប្រាប់ថាពាក្យនីមួយៗជានាមសម្គាល់អ្វី ?








ក. ដើមឈើ ខ. វាលស្រែ គ. រមាស ឃ. សៀវភៅ ង. អ្នកគ្រូ

៣. ចូរជ្រើសរើសពាក្យនាមក្នុងប្រអប់ទៅបំពេញចន្លោះល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| សិស្ស | ដើមឈើ | បណ្ណាល័យ | គោក្របី | លោកគ្រូ |

ក. ........ ជាសត្វមានសារៈសំខាន់ចំពោះកសិករ ។

ខ. យើងជា ....... ត្រូវស្ដាប់ដំបូន្មានអ្នកគ្រូ ..... ។

គ. ........ ផ្ដល់ប្រយោជន៍ច្រើនយ៉ាងណាស់ ។

ឃ. ពេលទំនេរយើងនាំគ្នាទៅអានសៀវភៅ នៅឯ ........ ។

៤. ចូរតែងល្បះនឹងពាក្យជានាម " គោ មាន់ ជ្រូក " ក្នុងមួយពាក្យឱ្យបានមួយល្បះ ។

មេរៀនទី

១៦

# អ្នកមានគុណ

## ការស្តាប់ ៖ ចូរស្តាប់អត្ថបទ រួចឆ្លើយនឹងសំណួរ ។



### សំណួរ

១. តើកុលបុត្រ កុលធីតាត្រូវធ្វើអ្វី ចំពោះអ្នកមានគុណ ?

២. តើនរណាខ្លះជាអ្នកមានគុណរបស់យើង ?

៣. តើអ្នកមានគុណមានបំណងប្រាថ្នាដូចម្ដេចចំពោះយើង ?

៤. តើអ្នកគួរធ្វើអ្វីខ្លះ ដើម្បីក្លាយជាកូនកតញ្ញូ ?

### លំហាត់

១. ចូរពន្យល់ពាក្យ “ វ័យ កតញ្ញូ អាណាព្យាបាល ”។

២. ចូររកបដិសព្ទនឹងពាក្យ “ គុណ ថ្លៃថ្នូរ ”។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ កុលបុត្រ កុលធីតា ”។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### អ្នកមានគុណ

យើងជាកុលបុត្រកុលធីតាខ្មែរ ត្រូវមានចិត្តកតញ្ញូចំពោះអ្នកមានគុណ ។ អ្នកមានគុណដូចជាឪពុក ម្ដាយ អាណាព្យាបាលជាដើម បានចិញ្ចឹមបីបាច់យើងតាំងពីវ័យកុមារ រហូតដល់វ័យសិក្សាមានចំណេះដឹងខ្ពស់ មានសេចក្ដីថ្លៃថ្នូរនិងមានអនាគតល្អ ។

## សំណួរ

១. តើកុលបុត្រ កុលធីតាធ្វើអ្វីខ្លះចំពោះអ្នកមានគុណ?

២. តើឪពុកម្ដាយបានធ្វើអ្វីខ្លះចំពោះយើង ?

៣. តើអត្ថបទនេះមានគំនិតអប់រំដូចម្ដេច ?

## លំហាត់

១. ចូរពន្យល់ពាក្យ “ អាណាព្យាបាល វ័យ ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ គុណ ថ្លៃថ្នូរ ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ កុលបុត្រ កុលធីតា ” ។

ខ. ចូររៀបពាក្យ កន្សោមពាក្យខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| ១. | យើង | ឪពុកម្ដាយ ។ | ស្រឡាញ់ | គោរព |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ២. | លោក | ទាំងពីរ | សព្វថ្ងៃ | ខិតខំ | រកស៊ី | ចិញ្ចឹម | យើង ។ | ដើម្បី |

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ៣. | ចំពោះ | លោក | យើង | កតញ្ញូ | ត្រូវ | មាន | ចិត្ត | ជានិច្ច ។ |

គ. ចូរសរសេរបំពេញល្បះតាមគំនិតផ្ទាល់ខ្លួន ។

១.	ឪពុកម្ដាយជាអ្នក .................... ចំពោះបុត្រាបុត្រី ។

២.	លោកទាំងពីរខិតខំ .................. ដើម្បីចិញ្ចឹមកូនចៅ ។

៣.	អ្នកមានគុណមានដូចជា .................................. ។

ឃ. ចូរតែងល្បះតម្រូវតាមរូបភាពខាងក្រោមឱ្យបានត្រឹមត្រូវ ។



១. ..........................................

.................................... ។



២. ..........................................

.................................... ។

មេរៀនទី
១៧

# អនាម័យ

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




មានកុមារម្នាក់មិនសូវខិតខំរៀនសូត្រ និងមានទម្លាប់អាក្រក់មិនសម្អាតខ្លួនប្រាណ ។ រាល់ថ្ងៃ សម្លៀកបំពាក់របស់គេមិនដែលស្អាត ។ មុនពេលបរិភោគនំចំណី កុមាររូបនេះមិនដែលលាងដៃនឹងសាប៊ូសោះ ។ ពេលខ្លះ វាយកដៃកខ្វក់នោះទៅជូតនឹងខ្លួនប្រាណ ឬសម្លៀកបំពាក់ ។ ក្រោយមកវាឈឺ សុខភាពវាទ្រុឌទ្រោម និងចុះខ្សោយជាលំដាប់ ។

ក្រោយពីបានទទួលការណែនាំពីគ្រូប្រចាំថ្នាក់ មិត្តភក្តិ និងអ្នកគ្រូពេទ្យអំពីការថែទាំសុខភាពនិងការរស់នៅស្អាតរួចមក កុមារនោះបានភ្ញាក់រឭក និងអនុវត្តតាមក្បួនអនាម័យ ដូចជា លាងដៃនឹងសាប៊ូមុននឹងញ៉ាំចំណី ។ ដូច្នេះសុខភាពរបស់កុមារក៏ល្អឡើងវិញ ។

*" អនាម័យនាំមកនូវសុខភាពល្អ "*

## ការរៀនពាក្យ

ក. អំណានពាក្យ

បរិភោគ អានថា ប-រិ-ភោក

អនុវត្ត អានថា អៈ-នុ-វ័ត

សុខភាព អានថា សុ-ខៈ-ភាប

ខ. ពន្យល់ពាក្យ

បរិភោគ (កិ.) : ការហូប ពិសានំ ចំណី អាហារ ។

អនុវត្ត (កិ.) : ធ្វើតាម ប្រតិបត្តិតាម គោរពតាម ។

សុខភាព (ន.) : ភាពជាសុខ សេចក្ដីសុខ ។

គ. បដិសព្ទ

មុន ≠ ក្រោយ

ខ្ជិល ≠ ឧស្សាហ៍

ឃ. វេវចនសព្ទនឹងពាក្យ " ល្អ "

ល្អ ត្រឹមត្រូវ ប្រពៃ ហ្មត់ហ្មង

ង. សទិសសព្ទនឹងពាក្យ " រស់ "

រស់ (គុ.) : មានជីវិតរស់នៅ មិនទាន់ស្លាប់ ។

រស (ន.) : រសជាតិអាហារ រសជាតិនំចំណី ។

## សំណួរ

១. តើកុមារមានទម្លាប់អាក្រក់មានលក្ខណៈយ៉ាងណាខ្លះ ?

២. មុនពេលញ៉ាំនំចំណី តើកុមាររូបនោះបានធ្វើដូចម្ដេច ?

៣. ដោយសារគ្មានអនាម័យនាំឱ្យកុមាររូបនោះមានសុខភាពដូចម្ដេច ?

៤. ហេតុអ្វីបានជាសុខភាពរបស់កុមារនោះល្អឡើងវិញ ?

## លំហាត់

១. ចូរចាប់ដៃគូដើម្បី អានពាក្យ ឬកន្សោមពាក្យខាងក្រោមប្រណាំងគ្នា ។

| | | | |
|---|---|---|---|
| សម្អាត | សាប៊ូ | បរិភោគ | កខ្វក់ |
| សុខភាព | អនុវត្ត | ទ្រុឌទ្រោម | អនាម័យ |

២. ចូរពន្យល់ពាក្យ " អនាម័យ " ។

៣. ចូររកបដិសព្ទនឹងពាក្យ " ទ្រុឌទ្រោម " ។

៤. ចូររកវេវចនសព្ទនឹងពាក្យ " ដៃ " ។

៥. ចូររកសទិសសព្ទនឹងពាក្យ " វា " ។

៦. ចូរស្រង់ពាក្យជា " នាម " ឱ្យបានប្រាំពាក្យពីអត្ថបទខាងលើ ។

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម ។

### ការភ្ញាក់រឭក

ខ្ញុំឃើញកុមារម្នាក់ខ្ជិលច្រអូសក្នុងការរៀនសូត្រ ហើយថែមទាំងខ្ជិលសម្អាតខ្លួនប្រាណទៀតផង។ មុនពេលហូបអាហារ គេមិនដែលលាងដៃនឹងសាប៊ូទេ ។ ក្រោយមក សុខភាពវាទ្រុឌទ្រោម និងចុះខ្សោយជាលំដាប់ ។ ក្រោយពីបានទទួលការណែនាំអំពីការថែទាំសុខភាពនិងការរស់នៅស្អាតរួចមក កុមាររូបនោះមានការភ្ញាក់រឭក និងអនុវត្តតាមក្បួនអនាម័យ សុខភាពវាក៏ល្អឡើងវិញ ។

## សំណួរ

១. មុនពេលហូបអាហារតើកុមារនោះបានធ្វើដូចម្ដេច ?

២. ដោយសារគ្មានអនាម័យ តើកុមារនោះមានសុខភាពដូចម្ដេច ?

៣. ហេតុអ្វីបានជាសុខភាពកុមារល្អឡើងវិញ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " អនុវត្ត សុខភាព "។

២. ចូររកបដិសព្ទនឹងពាក្យ " ខ្ជិល មុន "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ល្អ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " រស់ "។

ខ. ចូររកពាក្យ និងកន្សោមពាក្យមកបំពេញក្នុងអត្ថបទឱ្យបានត្រឹមត្រូវ ។

ខ្ញុំឃើញកុមារម្នាក់ខ្ជិលច្រអូសក្នុងការរៀនសូត្រ ហើយថែមទាំង ............. ខ្លួនប្រាណទៀតផង ។ រាល់ពេលញ៉ាំ ............ កុមារនោះមិនបាន ..........ទេ ។ ក្រោយមកសុខភាពវា ................ និងចុះខ្សោយជាលំដាប់ ។ កុមារនោះបាន ............. និងអនុវត្តតាមក្បួនអនាម័យ ......វាក៏ល្អឡើងវិញ ។

គ. ចូរដាក់ចំណងជើងរូបភាព ។








១. .............  ២. .............  ៣. .............

ឃ. ចូរសរសេរតែងសេចក្ដីពណ៌នាពីមនុស្សណាម្នាក់ដែលអ្នកស្គាល់ ។

# គម្រោង

១. សេចក្ដីផ្ដើម

បង្ហាញពីមនុស្សនោះដោយប្រាប់ ៖ ឈ្មោះ ភេទ អាយុ ទីលំនៅសព្វថ្ងៃ ។

២. តួសេចក្ដី



- រូបរាង ៖ មាឌ(តូច ធំ ស្គម ធាត់ ...)
  កម្ពស់(ទាប ខ្ពស់ ...) សម្បុរ(ស ខ្មៅស្រអែម ...)
- មុខមាត់(ភ្នែក ច្រមុះ មាត់ ត្រចៀក សក់
  ទឹកមុខ ...) ជើង ដៃ(មាំមួន សមនឹងដងខ្លួន
  វែង ខ្លី ...) ។
- អាកប្បកិរិយា ៖
  សកម្មភាពផ្សេងៗដូចជាការស្លៀកពាក់
  ការនិយាយស្ដី ការធ្វើការងារផ្សេងៗ ។ល ។
- ចិត្តគំនិត ៖
  - ចំណុចល្អ ..........................................................
  - ចំណុចមិនល្អ ......................................................

៣. សេចក្ដីបញ្ចប់

- វាយតម្លៃ ៖ ជាមនុស្សល្អ ចេះជួយគ្នាក្នុងគ្រាក្រ ... ។
- ចំណាប់អារម្មណ៍ ៖ បង្ហាញមនោសញ្ចេតនារបស់អ្នកចំពោះមនុស្សនោះ
  គោរព ស្រឡាញ់ គួរយកតម្រាប់តាម ... ។

មេរៀនទី ១៨

# កិច្ចការយើងនៅផ្ទះ

**អំណាន :** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ : បទកាកគតិ

កូនទៅសាលា ខិតខំសិក្សា រៀនលេខអក្សរ
ពេលមកដល់ផ្ទះ ខំរៀនបន្ត ឱ្យចងចាំល្អ
នោះទើបប្រសើរ ។

រៀនរួចរូតរះ ជួយកិច្ចការផ្ទះ ម៉ាក់ប៉ាលោកប្រើ
ជួយតាមកម្លាំង កុំគិតគេចដើរ ទើបគេសរសើរ
ថាជាបុត្រល្អ ។

កូនល្អចេះជួយ ខិតខំលើកស្ទួយ គ្រួសារបវរ
ស្តាប់ដំបូន្មាន ដោយចិត្តស្មោះសរ ពុកម៉ែត្រេកអរ
គ្រួសារសុខសាន្ត ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ដំបូន្មាន អានថា ដំ-បូន-មាន

បុត្រ អានថា បុត

បវរ អានថា ប-វ៉

សុខសាន្ត អានថា សុក-សាន

ខ. ពន្យល់ពាក្យ

ដំបូន្មាន (ន.) : សេចក្ដីទូន្មាន ឱវាទ ពាក្យប្រដៅ។

បវរ (គុ.) : ប្រសើរ លើសលប់ ថ្លៃថ្លា។

ស្មោះសរ (ន.) : សេចក្ដីរីករាយរាក់ទាក់។

សុខសាន្ត (គុ.) : សុខស្ងប់។

គ. បដិសព្ទ

សុខសាន្ត ≠ ទុក្ខព្រួយ

ស្មោះ ≠ ក្បត់

ឃ. វេវចនសព្ទនឹងពាក្យ " រូតរះ "

រូតរះ ម៉ឺងម៉ាត់ ឃ្មាតឃ្មី រួសរាន់ រហ័សរហួន

## សំណួរ

១. តើនៅក្នុងសាលារៀនកូនបានធ្វើអ្វីខ្លះ ?

២. តើនៅផ្ទះកូនបានធ្វើអ្វីខ្លះ ?

៣. តើកូនចូលចិត្តជួយធ្វើកិច្ចការផ្ទះជាមួយឪពុកម្ដាយកូនដែរឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " កិច្ចការ អក្សរ "។

២. ចូររកបដិសព្ទនឹងពាក្យ " ចេះ "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " បុត្រ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " គេ "។

៥. ចូររកពាក្យចួនពីក្នុងមេសូត្រ ដែលចួននឹងពាក្យដូចខាងក្រោម ។

វគ្គទី១ : សាលា ចួននឹង ........................ ។

អក្សរ ចួននឹង ........................ ។

៦. ចូរស្រង់ពាក្យជានាមឱ្យបានប្រាំពាក្យពីក្នុងមេសូត្រខាងលើ ។

៧. ចូរគូសសញ្ញា “ ✓ ” ក្នុងប្រអប់ ចម្លើយមួយត្រឹមត្រូវដែលជាអត្ថន័យរបស់មេសូត្រខាងលើ ។

- ☐ នៅផ្ទះកូននាំគ្នាលេងសប្បាយ ។
- ☐ នៅផ្ទះកូនត្រូវជួយធ្វើស្រែចម្ការ ។
- ☐ នៅផ្ទះកូនត្រូវមើលទូរទស្សន៍ ។
- ☐ នៅផ្ទះកូនត្រូវខំរៀនបន្ថែម និងជួយធ្វើកិច្ចការផ្ទះ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គមេសូត្រខាងក្រោម ។

| | | |
|---|---|---|
| កូនទៅសាលា | ខិតខំសិក្សា | រៀនលេខអក្សរ |
| ពេលមកដល់ផ្ទះ | ខំរៀនបន្ត | ឱ្យចងចាំល្អ |
| | នោះទើបប្រសើរ ។ | |
| រៀនរួចរូតរះ | ជួយកិច្ចការផ្ទះ | ម៉ាក់ប៉ាលោកប្រើ |
| ជួយតាមកម្លាំង | កុំគិតគេចជើរ | ទើបគេសរសើរ |
| | ថាជាបុត្រល្អ ។ | |

## សំណួរ

១. តើនៅសាលាកូនរៀនអ្វីខ្លះ ?

២. ដើម្បីក្លាយជាកូនល្អ តើកូនត្រូវធ្វើដូចម្ដេច ?

៣. តើអត្ថបទមេសូត្រនេះនិយាយអំពីអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ដំបូន្មាន បវរ " ។

២. ចូររកបដិសព្ទនឹងពាក្យ " សុខសាន្ត ស្មោះ" ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " រូតរះ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " គេ " ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងវគ្គនៃមេសូត្រខាងក្រោម ។

ប្រើ  បវរ  ដើរ  ជួយ  ស្មោះសរ  ផ្ទះ  ប្រសើរ

| | | |
|---|---|---|
| រៀនរួចរូតរះ | ជួយកិច្ចការ ........ | ម៉ាក់ប៉ាលោក ......... |
| ជួយតាមកម្លាំង | កុំគិតគេច ............ | ទើបគេសរសើរ |
| | ថាជាបុត្រល្អ ។ | |
| កូនល្អចេះ ........ | ខិតខំលើកស្ទួយ | គ្រួសារ ........ ។ |
| ស្តាប់ដំបូន្មាន | ដោយចិត្ត ......... | ពុកម៉ែត្រេកអរ |
| | គ្រួសារសុខសាន្ត ។ | |

គ. ចូរតែងល្បះតាមរូបខាងក្រោមឱ្យបានត្រឹមត្រូវ ។



កុមារី ............ ។



............ កំពុងរៀន ។

ឃ. ចូរតែងល្បះនឹងពាក្យ " គ្រួសារ ប្រសើរ ខិតខំ "មួយពាក្យឱ្យបានមួយល្បះ ។

១. ............................................................................ ។

២. ............................................................................ ។

៣. ............................................................................ ។

មេរៀនទី

១៩

# តួអង្គ

**បំណិន :** ចូរអានរឿងនិទានខាងក្រោម និងកត់ចំណាំតួអង្គក្នុងរឿង ។



## រឿងទឹកចិត្តមេមាន់

កសិករម្នាក់បានចិញ្ចឹមមេមាន់មួយ និងមេទាមួយ ។

មេមាន់ភ្ញាស់បានកូនមួយសម្បុក ។ មេទាក៏ភ្ញាស់បានកូនមួយសម្បុកដែរហើយក៏ចាកចោលកូនទៅ ។ មេមាន់ឃើញកូនទាកំព្រាក៏យកមកចិញ្ចឹម ។ កូនមាន់ឆ្ងល់ក៏សួរ ៖ " ម៉ែ! ហេតុអ្វីបានជាម៉ែចិញ្ចឹមកូនទា ? " ។ មេមាន់ឆ្លើយ ៖ " កូនទាកំព្រា វាត្រូវការការថែទាំដូចកូនដែរ " ។ ម៉ែចិញ្ចឹមវា ព្រោះតែវាក៏មានសិទ្ធិរស់រានមានជីវិតដូចកូនដែរ ។ កូនមាន់សួរ ៖ " ម៉ែគិតចិញ្ចឹមកូនទារហូតឬ ? " ។ មេមាន់ឆ្លើយ ៖ " ទេ! ដល់វាគ្រប់អាយុម៉ែឱ្យវាទៅរៀនជាមួយកូន ហើយដល់ពេលវាអាចចិញ្ចឹមខ្លួនបានម៉ែឈប់ជួយវាហើយ " ។ កូនៗលាន់មាត់ ៖ " យី! ម៉ែខ្ញុំចិត្តល្អណាស់ " ។

តាមរយៈរឿងនិទានខាងលើនេះ យើងឃើញមានតួអង្គ កសិករ មេមាន់ កូនមាន់ មេទា និងកូនទា ។

តួអង្គ គឺជាមនុស្ស សត្វ វត្ថុ រុក្ខជាតិដែលធ្វើសកម្មភាពនៅក្នុងរឿង ។

## លំហាត់

ចូរអានរឿងនិទានខាងក្រោម រួចប្រាប់ពីតួអង្គទាំងអស់នៅក្នុងរឿង ។

### រឿងអណ្តាត និងបេះដូង

ថ្ងៃមួយបុរសម្នាក់បង្គាប់ទៅអ្នកបម្រើឱ្យយកជ្រូកនៅក្នុងទ្រុងទៅសម្លាប់ ។ បុរសនោះប្រាប់អ្នកបម្រើឱ្យយកអ្វីដែលល្អជាងគេនៅក្នុងខ្លួនជ្រូកនេះឱ្យទៅគាត់ ។ អ្នកបម្រើធ្វើតាមបញ្ជា ហើយក៏យកបេះដូង និងអណ្តាតទៅជូនថៅហ្វាយ ។ បួនប្រាំថ្ងៃក្រោយមក ថៅហ្វាយក៏បង្គាប់អ្នកបម្រើឱ្យចាប់ជ្រូកមួយទៀតទៅសម្លាប់ ហើយឱ្យយកអ្វីដែលអាក្រក់បំផុតក្នុងខ្លួនជ្រូកមកឱ្យគាត់ ។ អ្នកបម្រើនោះក៏យកបេះដូង និងអណ្តាតមកជូនថៅហ្វាយដូចមុនទៀត ។ ថៅហ្វាយក៏សួរ ៖ " ហេតុដូចម្តេចបានជាឯងនៅតែយកបេះដូង និងអណ្តាតមកដដែលៗដូច្នោះ ? " ។



បាវក៏ឆ្លើយថា សូមលោកជ្រាប " ល្អ ឬអាក្រក់ " មកតែពីសម្តី និងចិត្តនេះឯង គឺអណ្តាត និងបេះដូង ។

## សំណួរ

១. តើតួអង្គក្នុងរឿងនេះមាននរណាខ្លះ ?

២. តើលោកថៅហ្វាយប្រាប់ទៅនរណាឱ្យសម្លាប់ជ្រូក ?

៣. តើលោកថៅហ្វាយឱ្យអ្នកបម្រើសម្លាប់ជ្រូក យកអ្វីមកជូនគាត់ ?

៤. ហេតុអ្វីបានជាអ្នកបម្រើយកបេះដូង និងអណ្តាត ជូនថៅហ្វាយដដែលៗ ?

មេរៀនទី

២០

# មេរៀនកូនចាំ

**អំណាន :** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ : បទកាកគតិ

ម៉ែអើយស្តាប់ខ្ញុំ ពុកអើយកូនសុំ ចង្អុលទិសប្រាប់
តាមដែលកូនរៀន ពុកប្រៀនម៉ែប្រាប់ ថាបើនឹងរាប់
ទិសធំមានបួន ។

ទិសបូព៌ទក្សិណ បស្ចិមរាប់មិន មានខុសនឹងក្បួន
ទើបដល់ឧត្តរ បន្តមិនស្ទួន កូនចេះមាំមួន
ទិសតូចបួនទៀត ។

អាគ្នេយ៍និរតី ពាយ័ព្យគ្រប់បី កូនរាប់មិនឃ្លាត
ឦសានគ្រប់បួន ដោយខ្ញុំប្រឹងឆ្លៀត សិក្សាឱ្យឃ្មាត
តាមលោកទាំងពីរ ។

*(ដកស្រង់ពីសៀវភៅ "យើងរៀនអាន" បោះពុម្ពឆ្នាំ ១៩៧២)*

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| បូព៌ | អានថា | បូ |
| ទក្សិណ | អានថា | ទ័ក-សិន |
| បស្ចិម | អានថា | ប័ស-ចិម |
| ឧត្តរ | អានថា | អ៊ុត-ដ |
| ពាយ័ព្យ | អានថា | ពា-យ័ប |

ខ. ពន្យល់ពាក្យ

បូព៌ (ន.) : ទិសខាងកើត ។

ទក្សិណ (ន.) : ទិសខាងត្បូង ។

ឧត្តរ (ន.) : ទិសខាងជើង ។

បស្ចិម (ន.) : ទិសខាងលិច ។

គ. បដិសព្ទ

ខ្មៅឃ្មាត ≠ ច្រអូស        មាំមួន ≠ ទន់ជ្រាយ

ឃ. វេវចនសព្ទនឹងពាក្យ " ប្រឹង "

ប្រឹង ខិតខំ ប្រឹងប្រែង សង្វាត ព្យាយាម ឱហាត

ង. សទិសសព្ទនឹងពាក្យ " ពីរ "

ពីរ (គុ.) : មួយគូបគ្នា គឺមួយនិងមួយ (២) ។

ពី (និ.)(អា.និ) : អំពី ពីនេះពីនោះ ។ *ឧទាហរណ៍* មកពីណា ។

## សំណួរ

១. តើអត្ថបទមេសូត្រខាងលើ កូននិយាយពីអ្វីប្រាប់ឪពុកម្ដាយ ?

២. តើទិសធំទាំងអស់មានប៉ុន្មាន ? មានឈ្មោះអ្វីខ្លះ ?

៣. តើទិសតូចទាំងអស់មានប៉ុន្មាន ? មានឈ្មោះអ្វីខ្លះ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ “ ខុស ធំ មាំមួន ” ។

២. ចូររកវេវចនសព្ទនឹងពាក្យ “ បូពិ៌ ទក្សិណ បស្ចិម ឧត្តរ ” ។

៣. ចូររកពាក្យចួនក្នុងវគ្គទី ១ និងទី ២ ។

ម៉ែអើយស្តាប់ខ្ញុំ ពុកអើយកូនសុំ ចង្អុលទិសប្រាប់
តាមដែលកូនរៀន ពុកប្រៀនម៉ែប្រាប់ ថាបើនឹងរាប់
ទិសធំមានបួន ។

ទិសបូពិ៌ទក្សិណ បស្ចិមរាប់មិន មានខុសនឹងក្បួន
ទើបដល់ឧត្តរ បន្តមិនស្ទួន កូនចេះមាំមួន
ទិសតូចបួនទៀត ។

៤. ចូរស្រង់ពាក្យជានាមនៅក្នុងអត្ថបទមេសូត្រខាងលើឱ្យបានយ៉ាងតិចចំនួនបី ។

៥. ចូរគូសសញ្ញា “ ✓ ” ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ ។

☐ ទិសធំមានចំនួន ៣ គឺ ទិសបូពិ៌ ទក្សិណ និងបស្ចិម ។

☐ ទិសធំមានចំនួន ៤ គឺ ទិសបូពិ៌ ទក្សិណ បស្ចិម និងឧត្តរ ។

☐ ទិសធំមានចំនួន ៥ គឺ ទិសបូពិ៌ ទក្សិណ បស្ចិម ឧត្តរ និងអាគ្នេយ៍ ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គមេសូត្រខាងក្រោម ។

ម៉ែអើយស្តាប់ខ្ញុំ ពុកអើយកូនសុំ ចង្អុលទិសប្រាប់
តាមដែលកូនរៀន ពុកប្រៀនម៉ែប្រាប់ ថាបើនឹងរាប់
ទិសធំមានបួន ។

ទិសបូពិ៌ទក្សិណ បស្ចិមរាប់មិន មានខុសនឹងក្បួន
ទើបដល់ឧត្តរ បន្តមិនស្ទួន កូនចេះមាំមួន
ទិសតូចបួនទៀត ។

## សំណួរ

១. តើអត្ថបទមេសូត្រខាងលើកូនបាននិយាយពីអ្វីប្រាប់ឪពុកម្តាយ ?

២. តើទិសធំទាំងអស់មានប៉ុន្មាន ? មានឈ្មោះអ្វីខ្លះ ?

៣. តើកូននៅចេះចាំទិសតូចប៉ុន្មានទៀត ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ទក្សិណ បស្ចិម "

២. ចូររកបដិសព្ទនឹងពាក្យ " មាំមួន "

៣. ចូររកវេវចនសព្ទនឹងពាក្យ " បូព៌ ឧត្តរ "

៤. ចូរស្រង់ពាក្យនាមពីក្នុងអត្ថបទឱ្យបាន ៣ ពាក្យ ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញក្នុងវគ្គនៃមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ ។

| ខ្ញុំ | បួន | បស្ចិម | ប្រាប់ | ប្រៀន | ទក្សិណ | រាប់ | សួន |
|---|---|---|---|---|---|---|---|

ម៉ែអើយស្តាប់ ....
តាមដែលកូនរៀន

ពុកអើយកូនសុំ
ពុក ....... ម៉ែប្រាប់
ទិសធំមានបួន ។

ចង្អុលទិស ......
ថាបើនឹង .......

ទិសបូព៌ ..........
ទើបដល់ឧត្តរ

បស្ចិមរាប់មិន
បន្តមិន ........
ទិសតូច ........ ទៀត ។

មានខុសនឹងក្បួន
កូនចេះមាំមួន

គ. ចូរតែងល្បះតម្រូវតាមរូបខាងក្រោមឱ្យបានពីរល្បះ តាមរូបភាពនីមួយៗ ។



.............................. ។

.............................. ។



.............................. ។

.............................. ។

មេរៀនទី
២១

# សញ្ញាខណ្ឌ " ។ "

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ខាងក្រោម ហើយសង្កេតមើលថា តើគេដាក់សញ្ញាខណ្ឌ " ។ " នៅត្រង់ណា ? ដើម្បីអ្វី ?

*ឧទាហរណ៍*

១. សមាជិកគ្រួសារខ្ញុំ មានគ្នាប្រាំនាក់ ។

២. ម្ដាយខ្ញុំជាអ្នកដេរប៉ះ បោកគក់ ដាំស្ល និងសម្អាតផ្ទះសម្បែង ។

៣. ធ្វើការ

៤. ឪពុកខ្ញុំជាកម្មករសំណង់នៅទីក្រុង ។

៥. លេងកម្សាន្ត

តាមរយៈឧទាហរណ៍ទាំង ៥ ខាងលើ យើងឃើញថាឧទាហរណ៍ទី ១ , ២ និង៤ ជាល្បះ ។ រីឯឧទាហរណ៍ទី ៣ និងទី ៥ មិនមានសញ្ញាខណ្ឌ " ។ " ទេ ពីព្រោះ វាមិនមែនជាល្បះ វាជាកន្សោមពាក្យ ឬក្រុមពាក្យ ដែលមិនមានន័យពេញលេញគ្រប់គ្រាន់ ។

***សញ្ញាខណ្ឌ " ។ " ជាសញ្ញាដែលគេប្រើដើម្បីបញ្ចប់សេចក្ដីនៅខាងចុងនៃល្បះ ។***

## លំហាត់

ក. ចូរដាក់សញ្ញាខណ្ឌ “ ។ ” បញ្ចប់ល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ ។

១. យើងត្រូវខិតខំរៀនទាន់ខ្លួននៅក្មេង

២. យើងនាំគ្នារៀនលេខ និងអក្សរឱ្យបានពូកែ

៣. ការខ្ជិលច្រអូស

៤. កូនល្អស្តាប់ម៉ែ សិស្សពូកែស្តាប់គ្រូ

៥. ការឧស្សាហ៍ព្យាយាម

ខ. ចូរអានអត្ថបទខាងក្រោម រួចដាក់សញ្ញាខណ្ឌ “ ។ ”នៅខាងក្រោយល្បះនីមួយៗឱ្យបានត្រឹមត្រូវ ។

> ផ្ទះខ្ញុំតូច តែស្អាត បន្ទប់ដេករបស់ខ្ញុំ មានគ្រែតូចមួយ ហើយមានបង្អួចបើកចំហនាំឱ្យពន្លឺ និងខ្យល់ចេញចូលបានគ្រប់គ្រាន់ ថ្វីត្បិតផ្ទះខ្ញុំតូចតែវាមានបរិស្ថានល្អស្រស់បំព្រង ព្រោះវាមានរបងព័ទ្ធជុំវិញ មានដំណាំហូបផ្លែ សួនច្បារ និងសួនបន្លែគ្រួសារ

គ. ចូរតែងល្បះដោយប្រើសញ្ញាខណ្ឌ “ ។ ” ឱ្យបានពីរល្បះ ។

# មេរៀនទី ២២ រឿង កុមារចេះសន្សំសំចៃ

## ការស្ដាប់ : ចូរស្ដាប់អត្ថបទរឿង រួចឆ្លើយនឹងសំណួរ ។

### សំណួរ




១. តើអត្ថបទរឿងដែលប្អូនបានស្ដាប់នេះមានតួអង្គណាខ្លះ ?

២. តើសំណាង និងសុភីនៅឯណា ?

៣. តើសំណាងនិយាយទៅកាន់សុភីដូចម្ដេចខ្លះ ?

៤. តើសំណាងណែនាំសុភីពីអ្វី ?

៥. តើប្អូនចូលចិត្តធ្វើតាមសុភីដែរឬទេ ? ព្រោះអ្វី ?

### លំហាត់

១. ចូរប្អូនចាប់ដៃគូសម្ដែងតួ(សុភី និងសំណាង) ហើយនិយាយគ្នាតាមដំណើររឿងឡើងវិញ ។

២. តើក្នុងរឿងនេះមានតួអង្គណាខ្លះ ?

៣. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយមួយដែលជាដំបូន្មានរឿងឱ្យបានត្រឹមត្រូវ ។

- ☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ប្រដាប់ប្រដាសិក្សា ។
- ☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះថែទាំសៀវភៅឱ្យបានល្អ ។
- ☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះថែទាំ សន្សំសំចៃ ។
- ☐ រឿងនេះអប់រំយើងឱ្យស្រឡាញ់ និងចេះទុកដាក់ប្រដាប់ប្រដាសិក្សា ។

មេរៀនទី
# ២៣ ការពណ៌នាអំពីសត្វ

**តែងសេចក្តី :** ចូរអានអត្ថបទខាងក្រោម ។



## ចម្រើនឆ្មាខ្ញុំ

ខ្ញុំមានឆ្មាឈ្មោលមួយឈ្មោះចម្រើន ។

វាមានរាងតូចបន្តិចតែធាត់ ហើយមានសម្បុរ ត្រសក់ ។ ក្បាលវារាងមូលភ្នែកធំៗ មានពន្លឺភ្លឺថ្លាដូចគ្រាប់ពេជ្រ ។ ចម្រើនមានរោម ពុកមាត់ដុះវែងៗ ហើយរឹង ។ ធ្មេញវាស្រួច ចង្កូមរិញវែងហើយមុតទៀតផង ។ ឯច្រមុះវាតូចតែមានសំណើមជានិច្ច ។ ចំណែកត្រចៀកទាំងពីររបស់វាធំល្មម ស្រដៀងនឹងត្រចៀកខ្លា ។ ជើងទាំងបួនរបស់វាមានក្រចកមុតស្រួចរាងកោង ហើយខុបចូលក្នុង ។ នៅពេលវាចាប់កណ្តុរម្តងៗ កណ្តុរមិនដែលរួចខ្លួនម្តងណាឡើយ ។

ខ្ញុំស្រឡាញ់ចម្រើនណាស់ ព្រោះវាប៉ិនចាប់កណ្តុរ ហើយមិនចេះលួចត្រីអាំងឬសាច់របស់ម្តាយខ្ញុំទេ ។ វាជាសត្វចតុបាទមានប្រយោជន៍ចំពោះយើង ។

### សំណួរ

១. តើចម្រើនជាឈ្មោះសត្វអ្វី ? ញី ឬឈ្មោល ?

២. តើចម្រើនជាសត្វមានរូបរាង សម្បុរដូចម្តេច ?

៣. តើប្អូនយល់ថាចម្រើន ជាសត្វដូចម្តេច ?

៤. តើប្អូនមានអារម្មណ៍ដូចម្តេច ចំពោះការចិញ្ចឹមសត្វឆ្មា ?



# គម្រោងតែង

១. សេចក្តីផ្តើម

បង្ហាញពីឆ្មានោះដោយប្រាប់ឈ្មោះ ភេទ ទីកន្លែង ។

២. តួសេចក្តី ៖ បង្ហាញពី

- រូបរាង មាឌ (តូច ធំ ស្គម ធាត់ ...) កម្ពស់ (ទាប ខ្ពស់ ...)
- សម្បុរ (ស ខ្មៅ ...) មុខមាត់ (ភ្នែក ច្រមុះ មាត់ ត្រចៀក រោម ...) ជើង ក្រចក (មាំមួន ស្រួច កោង វែង ខ្លី ...)
- អាកប្បកិរិយា ៖ សកម្មភាពផ្សេងៗ ដូចជាភាពរហ័សរហួន ការចាប់ ... ។
- ផលប្រយោជន៍ ។

៣. សេចក្តីបញ្ចប់ ៖ បង្ហាញពី

- ការវាយតម្លៃ ៖ ជាសត្វល្អ ចេះចាប់កណ្តុរ មានបំណិន ... ។
- ចំណាប់អារម្មណ៍ ៖ បង្ហាញមនោសញ្ចេតនាចំពោះសត្វ ... ។

## លំហាត់

- ចូរប្អូនពណ៌នាអំពីសត្វចិញ្ចឹមណាមួយដែលប្អូនពេញចិត្ត ដូចជា សត្វ ឆ្កែ ឆ្មា គោ ក្របី ឬជ្រូក ។
- មុនពេលប្អូនសរសេរ ចូរប្អូនពិនិត្យមើលគម្រោងខាងលើជាឧទាហរណ៍ ។

## សំណួរ

១. តើសត្វដែលប្អូនចិញ្ចឹមនោះជាសត្វអ្វី ? ឈ្មោះអ្វី ? ញី ឬឈ្មោល ?

២. តើវាមានមាឌដូចម្តេច ? មានកម្ពស់ប្រហែលប៉ុន្មាន ?

៣. តើវាមានសម្បុរអ្វី ? មានរោមដូចម្តេច ? មានស្នែងដូចម្តេច ?

៤. តើវាកាច ឬស្លូត ? ឧស្សាហ៍ ឬខ្ជិល ?

៥. តើប្អូនថែរក្សាវាយ៉ាងណាខ្លះ ?

៦. តើវាផ្តល់ប្រយោជន៍ដល់ប្អូនដូចម្តេចខ្លះ ?

៧. តើប្អូនស្រឡាញ់វាដែរឬទេ ? ព្រោះអ្វី ?



មេរៀនទី

២៤

# អ្នកជិតខាងល្អ

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



អ្នកជិតខាង គឺជាអ្នកដែលរស់នៅក្បែរផ្ទះយើងគ្រប់គ្នា គ្រប់ទីកន្លែង ។

អ្នកជិតខាងល្អ គឺជាអ្នកដែលចេះគោរពស្រឡាញ់រាប់អានគ្នា ហើយចេះគួរសមដោយមិនរើសអើងចំពោះគ្នា ។ ពេលមានទុក្ខធុរៈដូចជា មានពិធីរៀបការ ពិធីបុណ្យទាន ពេលមានអាសន្ន និងមានកិច្ចការរវល់ផ្សេងៗ អ្នកជិតខាងតែងតែជួយគ្នាទៅវិញទៅមក ។ ពេលមានចំណី ម្ហូបអាហារឆ្ងាញ់ យើងតែងចែករំលែកគ្នាហូប ។ លើសពីនេះទៀត អ្នកជិតខាងល្អមានឫកពា អាកប្បកិរិយាសុភាពរាបសា និងមានសម្ដីទន់ភ្លន់ដោយមិនទ្រគោះបោះបោកដាក់គ្នាដែលនាំឱ្យកើតជម្លោះ ។ ម្យ៉ាងទៀត អ្នកជិតខាងល្អ គឺមិននិយាយដើមគ្នាមិនបញ្ចេញឫកពាច្រងេងច្រងាងដាក់គ្នា ។ ពោលគឺចេះការពារ និងគោរពសិទ្ធិគ្នា ។

ដូច្នេះ យើងនឹងរួមរស់ជាមួយគ្នាក្នុងសហគមន៍មួយប្រកបដោយសុខសន្តិភាព ។

## ការរៀនពាក្យ

ក. អំណានពាក្យ

អាសន្ន អានថា អា-សន់

សហគមន៍ អានថា សះ-ហះ-គំ

សន្តិភាព អានថា សន់-តិ-ភាព

ខ. ពន្យល់ពាក្យ

រើសអើង (កិ.) : ប្រកាន់យកតែតាមគាប់ចិត្ត ។

អាសន្ន (គុ.) : ភ័យ គឺហេតុ ឬអ្វីៗដែលគួរខ្លាច ។

សិទ្ធិ (ន.) : ការសមតាមបំណង សេចក្តីសម្រេចតាមអំណាចច្បាប់ ។

សហគមន៍ (ន.) : ប្រជុំភូមិ ឬតំបន់ដែលមានប្រជាជនរស់នៅ និងប្រកបមុខរបរចូលគ្នា ។

គ. បដិសព្ទ

បញ្ចេញ ≠ បញ្ចូល , រស់ ≠ ស្លាប់ , សន្តិភាព ≠ សង្គ្រាម

ឃ. វេវចនសព្ទនឹងពាក្យ "ទុក្ខ"

ទុក្ខ ព្រួយ បារម្ភ ភ័យ

ង. សទិសសព្ទនឹងពាក្យ " ក "

ក (ន.) : អវយវៈដែលតពីក្បាលទៅស្មា ឬទៅនឹងខ្លួននៃមនុស្ស ។

ក (កិ.) : កសាង កកើត កកូរ ។

ករណី (ន.) : រឿងហេតុ ជម្លោះ ។

ក៏ (និ.) : អ្នកក៏ទៅ ខ្ញុំក៏ទៅ ។

## សំណួរ

១. តើអ្នកជិតខាងល្អជាមនុស្សដូចម្តេច ?

២. តើអ្វីខ្លះដែលយើងមិនគួរធ្វើចំពោះអ្នកជិតខាង ?

៣. តើអ្វីខ្លះដែលយើងគួរធ្វើចំពោះអ្នកជិតខាង ?

៤. ហេតុអ្វីបានជាត្រូវគោរពស្រឡាញ់អ្នកជិតខាង ?

## លំហាត់

១. ចូរស្រង់បដិសព្ទនឹងពាក្យ "ទន់ភ្លន់"។

២. ចូររកវេវចនសព្ទនឹងពាក្យ "ទុក្ខ"។

៣. ចូរគូសភ្ជាប់ពាក្យជា "នាម" ខាងក្រោមឱ្យបានត្រឹមត្រូវ។




៤. ចូរធ្វើចំណែកក្រុមពាក្យជាចំណីអាហារ និងវត្ថុដូចខាងក្រោម។

ខ្ទឹមស នំ សាច់ ផ្ទះ បន្លែ ក្រែ គុយទាវ ចាន សម្ល កៅអី បាយ ទូ

| ក្រុមពាក្យជាចំណីអាហារ | ក្រុមពាក្យជាវត្ថុ |
|---|---|
| .................................. | .................................. |

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម។

### អ្នកជិតខាងខ្ញុំ

ខ្ញុំគោរពស្រឡាញ់អ្នកជិតខាងខ្ញុំណាស់។ សព្វថ្ងៃគ្រួសារខ្ញុំ ក៏ដូចគ្រួសារអ្នកជិតខាងដែរ តែងតែប្រាស្រ័យទាក់ទងគ្នានិងជួយទុក្ខធុរៈគ្នាជាប្រចាំ។ យើងគោរពសិទ្ធិគ្នា និយាយគ្នាដោយពាក្យសម្ដីសុភាពរាបសា ទន់ភ្លន់ ថ្លៃថ្នូរ យោគយល់ អធ្យាស្រ័យចំពោះគ្នា និងរួមរស់ក្នុងសហគមន៍ជាមួយគ្នាប្រកបដោយសុខសន្តិភាព។

## សំណួរ

១. តើអ្នករស់នៅជិតខាងគ្នាត្រូវធ្វើអ្វីខ្លះ ?

២. តើអ្នកស្រឡាញ់អ្នកជិតខាងរបស់អ្នកដែរឬទេ ? ព្រោះអ្វី ?

៣. តើអត្ថបទខាងលើនិយាយពីអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " សិទ្ធិ "។

២. ចូររកបដិសព្ទនឹងពាក្យ " សន្តិភាព "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ទុក្ខ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " ក៏ "។

ខ. ចូររៀបពាក្យក្នុងប្រអប់នីមួយៗខាងក្រោម ជាល្បះត្រឹមត្រូវ ។

| | | | | | |
|---|---|---|---|---|---|
| ១. | ខ្ញុំ | អ្នកជិតខាង | ណាស់ ។ | ស្រឡាញ់ | ខ្ញុំគោរព |
| ២. | រាប់អានគ្នា ។ | យើងចេះ | យោគយល់ | អធ្យាស្រ័យ | និង |

គ. ចូរតែងល្បះតាមរូបភាពនឹងពាក្យខាងក្រោមឱ្យបានត្រឹមត្រូវ ។



.......... សំពះ ........... ។



.......... ដឹកដៃ .......... ។

ឃ. ចូរបំពេញល្បះ និងប្រើសញ្ញា " ។ " ដើម្បីបញ្ចប់ល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ ។

១. អ្នកជិតខាងល្អ ត្រូវ .......គោរពស្រឡាញ់ .......គ្នា ដោយមិនរើសអើង

២. ពេល ......នំ ចំណី ម្ហូបអាហារ យើងតែង .......រំលែកគ្នាហូប

៣. ដូច្នេះ យើងត្រូវចេះរួម ...ជាមួយគ្នា ...សហគមន៍មួយប្រកប ...សន្តិភាព

មេរៀនទី
២៥

# សទិសសព្ទ

## បំណិន

ចូរអានឧទាហរណ៍ខាងក្រោម ។

សទិសសព្ទនឹងពាក្យ “លិច , សរ ”

១. “លិច”

- លិច (កិ.) : ចូលកប់បាត់ទៅ ។ *ឧទាហរណ៍* ព្រះអាទិត្យលិច ។
- លេច (កិ.) : ចេញពីទីកំបាំង ។ *ឧទាហរណ៍* ថ្ងៃលេចឡើង ។
  : ហូរចេញ ។ *ឧទាហរណ៍* ទឹកលេចពីធុង ប៉ោត ។
  : ផ្សាយ ។ *ឧទាហរណ៍* លេចឮដំណឹង ... ។
  : បង្ហាញ ។ *ឧទាហរណ៍* លេចមុខចេញមក ។
- លេច (ន.) : ឈ្មោះដំបៅម្យ៉ាង ។ *ឧទាហរណ៍* ដំបៅលេច ។

២. “សរ”

- សរ (ន.) : ព្រួញ កាំ កាំថ្នូ កាំស្នា ។
  *ឧទាហរណ៍* ថ្នូសរ ។
- ស (កិ.) : រឮកឃើញ ។ *ឧទាហរណ៍* សជាតិ ដឹងជាតិ ។
- ស (គុ.) : ពណ៌សម្បុរ ។ *ឧទាហរណ៍* នាងមានសម្បុរសស្អាត ។
- ស (កិ.) : ចាក់ចុះព្រាវៗដោយស្ន ។ *ឧទាហរណ៍* សត្រី ។
- ស (កិ.) : សម្ដែងអាការៈឱ្យឃើញច្បាស់ ។
  *ឧទាហរណ៍* សម្ដីសជាតិ មារយាទសពូជ ។

តាមរយៈឧទាហរណ៍ទី ១ និងទី ២ ខាងលើនេះ ឃើញថាពាក្យ លិច លេច មានសូរដូចគ្នា ហើយពាក្យ សរ ស ក៏សូរសំឡេង ឬសូរសព្ទតែមួយដូចគ្នា ប៉ុន្តែមានន័យ និងសំណេរខុសៗគ្នា ។

*សទិសសព្ទ ជាពាក្យដែលមានន័យផ្សេងគ្នា តែមានសូរដូចគ្នា ឬមានសូរស្រដៀងគ្នា ។*

## លំហាត់

ចូរអានអត្ថបទខាងក្រោម រួចរកសទិសសព្ទនឹងពាក្យ “ ធំ និង គរ ” ឱ្យបានត្រឹមត្រូវ ។

មីងសានជាអ្នកថែទាំសួនច្បារ ។ គាត់ជាមនុស្សគ ។ ភារកិច្ចគាត់គឺសម្អាតនិងថែទាំសួនច្បារ ។ រាល់ថ្ងៃ មីងសានប្រមូលសំរាមយកមកគរទុកក្បែរដើមគធំមួយ រួចហើយគាត់កើបយកទៅដាក់ក្នុងធុងសំរាម ដើម្បីកុំឱ្យធំក្លិនស្អុយ ។

# មេរៀនទី ២៦ ពិធីបុណ្យដារលាននៅភូមិខ្ញុំ

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ ៖ បទកាកគតិ

បុណ្យដារភូមិខ្ញុំ មីងពូជួបជុំ សប្បាយរីករាយ
នៅក្រោមដើមពោធិ៍ ញញឹមពព្រាយ ខ្លះរែកទូលស្ពាយ
នំម្ហូបអាហារ ។

មីងពូទាំងអស់ ចាស់ទុំស្រីប្រុស រួមទាំងអាចារ្យ
រាប់បាត្រព្រះសង្ឃ បួងសួងទេវតា ស្តាប់លោកទេសនា
ប្រាថ្នាសុខសាន្ត ។

ពិសេសសុំដល់ សម្បូរភោគផល ជួបសុខក្សេមក្សាន្ត
ប្រកបរបរ ស្រែចម្ការបាន រុងរឿងថ្កើងថ្កាន
ជាប់ជាប្រចាំ ។

បុណ្យដារភូមិខ្ញុំ　　បានសុខមនោរម្យ　　ជារៀងរាល់ឆ្នាំ
រំឭកដល់គុណ　　បុណ្យជូនតាផ្ដាំ　　ចងជាចំណាំ
ក្នុងក្បួនតម្រា ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ទេសនា　អានថា　ទេ-សៈ-ន៉ា ឬ ទេស្នា

មនោរម្យ　អានថា　មៈ-នោ-រម

តម្រា　អានថា　តំ-រ៉ា

ខ. ពន្យល់ពាក្យ

ផ្ដាំ (កិ.) : ផ្ញើពាក្យ ផ្ញើសម្ដីទុកឱ្យអ្នកទទួលចងចាំហើយធ្វើតាម ។

បុណ្យដារ (ន.) : ឈ្មោះពិធីបុណ្យតូចម្យ៉ាងក្នុងពុទ្ធសាសនា ច្រើនរៀបចំនៅក្រោមដើមឈើធំៗ ឬជិតទួលអ្នកតាដោយមានការរាប់បាត្រប្រគេនព្រះសង្ឃផង ។

តម្រា (ន.) : សេចក្ដីកត់ត្រាទុក រឿងដែលកត់ទុកដោយសង្ខេបក្បួនតូចៗ ។

មនោរម្យ (ន.) : មានភាពរីករាយ ឬសប្បាយចិត្ត ។

គ. បដិសព្ទ

ជួប ≠ ព្រាត់　　រុងរឿង ≠ អាប់ឱន

ឃ. សទិសសព្ទនឹងពាក្យ “ បាត្រ ”

បាត្រ (ន.) : ប្រដាប់សម្រាប់ដាក់ចង្ហាន់ព្រះសង្ឃ ។

*ឧទាហរណ៍* បាត្រលោក ។

បាត (ន.) : ប៉ែកខាងក្រោមនៃជម្រៅ ។

*ឧទាហរណ៍* បាតបឹង បាតជើង ឬសដូងបាត ។

បាទ (និ.) : ពាក្យសម្រាប់បុរសឆ្លើយ ។ *ឧទាហរណ៍* ខ្ញុំបាទ ។

## សំណួរ

១. តើបុណ្យដារលានគេធ្វើនៅឯណា ?

២. តើនរណាខ្លះចូលរួមក្នុងពិធីបុណ្យនេះ ?

៣. តើគេធ្វើបុណ្យដារលានដើម្បីអ្វី ?

## លំហាត់

១. ចូរសូត្រមេសូត្រត្រង់វគ្គទី ១ និងទី ២ ឱ្យត្រូវតាមបទឡើងវិញ ។

២. ចូររកបដិសព្ទនឹងពាក្យ " សុខ ជួប " ។

៣. ចូររកសទិសសព្ទនឹងពាក្យ " ជុំ " ។

៤. ចូររកពាក្យចួននឹងពាក្យ "ខ្ញុំ" ក្នុងវគ្គទី ១ និងពាក្យ "ដល់" ក្នុងវគ្គទី ៣ ។

៥. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយខាងក្រោមមួយដែលត្រឹមត្រូវ ។

☐ បុណ្យដារលានធ្វើនៅក្នុងវត្ត ។

☐ បុណ្យដារលានធ្វើនៅក្នុងភូមិ ។

☐ បុណ្យដារលានធ្វើនៅក្រោមដើមពោធិ៍ ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យមេសូត្រខាងលើត្រង់វគ្គទី ១ និងវគ្គទី ២ ។

### បុណ្យដារលាននៅភូមិខ្ញុំ

មីងពូទាំងអស់ ចាស់ទុំស្រីប្រុស រួមទាំងអាចារ្យ
រាប់បាត្រព្រះសង្ឃ បួងសួងទេវតា ស្តាប់លោកទេសនា
ប្រាថ្នាសុខសាន្ត ។

ពិសេសសុំដល់ សម្បូរភោគផល ជួបសុខក្សេមក្សាន្ត
ប្រកបរបរ ស្រែចម្ការបាន រុងរឿងថ្កើងថ្កាន
ជាប់ជាប្រចាំ ។

## សំណួរ

១. អ្នកណាខ្លះរាប់បាត្រព្រះសង្ឃ

២. តើពួកគេធ្វើពិធីអ្វីខ្លះ ?

៣. តើពួកគេបួងសួងប្រាថ្នាចង់បានអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ “ បុណ្យដារ ”។

២. ចូររកបដិសព្ទនឹងពាក្យ “ រុងរឿង ”។

៣. ចូររកសទិសសព្ទនឹងពាក្យ “ បាត្រ ”។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញក្នុងចន្លោះវគ្គនៃមេសូត្រខាងក្រោមឱ្យបានចួនត្រឹមត្រូវ ។

| | | | | | |
|---|---|---|---|---|---|
| ពព្រាយ | ខ្ញុំ | ទេសនា | ស្ពាយ | ស្រីប្រុស | ព្រះសង្ឃ |

| | | |
|---|---|---|
| បុណ្យដារភូមិ ..... | មីងពូជួបជុំ | សប្បាយរីករាយ |
| នៅក្រោមដើមពោធិ៍ | ញញឹម .......... | ខ្លះរែកទូល ........ |
| | នំម្ហូបអាហារ ។ | |
| មីងពូទាំងអស់ | ចាស់ទុំ ....... | រួមទាំងអាចារ្យ |
| រាប់បាត្រព្រះសង្ឃ | បួងសួងទេវតា | ស្តាប់លោក ........ |
| | ប្រាថ្នាសុខសាន្ត ។ | |

គ. ចូរតែងល្បះនឹងពាក្យ “ បុណ្យ ទេសនា ” ឱ្យបានមួយពាក្យមួយល្បះ ។

ឃ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ “ ណ ” និងពាក្យ “ បុណ្យ ”។

មេរៀនទី

២៧

# អំពីគុណនាម

## វេយ្យាករណ៍

ចូរអានកថាខណ្ឌខាងក្រោម រួចសង្កេតមើលពាក្យដែលមានពណ៌ក្រហម ៖

ដារីជាសិស្សឧស្សាហ៍ ។ នាងមានរាងស្ដើងខ្ពស់ សម្បុរខ្មៅស្រអែម សក់ស្លូតហើយវែង ។ ដារីមិនត្រឹមតែឧស្សាហ៍រៀនសូត្ររហូតក្លាយជាសិស្សពូកែប៉ុណ្ណោះទេ ប៉ុន្តែនាងក៏ជាកូនល្អម្នាក់នៅក្នុងគ្រួសារថែមទៀត ។ រាល់ថ្ងៃក្រៅពីកិច្ចការរៀនសូត្រនៅសាលានាងតែងជួយធ្វើកិច្ចការផ្ទះជាមួយឪពុកម្ដាយ ដូចជាបោសសម្អាតផ្ទះ បោកគក់លាងចានឆ្នាំងបានស្អាត មិនឱ្ទិលច្រអូសឡើយ ។

ឪពុក ម្ដាយ និងញាតិជិតខាងតែងសរសើរនាងថាជាក្មេងឆ្លាត មានចរិតស្លូតបូតសុភាពរាបសា គួរឱ្យស្រឡាញ់ ។

*ពាក្យ :* ឧស្សាហ៍ ខ្ពស់ ខ្មៅ ពូកែ ល្អ ស្អាត ឱ្ទិល ឆ្លាត ស្លូតបូត សុភាពរាបសា បញ្ជាក់លក្ខណៈរបស់នាម ។ ពាក្យទាំងនេះជាគុណនាម ។

*គុណនាម ជាពាក្យសម្ដែងលក្ខណៈរបស់នាម ។ គុណនាម ស្ថិតនៅខាងស្ដាំនាម ។*

## លំហាត់

ក. ចូរអាន រួចគូសបន្ទាត់ពីក្រោមពាក្យដែលជាគុណនាមក្នុងអត្ថបទខ្លីខាងក្រោមឱ្យបានត្រឹមត្រូវ ។

ខ្ញុំមានមិត្តម្នាក់ឈ្មោះ សុជាតិ ។ វាមានរាងទាប សម្បុរស សក់ខ្លី មុខមូល ច្រមុះស្រួច ភ្នែកភ្លឺថ្លា ។ ចំណែកប្អូនស្រីវាមានសម្បុរខ្មៅស្រអែម មានមាឌតូចល្អិត ចិត្តល្អ ហើយឧស្សាហ៍ព្យាយាម និងមានចរិតស្លូតត្រង់គួរឱ្យស្រឡាញ់រាប់អាន ។

ខ. ចូរអ្នកបំពេញចន្លោះក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ដោយប្រើពាក្យជាគុណនាម ។

១. សុធានីជាក្មេង ............ រៀនសូត្រណាស់ ។

២. បងស្រីខ្ញុំមានចរិត ........... សុភាពរាបសា ហើយ ............. រាងវៃក្នុងការងារ ។

៣. តារាមានរាង .......... ស្រឡូន សក់ ........ ហើយតែងតែបានពិន្ទុ ......... ជាងគេនៅក្នុងថ្នាក់ ។

គ. ចូរតែងល្បះនឹងគុណនាមខាងក្រោមឱ្យបានត្រឹមត្រូវ ។

- ថ្លៃថ្នូរ : .................................. ។
- ខ្ពស់ : .................................. ។
- ស្រស់ : .................................. ។

មេរៀនទី
២៨

# ល្បែងបោះអង្គញ់

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



ខ្មែរយើង មានល្បែងប្រជាប្រិយជាច្រើនសម្រាប់លេងកម្សាន្តដូចជា បោះអង្គញ់ ទាញព្រ័ត្រ លាក់កន្សែង ចោលឈូង ។ល។

បោះអង្គញ់ជាល្បែងដ៏មានប្រជាប្រិយមួយ ដែលគេនិយមលេងនៅក្នុងឱកាសបុណ្យចូលឆ្នាំខ្មែរ ។ គេលេងល្បែងនេះ ដោយចែកគ្នាជាពីរក្រុម គឺមួយក្រុមជាបុរស និងមួយក្រុមទៀតជាស្ត្រី ។ ក្រុមទាំងពីរមានសមាជិកតិច ឬច្រើនមិនកំណត់ឡើយ ។ គេប្រើគ្រាប់អង្គញ់សម្រាប់ដាំធ្វើជាកោយ និងសម្រាប់ធ្វើជាគ្រាប់បោះ ។ តាមទម្លាប់ប្រពៃណីខ្មែរ គឺក្រុមឈ្នះត្រូវយកគ្រាប់អង្គញ់ទៅជោះក្បាលជង្គង់ក្រុមចាញ់ ។

បោះអង្គញ់ ជាល្បែងប្រជាប្រិយខ្មែរ ដែលបានបន្សល់ទុកតាំងពីដូនតាមក ។ ដូច្នេះ យើងត្រូវរួមគ្នាថែរក្សាកេរមរតកនេះ ឱ្យបានគង់វង្ស ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ប្រជាប្រិយ អានថា ប្រ-ជា-ប្រី

និយម អានថា និ-យំ

ព្រ័ត្រ អានថា ព្រាត់

កេរមរតក អានថា កេ-មៈ-រៈ-ដក់

ខ. ពន្យល់ពាក្យ

កោយ (ន.) : មេអង្គញ់ ។

ដោះ (កិ.) : អុកគោះលើក្បាលជង្គង់ ដោយគ្រាប់អង្គញ់ចំនួនពីរ មួយផ្ដេក មួយបញ្ឈរ ។

ប្រជាប្រិយ (គុ.) : ដែលប្រជាជននិយមចូលចិត្ត ។

កេរមរតក (ន.) : ទ្រព្យដ៏ប្រសើរដែលបានបន្សល់ទុកមកតាំងពីដូនតា ។

គ. បដិសព្ទ

ចាញ់ ≠ ឈ្នះ

បុរស ≠ ស្ត្រី

ឃ. វេវចនសព្ទនឹងពាក្យ “ ក្បាល ”

ក្បាល សិរ សិរសា ព្រះសិរ

ង. សទិសសព្ទនឹងពាក្យ “ ព្រ័ត្រ ”

ព្រ័ត្រ (ន.) : ពួរ ឬខ្សែត្រកួញធ្វើពីស្បែកគោ ឬក្របី ។

*ឧទាហរណ៍* ល្បែងទាញព្រ័ត្រ ។

ព្រាត់ (កិ.) : បែកឃ្លាតចាកបុគ្គលជាទីស្រឡាញ់ ឃ្លាតបាត់លែងបានជួបគ្នាទៀត ។ *ឧទាហរណ៍* កូនព្រាត់ម៉ែ ។

## សំណួរ

១. តើខ្មែរយើងមានល្បែងប្រជាប្រិយអ្វីខ្លះ ?

២. តើគេនិយមលេងល្បែងបោះអង្គញ់នៅពេលណា ?

៣. តើគេលេងល្បែងបោះអង្គញ់យ៉ាងដូចម្ដេច ?

៤. តើអ្នកចូលចិត្តលេងល្បែងបោះអង្គញ់ឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ឈ្នះ "។

២. ចូររកវេវចនសព្ទនឹងពាក្យ " គង់វង្ស "។

៣. ចូររកសទិសសព្ទនឹងពាក្យ " លាក់ "។

៤. ចូរស្រង់ពាក្យជាគុណនាមក្នុងអត្ថបទឱ្យបានយ៉ាងតិចចំនួនបី ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខ្លីខាងក្រោម ។

### ល្បែងបោះអង្គញ់

ពេលចូលឆ្នាំខ្មែរយើងនិយមលេងល្បែងប្រជាប្រិយជាច្រើនដូចជា បោះអង្គញ់ ចោលឈូង ទាញព្រ័ត្រ ។ល ។

គេលេងល្បែងបោះអង្គញ់ ដោយចែកគ្នាជាពីរក្រុម គឺមួយក្រុមជាបុរស និង មួយក្រុមទៀតជាស្ត្រី ។ គេប្រើគ្រាប់អង្គញ់ សម្រាប់ដាំធ្វើជាកោយនិងសម្រាប់ធ្វើជា គ្រាប់បោះ ។ តាមទម្លាប់ប្រពៃណីខ្មែរ គឺក្រុមឈ្នះ ត្រូវយកគ្រាប់អង្គញ់ទៅជោះ ក្បាលជង្គង់ក្រុមចាញ់ ។

## សំណួរ

១. តើល្បែងបោះអង្គញ់ជាប្រភេទល្បែងអ្វី ?

២. តើគេលេងល្បែងនេះយ៉ាងដូចម្ដេច ?

៣. តើអ្នកចូលចិត្តលេងល្បែងនេះដែរឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ប្រជាប្រិយ "។

២. ចូររកបដិសព្ទនឹងពាក្យ " ឈ្នះ "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ក្បាល "។

៤. ចូររកសទិសសព្ទនឹងពាក្យ " ព្រ័ត្រ "។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញក្នុងអត្ថបទខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | | | | | |
|---|---|---|---|---|---|---|
| ក្រុម | អង្គញ់ | លេង | កំណត់ | ខ្មែរ | បុរស | ល្បែង |

បោះ ............ ជាល្បែងដ៏មានប្រជាប្រិយមួយ ដែលគេនិយម ............ នៅក្នុងឱកាសបុណ្យចូលឆ្នាំ ........ ។ គេលេង ......... នេះដោយចែកគ្នាជាពីរក្រុម គឺមួយក្រុមជា ............ និងមួយក្រុមទៀតជាស្ត្រី ។ ............ ទាំងពីរមាន សមាជិកតិចឬច្រើនមិន .............. ឡើយ ។

គ. ចូរតែងល្បះដោយប្រើ "នាម" ចំនួនពីរល្បះ និងប្រើគុណនាមចំនួនពីរល្បះ ។

ឃ. ចូរសរសេរអក្សរផ្ចង់ ព្យញ្ជនៈ "យ" និងពាក្យ "ប្រជាប្រិយ" ។

# មេរៀនទី ២៩ ការណែនាំទីកន្លែងទេសចរណ៍ក្នុងភូមិ

**ការនិយាយ :** ចូរអានអត្ថបទសន្ទនាគំរូខាងក្រោម រួចឆ្លើយនឹងសំណួរ ។




កុសល : ជម្រាបសួរមីង ! ខ្ញុំសូមសួរមីងបន្តិច តើមីងដឹងថារមណីយដ្ឋានភ្នំជើងព្រៃស្ថិតនៅឯណា ?

មីង : ពេលក្មួយចេញដំណើរពីរង្វង់មូលស្គន់តាមផ្លូវជាតិលេខ ៦ សំដៅទៅភ្នំពេញប្រមាណ ៩ គីឡូម៉ែត្រក្មួយនឹងឃើញបង្គោលគីឡូម៉ែត្រ ព្រមទាំងផ្លាកសញ្ញាបង្ហាញមួយនៅខាងស្តាំដៃ បន្ទាប់មកបត់ស្តាំទៅតាមផ្លូវលំដីក្រហមប្រហែល ២ គីឡូម៉ែត្រ ឆ្លងកាត់ភូមិឈ្មូក ឃុំគោករវៀង ក្បែរជើងភ្នំ នោះក្មួយនឹងឃើញរមណីយដ្ឋានភ្នំជើងព្រៃនោះជាពុំខាន ។

កុសល : បាទ ! អរគុណមីង ! ខ្ញុំសូមជម្រាបលា ។

មីង : ចាស ! មិនអីទេក្មួយ ! ទៅចុះសូមបានសេចក្តីសុខ និងសុវត្ថិភាពតាមផ្លូវ ។

## សំណួរ

១. តើកុសលសួរមីងអំពីអ្វី ?

២. តើមីងនិយាយទៅកាន់កុសលដូចម្តេចខ្លះ ?

៣. តើរមណីយដ្ឋានភ្នំជើងព្រៃមានទីតាំងនៅឯណា ?

៤. ពេលសួររួច តើកុសលនិយាយទៅកាន់មីងដូចម្តេច ?

៥. តើមីងឆ្លើយតបទៅកុសលដូចម្តេច ?

## លំហាត់

ចូរប្អូនសម្តែងតួធ្វើជាអ្នកសួររកទីកន្លែងទេសចរណ៍ ឬរមណីយដ្ឋានណាមួយ និងម្នាក់ទៀតជាអ្នកធ្លាប់ស្គាល់ ជួយណែនាំទីកន្លែងទេសចរណ៍នោះ។

មេរៀនទី
# ៣០ ទឹកជំនន់នៅភូមិខ្ញុំ

**ការស្តាប់ :** ចូរស្តាប់អត្ថបទរឿង រួចឆ្លើយនឹងសំណួរ ។



## សំណួរ

១. តើនៅក្នុងភូមិគេមានរឿងអ្វីកើតឡើង ?

២. តើអ្នកភូមិបានធ្វើអ្វីខ្លះ ពេលមានភ្លៀងខ្លាំង ?

៣. តើទឹកជំនន់បង្កផលអាក្រក់អ្វីខ្លះ ដល់ពួកគាត់ និងសហគមន៍ ?

៤. ហេតុអ្វីបានជាប្រជាជនច្រើនកើតជំងឺរាក ?

៥. ក្រោយគ្រោះមហន្តរាយ តើមានអង្គការ ឬសប្បុរសជនណាខ្លះចុះជួយជនរងគ្រោះ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " បង្អុរ , សត្វពាហនៈ " ។

២. ចូររកបដិសព្ទនឹងពាក្យ " ខ្លាំង , ធូន់ធូរ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " អគារសិក្សា " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ទុក្ខ " ។

# សំណេរ

ក. ចូរជ្រើសរើសពាក្យក្នុងប្រអប់ ទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

ឧបត្ថម្ភ   បង្កគ្រោះមហន្តរាយ   ក្នុងភូមិ   លិចលង់   ក្រុមសង្គ្រោះ

១. នៅតាមភូមិមួយចំនួនត្រូវ ...................... ស្ទើរតែទាំងអស់ ។

២. ទឹកជំនន់ថ្ងៃនេះបាន ........... ជាច្រើនដល់ប្រជាជន ............ ។

៣. ក្រោយគ្រោះមហន្តរាយមាន ........... ចុះជួយ .......... ស្បៀងអាហារ ថ្នាំពេទ្យ និងសម្ភារៈប្រើប្រាស់ចាំបាច់នានាដល់ជនរងគ្រោះ ។

ខ. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ៖

**ទឹកជំនន់នៅភូមិខ្ញុំ**

ភូមិមួយចំនួន ត្រូវលិចលង់ស្ទើរតែទាំងអស់ ។

អ្នកភូមិទាំងអស់ បាននាំគ្នាជញ្ជូនកូនចៅ សត្វពាហនៈ គោ ក្របី និងជ្រូក មាន់ ទា ព្រមទាំងសម្ភារៈ ឧបករណ៍ប្រើប្រាស់សំខាន់ៗទៅទីទួលសុវត្ថិភាព ។

គ្រោះទឹកជំនន់ ធ្វើឱ្យមានផលប៉ះពាល់ដល់អាយុជីវិតមនុស្ស សត្វ រុក្ខជាតិ ដំណាំនានា និងហេដ្ឋារចនាសម្ព័ន្ធ ស្ពាន ផ្លូវ ជាច្រើន ។

## សំណួរ

១. តើភូមិដែលត្រូវលិចលង់ បណ្តាលមកពីអ្វី ?

២. តើអ្នកភូមិបានធ្វើអ្វីខ្លះ ពេលជួបគ្រោះទឹកជំនន់ ?

៣. តើគ្រោះទឹកជំនន់ មានផលប៉ះពាល់អ្វីខ្លះ ?

មេរៀនទី
៣១

# ការស្គាល់ហេតុ និងផល

## បំណិន

ចូរអានឧទាហរណ៍ខាងក្រោម ។

១. ឆ្នាំនេះសុខាបានឡើងថ្នាក់ ពីព្រោះនាងខំរៀន ។

២. ទឹកលិចភូមិ មកពីមានភ្លៀងធ្លាក់ខ្លាំង ។

៣. បូណាផឹកទឹកនៅ ទើបវាឈឺពោះ ។

ល្បះខាងលើនេះ បង្ហាញពីទំនាក់ទំនងរវាងហេតុ និងផល ។ ក្រុមពាក្យមានពណ៌ក្រហម ជាហេតុ ឯក្រុមពាក្យដែលមានពណ៌ខ្មៅ ជាផល ។

ហេតុ និងផលខាងលើនេះ ភ្ជាប់គ្នាដោយពាក្យ "ពីព្រោះ មកពី ទើប" ។

ដូច្នេះ គេប្រើពាក្យ ពីព្រោះ ដោយសារ មកពី ទើប ហេតុនេះ ដូច្នោះ នោះ ... ដើម្បីបញ្ជាក់ទំនាក់ទំនងផ្ទាល់រវាងហេតុ និងផល ។

*ហេតុ គឺព្រឹត្តិការណ៍ ឬរឿងអ្វីមួយដែលកើតឡើង ។ ផល គឺជាលទ្ធផលដែលកើតមានឡើងអាស្រ័យដោយហេតុ ។*

## លំហាត់

ក. ចូរអានល្បះខាងក្រោម រួចប្រាប់ឃ្លាបង្ហាញហេតុ និងឃ្លាបង្ហាញផល ។

១. មនុស្សអាចបង្កើតយានអវកាសបាន ដោយសារវិទ្យាសាស្ត្ររីកចម្រើន ។

២. ព្រះអាទិត្យបញ្ចេញរស្មី ទើបរុក្ខជាតិរីកលូតលាស់បាន ។

៣. ស្រូវក្នុងស្រែស្កកអស់ មកពីគ្មានទឹក ។

ខ. ចូរអានអត្ថបទខាងក្រោម រួចប្រាប់ល្បះដែលបង្ហាញទំនាក់ទំនងហេតុ និងផល ។

ប្រជាជនដែលរស់នៅតាមដងទន្លេច្រើនប្រកបរបរដាំដំណាំ និងនេសាទ ។ ពួកគាត់ងាយរងគ្រោះណាស់ នៅពេលមានទឹកជំនន់ ។ ដោយខ្លាចទឹកលិច ទើបគាត់នាំគ្នាលើកផ្ទះឱ្យខ្ពស់ ។

មេរៀនទី
៣២

# មុខរបរចិញ្ចឹមត្រី

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



ការជ្រើសរើសអាជីពមួយសម្រាប់ខ្លួន ឬគ្រួសារ គឺជាប្រការល្អដើម្បីអភិវឌ្ឍសេដ្ឋកិច្ចគ្រួសារឱ្យមានជីវភាពធូរធារ ។

ពូសុខ មីងយន ក្រៅពីធ្វើស្រែគាត់បានចិញ្ចឹមត្រីក្នុងស្រះមួយក្បែរភូមិ ដែលមានត្រីរាប់ពាន់ក្បាល ។ រាល់ព្រឹក និងល្ងាចពួកគាត់ទាំងពីរតែងតែឱ្យចំណីត្រី ព្រោះទឹកនៅវេលានេះត្រជាក់ ។ ពូសុខបានរៀនពីរបៀបផលិតចំណីត្រី ដោយយកស្លឹកជំឡូងជ្វា ចក ត្រកួន បាយទា ពោត សណ្ដែកសៀង និងសមាសធាតុផ្សំផ្សេងទៀត ដូចជាកន្ទក់ចុងអង្ករ កាកសំណល់ផ្ទះបាយ ម្សៅត្រី ឬត្រីជី ។ល។ លាយចូលគ្នា បន្ទាប់មកស្ងោរឱ្យឆ្អិនទុកឱ្យត្រជាក់មុននឹងដាក់ឱ្យត្រីស៊ី ។ លើសពីនេះ ពូសុខតែងកាប់ជម្រះស្មៅ និងព្រៃ

តូចៗ ដើម្បីឱ្យមានខ្យល់អុកស៊ីសែនគ្រប់គ្រាន់ចូលក្នុងស្រះ ។ ពេលខ្លះគាត់យកលាមកគោមាន់ ជ្រូក ដែលស្ងួតដាក់បាតស្រះ រួចបញ្ចូលទឹកត្រាំទុកពី ៣ទៅ ៥ថ្ងៃ ដើម្បីឱ្យកើតជាចំណីធម្មជាតិសម្រាប់ឱ្យត្រីស៊ីនិងឆាប់បានទទួលផល ។ ការទិញចំណីត្រីពីផ្សារនាំឱ្យអស់ប្រាក់ច្រើនមិនសូវចំណេញទេ ។

មុខរបរចិញ្ចឹមត្រីបានជួយដល់ជីវភាពគ្រួសារពូសុខបានធូរធារ មិនបាច់ខ្ចីបុលប្រាក់គេដែលជាគំរូល្អដល់អ្នកជិតខាងក្នុងភូមិ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

អភិវឌ្ឍ អានថា អះ-ភិ-វ័ត

សេដ្ឋកិច្ច អានថា សេត-ថះ-កិច

ខ. ពន្យល់ពាក្យ

អាជីព (ន.) : ការប្រកបមុខរបរចិញ្ចឹមជីវិត ។

អភិវឌ្ឍ (កិ.) : ចម្រើនក្រៃលែង ។

(ន.) : សេចក្តីចម្រើនក្រៃលែង ។

សេដ្ឋកិច្ច (ន.) : កិច្ចការប្រសើរបំផុត មុខរបរដ៏ឧត្តម មុខរបរដែលមានប្រយោជន៍សំខាន់ក្នុងប្រទេសនីមួយៗ ។

ថែរក្សា (កិ.) : មើលថែទាំ ។

គ. បដិសព្ទ

ខុស ≠ ត្រូវ

ធូរធារ ≠ ខ្វះខាត

ឃ. វេវចនសព្ទនឹងពាក្យ “ ឱ្យ ”

ឱ្យ ជូន ផ្តល់ ប្រគេន ថ្វាយ

ង. សទិសសព្ទនឹងពាក្យ "សុខ"

សុខ (គុ.) : ដែលសប្បាយ ងាយ ស្រណុក ។

សុក្រ (ន.) : ឈ្មោះថ្ងៃទី ៦ (ថ្ងៃសុក្រ) ។

សុក (ន.) : ស្រោមស្រោបកូនក្នុងផ្ទៃ ។

## សំណួរ

១. តើពូសុខ មីងយនមានមុខរបរជាអ្វី ?

២. តើពួកគាត់ចិញ្ចឹមត្រីនៅឯណា ?

៣. ហេតុអ្វីបានជាត្រីរបស់គាត់ឆាប់បានទទួលផល ?

៤. ហេតុអ្វីបានជាគ្រួសារពូសុខ មីងយនមានជីវភាពធូរធារ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ "ទន់" ។

២. ចូររកវេវចនសព្ទនឹងពាក្យ "លាមក" ។

៣. ចូររកសទិសសព្ទនឹងពាក្យ "កើត" ។

៤. ពាក្យទាំងអស់ខាងក្រោមនេះ តើពាក្យណាខ្លះជានាម ?

ចូរទាញភ្ជាប់ពីចំណុច(ក) ទៅ(ខ) តាមគំរូ ។

| ក | ខ |
|---|---|
| ពាក្យជានាម | ត្រី<br>ចិញ្ចឹម<br>ស្រះ<br>ភូមិ<br>តូច |

៥. ពាក្យទាំងអស់ខាងក្រោមនេះ តើពាក្យណាខ្លះជាគុណនាម ?

ចូរទាញភ្ជាប់ពីចំណុច(ក) ទៅ(ខ) តាមគំរូ ។

| ក | ខ |
|---|---|
| ពាក្យជាគុណនាម | កាប់<br>ឧស្សាហ៍<br>ចំណី<br>ធំ<br>ស |

៦. ចូរស្រង់ល្បះដែលបង្ហាញពីទំនាក់ទំនង រវាងហេតុ និងផលពីក្នុងអត្ថបទ ។

៧. តើអត្ថបទខាងលើនិយាយពីអ្វី ?

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

> **មុខរបរអ្នកភូមិខ្ញុំ**
>
> ការជ្រើសរើសអាជីពមួយសម្រាប់ខ្លួន ឬគ្រួសារជាប្រការល្អ ដើម្បីអភិវឌ្ឍសេដ្ឋកិច្ចគ្រួសារឱ្យមានជីវភាពធូរធារ ។ ពូសុខក្រៅពីរបរធ្វើស្រែ គាត់បានចិញ្ចឹមត្រីក្នុងស្រះមួយក្បែរភូមិ ។ គាត់ចេះផលិតចំណីត្រីដោយខ្លួនឯង ។ លើសពីនេះទៀតគាត់ចេះពីវិធីថែទាំត្រីឱ្យបានល្អថែមទៀតផង ។

### សំណួរ

១. តើការជ្រើសរើសអាជីពផ្តល់សារៈសំខាន់ដូចម្តេច ?

២. ក្រៅពីធ្វើស្រែ តើពូសុខមានរបរអ្វីបន្ថែមទៀត ?

៣. តើពូសុខមានចំណេះដឹងអ្វីខ្លះអំពីការចិញ្ចឹមត្រី ?

### លំហាត់

១. ចូរពន្យល់ពាក្យ “ សេដ្ឋកិច្ច អភិវឌ្ឍ ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ ធូរធារ ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ឱ្យ ” ។

៤. ចូររកសទិសសព្ទនឹងពាក្យ “ សុខ ” ។

ខ. ចូររកពាក្យមកបំពេញល្បះខាងក្រោមឱ្យបានពេញលេញ ។

១. ប្រជាជនភូមិខ្ញុំ ..........ចិត្តណាស់ ព្រោះគាត់រស់នៅបានសុខ ។

២. ណាត្រីដឹកត្រីយកទៅ ............នៅឯផ្សាររាល់ថ្ងៃ ។

៣. កសិករភ្ជួរដាស់ដីនៅដើម ...........វស្សា ។

៤. ពូឌីរើសពូជត្រីល្អៗយកទៅ ...........ដើម្បីឱ្យបានផលខ្ពស់ ។

គ. ចូររៀបពាក្យខាងក្រោមឱ្យទៅជាល្បះពេញលេញ ។

| | | | |
|---|---|---|---|
| រាល់ថ្ងៃ | ធ្វើការ ។ | ពូសុខ | ខិតខំ |

| | | | | | |
|---|---|---|---|---|---|
| នៅ | ច្រូត | ស្រែ ។ | កសិករ | ក្នុង | ស្រូវ |

| | | | | | |
|---|---|---|---|---|---|
| ចិញ្ចឹម | គ្រួសារ | ត្រី | ពូសុខ | ស្រះ ។ | ក្នុង |

ឃ. ចូរគូសសញ្ញាព្រួញភ្ជាប់ពីរូបភាពទៅនឹងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។





មីងយនកំពុងលក់ត្រីនៅផ្សារ ។

ពូសុខកំពុងឱ្យចំណីត្រី ។

# មេរៀនទី ៣៣ ការរៀបរាប់ពីសុខភាព និងអាកាសធាតុ

**ការនិយាយ :** ចូរអានការសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ ។



កញ្ញា : សួស្ដីវិបុល! ថ្ងៃនេះ មុខឯងមិនស្រស់សោះ តើឯងមិនស្រួលខ្លួនមែនទេ ?

វិបុល : សួស្ដីកញ្ញា! ខ្ញុំដូចជាក្ដៅមុខ ឈឺក្បាល ហើយក្នុងខ្លួនដូចជាព្រឺរងាៗ ។ យប់មិញខ្ញុំគេងមិនសូវលក់ ហើយឧស្សាហ៍កណ្ដាស់ទៀតផង ។

កញ្ញា : អូ! ឯងប្រហែលជាកើតជំងឺផ្ដាសាយហើយមើលទៅ ។ នែ៎វិបុល! ខែនេះជារដូវក្ដៅ គ្មានភ្លៀងធ្លាក់ ឯអាកាសធាតុមានការប្រែប្រួល មនុស្ស សត្វងាយកើតជំងឺណាស់ ។ នៅពេលធ្វើដំណើរកណ្ដាលថ្ងៃ ឯងត្រូវពាក់មួក ពាក់ម៉ាស ដើម្បីបង្ការកម្ដៅ និងធូលី ។ ពេលនេះ ឯងត្រូវទៅមណ្ឌលសុខភាព ដើម្បីឱ្យគ្រូពេទ្យពិនិត្យ ។

វិបុល : អរគុណឯងណាស់កញ្ញា! ខ្ញុំនឹងធ្វើតាមដំបូន្មានរបស់ឯង ។ ឥឡូវនេះ ខ្ញុំប្រញាប់ទៅមណ្ឌលសុខភាពសិន ។

## សំណួរ

១. ហេតុអ្វីបានជាកញ្ញាដឹងថាវិបុលមិនស្រួលខ្លួន ?

២. ហេតុអ្វីបានជាមនុស្ស សត្វ ងាយកើតជំងឺនៅរដូវក្ដៅ ?

៣. ដើម្បីថែរក្សាសុខភាព តើកញ្ញានិយាយប្រាប់វិបុលដូចម្ដេច ?

៤. តើវិបុលឆ្លើយតបទៅកញ្ញាវិញដូចម្ដេច ?

## លំហាត់

១. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ ។

- ☐ អត្ថបទខាងលើរៀបរាប់អំពីការធ្វើអនាម័យលាងដៃ ដេកក្នុងមុង ។
- ☐ អត្ថបទខាងលើរៀបរាប់អំពីសុខភាព និងអាកាសធាតុ ។
- ☐ អត្ថបទខាងលើរៀបរាប់អំពីការស្លៀកពាក់ និងការសម្អាតខ្លួនប្រាណ ។
- ☐ អត្ថបទខាងលើរៀបរាប់អំពីការហូបនំចំណី និងអនាម័យ ។

២. ចូរអ្នករៀបរាប់អំពីសុខភាពផ្ទាល់ខ្លួនប្រាប់គ្នាទៅវិញទៅមកជាមួយដៃគូ ។

មេរៀនទី
៣៤

# ការលក់ដូរ

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



ព្រឹកនេះសុភីទំនេរ នាងបានឆ្លៀតពេលទៅជួយម្តាយលក់ដូរនៅឯផ្សារ ។

សុភី និងម្តាយក្រោកពីនិទ្រាតាំងពីព្រលឹមអុរ រៀបចំបន្លែ ត្រី សាច់ និងគ្រឿងទេសដាក់លើរទេះដើម្បីយកទៅលក់ ។ ពេលមកដល់ផ្សារ សុភីស្ទុះស្ទា ជួយរើអីវ៉ាន់ពីរទេះដាក់លក់លើតូប ។ នៅក្នុងផ្សារ មានមនុស្សច្រើនកុះករ ស្លៀកពាក់ស្អាតបាតខ្លះដើរទិញម្ហូបអាហារប្រចាំថ្ងៃ ខ្លះដើរទិញអីវ៉ាន់ប្រើប្រាស់ផ្សេងៗ ។ សុភីមានទឹកមុខញញឹមញញែមអញ្ជើញភ្ញៀវចូលទិញ ព្រមទាំងយកជំនាញគិតលេខដែលបានរៀនមកអនុវត្ត ។ តាំងពីព្រលឹមដល់ល្ងាច សុភី និងម្តាយមមាញឹកនឹងការលក់ដូរ ដោយមានភ្ញៀវចូលទិញជាហូរហែ ។ អ្នកភូមិប្រុស ស្រីចូលចិត្តទិញអីវ៉ាន់មីងសឿនណាស់ ព្រោះគាត់លក់តម្លៃថោកសមល្មម ។

ការប្រកបរបរលក់ដូរ ធ្វើឱ្យគ្រួសារមីងសឿន មានជីវភាពសមរម្យ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

អុរ អានថា អុល

សមរម្យ អានថា សំ-រុំ

និទ្រា អានថា និត-ទ្រា

ខ. ពន្យល់ពាក្យ

អីវ៉ាន់ (ន.) : វត្ថុ ឬរបស់នេះខ្លះ នោះខ្លះ ពុំចេញឈ្មោះរបស់ដែលហៅរួម ។

អុរ (ន.) : មុខមាត់ដែលទើបភ្ញាក់ពីដេកមិនទាន់លុបលាងមុខនៅឡើយ ។

គ្រឿងទេស (ន.) : គ្រឿងសម្រាប់ស្លមានដូចជា អំបិល ប៊ីចេង ខ្ទឹម ស្ករ ម្រេច ។ល ។

និទ្រា (ន.) : ដំណើរដេកលក់ ។

គ. បដិសព្ទ

ទិញ ≠ លក់

ថោក ≠ ថ្លៃ

ឃ. វេវចនសព្ទនឹងពាក្យ “ និទ្រា ”

និទ្រា ដេក សិង ផ្ទុំ គេង

ង. សទិសសព្ទនឹងពាក្យ “ ភ្ញៀវ ”

ភ្ញៀវ (ន.) : អ្នកទីទៃក្រៅពីគ្នាឯងក្នុងផ្ទះ ។ *ឧទាហរណ៍* ភ្ញៀវមកលេងផ្ទះ ។

ផ្ចៀវ (ន.) : ឈ្មោះឈើមួយប្រភេទមានផ្លែចេញពីមែក ឬពីដើមជាចង្កោមៗ មានរសជាតិជូរអែម ។

## សំណួរ

១. តើម្ដាយសុភីប្រកបរបរអ្វី ?

២. តើម្ដាយសុភីលក់អ្វីខ្លះ ?

៣. ហេតុអ្វីបានជាគេចូលចិត្តទិញអីវ៉ាន់មីងសឿន ?

៤. តើគ្រួសារមីងសឿនមានជីវភាពដូចម្ដេច ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ទំនេរ "។

២. ចូររកវេវចនសព្ទនឹងពាក្យ " កុះករ "។

៣. ចូររកសទិសសព្ទនឹងពាក្យ " ផ្សារ "។

៤. ចូររកពាក្យជានាម ដែលមានក្នុងអត្ថបទឱ្យបានចំនួន ៥ ។

៥. ចូររកគុណនាមក្នុងអត្ថបទឱ្យបានចំនួន ៣ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

**ការលក់ដូរ**

ព្រឹកនេះសុភីទំនេរ នាងបានឆ្លៀតពេលទៅជួយម្ដាយលក់ដូរនៅឯផ្សារ ។ សុភី និងម្ដាយក្រោកពីនិទ្រាតាំងពីព្រលឹមអរុរ រៀបចំបន្លែ ត្រី សាច់ និងគ្រឿងទេសដាក់លើរទេះដើម្បីយកទៅលក់ ។ នៅក្នុងផ្សារ មានមនុស្សច្រើនកុះករ ស្លៀកពាក់ស្អាតបាត ដើរទិញម្ហូបអាហារប្រចាំថ្ងៃ និងទិញអីវ៉ាន់ប្រើប្រាស់ផ្សេងៗ ។ សុភីមានទឹកមុខញញឹមញញែមអញ្ជើញភ្ញៀវចូលទិញ ។

### សំណួរ

១. តើម្ដាយសុភីលក់អ្វី ? នៅឯណា ?

២. តើគេទៅផ្សារ ដើម្បីអ្វី ?

### លំហាត់

១. ចូរពន្យល់ពាក្យ “ អរុរ គ្រឿងទេស ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ ទិញ ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ និទ្រា ” ។

៤. ចូររកសទិសសព្ទនឹងពាក្យ “ ផ្សារ ” ។

ខ. ចូររៀបពាក្យក្នុងប្រអប់ខាងក្រោមជាល្បះឱ្យបានត្រឹមត្រូវ ។

| | | | | | |
|---|---|---|---|---|---|
| ១. | គ្រួសារ | ប្រកបរបរ | ដូរ ។ | ខ្ញុំ | លក់ |

| | | | | | |
|---|---|---|---|---|---|
| ២. | ស៊ីដន | ផ្សារ | ទិញ | ទៅ | នំបញ្ចុក ។ |

| | | | | | |
|---|---|---|---|---|---|
| ៣. | ខ្ញុំ | ក្រឡាន ។ | លក់ | ប្រកបរបរ | អ្នកភូមិ |

គ. ចូររកពាក្យមកបំពេញល្បះខាងក្រោម រួចដាក់សញ្ញា " ។ " ដើម្បីបញ្ចប់ល្បះឱ្យបានត្រឹមត្រូវ ។

១. សុភីទំនេរនាងបានឆ្លៀតពេលទៅជួយម្ដាយ ........... នៅឯផ្សារ

២. សុភីនិងម្ដាយក្រោកពីនិទ្រាតាំងពី .................. រៀបចំបន្លែ ត្រី សាច់ និង .................

៣. នៅក្នុងផ្សារមានមនុស្សច្រើន ........... ស្លៀកពាក់ស្អាតបាត ដើរ ............ម្ហូបអាហារប្រចាំថ្ងៃនិងទិញ ......... ប្រើប្រាស់ផ្សេងៗ

ឃ. ចូរតែងល្បះតាមរូបភាពខាងក្រោមដោយប្រើពាក្យ " លក់ និងទិញ " ។



........................................



........................................

ង. ចូរប្អូនសរសេរតែងសេចក្ដីពណ៌នាពីសត្វ " ឆ្កែ " តាមរូបភាព និងគម្រោងខាងក្រោម ។

## គម្រោង



១. សេចក្ដីផ្ដើម :

តើសត្វនោះមានឈ្មោះអ្វី ? ញី ឬឈ្មោល ? រស់នៅឯណា ?

២. តួសេចក្ដី :

- តើវាមានមាឌតូច ឬធំ ? ស្គម ឬធាត់ ? ទាប ឬខ្ពស់ ? សម្បុរអ្វី ?
- តើក្បាលវាមានអ្វីខ្លះ ? (ភ្នែក ច្រមុះ ត្រចៀក ធ្មេញ ចង្កូម ...)
- តើដងខ្លួនវាដូចម្ដេច ? (ជើង ក កន្ទុយ រោម ...)
- តើវាមានចរិតលក្ខណៈដូចម្ដេច ? (ស្លូត ឬកាច ឧស្សាហ៍ ឬខ្ជិល ...)
- តើវាមានប្រយោជន៍អ្វីខ្លះដល់អ្នក ? (យាមផ្ទះ ចាប់សត្វចង្រៃ ...)

៣. សេចក្ដីបញ្ចប់ :

តើប្អូនមានអារម្មណ៍ដូចម្ដេចចំពោះ សត្វនោះ ? ព្រោះអ្វី ? (ស្រឡាញ់ចូលចិត្ត ឬស្អប់)

មេរៀនទី
# ៣៥ អំពីកិរិយា

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ខាងក្រោម ។

១. ពូសែម ភ្ជួរស្រែ ។

២. សុខា ពប្អូន ។

៣. ជីតាខ្ញុំ និទានរឿង ។

៤. គោ ដើរកណ្ដាលវាលស្រែ ។

ពាក្យ " ភ្ជួរ ព និទាន និងដើរ " សម្គាល់អំពើ ឬសកម្មភាព ។ ពាក្យទាំងនេះជាកិរិយា ។

*កិរិយាជាពាក្យសម្ដែងអំពើ ឬបង្ហាញសកម្មភាព ។*

## លំហាត់

ក. ចូរសរសេរពាក្យជាកិរិយាឱ្យត្រូវនឹងរូបភាពខាងក្រោម ។

| លក់ | លោត | ច្រៀង |
|---|---|---|


.............


.............


.............

ខ. ចូរអានពាក្យខាងក្រោម រួចស្រង់ពាក្យណាខ្លះជាកិរិយា ។

| | | | | | | |
|---|---|---|---|---|---|---|
| ច្រៀង | ទេសភាព | រៀន | សរសេរ | ជិះ | មើល | ល្អ |
| សើច | ថ្ម | លេង | ក្ដៅ | ប្រាសាទ | ដេរ | |

គ. ចូរអានល្បះខាងក្រោម រួចស្រង់ពាក្យជាកិរិយាពីក្នុងល្បះ ។

១. កុមារទៅសាលារៀន ។

២. គ្រួសារចិត្រាអង្គុយនៅមាត់សមុទ្រ ។

៣. គេសង់អគារខ្ពស់ៗក្នុងទីក្រុង ។

៤. ទេសចរទិញវត្ថុអនុស្សាវរីយ៍ ។

ឃ. ចូរយកកិរិយា " ឆ្លាក់ ថត ឈរ " ទៅបំពេញក្នុងល្បះខាងក្រោម ។

១. គេ .........រូបប្រាសាទអង្គរវត្ត ។

២. ទឹកជ្រោះ ...........ពីលើថ្ម ។

៣. តោថ្ម ............យ៉ាងសង្ហា ។

ង. ចូរតែងល្បះដោយប្រើកិរិយា " រៀន អង្គុយ ប្រឹងប្រែង " ក្នុងមួយពាក្យឱ្យបានមួយល្បះ ។

១. ........................................................... ។

២. ........................................................... ។

៣. ........................................................... ។

មេរៀនទី

៣៦

# ការហាត់ប្រាណ

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



នៅពេលព្រលឹមភ្លឺស្រាងៗ ។ នៅមាត់បង្អួចក្បែរបន្ទប់បូណាគេង គេឮសំឡេងមាន់រងាវដាស់បូណា ៖ "កុកគីកែកឺត! កុកគីកែកឺត! ក្រោកឡើង! ក្រោកឡើងបូណា" ។ ចាបក៏ជួយស្រែកដាស់ "ជីប! ជីប! ភ្ញាក់ឡើង! ភ្លឺហើយបូណា" ។

បូណានៅតែសម្ងំគេងលក់យ៉ាងស្កប់ស្កល់ដដែល ។ ព្រះអាទិត្យក៏ជួយក្រើនបូណាឱ្យក្រោកឡើង! យើងទៅហាត់ប្រាណជាមួយគ្នា! " ។ បូណាភ្ញាក់ពីដំណេក ម្នីម្នាស្ទុះចេញពីគ្រែ រួចពោលថា ៖ " អូ! សួស្តី បងមាន់ បងចាប បងព្រះអាទិត្យ បងៗចាំខ្ញុំយូរហើយឬ ? ថ្ងៃនេះ ខ្ញុំគេងជ្រុលបន្តិច ព្រោះយប់មិញចូលគេងម៉ោងដប់ ដោយរវល់បង្ហើយកិច្ចការផ្ទះសម្រាប់ត្រៀមប្រឡងឆមាស ។ អរគុណបងៗ ទៅយើង!ទៅហាត់ប្រាណ " ។ ពួកគេក៏បណ្តើរគ្នាត្រសងយ៉ាងរីករាយ ។ យើងហាត់ប្រាណដើម្បីបញ្ចេញញើស គឺបញ្ចេញជាតិពុលពីក្នុងខ្លួន ។

ការហាត់ប្រាណទៀងទាត់អាចបង្ការទប់ស្កាត់ជំងឺផ្សេងៗបាន ។ ដូច្នេះ ការហាត់ប្រាណមានសារៈសំខាន់ណាស់ដើម្បីសុខភាពយើងទាំងអស់គ្នា ។

*" ហាត់ប្រាណដើម្បីសុខភាព សុខភាពនាំមកនូវសុភមង្គល "* ។

## ការរៀនពាក្យ

ក. អំណានពាក្យ

ក្រញាង អានថា ក្រ-ញ៉ាង

សុខភាព អានថា សុ-ខៈ-ភាប

សម្ងំ អានថា សំ-ងំ

ខ. ពន្យល់ពាក្យ

សម្ងំ (គុ.) : ដែលនៅស្ងៀម ។

បណ្ដើរ (កិ.) : ដើរត្រសងទៅព្រមគ្នា ។

ភ្លឺស្រាងៗ (គុ. កិ.) : ភ្លឺជិតព្រឹក ។

គ. បដិសព្ទ

សប្បាយ ≠ កើតទុក្ខ បង ≠ ប្អូន

ឃ. វេវចនសព្ទនឹងពាក្យ " ព្រះអាទិត្យ "

ព្រះអាទិត្យ ថ្ងៃ ព្រះទិនករ ទិវាទិវីន ព្រះសូរ្យ ព្រះសូរ្យសែង

ង. សទិសសព្ទនឹងពាក្យ " ព្រោះ "

ព្រោះ (កិ.) : បាចគ្រាប់ពូជល្អិត ។

*ឧទាហរណ៍* ព្រោះគ្រាប់ស្ពៃ ព្រោះគ្រាប់ស្រូវ ។

ព្រួស (កិ.) : បញ្ចេញទឹក ឬទឹកមាត់ពីក្នុងឱ្យខ្ចាយព្រោងដោយកម្លាំង ។

*ឧទាហរណ៍* ព្រួសទឹក ពស់ព្រួសពិស ។

ព្រោះ (អា. និ.) : ហេតុ ត្បិត ។ *ឧទាហរណ៍* រៀនពុំចេះពីព្រោះខ្ជិល ។

## សំណួរ

១. តើនរណាខ្លះដែលដាស់បូណាទៅហាត់ប្រាណ ?

២. ពេលក្រោកពីដំណេក តើបូណានិយាយដូចម្ដេចខ្លះ ទៅកាន់អ្នកទាំងបី ?

៣. តើនរណាខ្លះទៅហាត់ប្រាណជាមួយបូណា ?

៤. ហេតុអ្វីបានជាពួកគេទៅហាត់ប្រាណ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ភ្លឺ " ។

២. ចូររកវេវចនសព្ទនឹងពាក្យ " គេង " ។

៣. ចូររកសទិសសព្ទនឹងពាក្យ " ពី " ។

៤. ចូរស្រង់ពាក្យ " កិរិយា " ដែលមាននៅក្នុងអត្ថបទ ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### ការហាត់ប្រាណ

រាល់ព្រឹក សុខា និងប្អូនក្រោកពីព្រលឹមភ្លឺស្រាងៗមុនព្រះអាទិត្យរះរៀបចំបត់ភួយ សាមុង មូរកន្ទេល រៀបខ្នើយទុកដាក់យ៉ាងមានរបៀប ។ បន្ទាប់មកពួកគេបាននាំគ្នាទៅ ហាត់ប្រាណក្នុងទីធ្លាមុខផ្ទះមុនទៅសាលា ។ សុខា និងដារីមានសុខភាពល្អ ពុំដែលឈឺទេ ព្រោះគេទាំងពីរនាក់ហាត់ប្រាណបានទៀងទាត់ ។

## សំណួរ

១. តើសុខា និងប្អូនបានធ្វើអ្វីខ្លះ ពេលក្រោកពីព្រលឹម ?

២. ហេតុអ្វីបានជាពួកគេទាំងពីរនាក់ចូលចិត្តហាត់ប្រាណ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ភ្លឺស្រាងៗ " ។

២. ចូររកបដិសព្ទនឹងពាក្យ " ប្អូន " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ព្រះអាទិត្យ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ព្រោះ " ។

ខ. ចូរជ្រើសរើសពាក្យជាកិរិយាសព្ទក្នុងប្រអប់ទៅបំពេញក្នុងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

| ចូលចិត្ត | ហាត់ | ធ្វើឱ្យ | ទៅ | ក្រោក | ឱ្យ |
|---|---|---|---|---|---|

១. រាល់ព្រឹកមុន ........ សាលា ខ្ញុំ ....... ពីព្រលឹម ដើម្បី ......... ប្រាណ ។

២. ការហាត់ប្រាណ .................... យើងមានសុខភាពល្អ ។

៣. ខ្ញុំ ...........ហាត់ប្រាណណាស់ ព្រោះវាជាទម្លាប់ល្អ និងជួយ .......... យើងមានសុខភាពល្អ មាំមួន ប្រាជ្ញាឈ្លាសវៃ ។

គ. ចូរគូសភ្ជាប់រូបភាពនឹងល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។



ពួកគេកំពុងបោសសម្អាតទីធ្លាមុខផ្ទះដើម្បីបរិស្ថាន ។



ពួកគេកំពុងនាំគ្នាហាត់ប្រាណដើម្បីសុខភាព ។

ឃ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ " ហ " និងពាក្យ " ហាត់ " ។

មេរៀនទី
៣៧

# យើងទៅមណ្ឌលសុខភាព

**អំណាន :** ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ ។






## ចម្រៀង : លំនាំបទផ្កាយលើមេឃ

| | | | |
|---|---|---|---|
| គ្រូសូមផ្ដែផ្ដាំ | កូនត្រូវចងចាំ | ឱ្យបានច្បាស់ថា | |
| ទាំងការរស់នៅ | ទាំងញ៉ាំអាហារ | ត្រូវចេះរក្សា | |
| ធ្វើអនាម័យ | ត្រូវចេះរក្សា | ធ្វើអនាម័យ ។ | (បន្ទរ) |
| កូនចៅប្រុសស្រី | ជំងឺសព្វថ្ងៃ | មានច្រើនកន្លង | |
| តាមមកយាយី | ដល់មនុស្សសត្វផង | ដើម្បីចម្លង | |
| រោគាដល់យើង | ដើម្បីចម្លង | រោគាដល់យើង ។ | (បន្ទរ) |
| បើមានបញ្ហា | ចុកចាប់កាយា | ត្រូវឆាប់រូតរះ | |
| ទៅមណ្ឌលសុខភាព | ឱ្យបានរហ័ស | ជំងឺជាសះ | |
| សុខភាពបវរ | ជំងឺជាសះ | សុខភាពបវរ ។ | (បន្ទរ) |

## ការរៀនពាក្យ

ក. អំណានពាក្យ

រក្សា អានថា រ័ក-សា

បញ្ហា អានថា ប័ញ-ហា

រហ័ស អានថា រ-ហាស់

ខ. ពន្យល់ពាក្យ

រក្សា (កិ.) : ថែទាំ បីបាច់ ថិញ្ចឹម ការពារ ។

អនាម័យ (ន.) : ដំណើរមិនមានរោគ សេចក្ដីសុខសប្បាយ ។

បញ្ហា (ន.) : ពាក្យ ឬសម្ដីដែលមានអាថ៌កំបាំង ទាល់តែអ្នកមានប្រាជ្ញា ទើបអាចដឹងបាន (ចំណោទ ប្រស្នា) ។

គ. បដិសព្ទ

ច្រើន ≠ តិច ទុក្ខ ≠ សុខ

ឃ. វេវចនសព្ទនឹងពាក្យ "កាយា"

កាយា ខ្លួន រាងកាយ កាយ

ង. សទិសសព្ទនឹងពាក្យ "រស់"

រស់ (កិ.) : មានជីវិតរស់នៅ មិនទាន់ស្លាប់ ។

រស (ន.) : សម្ផស្សប្លែកៗដែលប៉ះពាល់ជីវ្ហាប្រសាទដឹងថា ជូរ ប្រៃ ចត់ ល្វីង ផ្អែម ជាដើម ។

## សំណួរ

១. តើគ្រូបានផ្ដាំប្អូនឱ្យចងចាំអ្វីខ្លះ ?

២. តើប្អូនស្គាល់ជំងឺអ្វីខ្លះ នៅក្នុងស្រុកយើង ?

៣. ប្រសិនជាប្អូនមានជំងឺ តើត្រូវទៅព្យាបាលនៅកន្លែងណា ?

៤. តើប្អូនត្រូវធ្វើអ្វីខ្លះ ដើម្បីបង្ការជំងឺឆ្លង ?

## លំហាត់

១. ឱ្យសិស្សហាត់ច្រៀងចម្រៀងឡើងវិញឱ្យបានត្រឹមត្រូវ ។

២. ចូររកបដិសព្ទនឹងពាក្យ "រហ័ស" ។

៣. ចូររកវេវចនសព្ទនឹងពាក្យ "រូតរះ" ។

៤. ចូររកសទិសសព្ទនឹងពាក្យ "សព្វ" ។

៥. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយដែលត្រូវនឹងអត្ថន័យនៃបទចម្រៀងខាងលើ ។

☐ ពេលមានបញ្ហាសុខភាពយើងត្រូវទៅលំហែកាយ ។

☐ ពេលមានបញ្ហាសុខភាពយើងត្រូវទៅផ្ទះលក់ថ្នាំពេទ្យ ។

☐ ពេលមានបញ្ហាសុខភាពយើងត្រូវទៅមណ្ឌលសុខភាព ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គចម្រៀងខាងក្រោម ។

| | | |
|---|---|---|
| កូនចៅប្រុសស្រី | ជំងឺសព្វថ្ងៃ | មានច្រើនកន្លង |
| តាមមកយាយី | ដល់មនុស្សសត្វផង | ដើម្បីចម្លង |
| រោគាដល់យើង | ដើម្បីចម្លង | រោគាដល់យើង ។ (បន្ទរ) |
| បើមានបញ្ហា | ចុកចាប់កាយា | ត្រូវឆាប់រូតរះ |
| ទៅមណ្ឌលសុខភាព | ឱ្យបានរហ័ស | ជំងឺជាសះ |
| សុខភាពបវរ | ជំងឺជាសះ | សុខភាពបវរ ។(បន្ទរ) |

## សំណួរ

១. តើសព្វថ្ងៃនេះមានជំងឺអ្វីខ្លះកើតឡើង ?

២. ពេលមានជំងឺ តើអ្នកត្រូវធ្វើដូចម្ដេច ?

៣. តើប្អូនត្រូវធ្វើដូចម្ដេច ដើម្បីកុំឱ្យកើតជំងឺ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " បញ្ហា "។

២. ចូររកបដិសព្ទនឹងពាក្យ " រហ័ស "។

៣. ចូរស្រង់វេវចនសព្ទនឹងពាក្យ " កាយា "។

៤. ចូរស្រង់សទិសសព្ទនឹងពាក្យ " សព្វ "។

ខ. ចូររកពាក្យទៅបំពេញចន្លោះខាងក្រោម ។

| | | |
|---|---|---|
| គ្រូសូម .......ផ្តាំ | កូនត្រូវចងចាំ | ឱ្យបាន .........ថា |
| ទាំងការរស់នៅ | ទាំងញ៉ាំ ......... | ត្រូវចេះរក្សា |
| ធ្វើអនាម័យ | ត្រូវចេះ ......... | ធ្វើអនាម័យ ។ |

គ. ចូរតែងល្បះតាមរូបភាពខាងក្រោម ។






១. ......................... ។ ២. ......................... ។

ឃ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ " ញ " និងពាក្យ " ញញឹម "។

មេរៀនទី
៣៨

# ពណ៌នាអំពីព្រឹត្តិការណ៍

## តែងសេចក្ដី

ចូរអានអត្ថបទខាងក្រោម ។ តើអត្ថបទនេះពណ៌នាអំពីអ្វី ?




### គ្រោះថ្នាក់ចរាចរណ៍

កាលពីថ្ងៃអាទិត្យមុន មានគ្រោះថ្នាក់ចរាចរណ៍កើតឡើងត្រង់ចំណុចផ្លូវកោងក្បែរសាលារៀនមួយ ។

មុនពេលកើតហេតុគេឃើញមានភ្លៀងធ្លាក់យ៉ាងខ្លាំង ហើយមានបុរសម្នាក់បើកបរម៉ូតូពីលិចទៅកើតក្នុងល្បឿនលឿន ។ លុះទៅដល់ចំណុចផ្លូវកោង ហើយរអិលផង ម៉ូតូក៏បានជ្រុលចង្កូតធ្លាក់ពីលើចិញ្ចើមផ្លូវ រួចទៅបុកនឹងដើមឈើ ។ អ្នករស់នៅក្បែរនោះ រួមទាំងអ្នកដំណើរបានស្ទុះទៅមើលហេតុការណ៍នេះ ។ ក្រោយពេលកើតហេតុ គេឃើញម៉ូតូ

ត្រូវខូចខាតទាំងស្រុង រីឯអ្នកបើកបរវិញមានឈាមពេញខ្លួនដោយរងរបួសធ្ងន់ដេកសន្លប់ស្តូកស្តឹង ។ មួយសន្ទុះក្រោយមក គេឃើញមានកម្លាំងសមត្ថកិច្ចមកជួយធ្វើអន្តរាគមន៍យកអ្នករបួសទៅកាន់មន្ទីរពេទ្យ ។

ដូច្នេះយើងគ្រប់គ្នា ត្រូវប្រុងប្រយ័ត្នជានិច្ច និងគោរពច្បាប់ចរាចរណ៍ឱ្យបានខ្ជាប់ខ្ជួននៅពេលធ្វើដំណើរ ។

## សំណួរ

១. តើព្រឹត្តិការណ៍នេះកើតឡើងនៅពេលណា ? កន្លែងណា ?

២. តើគ្រោះថ្នាក់ចរាចរណ៍នេះបង្កឡើងដោយសារអ្វី ?

៣. ក្រោយពេលកើតហេតុ តើមានអ្វីកើតឡើង ?

៤. ដើម្បីចៀសវាងគ្រោះថ្នាក់ចរាចរណ៍ តើប្អូនត្រូវធ្វើដូចម្តេច ?

# គម្រោង
# ពណ៌នាអំពីព្រឹត្តិការណ៍អ្វីមួយ

១. សេចក្តីផ្តើម

- ពេលវេលា
- ទីកន្លែង
- ព្រឹត្តិការណ៍ ។

២. តួសេចក្តី

- មុនពេលកើតហេតុ
  - សកម្មភាពមនុស្សមុនពេលកើតហេតុ
- ពេលកើតហេតុ
  - ព្រឹត្តិការណ៍ចាប់ផ្តើមកើតឡើង : ហេតុអ្វីបានជាមានព្រឹត្តិការណ៍នោះ?
  - ព្រឹត្តិការណ៍កំពុងកើតឡើង : តើព្រឹត្តិការណ៍នោះប្រព្រឹត្តិទៅដូចម្តេច?
- ក្រោយពេលកើតហេតុ
  - ការខូចខាត
  - សកម្មភាពអ្នកទៅមើលហេតុការណ៍
  - សកម្មភាពកម្លាំងមានសមត្ថកិច្ច ។

៣. សេចក្តីបញ្ចប់

- ចំណាប់អារម្មណ៍ចំពោះគ្រោះថ្នាក់ចរាចរណ៍ ។

## លំហាត់

ចូរសរសេរតែងសេចក្ដីពណ៌នាអំពីគ្រោះថ្នាក់ចរាចរណ៍មួយរវាង “ រថយន្ត និងម៉ូតូ ” តាមរយៈរូបភាព និងសំណួរខាងក្រោម ។

១. តើព្រឹត្តិការណ៍នេះកើតឡើងនៅពេលណា ? កន្លែងណា ?

២. តើវាបង្កឡើងដោយសារអ្វី ?

៣. នៅពេលកើតហេតុ តើមានអ្វីកើតឡើង ?

៤. ក្រោយពេលកើតហេតុ តើមានអ្វីកើតឡើង ?

៥. តើអ្នកមានអារម្មណ៍ដូចម្ដេចចំពោះហេតុការណ៍នេះ ?



មេរៀនទី ៣៩

# ទោសនៃគ្រឿងញៀន

**អំណាន :** ចូរអានអត្ថបទរឿងខាងក្រោម រួចឆ្លើយនឹងសំណួរ ។



នៅពេលត្រឡប់ពីសាលារៀនវិញ សុភក្ត្របានឃើញនគរបាលកំពុងនាំខ្លួនបុរសម្នាក់ចូលក្នុងសាលាឃុំ ។

បុរសនោះ មានរាងកាយស្គមស្គាំង ទឹកមុខស្លេកស្លាំងខុសប្លែកពីអ្នកដទៃ ។ គេឮចាស់ៗនៅតាមផ្លូវនិយាយថា បុរសនោះជាអ្នកប្រើប្រាស់គ្រឿងញៀន ។ មកដល់ផ្ទះសុភក្ត្រនិយាយពីហេតុការណ៍នោះប្រាប់ម្ដាយរបស់គេ ។ ឮដូច្នោះម្ដាយសុភក្ត្រ ពន្យល់ថា ការប្រើគ្រឿងញៀន មិនល្អទេកូន! គឺនាំឱ្យអន្តរាយដល់សុខភាព បាត់បង់ការចងចាំ វង្វេងស្មារតី ឆេវឆាវ ពិសេស បំផ្លាញទ្រព្យសម្បត្តិ និងថវិកាគ្រួសារថែមទៀត ។ ម្យ៉ាងទៀត គ្រឿងញៀនបង្កឱ្យមានអំពើចោរកម្ម អំពើហិង្សា បាត់បង់ការងារ ។ល ។ ដូច្នេះ កូនមិនត្រូវចង់ដឹង ឬចង់សាកគ្រឿងញៀននោះទេ! កូន និងមិត្តភក្តិត្រូវនៅឱ្យឆ្ងាយពីវា ។

ក្រោយពីស្តាប់ការទូន្មានរបស់ឪពុកម្តាយ លោកគ្រូ អ្នកគ្រូ សុភក្ត្រប្តេជ្ញាចិត្តខិតខំរៀនសូត្រ និងចៀសឱ្យផុតពីគ្រឿងញៀន ។

*" យើងត្រូវចៀសឱ្យឆ្ងាយពីគ្រឿងញៀន "*

## ការរៀនពាក្យ

ក. អំណានពាក្យ

អន្តរាយ អានថា អន់-តៈ-រ៉ាយ

ទូន្មាន អានថា ទូន-មាន

ខ. ពន្យល់ពាក្យ

អន្តរាយ (ន.) : សេចក្តីវិនាស ។

ចោរកម្ម (ន.) : អំពើលួច ឆក់ ប្លន់ ។

គ. បដិសព្ទ

ហិង្សា ≠ អហិង្សា

វង្វេង ≠ ភ្លឺស្វាង

ឃ. វេវចនសព្ទនឹងពាក្យ " ថវិកា "

ថវិកា ប្រាក់ លុយ បច្ច័យ រូបិយប័ណ្ណ

ង. សទិសសព្ទនឹងពាក្យ " វា "

វា (ន.) : ពាក្យសម្រាប់និយាយជំនួសឈ្មោះមនុស្សក្មេងជាង មនុស្សថ្នាក់តូច ។

វារ (កិ.) : លូនដោយប្រវារ ។ *ឧទាហរណ៍* ល្មៅវារ កូនក្មេងចេះវារ ... ។

វៀរ (គុ.) : លើកលែង តម ឈប់ ខាន ។

*ឧទាហរណ៍* វៀរចាកគ្រឿងញៀន ។

## សំណួរ

១. តើសុភក្ត្រឃើញសកម្មភាពអ្វី ពេលគេត្រឡប់ពីសាលារៀនវិញ ?

២. តើម្តាយសុភក្ត្រ និយាយពន្យល់កូនដូចម្តេចខ្លះ ?

៣. តើម្តាយសុភក្ត្រ បានទូន្មានសុភក្ត្រដូចម្តេចខ្លះ ?

៤. តើសុភក្ត្រប្តេជ្ញាចិត្តដូចម្តេចខ្លះ ? ហេតុអ្វី ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ខិតខំ ស្គមស្គាំង "។

២. ចូររកវេវចនសព្ទនឹងពាក្យ " អន្តរាយ "។

៣. ចូររកសទិសសព្ទនឹងពាក្យ " រាង "។

៤. ចូរស្រង់ពាក្យជាកិរិយានៅក្នុងអត្ថបទឱ្យបាន ៣ពាក្យ ។

# សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម ។

### ទោសនៃគ្រឿងញៀន

ការប្រើប្រាស់គ្រឿងញៀននាំឱ្យអន្តរាយដល់សុខភាព បាត់បង់ការចងចាំ វង្វេងស្មារតី ឆេវឆាវ ពិសេសបំផ្លាញទ្រព្យសម្បត្តិ និងថវិកាគ្រួសារថែមទៀត ។ ម្យ៉ាងទៀតគ្រឿងញៀនបង្កឱ្យមានអំពើចោរកម្ម អំពើហិង្សា បាត់បង់ការងារ ។ល ។ ដូច្នេះកូនមិនត្រូវចង់ដឹង ឬចង់សាកគ្រឿងញៀននោះទេ កូន និងមិត្តភក្តិត្រូវនៅឱ្យឆ្ងាយពីវា ។

## សំណួរ

១. តើការប្រើគ្រឿងញៀន នាំឱ្យអន្តរាយដូចម្ដេចខ្លះ ?

២. តើគ្រឿងញៀនបង្កឱ្យមានអំពើអាក្រក់អ្វីខ្លះ ?

៣. ដើម្បីចៀសឱ្យផុតពីការប្រើប្រាស់គ្រឿងញៀន តើកូនៗត្រូវធ្វើដូចម្ដេចខ្លះ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ចោរកម្ម អន្តរាយ "។

២. ចូររកបដិសព្ទនឹងពាក្យ " ហិង្សា វង្វេង "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ថវិកា "។

៤. ចូររកសទិសសព្ទនឹងពាក្យ " វា "។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញល្បះខាងក្រោម ឱ្យបានត្រឹមត្រូវ ។

| | | | |
|---|---|---|---|
| ឈប់ | គ្រឿងញៀន | នៅ | សាក |

១. អ្នកប្រើប្រាស់ ...................... ធ្វើឱ្យបាត់បង់ការចងចាំ ។

២. សុភក្រ្ត .................. ដើរលេងទៀតហើយ ។

៣. កូនមិនត្រូវចង់ដឹង ឬចង់ .............. គ្រឿងញៀននោះទេ ។

៤. កូន និងមិត្តភក្ដិត្រូវ .............. ឱ្យឆ្ងាយពីវា ។

គ. ចូរសរសេរបំពេញល្បះប្រាប់ហេតុ និងផលខាងក្រោម ។

១. សុផលខូចសុខភាព ........... វាប្រើប្រាស់គ្រឿងញៀន ។

២. កសិករគ្មានទឹកធ្វើស្រែ .......... គ្មានភ្លៀងធ្លាក់ ។

៣. ទឹកជំនន់ជន់លិចភូមិអស់ ......... ប្រជាជនខ្វះទីជម្រក និងស្បៀងអាហារ ។

ឃ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ " ល " និងពាក្យ " លីលា "។

# មេរៀនទី ៤០ រៀបរាប់ពីសមាជិកគ្រួសារ និងមុខរបរ

**ការនិយាយ :** ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ ។



ចិន្តា : សួស្តី! ណារិន តើឯងសុខសប្បាយជាទេ ?

ណារិន : បាទ! សួស្តីចិន្តា ខ្ញុំសុខសប្បាយជាធម្មតាទេ ។ ចិន្តានៅពេលទំនេរ ខ្ញុំតែងឃើញឯងបើកបរម៉ូតូជាមួយម្តាយឯងទៅផ្សារ ។ តើក្រុមគ្រួសារឯងប្រកបមុខរបរអ្វី ?

ចិន្តា : អូ! ម្តាយខ្ញុំ ជាអ្នកលក់ដូរ ។ ចំណែកឪពុកខ្ញុំជាយោធា ។ សព្វថ្ងៃ គាត់នៅព្រំដែនឯណោះ! យូរៗទើបគាត់មកលេងផ្ទះម្តង ។ ឯជីដូន ជីតាខ្ញុំគាត់នៅផ្ទះជួយមើលថែទាំថៅៗ ព្រោះគាត់ចាស់ៗហើយ ។ ចុះចំណែកគ្រួសារឯងវិញណារិន ?

ណារិន : អរគុណចិន្តា! ម្តាយខ្ញុំគាត់ជាគ្រូពេទ្យនៅមណ្ឌលសុខភាពឃុំយើង ។ ឪពុកខ្ញុំជាកសិករ ។ ចំណែកលោកយាយរបស់ខ្ញុំគាត់ជាអ្នកត្បាញហូល ផាមួង និងក្រមា ។ រីឯជីតារបស់ខ្ញុំ គាត់បានស្លាប់យូរឆ្នាំមកហើយ ។

## សំណួរ

១. តើសមាជិកគ្រួសារចិន្តាធ្វើការងារអ្វីខ្លះ ?

២. តើសមាជិកគ្រួសារណារិន ប្រកបមុខរបរអ្វីខ្លះ ?

៣. ចំពោះគ្រួសារប្អូនវិញ តើប្រកបមុខរបរអ្វីខ្លះ ?

## លំហាត់

***ល្បែងដើរតួ :*** ចូរចាប់ដៃគូ ហើយសន្ទនាអំពីសមាជិកគ្រួសារនិងមុខរបររបស់គ្រួសារអ្នក តាមលំនាំខាងក្រោម ។

- គ្រួសារខ្ញុំមានសមាជិកចំនួន ............. នាក់
- ឪពុកឈ្មោះ .................. គាត់ជា .......................
- ម្ដាយឈ្មោះ .................. គាត់ជា .......................
- បងឈ្មោះ .................. គាត់ជា .......................
- ជីតាឈ្មោះ .................. គាត់ជា .......................
- ជីដូនឈ្មោះ .................. គាត់ជា .......................
- អ្នកដទៃទៀត .................................................. ។

មេរៀនទី ៤១

# ឥទ្ធិពលនៃគ្រឿងស្រវឹង

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ ៖ បទកាកគតិ

ឯអ្នកប្រមឹក
ប្រមូលកនផឹក
ធ្វើភឿននិងក្មេង
សម្ដីច្រើនតឹង
ស្រវឹងវង្វេង
ជំហរអួតក្អេង
មិនចេះក្រខ្សត់ ។

អួតទាំងបំពាន
ផឹកម៉ែ្វលុយមាន
ផឹកម៉ែ្វលុយអត់
ឯងចេះតែកិន
មិនចេះតែកត់
ផឹកដល់កំណត់
យកស្រែបញ្ចាំ ។

សល់ថ្នាលមួយពីរ
វាយគោស្ងោរស៊ី
មិនគិតខ្លាចកម្ម
ផឹកជ្រុលហួសបទ
អត់បាយរាល់ឆ្នាំ
អស់ស្រែបញ្ចាំ
បញ្ចាំកូនទៀត ។

*" ដកស្រង់ចេញពីច្បាប់ក្រមង៉ុយ "*

## ការរៀនពាក្យ

ក. អំណានពាក្យ

ប្រមឹក អានថា ប្រ-ម៉ឹក

បទ អានថា បត់

ខ. ពន្យល់ពាក្យ

អួត (កិ.) : និយាយបំផ្លើសការពិត ប្រកាសគុណនិយាយហួសការពិត ។

បញ្ចាំ (កិ.) : ដាក់ទ្រព្យរបស់អ្វីមួយទុកជាភស្តុតាង ដើម្បីយកប្រាក់មកប្រើប្រាស់ ។

បំពាន (កិ.) : ពានពារលើ រំលោភលើ ធ្វើបំពានលើច្បាប់ ។

គ. បដិសព្ទ

ក្មេង ≠ ចាស់ មាន ≠ ក្រ

ឃ. វេវចនសព្ទនឹងពាក្យ " ខ្សត់ "

ខ្សត់ ទ័ល ក្រ ខ្វះខាត

ង. សទិសសព្ទនឹងពាក្យ " កម្ម "

កម្ម (ន.) : អំពើ ទោះអំពើល្អក្តី អាក្រក់ក្តី ។ *ឧទាហរណ៍* កម្មពីជាតិមុន ... ។

កាំ (ន.) : អ្វីៗដែលរៀបជាជាន់ ជាថ្នាក់សម្រាប់ទល់ សម្រាប់ទ្រ ។

*ឧទាហរណ៍* កាំជណ្តើរ ... ។

## សំណួរ

១. តើអ្នកផឹកស្រាច្រើនប្រើសម្តីដូចម្តេច ?

២. បើផឹកស្រាដល់កំណត់ តើគាត់យកអ្វីទៅបញ្ចាំ ?

៣. បើគ្មានស្រែទៅបញ្ចាំ តើគាត់យកអ្វីទៅបញ្ចាំទៀត ?

៤. តើអ្នកផឹកស្រាតែងជួបនឹងផលអាក្រក់អ្វីខ្លះ ?

## លំហាត់

១. ចូរសូត្រមេសូត្រឡើងវិញ ។

២. ចូររកបដិសព្ទនឹងពាក្យ " ក្រ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ភឿន " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ពីរ " ។

៥. ចូររកពាក្យចួននៅក្នុងអត្ថបទខាងលើ ។

វគ្គទី ១ តើពាក្យ " ប្រមឹក " ចួននឹងពាក្យអ្វី ?

ពាក្យ " ក្មេង " ចួននឹងពាក្យអ្វីខ្លះ ?

វគ្គទី ២ តើពាក្យ " បំពាន " ចួននឹងពាក្យអ្វី ?

ពាក្យ " អត់ " ចួននឹងពាក្យអ្វីខ្លះ ?

៦. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយណាដែលទាក់ទងនឹងអត្ថន័យមេសូត្រ ។

☐ អ្នកប្រមឹកមានប្រយោជន៍ដល់គ្រួសារ ។

☐ អ្នកប្រមឹកតែងជួយដល់ជនក្រីក្រ ។

☐ អ្នកប្រមឹកធ្វើឱ្យគ្រួសារជួបការលំបាក ។

☐ អ្នកប្រមឹកធ្វើឱ្យគ្រួសារមានសុភមង្គល ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យក្នុងវគ្គមេសូត្រខាងក្រោម ។

| | | |
|---|---|---|
| អួតទាំងបំពាន | ផឹកម៉្លៃលុយមាន | ផឹកម៉្លៃលុយអត់ |
| ឯងចេះតែកិន | មិនចេះតែកត់ | ផឹកដល់កំណត់ |
| | យកស្រែបញ្ចាំ ។ | |
| សល់ថ្នាលមួយពីរ | វាយគោស្ទោរស៊ី | មិនគិតខ្លាចកម្ម |
| ផឹកជ្រុលហួសបទ | អត់បាយរាល់ឆ្នាំ | អស់ស្រែបញ្ចាំ |
| | បញ្ចាំកូនទៀត ។ | |

*" ដកស្រង់ចេញពីច្បាប់ក្រមង៉ុយ "*

## សំណួរ

១. តើអ្នកផឹកស្រាតែងប្រើសម្ដីដូចម្ដេច ?

២. តើគាត់ហ៊ានយកអ្វីខ្លះទៅបញ្ចាំ ?

៣. តើអ្នកផឹកស្រាស្រវឹងបង្កបញ្ហាអ្វីខ្លះដល់គ្រួសារ ?

## លំហាត់

ខ. ចូរជ្រើសរើសពាក្យចួនក្នុងប្រអប់ទៅបំពេញចន្លោះកំណាព្យខាងក្រោម ឱ្យបានត្រឹមត្រូវ ។

បំពាន លុយអត់ ផឹក បញ្ចាំ វង្វេង តឹង

ឯអ្នកប្រមឹក ប្រមូលកន ...... ធ្វើភឿននិងក្មេង

សម្ដីច្រើន ...... ស្រវឹង ........ ជំហារអួតក្អេង

មិនចេះក្រខ្សត់ ។

អួតទាំង ......... ផឹកម៉ែ្វលុយមាន ផឹកម៉ែ្វ ...........

ឯងចេះតែកិន ចិនចេះតែកត់ ផឹកដល់កំណត់

យកស្រែ ......... ។

គ. ចូររៀបពាក្យខាងក្រោមឱ្យបានទៅជាល្បះត្រឹមត្រូវ ។

| | | | | |
|---|---|---|---|---|
| វង្វេង | សុភា | ស្មារតី ។ | អ្នកសេព | តែង |

ឃ. ចូរសរសេរតែងសេចក្ដីពណ៌នាពីគ្រោះថ្នាក់ចរាចរណ៍មួយរវាង “ ម៉ូតូ និងកង់ ” តាមរយៈគម្រោងខាងក្រោម ៖



## គម្រោង

១. សេចក្ដីផ្ដើម

- ពេលវេលា
- ទីកន្លែង
- ឈ្មោះព្រឹត្តិការណ៍ ។

២. តួសេចក្ដី

- មុនពេលកើតហេតុ
  - សកម្មភាពមនុស្សមុនពេលកើតព្រឹត្តិការណ៍
- ពេលកើតហេតុ
  - ព្រឹត្តិការណ៍ចាប់ផ្ដើមកើតឡើង(ហេតុអ្វីបានជាមានព្រឹត្តិការណ៍នោះ ?)
  - ព្រឹត្តិការណ៍កំពុងកើតឡើង(តើព្រឹត្តិការណ៍នោះប្រព្រឹត្តិទៅដូចម្ដេច ?)
- ក្រោយពេលកើតហេតុ (អ្នកណាទទួលផល)
  - ការខូចខាត
  - សកម្មភាពអ្នកទៅមើលព្រឹត្តិការណ៍
  - សកម្មភាពកម្លាំងសមត្ថកិច្ច (ប៉ូលិស) ។

៣. សេចក្ដីបញ្ចប់

ចំណាប់អារម្មណ៍ ៖ បង្ហាញពីចំណាប់អារម្មណ៍ និងការប្ដេជ្ញាចិត្ត ។

មេរៀនទី

៤២

# សញ្ញាសួរ “ ? ”

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ខាងក្រោម ។

១. តើអ្នកកំពុងធ្វើអ្វី ?

២. តើអ្នកទើបមកពីណា ?

៣. តើអ្នកចូលចិត្តគ្រឿងស្រវឹងឬទេ ?

៤. បើគេហៅឱ្យផឹកស្រា តើអ្នកធ្វើដូចម្តេច ?

តាមរយៈឧទាហរណ៍ខាងលើល្បះនីមួយៗបញ្ចប់ដោយសញ្ញាសួរ “ ? ”។

*សញ្ញាសួរ “ ? ” សម្រាប់ដាក់បញ្ចប់ល្បះ ដើម្បីបង្កើតល្បះសំណួរ ។ គេត្រូវដាក់សញ្ញានេះនៅបន្ទាប់ពីពាក្យ **អ្វី ឯណា ប៉ុន្មាន ឬទេ ដូចម្តេច** ។ល ។*

## លំហាត់

ក. ចូរដាក់សញ្ញាសួរ “ ? ” ឬសញ្ញា “ ។ ” ដើម្បីបញ្ចប់ល្បះឱ្យបានសមស្រប ។

១. យើងខិតខំរៀនទាន់ខ្លួននៅក្មេង ...

២. តើគ្រឿងស្រវឹងធ្វើឱ្យយើងបាត់ស្មារតីមែនឬទេ ...

៣. តើសព្វថ្ងៃអ្នករៀននៅឯណា ...

៤. គ្រូកំពុងបង្រៀនសិស្សក្នុងថ្នាក់ ...

ខ. ចូរប្រើសញ្ញា " ។ " ឬសញ្ញាសួរ " ? " ដើម្បីបញ្ចប់ល្បះក្នុងអត្ថបទខាងក្រោម ។

អ្នកផឹកស្រាច្រើនហួសកំណត់ បណ្ដាលឱ្យបាត់បង់ស្មារតី និងខូចសុខភាព ... តើអ្នកធ្លាប់សាកល្បងវាដែរឬទេ ... ដើម្បីឱ្យយើងមានសុខភាពល្អ មានកម្លាំងខ្លាំងក្លា ប្រាជ្ញាឈ្លាសវៃ ត្រូវចៀសឱ្យផុតពីការសេពសុរា ... ក្រៅពីចំណុចដូចខាងលើ តើស្រាធ្វើឱ្យយើងខាតបង់អ្វីទៀត ... ដូច្នេះអ្នកមិនត្រូវសាកល្បងប្រើប្រាស់វាទេ ...

គ. ចូរតែងល្បះខ្លីៗដោយប្រើសញ្ញាសួរ " ? " ឱ្យបានចំនួនពីរល្បះ ។

មេរៀនទី
៤៣

# សិប្បកម្មថ្មកែវ

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



សិប្បកម្មជាកន្លែងផលិតកម្មធុនតូច ។ សិប្បកម្មចម្លាក់ថ្មកែវនៅខេត្តពោធិ៍សាត់មានកេរ្តិ៍ឈ្មោះល្បីល្បាញតាំងពីយូរលង់មកហើយ ។ អ្នកទេសចរដែលបានទៅកម្សាន្តនៅទីនោះតែងតែចាប់អារម្មណ៍ និងស្ងើចសរសើរចំពោះស្នាដៃដ៏មានក្បូរក្បាច់រចនាល្អផូរផង់ជាមរតកដូនតាយើង ។

នៅប្រទេសកម្ពុជា ថ្មកែវភាគច្រើនមាននៅភ្នំតាសែ ភ្នំយ៉ន និងភ្នំស្តង់ក្នុងស្រុកភ្នំក្រវាញ នៃទឹកដីខេត្តពោធិ៍សាត់ ។ ថ្មកែវ គឺជាប្រភេទថ្មធម្មជាតិម្យ៉ាងដែលមានពណ៌ចម្រុះភ្លឺរលោងអាចយកមកឆ្លាក់ធ្វើជារូបសំណាកផ្សេងៗដូចជាវត្ថុសិល្បៈ វត្ថុអនុស្សាវរីយ៍ វត្ថុជាទីសក្ការៈបានច្រើនបែបយ៉ាងសម្រាប់តាំងលម្អ និងគោរពបូជា ។ ថ្មកែវជាធនធានធម្មជាតិមានសារៈសំខាន់ចំពោះប្រទេសកម្ពុជាយើង ។

សិប្បកម្មថ្មកែវបានលើកស្ទួយកម្រិតជីវភាពប្រជាជនក្នុងស្រុកភ្នំក្រវាញ នៃខេត្តពោធិ៍សាត់ឱ្យកាន់តែសម្បូរធូរធារ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

សក្ការៈ អានថា ស័ក-កា-រៈ

សិប្បកម្ម អានថា សិប-ប៉ៈ-កាំ

អារម្មណ៍ អានថា អា-រ៉ម់

អនុស្សាវរីយ៍ អានថា អៈ-នុស-សា-វ៉ៈ-រី

ខ. ពន្យល់ពាក្យ

សក្ការៈ (ន.) : ការធ្វើគោរព សេចក្ដីគោរព ។

សិប្បកម្ម (ន.) : ការជាងផ្សេងៗ ។

អារម្មណ៍ (ន.) : គ្រឿងតោងរបស់ចិត្ត គំនិត ការដឹង ។

អនុស្សាវរីយ៍ (ន.) : ការដែលគួររលឹកនឹកឃើញ ។

គ. បដិសព្ទ

រលោង ≠ គគ្រើម សរសើរ ≠ បង្អាប់

ឃ. វេវចនសព្ទនឹងពាក្យ " ធន , ប្រជាជន "

ធន ធនធាន ទ្រព្យ សម្បត្តិ ទុន

ប្រជាជន ប្រជាពលរដ្ឋ ប្រជារាស្ត្រ ពលរដ្ឋ

ង. សទិសសព្ទនឹងពាក្យ " កេរ្ដិ៍ "

កេរ្ដិ៍ (ន.) : សេចក្ដីសរសើរ ការល្បីលេចឮ ខ្ទរខ្ទាយ ។

កេរ (ន.) : ទ្រព្យ ដំណែល ជាសម្បត្តិរបស់ដូនតា ឬមាតាបិតាបន្សល់ទុកឱ្យ ។

## សំណួរ

១. តើថ្មកែវមានប្រភពនៅឯណា ?

២. តើថ្មកែវមានពណ៌ដូចម្ដេច ?

៣. តើគេយកថ្មកែវមកធ្វើអ្វីខ្លះ ?

៤. តើចម្លាក់ថ្មកែវមានសារៈសំខាន់ឬទេ ? ពីព្រោះអ្វី ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " យូរ "។

២. ចូររកវេវចនសព្ទនឹងពាក្យ " គោរព "។

៣. ចូររកសទិសសព្ទនឹងពាក្យ " ធន "។

៤. ចូរគូសភ្ជាប់ពាក្យដែលជានាម គុណនាម និងកិរិយាឱ្យបានត្រឹមត្រូវ ។

| ក | ខ |
|---|---|
| នាម<br>គុណនាម<br>កិរិយា | ថ្មកែវ<br>ឆ្លាក់<br>ល្អ<br>សិប្បកម្ម |

៥. ចូរប្អូនគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលបញ្ជាក់ហេតុ ឬផល ។

☐ហេតុ ☐ផល : ប្រជាជនប្រកបរបរសិប្បកម្មចម្លាក់ថ្មកែវ ។

☐ហេតុ ☐ផល : ប្រជាជនមានជីវភាពធូរធារ ។

៦. ចូរប្អូនគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលជាគំនិតសំខាន់របស់អត្ថបទ ។

☐ ថ្មកែវជាប្រភេទថ្មធម្មជាតិម៉្យាងគ្មានតម្លៃ ។

☐ ត្បូងថ្មអាចយកមកឆ្លាក់ជារូបសំណាកផ្សេងៗ ។

☐ ចម្លាក់ថ្មកែវ ធ្វើឱ្យជីវភាពប្រជាជនសម្បូរធូរធារ ។

☐ ថ្មធម្មជាតិមានសារប្រយោជន៍ ។

## សំណេរ

ក. ចូរសរសេរតាមអានរៀបចំអត្ថបទខាងក្រោម ។

### ចម្លាក់ថ្មកែវ

ថ្មកែវជាធនធានធម្មជាតិភាគច្រើនមាននៅភ្នំតាសែ ភ្នំយ៉ន និងភ្នំស្តង់ ក្នុងស្រុកភ្នំក្រវាញនៃទឹកដីខេត្តពោធិ៍សាត់ ។ ជាពិសេសថ្មកែវ គឺជាប្រភេទថ្មធម្មជាតិម្យ៉ាងដែលមានពណ៌ចម្រុះភ្លឺរលោង អាចយកមកឆ្លាក់ធ្វើជារូបសំណាកផ្សេងៗដូចជាវត្ថុសិល្បៈ វត្ថុអនុស្សាវរីយ៍ វត្ថុជាទីសក្ការៈបានច្រើនបែបយ៉ាង ។ ចម្លាក់ទាំងនោះសម្រាប់តាំងលម្អ និងគោរពបូជា ។

### សំណួរ

១. តើថ្មកែវភាគច្រើនមាននៅឯណា ? តើថ្មកែវមានពណ៌ដូចម្តេច ?

២. តើគេយកថ្មកែវទៅឆ្លាក់ធ្វើអ្វីខ្លះ ? តើគេយកចម្លាក់ថ្មកែវទៅធ្វើអ្វី ?

### លំហាត់

១. ចូរពន្យល់ពាក្យ “ សក្ការៈ អនុស្សាវរីយ៍ ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ រលោង ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ធន ” ។

៤. ចូររកសទិសសព្ទនឹងពាក្យ “ ធន ” ។

ខ. បំពេញល្បះ

ចូរអានល្បះខាងក្រោមដោយបំពេញសញ្ញា “ ? ” និងសញ្ញា “ ។ ”

១. ថ្មកែវជាប្រភេទថ្មធម្មជាតិ ...

២. តើគេយកថ្មកែវទៅធ្វើអ្វី ...

៣. តើថ្មមានតម្លៃនៅខេត្តពោធិ៍សាត់ជាថ្មអ្វី ...

៤. ចម្លាក់ថ្មកែវសម្រាប់តាំងលម្អនិងគោរពបូជា ...

គ. ចូរតែងល្បះនឹងពាក្យ “ ថ្មកែវ , រលោង , ឆ្លាក់ ” ។

ឃ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ “ យ ” និងពាក្យ “ យូរយារ ” ។

# មេរៀនទី ៤៤ ដំណាំដំឡូងមី

**ការស្តាប់ :** ចូរស្តាប់អត្ថបទ រួចឆ្លើយនឹងសំណួរ ។



## សំណួរ

១. តើគេនិយមដាំដំឡូងមីនៅកន្លែងណាខ្លះ ?

១. ដំឡូងមីអាចយកទៅធ្វើអ្វីខ្លះ ?

២. ហេតុអ្វីបានជាកសិករនិយមដាំដំឡូងមី ?

៣. តើនៅភូមិ ឃុំរបស់ប្អូនមានដាំដំឡូងមីដែរឬទេ ? តើគេដាំដោយវិធីណា ?

## លំហាត់

ក. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលជាល្បះត្រឹមត្រូវក្នុងអត្ថបទ ។

☐ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនសុខភាពរបស់ពួកគាត់ ។

☐ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនប្រាក់ចំណូលរបស់ពួកគាត់ ។

☐ ដាំដំឡូងមីជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនប្រាក់ជីវភាពរបស់ពួកគាត់ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

**ដំណាំដំឡូងមី**

បច្ចុប្បន្ននេះ ដំឡូងមីកំពុងមានតម្រូវការខ្ពស់ ។ គេយកមើមដំឡូងមីទៅបញ្ចូលក្នុងរោងចក្រដើម្បីកែច្នៃចំណីសត្វ និងផលិតជាម្សៅមី ។ លើសពីនេះ ម្សៅដំឡូងមីមានសារៈសំខាន់ក្នុងការធ្វើជានំចំណីសម្រាប់បរិភោគមានដូចជា នំប៉័ង នំប៉ាវ មី... ។

មុខរបរដាំដំឡូងមី ជាជម្រើសថ្មីរបស់កសិករ ដើម្បីបង្កើនប្រាក់ចំណូលរបស់ពួកគាត់ ។ ដើម្បីរក្សាទុកដំឡូងមីឱ្យបានយូរ គេត្រូវការឡចំហុយសម្ងួត ។

### សំណួរ

១. ក្នុងរោងចក្រ តើគេយកមើមដំឡូងមីទៅកែច្នៃធ្វើជាអ្វីខ្លះ ?

២. តើគេអាចយកម្សៅដំឡូងមីទៅធ្វើជានំអ្វីខ្លះ ?

៣. ហេតុអ្វីបានជាកសិករជ្រើសរើសមុខរបរដាំដំឡូងមី ?

### លំហាត់

១. ចូរពន្យល់ពាក្យ " ចំណី កសិករ " ។

២. ចូររកបដិសព្ទនឹងពាក្យ " ខ្ពស់ ចំណូល " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " បរិភោគ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ការ " ។

ខ. ចូរតែងល្បះតាមរូបភាពខាងក្រោម ។



...................... ។



...................... ។



...................... ។

មេរៀនទី ៤៥

# ការពណ៌នាពីទីកន្លែង

**តែងសេចក្ដី :** ចូរអានអត្ថបទខាងក្រោម ។ តើអត្ថបទនេះពណ៌នាអំពីអ្វីខ្លះ ?




កាលពីថ្ងៃអាទិត្យមុន ខ្ញុំបានទៅទស្សនាសារមន្ទីរជាតិជាមួយឪពុកម្ដាយ ។

សារមន្ទីរជាតិមានទីតាំងស្ថិតនៅទិសខាងជើងព្រះបរមរាជវាំង នៃរាជធានីភ្នំពេញ ។ សារមន្ទីរជាតិនេះ ជាកន្លែងប្រមូលផ្ដុំដាក់តាំង បង្ហាញសម្បត្តិវប្បធម៌ និងប្រវត្តិសាស្ត្រសំខាន់ៗរបស់ប្រទេសធំជាងគេនៅកម្ពុជា ។ នៅទីនោះមានដាក់តាំង និងរក្សាទុករូបចម្លាក់ ព្រមទាំងឈុតសម្លៀកបំពាក់ របាំ ទូក គ្រែស្នែងរបស់ស្ដេច និងវត្ថុបុរាណជាច្រើនទៀត ដាក់តម្រៀបតាំងក្នុងទូដោយមានរបៀបរៀបរយ ។ ខ្ញុំឃើញមានភ្ញៀវទេសចរជាតិ និងអន្តរជាតិបានចូលទស្សនាយ៉ាងច្រើនកុះករ ។ ទីនេះមានបង្ហាញនូវមរតកវប្បធម៌ដ៏មានតម្លៃរបស់ជាតិតាំងពីបុរាណកាលមក ។

ខ្ញុំសប្បាយចិត្តណាស់ដែលបានទៅទស្សនាសារមន្ទីរជាតិ ព្រោះទីនោះសម្បូរវត្ថុបុរាណរបស់ខ្មែរយើង ព្រមទាំងធ្វើឱ្យយើងបានរៀនសូត្រអំពីប្រវត្តិសាស្ត្ររបស់ជនជាតិខ្មែរយើងក្នុងអតីតកាលផង ។

*" យើងរួមគ្នាការពារ និងអភិរក្សសម្បត្តិវប្បធម៌ជាតិខ្មែរឱ្យគង់វង្ស "*

## សំណួរ

១. តើពួកគេបានទៅទស្សនាអ្វី ? នៅពេលណា ?

២. តើសារមន្ទីរជាតិស្ថិតនៅឯណា ?

៣. តើសារមន្ទីរជាតិជាកន្លែងអ្វី ? មានអ្វីខ្លះ ?

៤. ហេតុអ្វីបានជាភ្ញៀវទេសចរចូលចិត្តមកទស្សនាសារមន្ទីរជាតិ ?

៥. តើប្អូនចង់ទៅទស្សនាទីនោះឬទេ ? ព្រោះអ្វី ?

# គម្រោង
# ពណ៌នាអំពីទីកន្លែង

១. សេចក្តីផ្តើម

- ពេលវេលា
- ទីកន្លែង
- ឈ្មោះ ។

២. តួសេចក្តី

- ទិដ្ឋភាពរួម (ជាកន្លែងប្រមូលផ្តុំ ...)
- ទិដ្ឋភាពខាងក្នុង (រៀបរាប់ពីអ្វីដែលមើលឃើញនៅទីនោះ ...)
- អ្នកទៅទស្សនា ។

៣. សេចក្តីបញ្ចប់

បង្ហាញពីចំណាប់អារម្មណ៍របស់ប្អូន និងអ្នកទៅទស្សនានៅទីនោះ ។

## លំហាត់

ចូរសរសេរតែងសេចក្តីពណ៌នាអំពីសាលារៀនតាមរយៈសំណួរខាងក្រោម ។

១. តើសាលារៀននោះឈ្មោះអ្វី ? ស្ថិតនៅឯណា ?

២. មើលពីចម្ងាយ តើសាលារៀននោះមានទិដ្ឋភាពដូចម្តេចខ្លះ ?

៣. ពេលចូលទៅជិត តើសាលារៀននោះមានទិដ្ឋភាពដូចម្តេចខ្លះ ?

៤. តើនៅខាងក្នុងសាលារៀននោះមានទិដ្ឋភាពដូចម្តេចខ្លះ ?

៥. តើប្អូនមានចំណាប់អារម្មណ៍ដូចម្តេចចំពោះសាលារៀននោះ ?

មេរៀនទី

# ៤៦ សុជីវធម៌តាមទីសាធារណៈ

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




## ចម្រៀង ៖ លំនាំបទ កន្ទុបម៉ែមួយ

| | | |
|---|---|---|
| ឱ! មិត្តអើងអើយប្រុសស្រី | ត្រូវចេះគួរសមរាក់ទាក់ | (ពីរដង) |
| មិនត្រូវដើរឱ្យពារប៉ះ | ឬក៏ជម្ពះស្ត្រីមានផ្ទៃពោះ ។ | (ពីរដង) |
| ពេលមិត្តឃើញចាស់ជរា | គ្រាំគ្រាតូចធំទាបខ្ពស់ | (ពីរដង) |
| មិនគួរមិនសមធ្វើសោះ | ប៉ះពាល់កិត្តិយសនាំឱ្យថ្នាំងថ្នាក់ ។ | (ពីរដង) |
| កុមារាកុមារី | ឃ្លាតឱ្យរួសរាយរាក់ទាក់ | (ពីរដង) |
| ទើបក្លាយជាពលរដ្ឋម្នាក់ | មានសុជីវធម៌ជាក់ក្នុងសង្គមខ្មែរ ។ | (ពីរដង) |

## ការរៀនពាក្យ

ក. អំណានពាក្យ

សុជីវធម៌ អានថា សុ-ជី-វៈ-ធ័រ

ជរា អានថា ជៈ-រា

ទ្រុឌទ្រោម អានថា ទ្រុត-ទ្រោម

ខ. ពន្យល់ពាក្យ

ទីសាធារណៈ (ន.) : កន្លែងទូទៅ កន្លែងប្រើបានទាំងអស់គ្នា ។

សុជីវធម៌ (ន.) : ការរស់នៅដោយល្អ ។

ពិការ (គុ.) : ដែលខូចអវយវៈណាមួយ ប្រើការមិនកើត ដូចជាបាក់ដៃ បាក់ជើង ... ។

គ. បដិសព្ទ

ទ្រុឌទ្រោម ≠ មាំមួន រាក់ទាក់ ≠ ព្រងើយ

ឃ. វេវចនសព្ទនឹងពាក្យ " ដើរ "

ដើរ យាត្រា យាង និមន្ត ចរ

ង. សទិសសព្ទនឹងពាក្យ " រដ្ឋ "

រដ្ឋ (ន.) : ដែន បុរី សីមា ប្រទេស ។

រត្ន ឬរតន៍ (ន.) : កែវ ត្បូង ពេជ្រ គ្រប់ប្រភេទ ។

រាត់ (កិ.) : ទាញកន្ត្រាក់ដោយបង្ខំ ។

*ឧទាហរណ៍* ទាញរាត់ផ្ដាច់ វាយរាត់ ។

## សំណួរ

១. តើកុមារត្រូវមានទម្លាប់ល្អនៅកន្លែងណាខ្លះ ?

២. ពេលប្អូនដើរជិតស្ត្រីមានផ្ទៃពោះ គួរធ្វើដូចម្ដេច ?

៣. ពេលប្អូនឃើញចាស់ជរា ឬជនពិការ តើត្រូវធ្វើដូចម្ដេច ?

៤. តើការប្រកាន់យកសុជីវធម៌ក្នុងខ្លួន នាំឱ្យប្អូនក្លាយទៅជាមនុស្សបែបណា ?

## លំហាត់

ចូរជ្រើសរើសពាក្យក្នុងប្រអប់ យកទៅបំពេញល្បះខាងក្រោមឱ្យបានត្រឹមត្រូវ ។

| គួរសម | សុជីវធម៌ | ទង្គិច |
|---|---|---|



១. ពេលយើងដើរជួបស្ត្រីមាន ផ្ទៃពោះយើងមិនត្រូវដើរ .......... គាត់ឡើយ ។

២. យើងត្រូវប្រើពាក្យ .... ចំពោះចាស់ព្រឹទ្ធាចារ្យនិងអ្នកពិការ ។

៣. កូនល្អត្រូវមាន .............. ក្នុងខ្លួនជានិច្ច ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គចម្រៀងខាងក្រោម ។

**សុជីវធម៌តាមទីសាធារណៈ**

ពេលមិត្តឃើញចាស់ជរា ក្រាំក្រាតូចធំទាបខ្ពស់ (ពីរដង)
មិនគួរមិនសមធ្វើសោះ ប៉ះពាល់កិត្តិយសនាំឱ្យថ្នាំងថ្នាក់ ។ (ពីរដង)
កុមារាកុមារី ឃ្មាតឱ្យរួសរាយរាក់ទាក់ (ពីរដង)
ទើបក្លាយជាពលរដ្ឋម្នាក់ មានសុជីវធម៌ជាក់ក្នុងសង្គមខ្មែរ ។(ពីរដង)

## សំណួរ

១. ពេលជួបចាស់ទុំ តើប្អូនត្រូវធ្វើដូចម្ដេច ?

២. តើប្អូនគួរប្រើសម្ដីបែបណា ចំពោះចាស់ជរានិងជនពិការ ។

៣. ដើម្បីក្លាយជាសិស្សល្អ មិត្តល្អ និងកូនល្អ តើប្អូនត្រូវធ្វើដូចម្ដេច ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ទីសាធារណៈ សុជីវធម៌ " ។

២. ចូររកបដិសព្ទនឹងពាក្យ " ចាស់ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " មិត្ត " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " រដ្ឋ " ។

ខ. ចូរបំពេញអត្ថបទចម្រៀងខាងក្រោម ។

| | |
|---|---|
| ពេលមិត្តឃើញ ......... | គ្រាំគ្រាទ្រុឌទ្រោមពិការ |
| មិនគួរ ............. វាចា | ប៉ះពាល់កិត្តិយសនាំឱ្យ ............ ។ |
| កុមារាកុមារី | ឃ្មាតខ្មីមាន ................ |
| ..............ជាពលរដ្ឋល្អ | និងជា ..............របស់ពុកម៉ែ ។ |

គ. ចូរតែងល្បះតាមរូបភាពខាងក្រោម ។





...................... ។ ...................... ។

ឃ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ " ឈ " និងពាក្យ " ឈោល " ។

# មេរៀនទី ៤៧ មូសិកទន្ត ឬធ្មេញកណ្ដុរ " ៉ "

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ រួចសង្កេតមើលពាក្យដែលមានពណ៌ក្រហម ។

១. យាយយ៉ាតពាក់វ៉ែនតា កំពុងខម៉ាំ ។

២. ចៅង៉ែតឈឺរ៉ាំរ៉ៃ ញ៉ាំនំប៉័ងមិនបាន ។

៣. តាម៉ុកអង្គុយផ្លុំប៉ី ក្រោមដើមចម្ប៉ា ។

៤. ក្នុងសមុទ្រខ្មែរយើងមានរ៉ែប្រេងកាតយ៉ាងច្រើន ។



*មូសិកទន្ត ឬធ្មេញកណ្ដុរ " ៉ " ប្រើសម្រាប់ដាក់លើ ព្យញ្ជនៈពួក អ៊ ង ញ ម យ រ វ ឱ្យទៅជាសូរព្យញ្ជនៈពួក អ ង៉ ញ៉ ម៉ យ៉ រ៉ វ៉ ។*

*កំណត់សម្គាល់ ៖*

- មូសិកទន្ត ឬធ្មេញកណ្ដុរ " ៉ " ប្ដូរជាបុកជើង " ុ " វិញកាលណា ព្យញ្ជនៈ ង ញ ម យ រ វ ប្រើជាមួយស្រៈ ិ ី ឹ ឺ ើ ាំ ។

*ឧទាហរណ៍* ប៊ិ ម៊ាំ ញ៊ាំ ... ។

- មូសិកទន្ត ឬធ្មេញកណ្ដុរ " ៉ " អាចប្រើជាមួយព្យញ្ជនៈ " ប " ដើម្បីឱ្យបានជា " ប៉ " ។

*ឧទាហរណ៍* ប៉ី ចម្ប៉ា ប៉ើង នំប៉័ង ... ។

## លំហាត់

ក. ចូរស្រង់ពាក្យដែលមានមូសិកទន្ត ឬធ្មេញកណ្ដុរ “ ◌៉ ” ក្នុងអត្ថបទខាងក្រោម ។

> រសៀលម៉ោងបី ខ្យល់បក់ប៉ិៗ ប៉ើងសក់មីងយ៉ាំដែលកំពុងលក់ម៉ាំល្ហុងក្នុងភូមិកោះរ៉ុង ។ អ្នកភូមិនាំគ្នាទិញរញ៉ីករញ៉ី ព្រោះគាត់ប៉ិនកំប្លែងក្រមិចក្រមើម និងច្រៀងយ៉ាងពីរោះ ។ តាង៉ែតដឹកដៃយាយវ៉ែន ដើរង៉ុកៗទៅទិញម៉ាំទុកឱ្យចៅគាត់ញ៉ាំ ។

ខ. ចូរសរសេរពាក្យក្នុងប្រអប់ខាងក្រោមឱ្យបានត្រឹមត្រូវ ។

> ងឹកងក់ ចាបី សំបែត យាបយឺន ញ័ែងញង ឆៃយាំ រមាំងរមោក

គ. ចូររកពាក្យដែលប្រើមូសិកទន្ត ឬធ្មេញកណ្ដុរ “ ◌៉ ” ឱ្យបាន ៥ ពាក្យ ។

# មេរៀនទី ៤៨ បកស្រាយភ្លើង និងផ្លាកសញ្ញាចរាចរណ៍

## ការនិយាយ

ចូរសង្កេតផ្លាកសញ្ញា រួចអានសេចក្ដីបកស្រាយខាងក្រោម ។

នេះគឺជាភ្លើងសញ្ញាចរាចរណ៍ ។



ភ្លើងសញ្ញានេះ គេដាក់ត្រង់ចំណុចផ្លូវខ្វែងគ្នាច្រើន តាមទីប្រជុំជន ពិសេសនៅរាជធានីភ្នំពេញ ។

ពេលសញ្ញានេះ មានភ្លើងពណ៌បៃតងមានន័យថា ត្រូវចេញដំណើរ ។

ពេលសញ្ញានេះ មានភ្លើងពណ៌ក្រហមមានន័យថា ត្រូវឈប់ ។ ភ្លើងសញ្ញាពណ៌លឿងបញ្ជាក់ថា ជាសញ្ញាប្រុងប្រយ័ត្ន ។

គេប្រើផ្លាកសញ្ញាទាំងនេះ ដើម្បីការពារការកកស្ទះចរាចរណ៍ ឬគ្រោះថ្នាក់ ។

ផ្លាកសញ្ញាកុមារដឹកដៃគ្នាមានន័យថានៅកន្លែង នោះជាផ្លូវមានកុមារឆ្លងកាត់ញឹកញាប់ ។ ផ្លាកសញ្ញានេះ គេដាក់នៅតាមផ្លូវជាតិធំៗត្រង់កន្លែងមានសាលារៀន ។ គេដាក់សញ្ញានេះ ដើម្បីឱ្យអ្នកបើកបរយានយន្តគ្រប់ប្រភេទមានការប្រុងប្រយ័ត្ន និងបន្ថយល្បឿន ។



## សំណួរ

១. តើភ្លើងសញ្ញាចរាចរណ៍មានប៉ុន្មានពណ៌ ? អ្វីខ្លះ ?

២. តើផ្លាកសញ្ញាកុមារដឹកដៃគ្នាខាងលើនេះមានន័យដូចម្ដេច ?

៣. តើផ្លាកសញ្ញាចរាចរណ៍ខាងក្រោមនេះមានន័យដូចម្ដេច ? ចូរបកស្រាយផ្លាកនីមួយៗឱ្យបានត្រឹមត្រូវ ។









## មេរៀនទី ៤៩

# ផ្លាកសញ្ញាសុវត្ថិភាពនានា

**អំណាន ៖** ចូរអានអត្ថបទនិងសង្កេតផ្លាកសញ្ញាខាងក្រោម រួចឆ្លើយនឹងសំណួរ ។








ផ្លាកសញ្ញាមានច្រើនដូចជាផ្លាកសញ្ញាបញ្ជា ផ្លាកសញ្ញាបម្រាម ផ្លាកសញ្ញាអាសន្ន និងផ្លាកសញ្ញាគ្រោះថ្នាក់ជាដើម ។

ផ្លាកសញ្ញាគ្រោះថ្នាក់មានច្រើនប្រភេទទៀតដូចជាសញ្ញាក្បាលខ្មោច សញ្ញាការដ្ឋានសំណង់ សញ្ញាគូសខ្វែង ។ល។ ផ្លាកសញ្ញានីមួយៗ មានន័យខុសៗគ្នា ។ នៅលើផ្ទៃដីបើមានដាក់សញ្ញាក្បាលខ្មោច មានន័យថាទីនោះមានមីន ឬគ្រាប់មិនទាន់ផ្ទុះ ។ ម្យ៉ាងទៀត បើនៅតាមផ្លូវមានដាក់សញ្ញាការដ្ឋាន បញ្ជាក់ឱ្យអ្នកដំណើរប្រុងប្រយ័ត្ន ព្រោះទីនោះមានការជួសជុលផ្លូវ ឬប្រព័ន្ធលូជាដើម ។ ផ្លាកសញ្ញាទាំងនោះ ធ្វើឱ្យយើងដឹងពីចំណុចគ្រោះថ្នាក់ផ្សេងៗ ។

ដូច្នេះដើម្បីចៀសវាងគ្រោះថ្នាក់ផ្សេងៗ យើងត្រូវស្វែងយល់ពីផ្លាកសញ្ញាទាំងនោះឱ្យបានច្បាស់លាស់ ដើម្បីរស់នៅប្រកបដោយសុខសុវត្ថិភាព ។

*“ សុវត្ថិភាពជាចម្បង ”*

## ការរៀនពាក្យ

ក. អំណានពាក្យ

ព័ត៌មាន អានថា ព័រ-ដ៏-មាន

ប្រយ័ត្ន អានថា ប្រ-យ៉ាត់

អាសន្ន អានថា អា-សន់

ការដ្ឋាន អានថា កា-រ៉ាត់-ឋាន

ខ. ពន្យល់ពាក្យ

សញ្ញា (ន.) : ការសម្គាល់ ការចំណាំ ។

សុវត្ថិភាព (ន.) : ការប្រកបដោយសេចក្ដីសុខ ។

ព័ត៌មាន (ន.) : ព្រឹត្តិការណ៍ ដំណឹងក្នុងបច្ចុប្បន្ន ។

ការដ្ឋាន (ន.) : កន្លែងធ្វើការងារ ទីធ្វើការងារ ។

ប្រព័ន្ធ (ន.) : បណ្ដាញប្រទាក់គ្នា ។

គ. បដិសព្ទ

ប្រយ័ត្ន ≠ ប្រហែស

សុវត្ថិភាព ≠ គ្រោះថ្នាក់

ឃ. វេវចនសព្ទនឹងពាក្យ "ផ្ដល់ និយាយ"

ផ្ដល់ ជូន ឱ្យ ប្រគេន ថ្វាយ

និយាយ ប្រសាសន៍ ដីកា ថា ព្រះបន្ទូល

ង. សទិសសព្ទនឹងពាក្យ "គ" ។

គ (ន.) : មនុស្សឥតសម្ដី ឈ្មោះរុក្ខជាតិម្យ៉ាង ។

*ឧទាហរណ៍* មនុស្ស គ , ដើមគ ។

គរ (កិ.) : ធ្វើឱ្យជាគំនរ ។ *ឧទាហរណ៍* គរចំបើង ។

## សំណួរ

១. តើផ្លាកសញ្ញាសុវត្ថិភាពនានាមានអ្វីខ្លះ?

២. តើផ្លាកសញ្ញាក្បាលខ្មោចមានន័យដូចម្ដេច?

៣. តើផ្លាកសញ្ញាសុវត្ថិភាពមានសារៈសំខាន់ដូចម្ដេចខ្លះ?

## លំហាត់

១. ចូរពន្យល់ពាក្យ " សុវត្ថិភាព" ។

២. ចូររកបដិសព្ទនឹងពាក្យ "មាន ចេះ" ។

៣. ចូររកវេវចនសព្ទនឹងពាក្យ "ក្បាល" ។

៤. ចូរស្រង់ពាក្យដែលមានមូសិកទន្ត ឬធ្មេញកណ្ដុរ "◌៉" ពីក្នុងអត្ថបទ ។

៥. តើអត្ថបទខាងលើនេះនិយាយពីអ្វី ? ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ដែលជាចម្លើយត្រឹមត្រូវ ។

☐ និយាយពីការប្រើប្រាស់ផ្លាកសញ្ញាចរាចរណ៍ ។

☐ និយាយពីការប្រើប្រាស់ផ្លាកសញ្ញាគ្រោះថ្នាក់ ។

☐ និយាយពីការប្រើប្រាស់សញ្ញាកាយវិការ ។

☐ និយាយពីការប្រើប្រាស់ផ្លាកសញ្ញាគូសខ្វែង ។

៦. តើផ្លាកសញ្ញាសុវត្ថិភាពខាងក្រោមនេះមានន័យដូចម្ដេច ?





## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### ផ្លាកសញ្ញាសុវត្ថិភាពនានា

ផ្លាកសញ្ញាអាចប្រើសម្រាប់ផ្ដល់ព័ត៌មានជំនួសការនិយាយ ការសរសេរ និងកាយវិការបាន ។ ទោះបីអ្នកមិនចេះអក្សរ ឬមនុស្សគក៏អាចយល់ដឹងពីសញ្ញាបានដែរ ។ ផ្លាកសញ្ញាមានច្រើនដូចជាផ្លាកសញ្ញាចរាចរណ៍ ផ្លាកសញ្ញាអាសន្ន និងផ្លាកសញ្ញាគ្រោះថ្នាក់ជាដើម ។ ផ្លាកសញ្ញាគ្រោះថ្នាក់មានច្រើនប្រភេទដូចជា ផ្លាកសញ្ញាក្បាលខ្មោច ផ្លាកសញ្ញាការដ្ឋានសំណង់ ផ្លាកសញ្ញាគូសខ្វែង ។ល។ ផ្លាកសញ្ញាគ្រោះថ្នាក់នីមួយៗ មានន័យខុសៗគ្នា ។

### សំណួរ

១. តើផ្លាកសញ្ញាអាចប្រើសម្រាប់ផ្ដល់ព័ត៌មានជំនួសអ្វីខ្លះ?

២. តើមនុស្សគអាចយល់ដឹងពីផ្លាកសញ្ញាសុវត្ថិភាពបានឬទេ?

៣. ហេតុអ្វីបានជាគេប្រើផ្លាកសញ្ញាសុវត្ថិភាព?

### លំហាត់

១. ចូរពន្យល់ពាក្យ “ សញ្ញា ព័ត៌មាន ” ។

២. ចូររកបដិសព្ទនឹងពាក្យ “ មាន សុវត្ថិភាព ” ។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ផ្ដល់ ” ។

៤. ចូររកសទិសសព្ទនឹងពាក្យ “ គ ” ។

ខ. ចូរតែងល្បះដោយប្រើនាម គុណនាម និងកិរិយាខាងក្រោមឱ្យបានត្រឹមត្រូវ ។

១. ........ចរាចរណ៍ .................................... ។

២. ........ថ្លៃ ............................................. ។

៣. ........ឈប់ .......................................... ។

គ. ចូរសរសេរអក្សរផ្គួង់ព្យញ្ជនៈ “ស” នឹងពាក្យ “សរសេរ” ។

## មេរៀនទី ៥០

# សមិទ្ធផលថ្មីៗ

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។





### មេសូត្រ ៖ បទកាកគតិ

ខ្មែររាជបុរី ស្ពានដៃថ្មីៗ ពេញផ្ទៃរដ្ឋា
ផ្លូវជាតិផ្លូវលំ កាត់ភ្នំថ្មដា ផ្ទះថ្មវីឡា
អគារស្កឹមស្កៃ ។

វិស្ពានអាកាស ភ្លើងពណ៌ដេរដាស តាមដងវិថី
ស្ពានឆ្លងទន្លេ បានសាងសង់ថ្មី វិមានស្កឹមស្កៃ
ឈ្មោះសន្តិភាព ។

អគ្គិសនី ដើរដោយវារី វាយដល់វាលរាប
សួនកសិដ្ឋាន ប្រឡាយទឹកព្រៀប តំបន់ទំនាប
ស្រូវស្រែបវរ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| សមិទ្ធផល | អានថា | សៈ មិត ធៈ ផល់ |
| អគ្គិសនី | អានថា | អ័ក -គិ -សៈ -នី |
| កសិដ្ឋាន | អានថា | កៈ- សិ- ឋាន |
| អគារ | អានថា | អៈ- គា |

ខ. ពន្យល់ពាក្យ

សមិទ្ធផល (ន.) : ផលដែលសម្រេចបាន ។

ស្ពានអាកាស (ន.) : ស្ពានដែលគេសង់ខ្ពស់រំលងលើផ្លូវដើម្បីបញ្ចៀសការកកស្ទះចរាចរណ៍ ។

អគ្គិសនី (ន.) : ភ្លើងចង្កៀង ភ្លើងគោម ភ្លើងអេឡិចត្រូនិច ។

គ. បដិសព្ទ

រាយ ≠ ផ្ដុំ សន្តិភាព ≠ សង្គ្រាម

ឃ. វេវចនសព្ទនឹងពាក្យ " វារី "

វារី គង្គា ទឹក

ង. សទិសសព្ទនឹងពាក្យ " ដា "

ដា (ន.) : បន្ទះថ្មធំរាបដូចក្ដារបែន ផ្ទាំងថ្មដា

ដារ (ន.) : ឈ្មោះបុណ្យតូចម្យ៉ាងក្នុងពុទ្ធសាសនា បុណ្យដារ ។

## សំណួរ

១. អ្នកកសាងស្នាដៃថ្មីក្នុងអត្ថបទនេះជាជនជាតិអ្វី ?

២. តើសមិទ្ធផលដែលគេបានកសាងមានអ្វីខ្លះ ?

៣. ដើម្បីរួមចំណែកថែរក្សាការពារសមិទ្ធផលខាងលើ តើប្អូនត្រូវធ្វើដូចម្ដេច ?

៤. តើប្អូនចង់ក្លាយខ្លួនជាអ្នកកសាងស្នាដៃធំៗដូចខាងលើដែរឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរសូត្រមេសូត្រឡើងវិញឱ្យបានត្រឹមត្រូវ ។

២. ចូររកបដិសព្ទនឹងពាក្យ " ពេញ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " អគ្គិសនី " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ព្រៀប " ។

៥. ចូររកពាក្យចួននឹងពាក្យខាងក្រោមក្នុងអត្ថបទ ។

វគ្គទី ១ បុរី ចួននឹងពាក្យ ..........

រដ្ឋា ចួននឹងពាក្យ ..........

៦. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ ។

☐ មេសូត្រខាងលើនិយាយអំពីសមិទ្ធផលពីបុរាណ ។

☐ មេសូត្រខាងលើនិយាយអំពីសមិទ្ធផលបច្ចុប្បន្ន ។

☐ មេសូត្រខាងលើនិយាយអំពីសមិទ្ធផលនៅពេលអនាគត ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទមេសូត្រខាងក្រោម ។

**សមិទ្ធផលថ្មីៗ**

វិស្ពានអាកាស ភ្លើងពណ៌ដេរដាស តាមដងវិថី
ស្ពានឆ្លងទន្លេ បានសាងសង់ថ្មី វិមានស៊ីមស្ដែ
ឈ្មោះសន្តិភាព ។

អគ្គិសនី ដើរដោយវារី រាយដល់វាលរាប
សួនកសិដ្ឋាន ប្រឡាយទឹកព្រៀប តំបន់ទំនាប
ស្រូវស្រែបវរ ។

## សំណួរ

១. តើគេបានកសាងផ្លូវអ្វីខ្លះ ? តើគេបានសាងសង់ស្ពានអ្វីខ្លះ ?

២. តើវិមានដែលគេសាងសង់ថ្មីឈ្មោះអ្វី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " សមិទ្ធផល ស្ពានអាកាស " ។

២. ចូររកបដិសព្ទនឹងពាក្យ " សន្តិភាព " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " វារី " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ព្រៀប " ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញវគ្គមេសូត្រខាងក្រោម ។

| រាប | តំបន់ | ទំនាប | វារី | រាយ |
|---|---|---|---|---|

| | | |
|---|---|---|
| អគ្គិសនី | ដើរដោយ ......... | រាយដល់វាល .......... |
| សួនកសិដ្ឋាន | ប្រឡាយទឹកព្រៀប | តំបន់ .......... |
| | ស្រូវស្រែបវរ ។ | |

គ. ចូរតែងល្បះចំនួន ៣ ល្បះដោយប្រើនាម គុណនាម និងកិរិយាដូចខាងក្រោម ។

១. ស្ពានអាកាស : .......................................... ។

២. ស៊ីមស្មែ : .......................................... ។

៣. សាងសង់ : .......................................... ។

ឃ. ចូរសរសេរតែងសេចក្តីពណ៌នាពីវត្តមួយដែលប្អូនធ្លាប់ស្គាល់ ។ នៅពេលសរសេរតែងសេចក្តីពណ៌នាខាងលើនេះ ចូរប្អូនសរសេរដោយផ្អែកតាមសំណួរខាងក្រោម ៖

១. តើប្អូនបានទៅវត្តនៅពេលណា ? មានឈ្មោះអ្វី ? ស្ថិតនៅឯណា ?

២. ពេលមើលពីចម្ងាយ តើប្អូនឃើញវត្តនោះមានរូបរាងដូចម្តេច ?

៣. ពេលចូលទៅដល់ក្នុងវត្ត តើមានទិដ្ឋភាពដូចម្តេចខ្លះ ?

៤. តើប្អូនមានចំណាប់អារម្មណ៍ដូចម្តេចចំពោះវត្តនោះ ?

ង. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ "ឈ" និងពាក្យ "ឈូសឈើ" ។

មេរៀនទី
៥១

# រឿងទឹកចិត្តប៉ូលិស

## អំណាន

ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



រៀងរាល់ថ្ងៃ តារា និងស្រីពេជ្រធ្វើដំណើរទៅសាលារៀនដោយថ្មើរជើង ។ ពួកគេដើរលើចញ្ចើមផ្លូវ និងប្រកាន់ស្តាំជានិច្ច ។ អ្នកទាំងពីរបានដើរឆ្លងកាត់មហាវិថីមួយទើបទៅដល់សាលារៀន ។ គេតែងដើរឆ្លងតាមគំនូសពណ៌សដែលមានភ្លើងសញ្ញាចរាចរណ៍ ។ នៅពេលមានភ្លើងសញ្ញាពណ៌ក្រហម ពួកគេបានឈប់ ។

ល្ងាចមួយពួកគេទាំងពីរបានចេញពីសាលារៀនដើរទៅផ្ទះដូចសព្វមួយដង ។ ពេលនោះមានត្រីចក្រយាន ទោចក្រយានយន្ត រថយន្ត កំពុងបើកបរតាមដងវិថី ។ ចៃដន្យរំពេចនោះភ្លើងស្តុបបានដាច់ ។ កុមារទាំងពីរមិនហ៊ានឆ្លងផ្លូវទេ ព្រោះឡានម៉ូតូបើកបរលឿនៗបន្តគ្នាច្រើនពេក ។ កុមារទាំងពីរឈរទ្រឹងយ៉ាងយូរ ដោយទឹកមុខព្រួយបារម្ភ ។

គ្រានោះ ប៉ូលិសចរាចរណ៍ក៏មកដល់បានជួយដឹកដៃកុមារទាំងពីរឆ្លងផ្លូវ ។ អ្នកទាំងពីរត្រេកអរណាស់ រួចសំពះអរគុណមន្ត្រីប៉ូលិសនោះ ។ គាត់ញញឹម ហើយនិយាយ ៖ " ក្មួយទាំងពីរធ្វើដូច្នេះត្រូវហើយ ថ្ងៃក្រោយបើមានរឿងបែបនេះទៀត ក្មួយត្រូវរកប៉ូលិស ឬមនុស្សធំឱ្យជួយទើបល្អ " ។

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| ទោចក្រយានយន្ត | អានថា | ទោ-ច័ក-ក្រៈ-យាន-យន់ |
| រថយន្ត | អានថា | រត់-យន់ |
| ចៃដន្យ | អានថា | ចៃ-ដន់ |
| បារម្ភ | អានថា | បា-រ៉ម់ |

ខ. ពន្យល់ពាក្យ

ភ្លើងសញ្ញាចរាចរណ៍ (ន.) : ជាភ្លើងសម្រាប់បញ្ជាការធ្វើដំណើរទៅមកដែលមានបីពណ៌ ដើម្បីសម្រួលការធ្វើដំណើរកុំឱ្យកកស្ទះ ឬមានគ្រោះថ្នាក់ ។ (ពណ៌បៃតង : បញ្ជាឱ្យទៅ ពណ៌ក្រហម : បញ្ជាឱ្យឈប់ ពណ៌លឿង : បញ្ជាឱ្យប្រុងប្រយ័ត្ន) ។

ថ្មើរជើង (ន.) : ការធ្វើដំណើរដោយដើរ ។

បារម្ភ (គុ.) : ដំណើរនឹកព្រួយជាមុន ។

មហាវិថី (ន.) : ផ្លូវធំៗនៅក្នុងរាជធានី ។

គ. បដិសព្ទ

ញញឹម ≠ ក្រៀមក្រំ អរគុណ ≠ រមិលគុណ ឬអគុណ

ឃ. វេវចនសព្ទនឹងពាក្យ " ទោចក្រយាន ត្រីចក្រយាន "

ទោចក្រយាន កង់

ត្រីចក្រយាន ស៊ីក្លូ

ង. សទិសសព្ទនឹងពាក្យ " គ្រា "

គ្រា (ន.) : កាល សម័យ : គ្រាកន្លង គ្រានោះ ។

គ្រាហ៍ (កិ.) : ដំណើរអង អបអង កៀកអង ។

*ឧទាហរណ៍* គ្រាហ៍មនុស្សមានរបួស ។

## សំណួរ

១. តើតារា និងស្រីពេជ្រ ធ្វើដំណើរទៅសាលារៀនដោយមធ្យោបាយអ្វី?

២. តើពួកគេដើរឆ្លងផ្លូវត្រង់កន្លែងណា?

៣. តើភ្លើងសញ្ញាចរាចរណ៍ពណ៌អ្វីដែលពួកគេត្រូវឈប់?

៤. តើប៉ូលិសចរាចរណ៍បានធ្វើអ្វីខ្លះដើម្បីជួយក្មេងទាំងពីរឆ្លងផ្លូវ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ហ៊ាន " ។

២. ចូររកវេវចនសព្ទនឹងពាក្យ " សំពះ "។

៣. ចូររកសទិសសព្ទនឹងពាក្យ " ក៏ "។

៤. ចូរស្រង់ពាក្យជា នាម ក្នុងអត្ថបទឱ្យបានចំនួន ៣ ពាក្យ ។

៥. ចូរស្រង់ពាក្យជាគុណនាម ក្នុងអត្ថបទឱ្យបានចំនួន ៣ ពាក្យ ។

៦. ចូរស្រង់ពាក្យជាកិរិយា ក្នុងអត្ថបទឱ្យបានចំនួន ៣ ពាក្យ ។

៧. តើអត្ថបទនេះ ចង់អប់រំអំពីអ្វី?ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ដើម្បីជ្រើសរើសចម្លើយមួយត្រឹមត្រូវជាងគេ?

☐ អប់រំឱ្យមានសេចក្ដីក្លាហាន ។

☐ អប់រំឱ្យចេះជួយគ្នាទៅវិញទៅមក ។

☐ អប់រំឱ្យយល់ដឹងពីភ្លើងសញ្ញាចរាចរណ៍ ។

☐ អប់រំឱ្យដើរលើចិញ្ចើមផ្លូវ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

**ទឹកចិត្តប៉ូលិស**

ល្ងាចមួយសុខុម និងធារីបានចេញពីសាលារៀនដើរទៅផ្ទះដូចរាល់ដង ។ ពេលនោះមានត្រីចក្រយាន ទោចក្រយានយន្ត និងរថយន្តជាច្រើនកំពុងរត់ស្អេកស្កះ តាមដងវិថី ។ គ្រានោះកុមារទាំងពីរមកដល់កន្លែងមានភ្លើងសញ្ញាចរាចរណ៍សម្រាប់ថ្មើរជើងឆ្លងកាត់ ភ្លើងក៏ដាច់ ។ ពួកគេមិនហ៊ានឆ្លងផ្លូវទេ ព្រោះឡាន ម៉ូតូបើកបរលឿនៗ រត់ប្រទាក់គ្នាច្រើនពេក ។ មន្ត្រីប៉ូលិសចរាចរណ៍ក៏បានដឹកដៃពួកគេឆ្លងផ្លូវដោយសុវត្ថិភាព ។

### សំណួរ

១. តើសុខុម និងធារីចេញពីសាលារៀននៅពេលណា?

២. នៅពេលមកដល់កន្លែងដែលមានភ្លើងសញ្ញាចរាចរណ៍ និងគំនូសសញ្ញាឆ្លងកាត់ តើមានហេតុការណ៍អ្វីកើតឡើង?

៣. តើនរណាជាអ្នកជួយពួកគេឆ្លងផ្លូវ?

### លំហាត់

១. ចូរពន្យល់ពាក្យ " ភ្លើងសញ្ញាចរាចរណ៍ ថ្មើរជើង " ។

២. ចូររកបដិសព្ទនឹងពាក្យ " ហ៊ាន " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ទោចក្រយាន " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " គ្រា " ។

ខ. ចូរតែងល្បះតាមរូបភាពខាងក្រោម ឱ្យបានបីល្បះ ។





........................ ។

........................ ។

........................ ។

គ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ " យ " និងពាក្យ " យានយន្ត " ។

# មេរៀនទី ៥២ ត្រីសព្ទ ឬសញ្ញាសក់ក " ៊ "

## វេយ្យាករណ៍

ចូរអានឧទាហរណ៍ រួចសង្កេតមើលពាក្យដែលមានពណ៌ក្រហម ។

១. តាសាយទៅផ្សារទិញសាប៊ូ ។

២. យាយសានទិញប៊ីក និងប៊ីចេងឯផ្សារ ។

៣. ចៅប៊ូ ចូលចិត្តស៊ីនំតៅហ៊ូនិងស៊ុតចៀន ។

៤. យប់មិញភ្លៀងធំ ហ៊ឹងយំទ្រហឹងក្នុងចម្ការកៅស៊ូក្បែរផ្ទះអ៊ំ ។

តាមរយៈឧទាហរណ៍ខាងលើនេះ យើងឃើញថាក្នុងល្បះនីមួយៗមានប្រើពាក្យ ៖ សាប៊ូ ប៊ីក ប៊ីចេង ចៅប៊ូ ស៊ី តៅហ៊ូ ស៊ុត ហ៊ឹង កៅស៊ូ អ៊ំ ដែលជាពាក្យមានប្រើសញ្ញាត្រីសព្ទ ឬសញ្ញាសក់ក (៊) ។

*ត្រីសព្ទ ឬសញ្ញាសក់ក (៊) ប្រើសម្រាប់ដាក់លើព្យញ្ជនៈពួក អ ៤តួ ៖ " ប ស ហ អ " ឱ្យទៅជាព្យញ្ជនៈពួក អ៊ ៖ " ប៊ ស៊ ហ៊ អ៊ " ។*

*កំណត់សម្គាល់ ៖*

សញ្ញាសក់ក " ៊ " ប្តូរជាបុកជើង " ុ " វិញ កាលណាព្យញ្ជនៈ ស ហ អ ប្រើជាមួយស្រៈ ិ ី ឹ ឺ ើ ាំ ំ។ *ឧទាហរណ៍* ស៊ី ហ៊ឹង ... ។

## លំហាត់

ក. ចូរស្រង់ពាក្យដែលមានប្រើត្រីសព្ទ ឬសញ្ញាសក់ក (៉)ក្នុងអត្ថបទខាងក្រោម ។

កាលពីម្សិលមិញម្ដាយខ្ញុំបានទៅផ្សារទិញសាប៊ូ ថ្នាំដុសធ្មេញ ប៊ីចេង ខ្ទឹម ម្រេច តៅហ៊ូ និងស៊ុតមួយចំនួនទៀត ។ គាត់ភ្លេចទិញប៊ិក សៀវភៅ បន្ទាត់ ជ័រលុបឱ្យខ្ញុំ ។ ខ្ញុំចូលចិត្តញ៉ាំស៊ុតចៀន និងនំប៉័ងជាងញ៉ាំតៅហ៊ូ ។

ខ. ចូរសរសេរពាក្យដែលមានសញ្ញា " ៉ " តាមរូបភាពខាងក្រោម ឱ្យបានត្រឹមត្រូវ ។







ប ......... ស ........ ទ្រ ....... ហ ........

គ. ចូរគូសវង់ជុំវិញពាក្យដែលមានប្រើត្រីសព្ទ " ៊ "ក្នុងប្រអប់ខាងក្រោម ឱ្យបានត្រឹមត្រូវ ។

| | | | | | | | | |
|---|---|---|---|---|---|---|---|---|
| ចាប៉ី | ស៊ី | នំប៉័ង | ហ៊ាន | ប៊ិន | សាប៊ូ | ញ៉ាំ | កៅស៊ូ | ទាហាន |
| រអ៊ូ | អ៊ុំ | ប៊ីចេង | ប៉ើង | អ៊ឹំ | ផ្ទិកង៉ក់ | ភាស៊ី | ទ្រអ៊ូ | គំរូ |
| អ៊ូអរ | ឧស្សាហ៍ | | ហ៊ឹង | ម៉ាំ | ហ៊ុន | ស៊ុត | អាស៊ីត | |

មេរៀនទី

# ៥៣ បុណ្យសមុទ្រ

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



ឆ្នេរអូរឈើទាលជាទីកដីដ៏ស្រស់បំព្រង និងជាថានសួគ៌ទេសចរណ៍ក្នុងខេត្តព្រះសីហនុនៃព្រះរាជាណាចក្រកម្ពុជា ។ ឆ្នេរនេះស្ថិតនៅភាគនិរតីនៃប្រទេស ជាកន្លែងដ៏ល្អប្រណីតសម្រាប់រៀបចំពិធីបុណ្យសមុទ្រលើកដំបូងនៅក្នុងប្រទេសកម្ពុជា ។

ព្រះរាជាណាចក្រកម្ពុជា មានកិត្តិយសបានចូលជាសមាជិកក្លឹបនៃប្រទេសដែលមានឆ្នេរសមុទ្រស្អាតជាងគេលើសកលលោក ។ ការប្រារព្ធបុណ្យសមុទ្រនេះធ្វើឡើងថ្ងៃទី ៣១ ខែធ្នូ ឆ្នាំ ២០១១ ដោយមានភ្ញៀវជាតិ អន្តរជាតិចូលរួមប្រមាណជិតដប់ម៉ឺននាក់ ។ បុណ្យនេះផ្តោតទៅលើអត្ថន័យសំខាន់បួនគឺ ការផ្សព្វផ្សាយតំបន់ទេសចរណ៍ លើកកម្ពស់ឧស្សាហកម្មទេសចរណ៍ អប់រំ និងថែរក្សាឆ្នេរឱ្យមានសម្រស់ស្រស់ស្អាត ។ នៅក្នុងពិធីបុណ្យនេះមានការប្រគំតន្ត្រី ការសម្តែងក្បាច់គុនបុរាណខ្មែរ ការតាំងលក់ផលិតផល និងការដុតកាំជ្រួច ។ កម្មវិធីនេះ ឆ្លងរហូតដល់ថ្ងៃទី ០១ ខែមករា ឆ្នាំ២០១២ ទើបចប់កម្មវិធី ។

ប្រជាពលរដ្ឋទូទាំងប្រទេសកម្ពុជា ដោយមានកិច្ចសហប្រតិបត្តិការជាមួយប្រទេសជាសមាជិកក្លឹបឆ្នេរសមុទ្រស្អាតទាំង ២៧ លើពិភពលោក បានប្ដេជ្ញាថែរក្សាឆ្នេរសមុទ្រឱ្យមានអនាម័យ និងមានសោភណភាពល្អប្រណីត ពោលគឺ " **ទីក្រុងស្អាត រមណីយដ្ឋានស្អាត សេវាកម្មល្អ** "។

*" រួមគ្នាសម្អាតបរិស្ថានឆ្នេរសមុទ្រយើង "*

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| ទេសចរណ៍ | អានថា | ទេ-សៈ-ច |
| សោភណភាព | អានថា | សោ-ភាន់-ណាក់-ភាព |
| សេវាកម្ម | អានថា | សេ-វ៉ា-កាំ |

ខ. ពន្យល់ពាក្យ

ទេសចរណ៍ (ន.) : ការធ្វើដំណើរកម្សាន្ត ។

សុវត្ថិភាព (ន.) : ការប្រកបដោយសេចក្ដីសុខ ។

គ. បដិសព្ទ

បុណ្យ ≠ បាប ល្អ ≠ អាក្រក់

ឃ. វេវចនសព្ទនឹងពាក្យ " ប្រទេស "

ប្រទេស នគរ បុរី

## សំណួរ

១. តើបុណ្យសមុទ្រប្រព្រឹត្តទៅនៅថ្ងៃណា ? ខែណា ? ឆ្នាំណា ?

២. តើឆ្នេរសមុទ្រអូរឈើទាលស្ថិតក្នុងខេត្តណា ?

៣. តើបុណ្យសមុទ្រផ្ដោតលើអត្ថន័យសំខាន់ៗប៉ុន្មាន ?

៤. ហេតុអ្វីបានជាគេរៀបចំបុណ្យសមុទ្រ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ថែរក្សា កុះករ "

២. ចូររកវេវចនសព្ទនឹងពាក្យ " ប្រជាពលរដ្ឋ "

៣. ចូររកសទិសសព្ទនឹងពាក្យ " កម្ម "

៤. ចូរស្រង់ពាក្យដែលមានបន្តក់ " ់ " ឱ្យបាន ១០ពាក្យក្រៅពីអត្ថបទ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### បុណ្យសមុទ្រ

ប្រទេសកម្ពុជា មានកិត្តិយសបានចូលជាសមាជិកក្លឹបនៃប្រទេសដែលមានឆ្នេរសមុទ្រស្អាតជាងគេលើសកលលោក ។ ការប្រារព្ធបុណ្យសមុទ្រនេះធ្វើឡើងនៅថ្ងៃទី៣១ ខែធ្នូ ឆ្នាំ២០១១ ដោយមានភ្ញៀវជាតិ អន្តរជាតិចូលរួមប្រមាណជិតដប់ម៉ឺននាក់ ។ បុណ្យនេះផ្តោតទៅលើអត្ថន័យសំខាន់បួនយ៉ាងគឺ ការផ្សព្វផ្សាយតំបន់ទេសចរណ៍ លើកកម្ពស់ឧស្សាហកម្មទេសចរណ៍ អប់រំ និងថែរក្សាឆ្នេរឱ្យមានសម្រស់ស្រស់ស្អាត ។ នៅក្នុងពិធីបុណ្យនេះ មានការប្រគំតន្ត្រី ការសម្តែងក្បាច់គុនបុរាណខ្មែរ ការតាំងលក់ផលិតផល និងការដុតកាំជ្រួច ។ កម្មវិធីនេះ ឆ្លងរហូតដល់ថ្ងៃទី០១ ខែមករា ឆ្នាំ២០១២ ទើបចប់កម្មវិធី ។

## សំណួរ

១. តើមានកម្មវិធីអ្វីខ្លះនៅក្នុងពិធីបុណ្យនេះ ?

២. តើមានភ្ញៀវណាខ្លះ ចូលរួមបុណ្យសមុទ្រនេះ ?

៣. ដើម្បីឱ្យឆ្នេរសមុទ្រស្អាត តើយើងត្រូវធ្វើដូចម្តេចខ្លះ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ទេសចរណ៍ " ។

២. ចូររកបដិសព្ទនឹងពាក្យ " បុណ្យ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ប្រទេស " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " កម្ម " ។

ខ. ចូរសរសេរតែងសេចក្ដីពណ៌នាអំពីជីតារបស់ប្អូន ។

នៅពេលប្អូនសរសេរ ប្អូនត្រូវអនុវត្តតាមគម្រោងតែងសេចក្ដីដូចខាងក្រោម ៖

## គម្រោង

## ពណ៌នាអំពីមនុស្ស

១. សេចក្ដីផ្ដើម

បង្ហាញពីមនុស្សនោះដោយប្រាប់ ៖ ឈ្មោះ ភេទ អាយុ ទីលំនៅសព្វថ្ងៃ ។

២. តួសេចក្ដី

- រូបរាង ៖ មាឌ (តូច ធំ ស្គម ធាត់ ...) កម្ពស់ (ទាប ខ្ពស់...) សម្បុរ (ស ខ្មៅ ស្រអែម ...) មុខមាត់(ភ្នែក ច្រមុះ មាត់ ត្រចៀក សក់ ទឹកមុខ ...) ជើង ដៃ (មាំមួន សមនឹងដងខ្លួន វែងខ្លី ...) ។
- អាកប្បកិរិយា ៖ សកម្មភាពផ្សេងៗដូចជា ការស្លៀកពាក់ ការនិយាយស្ដី ការធ្វើការងារផ្សេងៗ ។ល ។
- ចិត្តគំនិត
  - ចំណុចល្អ ៖
    - + ឧស្សាហ៍ព្យាយាម យកចិត្តទុកដាក់ធ្វើកិច្ចការផ្ទះ
    - + មានសណ្ដាប់ធ្នាប់ ផ្ចិតផ្ចង់ ...
    - + ឆ្លាតវាងវៃ ឆាប់យល់ ចេះចាំ ...
    - + ក្លាហាន ហ៊ានទទួលខុសត្រូវ ...
    - + ចិត្តទូលាយ ជួយទុក្ខធុរៈអ្នកដទៃ សាច់ញាតិជិតខាង ... ។
  - ចំណុចមិនល្អ : មនុស្សចាស់ និយាយច្រើន ឆាប់ខឹង ។

៣. សេចក្ដីបញ្ចប់

- វាយតម្លៃ : ជាមនុស្សល្អ ចេះជួយគ្នាក្នុងគ្រាក្រ មានចំណេះដឹង ... ។
- ចំណាប់អារម្មណ៍ : បង្ហាញមនោសញ្ចេតនាចំពោះជីតារបស់អ្នក ដោយគោរពស្រឡាញ់ គួរយកតម្រាប់តាម ... ។

មេរៀនទី
៥៤

# រឿងភាពស្មោះត្រង់

## ការស្ដាប់

ចូរស្ដាប់អត្ថបទរឿង " សិង្ហ និងឆ្កែតឿ " រួចឆ្លើយនឹងសំណួរខាងក្រោម ។





## សំណួរ

១. តើរឿងសិង្ហ និងឆ្កែតឿមានតួអង្គណាខ្លះ ?

២. តើគេអាចចូលមើលសួនសត្វបានដូចម្ដេច ?

៣. តើបុរសកំសត់ ធ្វើដូចម្ដេចដើម្បីចូលមើលសួនសត្វបាន ?

៤. ហេតុអ្វីបានជាសត្វសិង្ហមិនស៊ីឆ្កែតឿ ដែលឆ្មាំសួនបោះឱ្យវា ?

៥. តើសត្វសិង្ហជាសត្វដូចម្ដេច ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ “ ឈើ ថ្មី ”។

២. ចូររកវេវចនសព្ទនឹងពាក្យ “ សព ”។

៣. ចូររកសទិសសព្ទនឹងពាក្យ “ សព ”។

៤. ចូរគូសសញ្ញា “ ✓ ” នៅក្នុងប្រអប់ចម្លើយមួយដែលត្រឹមត្រូវ ។ រឿងសិង្ហ និងឆ្កែគៀ អប់រំឱ្យ ៖

- ☐ ចេះស្រឡាញ់រាប់អានគ្នា ។
- ☐ ចេះស្មោះត្រង់នឹងគ្នា ដោយមិនរើសអើង ។
- ☐ ចេះស្រឡាញ់ស្មោះត្រង់ និងយោគយល់គ្នា ។
- ☐ ចេះអធ្យាស្រ័យល្អចំពោះគ្នាទៅវិញទៅមក ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

## ភាពស្មោះត្រង់

ថ្ងៃមួយឆ្នាំសួនសត្វបានបោះសាច់ឱ្យសិង្ហស៊ី ។ វាហែកចែកឱ្យឆ្កែតឿស៊ី ។ សត្វទាំងពីររស់នៅជាមួយគ្នាយ៉ាងសុខស្រួលអស់រយៈពេលមួយឆ្នាំ ។ ក្រោយមកឆ្កែតឿមានជំងឺក៏ងាប់ទៅ ។ ពេលនោះសិង្ហស្រែករោទិ៍ ហក់លោតក្នុងទ្រុងចុះឡើងរហូតអស់កម្លាំង ហើយមិនព្រមឱ្យឆ្មាំយកខ្មោចឆ្កែចេញពីទ្រុងសោះ ។ ក្រោយមកឆ្មាំទ្វារ ក៏យកឆ្កែតឿមួយទៀតបោះចូលទ្រុង សិង្ហក៏ហក់ខាំឆ្កែថ្មីរហូតងាប់ ។ សិង្ហកើតទុក្ខមិនស៊ីចំណីរហូតដល់ថ្ងៃទីប្រាំមួយ វាក៏ងាប់បាត់ទៅ ។

## សំណួរ

១. តើនរណាបោះសាច់ឱ្យសិង្ហស៊ី ?

២. ហេតុអ្វី បានជាសិង្ហមិនស៊ីឆ្កែតឿ ហើយបែរជាស្រឡាញ់ឆ្កែតឿទៅវិញ ?

៣. ហេតុអ្វីបានជាសិង្ហស្រែករោទិ៍ ហក់លោត ?

៤. ហេតុអ្វីបានជាសិង្ហមិនព្រមស៊ីចំណី ?

## លំហាត់

១. ចូរពន្យល់ពាក្យ " រោទិ៍ ទុក្ខ " ។

២. ចូររកបដិសព្ទនឹងពាក្យ " រស់ ទុក្ខ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ឈឺ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " ទុក្ខ " ។

ខ. ចូររៀបពាក្យ ឬកន្សោមពាក្យខាងក្រោមឱ្យទៅជាល្បះត្រឹមត្រូវ ។

១. សិង្ហ ស៊ី ឆ្មាំ សាច់ ឱ្យ សួនសត្វ បានបោះ ថ្ងៃមួយ ។

២. រហូត ដល់ ងាប់ ក្រោយមក មានជំងឺ ឆ្កែតឿ ។

គ. ចូរតែងអត្ថបទខ្លីមួយតាមរូបភាពខាងក្រោម ឱ្យបាន៤ល្បះ ។





នៅមុនពេលតែង ចូរប្អូនសង្កេតរូបភាពខាងលើឱ្យបានច្បាស់លាស់ ដើម្បីត្រៀមគំនិតសរសេរ ។ នៅពេលសរសេរចប់ ចូរប្អូនផ្ទៀងផ្ទាត់សំណេររបស់ប្អូន ដោយឆ្លើយនឹងសំណួរ ។

- តើល្បះទី ១ មានបង្ហាញគំនិតទាក់ទងនឹងមនុស្សចូលទស្សនាសួនសត្វដែរឬទេ ?
- តើល្បះទី ២ មានបង្ហាញបុរសម្នាក់ ដែលពរឆ្កែចូលទៅក្នុងសួនសត្វ រួចឱ្យឆ្កែទៅឆ្មាំទ្វារហើយឬនៅ ?
- តើល្បះទី ៣ មានបង្ហាញពីសកម្មភាពឆ្មាំទ្វារបោះឆ្កែទៅក្នុងទ្រុងសិង្ហ ដើម្បីឱ្យសិង្ហស៊ីដែរឬទេ ?
- តើល្បះទី ៤ មានបង្ហាញថា សិង្ហមិនស៊ីឆ្កែដែរឬទេ ?

ឃ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ “ ឈ ” និងពាក្យ “ ឈាមរា ” ។

# មេរៀនទី ៥៥ បកស្រាយរូបភាព " ការសម្អាតបរិស្ថាន "

**ការនិយាយ :** ចូរអានអត្ថបទសន្ទនាខាងក្រោម រួចឆ្លើយនឹងសំណួរ ។




ថ្ងៃមួយ ដារ៉ា បានកាន់រូបភាពមួយសន្លឹក ដើរមកជិតសុភាព ។

សុភាព : ដារ៉ា ! តើឯងបានរូបភាពអ្វី ខ្ញុំសុំមើលផងបានទេ ?

ដារ៉ា : នេះជារូបភាពដែលទាក់ទងនឹង " **ការសម្អាតបរិស្ថាន** " នៅទីសាធារណៈ ។

សុភាព : អូ ! រូបភាពនេះល្អប្រសើរណាស់ ។

ដារ៉ា : សុភាព ! តើឯងអាចបកស្រាយរូបភាពនេះបានឬទេ ?

សុភាព : ពិតជាបាន !រូបភាពនេះ មានយុវជនចំនួនប្រាំនាក់កំពុងនាំគ្នាឱនរើសសំរាមដាក់ថង់ ។

ដារ៉ា : ត្រឹមត្រូវណាស់ !ពួកគេកំពុងសម្អាតបរិស្ថាននៅតាមដងផ្លូវមួយ ។

សុភាព  :  ល្អណាស់!រូបភាពនេះ បានផ្ដល់គំនិតសំខាន់ដល់យើងឱ្យចេះសម្អាតបរិស្ថានភូមិ-ឃុំ ឱ្យមានសោភណភាព និងផ្ដល់សុខភាពដល់ប្រជាជនយើង ។

## សំណួរ

១.  តើសុភាព និងដារ៉ា កំពុងធ្វើអ្វី ?

២.  តើរូបភាពនោះ និយាយអំពីអ្វី ?

៣.  តើការសម្អាតបរិស្ថានមានសារៈសំខាន់ដូចម្ដេចខ្លះ ?

៤.  តើអ្នកធ្លាប់បានចូលរួមសម្អាតបរិស្ថានតាមភូមិរបស់អ្នកដែរឬទេ ? ហេតុអ្វី ?

## លំហាត់

ចូរចាប់ដៃគូរួចជ្រើសរើសរូបភាពខាងក្រោម ហើយបកស្រាយតាមបែបសន្ទនាដូចលំនាំគំរូខាងលើ ។







# មេរៀនទី ៥៦ កន្លែងទេសចរណ៍ក្នុងប្រទេសកម្ពុជា

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ ៖ បទកាកគតិ

កម្ពុជារដ្ឋ សម្បូរប្រាកដ កន្លែងទេសចរណ៍
បុរាណប្រាសាទ អង្គរបវរ ព្រះខ័នសែនល្អ
ទាំងបន្ទាយក្តី ។

បាពួននាគព័ន្ធ បាគងបាយ័ន ល្អបន្ទាយស្រី
បក្សីចាំក្រុង មេបុណ្យប្រពៃ ព្រះបណ្ណាល័យ
បារាយណ៍ស្រះស្រង់ ។

ជ្រោះសែនមនោរម្យ ប៊ូស្រាអូរជុំ យក្សឡោមផ្លូវផង់
សមុទ្រឈើខ្ពស់ កោះកេរត្រចង់ ព្រះវិហារសង់
តាំងពីដូនតា ។

| | | |
|---|---|---|
| វិឆ្នេរសមុទ្រ | លាតសន្ធឹងផុត | ពីខ្សែនេត្រា |
| ជាសម្បត្តិខ្មែរ | ប្រជាខេមរា | យើងត្រូវរក្សា |
| | ឱ្យបានគង់វង្ស ។ | |

## ការរៀនពាក្យ

ក. អំណានពាក្យ

រដ្ឋ អានថា រ័ត

បវរ អានថា ប -វ៉

ខេមរា អានថា ខេ-មៈ-រ៉ា

ខ. ពន្យល់ពាក្យ

រដ្ឋ (ន.) : ដែន ប្រទេស ។

បវរ (គុ.) : ប្រសើរ ថ្លៃថ្លា ក្រៃលែង ។

ប្រជាខេមរា (ន.) : ប្រជាជនខ្មែរ ។

ព្រះខ័ន (ន.) : ដាវ ។

គ. បដិសព្ទ

ផូរផង់ ≠ សៅហ្មង សង់ ≠ កម្ទេច

ឃ. វេវចនសព្ទនឹងពាក្យ " សមុទ្រ "

សមុទ្រ សាគរ ជលសា

## សំណួរ

១. តើកន្លែងទេសចរណ៍ដែលជាប្រាសាទបុរាណមានចំនួនប៉ុន្មាន ? អ្វីខ្លះ?

២. តើកន្លែងទេសចរណ៍ធម្មជាតិមានចំនួនប៉ុន្មាន ? អ្វីខ្លះ ?

៣. តើយើងត្រូវធ្វើដូចម្ដេច ដើម្បីឱ្យសម្បត្តិទាំងនេះនៅគង់វង្ស ?

## លំហាត់

១. ចូរសូត្រមេសូត្រឡើងវិញឱ្យបានត្រឹមត្រូវ ។

២. ចូររកពាក្យបដិសព្ទនឹងពាក្យ " ល្អ បុណ្យ " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " នេត្រា " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " វង្ស " ។

៥. ចូររកពាក្យចួននឹងពាក្យខាងក្រោមពីក្នុងអត្ថបទ ។

- ទេសចរណ៍ : ចួននឹងពាក្យ ...............................
- ដូនតា : ចួននឹងពាក្យ ...............................

៦. តើមេសូត្រនេះនិយាយពីអ្វី ? គូសសញ្ញា " ✓ " ក្នុងប្រអប់នូវចម្លើយមួយត្រឹមត្រូវជាងគេ?

☐ ប្រាសាទបុរាណ ☐ កន្លែងទេសចរណ៍

☐ ទឹកជ្រោះ ☐ ឆ្នេរសមុទ្រ

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គមេសូត្រខាងក្រោម ។

### កន្លែងទេសចរណ៍

ជ្រោះសែនមនោរម្យ ប៊ូស្រាអូរជុំ យក្សឡោមផូរផង់
សមុទ្រឈើខ្ពស់ កោះកេរត្រចង់ ព្រះវិហារសង់
តាំងពីដូនតា ។

វិឆ្នេរសមុទ្រ លាតសន្ធឹងផុត ពីខ្សែនេត្រា
ជាសម្បត្តិខ្មែរ ប្រជាខេមរា យើងត្រូវរក្សា
ឱ្យបានគង់វង្ស ។

## សំណួរ

១. តើប្រាសាទព្រះវិហារសង់តាំងពីពេលណាមក?

២. តើឆ្នេរសមុទ្រលាតសន្ធឹងដូចម្តេច?

៣. ហេតុអ្វីបានជាយើងត្រូវរក្សាសម្បត្តិខ្មែរ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ខេមរា " ។

២. ចូររកបដិសព្ទនឹងពាក្យ " ផ្ទូរផង់" ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " សមុទ្រ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " វង្ស " ។

ខ. ចូរជ្រើសរើសពាក្យក្នុងប្រអប់ទៅបំពេញមេសូត្រខាងក្រោមឱ្យបានត្រឹមត្រូវ ។

| | | | |
|---|---|---|---|
| ប្រពៃ | បវរ | នាគព័ន្ធ | ប្រាកដ |

| | | |
|---|---|---|
| កម្ពុជារដ្ឋ | សម្បូរ ....... | កន្លែងទេសចរណ៍ |
| បុរាណប្រាសាទ | អង្គរ ......... | ព្រះខ័នសែនល្អ |
| | ទាំងបន្ទាយក្ដី ។ | |
| បាពួន .......... | បាគងបាយ័ន | ល្អបន្ទាយស្រី |
| បក្សីចាំក្រុង | មេបុណ្យ ....... | ព្រះបណ្ណាល័យ |
| | បារាយណ៍ស្រះស្រង់ ។ | |

គ. ចូរតែងសេចក្តីពណ៌នាពីរូបភាពគេហដ្ឋានមួយ តាមរយៈសំណួរខាងក្រោម ។



១. តើអ្នកបានទៅគេហដ្ឋាននោះនៅពេលណា ? តើជាប្រភេទផ្ទះអ្វី ?

២. តើគេហដ្ឋាននោះស្ថិតនៅឯណា ?

៣. មើលពីចម្ងាយ តើគេហដ្ឋាននោះមានទិដ្ឋភាពដូចម្តេចខ្លះ ?

៤. ពេលចូលទៅជិត តើគេហដ្ឋាន នោះមានទិដ្ឋភាពដូចម្តេចខ្លះ ?

៥. តើនៅខាងក្នុងគេហដ្ឋាននោះ មានទិដ្ឋភាពដូចម្តេចខ្លះ ?

៦. តើអ្នកមានចំណាប់អារម្មណ៍ដូចម្តេចចំពោះគេហដ្ឋាននោះ ?

ឃ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ " ឈ " និងពាក្យ " ដើមឈើ " ។

មេរៀនទី
៥៧

# បន្តក់ " ◌់ "

## វេយ្យាករណ៍

ចូរអានអត្ថបទ រួចសង្កេតមើលពាក្យដែលមានពណ៌ក្រហម ។

សន្ធឹកខ្យល់លាន់ឮគគ្រឹកពីចម្ងាយ ពពកប្រែជាខ្មៅខ្មួលខ្មាញ់ទម្លាក់កន្ទុយនាគហោះសំដៅមកលើភូមិអ្នកស្រុក ។ ខ្យល់ព្យុះលាន់កក្រើក ដើមឈើតូចធំ យោលយោកទន់ចុងសំយុងចុះស្មើរដល់ដី ។ ដើមឈើខ្លះទៀត រយះមែកបាក់ធ្លាក់ដល់ដី ដួលរលំរណ្ដូករណែលបន្តបន្ទាប់គ្នា ។ មនុស្សម្នាទាំងឡាយអង្គុយក្រសោបឱបគ្នាភ័យរន្ធត់ស្លន់ស្លោញ័រទទ្រើក ។

*បន្តក់ (◌់)ជាសញ្ញាសម្រាប់កាត់សព្ទវែង ឱ្យទៅជាខ្លី ។*
*សញ្ញានេះ ប្រើដាក់លើព្យញ្ជនៈប្រកប ក ង ច ញ ត ន ប ល ស ។*

### លំហាត់

ក. ចូរស្រង់ពាក្យដែលមានបន្តក់ " ◌់ " ពីក្នុងអត្ថបទខាងក្រោម ឱ្យបានត្រឹមត្រូវ ។

រដូវប្រាំងឈានផុតទៅ រដូវវស្សាក៏ចូលមកដល់ ។ មេឃធ្លាប់ស្រឡះ ផ្លាស់ជាមានពពកក្រាស់គ្របដណ្ដប់វេហាងងឹតឈ្លប់ ។ ផ្លេកបន្ទោរគូសវាសផ្ទៃមេឃភ្លឺឆ្វាចៗ ។ ស្នូរផ្គរលាន់ និងស្នូររន្ទះបាញ់ឮខ្ទ័រកក្រើកប្រឹថពី ។ ខ្យល់បក់បោក អស់ទំហឹងពីទិសនិរតី ។ ភ្លៀងស្រក់គ្រាប់ធំៗ ធ្លាក់ដូចគេហែកមេឃ ។ ទឹកកករល្អក់ហូរវ៉ឹៗ នាំយកសំណាត់រសាត់លឿនស្លេវ ។ វាលទឹកលាតសន្ធឹងល្ហាចល្ហឹមលិចអស់ព្រឹក្សាសល់តែចុងលឹមៗ ។

ខ. ចូររកពាក្យដែលប្រើបន្តក់ " ◌់ "ឱ្យបាន ១០ពាក្យក្រៅពីអត្ថបទ ។

មេរៀនទី

៥៨

# ធនធានធម្មជាតិ

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ ៖ បទកាកគតិ

មាតុភូមិកម្ពុជា ធនធាននានា គ្រប់ទីកន្លែង
សមុទ្រព្រៃភ្នំ ទន្លេធំវែង គួរឱ្យស្ញប់ស្ញែង
គ្រប់ប្រជាជាតិ ។

តំបន់ព្រៃភ្នំ រ៉ែឈើតូចធំ ជំរំសត្វទៀត
ម្រឹគីម្រឹគា បក្សាព្រោងព្រាត រស់តាមក្រុមញាតិ
អឹងកងពេញព្រៃ ។

តំបន់ខ្ពង់រាប ស្ទឹងបឹងទំនាប ដំណាំច្រើនក្រៃ
ស្រែស្រូវចម្ការ ផលាប្រពៃ ដោយសារអ្នកថ្លៃ
ជាតិបានថ្កើងថ្កាន ។

## ការរៀនពាក្យ

ក. អំណានពាក្យ

មាតុភូមិ អានថា មា-តុ-ភូមិ

សមុទ្រ អានថា សៈ-ម៉ុត

ផលា អានថា ផៈ -ឡា

ខ. ពន្យល់ពាក្យ

មាតុភូមិ (ន.) : ភូមិកំណើត ស្រុកកំណើត ។

ម្រឹគីម្រឹគា (ន.) : ពួកសត្វចតុប្បាទញីឈ្មោលដែលរស់នៅក្នុងព្រៃ ។

ប្រពៃ (គុ.) : ល្អប្រពៃ ល្អហ្មត់ហ្មង ។

គ. បដិសព្ទ

ទំនាប ≠ ទួល

ថ្កើងថ្កាន ≠ ដុនដាប

ឃ. វេវចនសព្ទនឹងពាក្យ “ ទី ”

ទី កន្លែង តំបន់ ស្ថាន

ង. សទិសសព្ទនឹងពាក្យ “គួរ”

គួរ (គុ.) : សម គប្បី ឥតទាស់ ។

ក្ងួរ (ន.) : ចង្កោម ផ្លែ សំណុំផ្លែ ។

## សំណួរ

១. តើប្រទេសកម្ពុជាសម្បូរធនធានធម្មជាតិនៅកន្លែងណាខ្លះ ?

២. តើតំបន់ព្រៃភ្នំ មានធនធានធម្មជាតិអ្វីខ្លះ ?

៣. តើតំបន់ខ្ពង់រាប និងវាលទំនាបមានធនធានធម្មជាតិអ្វីខ្លះ ?

៤. តើប្អូនត្រូវថែរក្សាការពារធនធានធម្មជាតិដូចម្តេច ?

## លំហាត់

១. ចូរប្អូនសូត្រមេសូត្រនេះឡើងវិញ ។

២. ចូររកបដិសព្ទនឹងពាក្យ " វែង រាប "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ប្រពៃ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " រាប "

៥. ចូររកពាក្យចួនក្នុងអត្ថបទមេសូត្រ " ធនធានធម្មជាតិ "។

៦. ចូរគូសសញ្ញា " ✓ " ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវដែលទាក់ទងនឹងធនធានធម្មជាតិ ។

☐ ដំណាំកសិកម្មភូមិយើងមាន ចេក ល្ហុង ស្វាយ ស្រូវ ជាច្រើន ។

☐ សងខាងផ្លូវពីកែវសីមា ទៅទីរួមខេត្តមណ្ឌលគិរី មានឈើតូចធំ សត្វព្រៃ ជ្រោះជ្រលងដងអូរ ភ្នំស្រស់បំព្រង ។

☐ សាលាបឋមសិក្សាយើងមានអគារ ទីធ្លា ដើមឈើ សួនច្បារល្អស្អាត ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គមេសូត្រខាងក្រោម ។

តំបន់ព្រៃភ្នំ ពីឈើតូចធំ ជំរំសត្វទៀត
ម្រឹគីម្រឹគា បក្សាព្រោងព្រាត រស់តាមក្រុមញាតិ
អឹងកងពេញព្រៃ ។

តំបន់ខ្ពង់រាប ស្ទឹងបឹងទំនាប ដំណាំច្រើនក្រៃ
ស្រែស្រូវចម្ការ ផលាប្រពៃ ដោយសារអ្នកថ្លៃ
ជាតិបានថ្កើងថ្កាន ។

## សំណួរ

១. តើតំបន់ព្រៃភ្នំ មានធនធានអ្វីខ្លះ ?

២. តើតំបន់ខ្ពង់រាប មានធនធានអ្វីខ្លះ ?

៣. តើធនធានធម្មជាតិស្រុកយើង ផ្ដល់ផលប្រយោជន៍អ្វីខ្លះ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ម្រឹគីម្រឹគា " ។

២. ចូររកបដិសព្ទនឹងពាក្យ " ថ្កើងថ្កាន ទំនាប " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ប្រពៃ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " រាប " ។

ខ. ចូរតែងល្បះទាក់ទងនឹងរូបភាពខាងក្រោមឱ្យបានពីរល្បះ ។



គ. ចូរសរសេរតែងសេចក្ដីពណ៌នាអំពីសាលារៀនអ្នក ។

## គម្រោង

១. សេចក្ដីផ្ដើម

ឈ្មោះ ទីតាំង ។

២. តួសេចក្ដី

- មើលពីចម្ងាយ
- ចូលជិត (ខ្លោងទ្វារ របង អគារ ធ្វើពីអ្វី ?)
- ទីធ្លាទូលាយ (មានអ្វីខ្លះ ?) សួនច្បារ(ក្នុងទីធ្លា និងមុខថ្នាក់) ដងទង់ជាតិ
- ផ្លូវក្នុងសាលារៀន (ក្រាលថ្ម ឬក្រួស)
- ថ្នាក់រៀន ដូចម្ដេច?

៣. សេចក្ដីបញ្ចប់

ចំណាប់អារម្មណ៍របស់ប្អូនចំពោះសាលារៀន ។ តើប្អូនស្រឡាញ់សាលារៀន ឬទេ ? ព្រោះអ្វី ?

ឃ. ចូរសរសេរអក្សរផ្ដង់ព្យញ្ជនៈ “ ឃ ” និងពាក្យ “ ឃោរឃៅ ” ។

មេរៀនទី
៥៩

# បំណងខ្ញុំ

**អំណាន ៖** ចូរសូត្រមេសូត្រខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## មេសូត្រ ៖ បទពាក្យប្រាំពីរ

ខ្ញុំនឹកមមៃចង់បានផ្ទះ មួយតូចស្រឡះក្បែរជើងភ្នំ
សង់ប្របមាត់ស្ទឹងមានឈើធំ បែកមែកត្រសុំម្លប់សាខា ។
នៅជុំជិតផ្ទះខ្ញុំនឹងដាំ អស់ទាំងដំណាំធ្វើសួនច្បារ
ខ្ញុំព្រោះបណ្ដុះឈើផ្លែផ្កា ទុកធ្វើអាហាររៀងរាល់ថ្ងៃ ។
រួចខ្ញុំចិញ្ចឹមឆ្កែសេះគោ មាន់ទាមាន់ទោរយកកម្រៃ
ថែទាំឱ្យធាត់លក់យកថ្លៃ បន្តកែខៃរៀងរាល់ឆ្នាំ ។

## ការរៀនពាក្យ

ក. អំណានពាក្យ

កម្រៃ អានថា កំ-រ៉ៃ

បណ្តុះ អានថា បន់-ដុះ

ខ. ពន្យល់ពាក្យ

មមៃ (កិ.) : ភ្នកនឹករឿយៗមិនភ្លេច នឹកមមៃ គិតមមៃ ។

ប្រប (ន.) : ជិត ក្បែរ ទៀប ។

*ឧទាហរណ៍* ប្របផ្លូវ ក្បែរផ្លូវ ក្បែរខ្លួន ។

ត្រសុំ (គុ.) : ដែលមានបរិមណ្ឌលល្អមូលជុំគ្នា ។

*ឧទាហរណ៍* មែកឈើត្រសុំ ម្លប់ត្រសុំត្រសាយ ។

កម្រៃ (គុ.) : ដែលចំណេញ ថវិកាចំណេញ ។

គ. បដិសព្ទ

ថ្លៃ ≠ ថោក

ធាត់ ≠ ស្គម

ឃ. សទិសសព្ទនឹងពាក្យ " រៀង "

រៀង (កិ.) : ដាក់តាមលំដាប់ ធ្វើឱ្យត្រូវលំដាប់ ។

*ឧទាហរណ៍* រៀងរាប រៀងដរាប ។

រាង (កិ.) : លែងចង់ លែងត្រូវការទៀត ។

*ឧទាហរណ៍* ខ្ញុំរាងហើយ ។

រាង (ន.) : សណ្ឋាន ទ្រង់ទ្រាយ ។

*ឧទាហរណ៍* រាងស្ដើង ។

## សំណួរ

១. តើនៅក្នុងមេសូត្រខាងលើនេះ គេនឹកមមៃចង់បានអ្វី ?

២. ចំពោះអ្នកវិញ តើអ្នកចង់បានដូចគេដែរឬទេ ? ព្រោះអ្វី ?

៣. តើអ្នកចង់ធ្វើសួនដាំដំណាំ និងចិញ្ចឹមសត្វដែរឬទេ ? ព្រោះអ្វី ?

## លំហាត់

១. ចូរអានពាក្យ និងកន្សោមពាក្យខាងក្រោមឱ្យបានត្រឹមត្រូវ ។

ប្រប បណ្តុះ ត្រសុំ ប្របមាត់ស្ទឹង

២. ចូររកបដិសព្ទនឹងពាក្យ " ជិត ផាត់ "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " អាហារ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " ទុក "។

៥. ចូររកពាក្យចួន " ផ្ទះ ភ្នំ " ក្នុងវគ្គទី ១ ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គមេសូត្រខាងក្រោម ។

ខ្ញុំនឹកមមៃចង់បានផ្ទះ មួយតូចស្រឡះក្បែរជើងភ្នំ
សង់ប្របមាត់ស្ទឹងមានឈើធំ បែកមែកត្រសុំម្លប់សាខា ។
នៅជុំជិតផ្ទះខ្ញុំនឹងដាំ អស់ទាំងដំណាំធ្វើសួនច្បារ
ខ្ញុំព្រោះបណ្ដុះឈើផ្លែផ្កា ទុកធ្វើអាហាររៀងរាល់ថ្ងៃ ។

### សំណួរ

១. ហេតុអ្វីគេចង់បានផ្ទះនៅក្បែរជើងភ្នំ ហើយជិតមាត់ស្ទឹង ?

២. តើអ្នកចូលចិត្តដាំដំណាំនៅជុំវិញផ្ទះឬទេ ? ព្រោះអ្វី ?

### លំហាត់

ខ. ចូរជ្រើសពាក្យក្នុងប្រអប់ ទៅបំពេញចន្លោះវគ្គមេសូត្រខាងក្រោម ។

ព្រោះ មែកត្រសុំ អាហារ ស្រឡះ ប្របមាត់ ដំណាំ

ខ្ញុំនឹកមមៃចង់បានផ្ទះ មួយតូច .........ក្បែរជើងភ្នំ
សង់ .......ស្ទឹងមានឈើធំ បែក ...........ម្លប់សាខា ។
នៅជុំជិតផ្ទះខ្ញុំនឹងដាំ អស់ទាំង .........ធ្វើសួនច្បារ
ខ្ញុំ .......បណ្ដុះឈើផ្លែផ្កា ទុកធ្វើ ............រៀងរាល់ថ្ងៃ ។

គ. ចូរតែងល្បះនឹងពាក្យ “ ដាំ ចិញ្ចឹម ” ឱ្យបានពីរល្បះ ។

១. ជីតាខ្ញុំ ................ដាំ ......................... ។

២. សុភាព ...............ចិញ្ចឹម .................... ។

## មេរៀនទី ៦០

# រឿងភូមិ ឃុំមានសុវត្ថិភាព

## ការស្ដាប់ : ចូរស្ដាប់អត្ថបទរឿង រួចឆ្លើយនឹងសំណួរ ។




## សំណួរ

១. តើគេបិទប្រកាសនៅឯណា ?

២. តើប្រុញ និងស៊ីថា នាំគ្នាមើលអ្វីនៅមុខសាលាឃុំ ?

៣. តើភូមិ ឃុំមានសុវត្ថិភាព ដែលមានប្រាំបួនប្រការគឺអ្វីខ្លះ ? ចូររៀបរាប់ ?

៤. បើភូមិ ឃុំមានសុវត្ថិភាព តើការរស់នៅរបស់ប្រជាពលរដ្ឋយ៉ាងណាដែរ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " សុវត្ថិភាព " ។

២. ចូររកបដិសព្ទនឹងពាក្យ " គ្មាន សុខសាន្ត " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " កុះករ " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " មាន " ។

៥. ចូរគូសសញ្ញា “ ✓ ” ក្នុងប្រអប់ចម្លើយមួយត្រឹមត្រូវ ។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍភូមិ ឃុំឱ្យមានការរីកចម្រើន ។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍស្ពាន ផ្លូវឱ្យមានការរីកចម្រើន ។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍភូមិ ឃុំឱ្យមានសុវត្ថិភាព ។

☐ ប្រជាជនក្នុងភូមិរួមគ្នាជាមួយមេឃុំដើម្បីអភិវឌ្ឍសាលារៀនឱ្យមានការរីកចម្រើន ។

## សំណេរ

ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### សុវត្ថិភាពភូមិខ្ញុំ

ភូមិខ្ញុំស្ថិតនៅទីប្រជុំជនមួយ មានប្រជាជនរស់នៅកុះករ ។ ទីនោះពួកគេរស់បានសុខក្សេមក្សាន្ត ដោយសារមានអ្នកដឹកនាំសហគមន៍ល្អ ។ អាជ្ញាធរដែនដី និងប្រជាជនចេះជួយគ្នា រួមសាមគ្គីគ្នាបានល្អ ។ ពិសេស រួមគ្នាលុបបំបាត់អំពើចោរកម្ម ឆក់ប្លន់ ល្បែងស៊ីសងគ្រប់ប្រភេទ ការប្រើអាវុធខុសច្បាប់ ការផលិតចែកចាយ ប្រើប្រាស់គ្រឿងញៀន ក្មេងទំនើង ការជួញដូរស្ត្រី និងកុមារ និងអំពើហិង្សាក្នុងគ្រួសារ ។

ប្រជាជនក្នុងភូមិតែងតែយកថង់កាកសំណល់ទៅដាក់ក្នុងធុងសំរាម ដើម្បីទប់ស្កាត់ក្លិន និងផ្សែងដែលមានជាតិពុល ។

## សំណួរ

១. តើភូមិខ្ញុំស្ថិតនៅឯណា ?

២. តើប្រជាជនភូមិខ្ញុំ រស់នៅបានសុខក្សេមក្សាន្ត ដោយសារនរណា ?

៣. តើប្រជាជនទាំងអស់ត្រូវរួមគ្នាបំបាត់អំពើមិនល្អអ្វីខ្លះនៅក្នុងភូមិ ?

៤. តើអ្នកត្រូវធ្វើអ្វីខ្លះ ក្នុងការរួមចំណែកអភិវឌ្ឍភូមិ ឃុំឱ្យមានសុវត្ថិភាព ?

មេរៀនទី ៦១

# ឧបករណ៍តន្ត្រីខ្មែរ

**អំណាន :** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




តូរ្យតន្ត្រីខ្មែរ ជាសិល្បៈបុរាណ ដែលកើតមានឡើងអស់កាលដ៏យូរលង់មកហើយ ។ បុព្វបុរសខ្មែរបានបង្កើតឧបករណ៍ភ្លេង និងនិពន្ធបទភ្លេងជាច្រើន ។

គ្រឿងភ្លេងបុរាណខ្មែររួមមាន ទ្រ ស្គរ តាខេ ឃឹម រនាត គង ស្រឡៃ ចាប៉ី សាដៀវ ឈិង ឆាប ក្រាប ។ល។ ឧបករណ៍ទាំងនេះងាយស្រួលធ្វើ ពុំលំបាកដូចគ្រឿងភ្លេងបរទេសទំនើបឡើយ ហើយក៏មិនចំណាយថវិកាច្រើនសម្រាប់ផលិតដែរ ។ ឧបករណ៍តន្ត្រីខ្មែរត្រូវបានប្រគំឡើងតាមរយៈការដេញ ដំ ផ្លុំ កូត ហើយការប្រគំបទភ្លេងស្របតាមពិធីបុណ្យប្រពៃណីផ្សេងៗ ។ រីឯបទភ្លេងបុរាណខ្មែរ អ្នកនិពន្ធរៀបចំតាមលំនាំធម្មជាតិដែលមានសំនៀងពីរោះលន្លង់លន្លោច ទន់ភ្លន់ ។ ឧបករណ៍ និងបទភ្លេងខ្មែរបុរាណគេយកទៅប្រើប្រាស់ក្នុងពិធីបុណ្យផ្សេងៗទៅតាមវង់ប្រគំ ដូចជាពិណពាទ្យ មហោរី ប្រពៃណី ឆៃយ៉ាំ យីកេ ល្ខោនជាដើម ។

យើងជាកូនខ្មែរត្រូវចេះស្រឡាញ់ និងថែរក្សាតូរ្យតន្ត្រីខ្មែរឱ្យបានគង់វង្ស នូវស្នាដៃខ្មែរជំនាន់ដើមដ៏ល្អវិសេសវិសាលសម្រាប់តម្កល់ទុកជាអត្តសញ្ញាណជាតិខ្មែរ ។

*"វប្បធម៌ពណ្ណរាយ ជាតិថ្កើងថ្កាន"*

## ការរៀនពាក្យ

ក. អំណានពាក្យ

| | | |
|---|---|---|
| ឧបកណ៍ | អានថា | អ៊ុ-ប៉ះ-ក |
| ធម្មជាតិ | អានថា | ធ័ម-មះ-ជាតិ |
| អត្តសញ្ញាណជាតិ | អានថា | អ័ត-តះ-ស័ញ-ញ៉ាណ-ជាត |

ខ. ពន្យល់ពាក្យ

តូរ្យតន្ត្រី (ន.) : គ្រឿងភ្លេង ដេញ ដំ ផ្លុំ កូត ។

ឧបករណ៍ (ន.) : គ្រឿងទប់ទល់ គ្រឿងប្រុង គ្រឿងប្រកបផ្សំគ្នា ។

ធម្មជាតិ (ន.) : សភាវៈកើតឡើងឯងៗ ។

អត្តសញ្ញាណជាតិ (ន.) : គ្រឿងសម្គាល់ជាតិមួយ សញ្ញាសម្គាល់ជាតិមួយ ។

គ. បដិសព្ទ

រីក ≠ រួម ថែរក្សា ≠ បំផ្លាញ

ឃ. វេវចនសព្ទនឹងពាក្យ " ឧបករណ៍ "

ឧបករណ៍ គ្រឿង ប្រដាប់

ង. សទិសសព្ទនឹងពាក្យ " បទ " ។

បទ (ន.) : ឧបាយ រឿងហេតុ ទី ការរក្សា ចំណែក ជើង ស្នាម ផ្លូវ ទំនង ដំណើរទំនង ដើមទង ។ *ឧទាហរណ៍* បទចម្រៀង ... ។

បត់ (កិ.) : ត្រឡប់តាមទំនង តាមផ្លូវដែលមកវិញ ត្រឡប់ប្រសព្វមុខ ។ *ឧទាហរណ៍* បត់ក្រដាស ។

## សំណួរ

១. តើនរណាជាអ្នកបង្កើតឱ្យមានតូរ្យតន្ត្រីខ្មែរ?

២. តើឧបករណ៍តូរ្យតន្ត្រីខ្មែរ មានអ្វីខ្លះ?

៣. តើឧបករណ៍ និងបទភ្លេងខ្មែរបុរាណគេយកទៅប្រើប្រាស់ក្នុងពិធីអ្វីខ្លះ?

៤. តើអ្នកត្រូវធ្វើដូចម្ដេច ដើម្បីឱ្យតូរ្យតន្ត្រីខ្មែរបានគង់វង្ស?

## លំហាត់

១. ចូរស្រង់បដិសព្ទពីក្នុងអត្ថបទនឹងពាក្យ “ ងាយ ” ។

២. ចូរស្រង់វេវចនសព្ទពីក្នុងអត្ថបទនឹងពាក្យ “ ផលិត ” ។

៣. ចូរស្រង់សទិសសព្ទពីក្នុងអត្ថបទនឹងពាក្យ “ វង់ ” ។

៤. ចូរផ្គូផ្គងពាក្យនាម គុណនាម និងកិរិយា ខាងក្រោម ។

| | | | |
|---|---|---|---|
| ស្គរ | ដេញ | ខ្មែរ | ពីរោះ |
| ទ្រ | ដំ | សំនៀង | យូរលង់ |
| តាខេ | ផ្លុំ | កាល | បុរាណ |
| ប៉ី | កូត | | |

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### បទភ្លេងខ្មែរ

តូរ្យតន្ត្រីខ្មែរ ជាសិល្បៈដែលបុព្វបុរសបានបង្កើតឧបករណ៍ជាច្រើន ។ បទភ្លេងខ្មែរមានដូចជា បទបាយខុនចងដៃ និងបទមហោរី ។ បទភ្លេងខ្មែរភាគច្រើននិពន្ធឡើងតាមលំនាំធម្មជាតិ ហើយមានសំនៀងពីរោះលន្លង់លន្លោច មានភាពទន់ភ្លន់ ។ វាទាក់ទងទៅនឹងប្រវត្តិសាស្ត្រ និងសង្គមសាស្ត្រ ។ ពេលខ្លះអ្នកស្ដាប់ចាប់អារម្មណ៍មានការគិតពិចារណាវែងឆ្ងាយ ពីរោះជាប់ចិត្ត ជិតជាប់ក្នុងខួរក្បាល មិនងាយនឹងបំភ្លេចបាន ។ មិនតែប៉ុណ្ណោះធ្វើឱ្យអ្នកស្ដាប់ស្រមៃនឹកឃើញដល់អតីតកាលដ៏រុងរឿងនាសម័យមហានគរ ។

## សំណួរ

១. តើបទភ្លេងខ្មែរនិពន្ធឡើងតាមរយៈអ្វី ?

២. តើបទភ្លេងខ្មែរ ទាក់ទងនឹងអ្វី ?

៣. តើអ្នកស្ដាប់មានអារម្មណ៍ដូចម្ដេចក្រោយពីស្ដាប់បទភ្លេងខ្មែរ ?

## លំហាត់

១. ចូរពន្យល់ពាក្យ " ធម្មជាតិ "។

២. ចូររកបដិសព្ទនឹងពាក្យ " រុងរឿង "។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ឧបករណ៍ "។

៤. ចូររកសទិសសព្ទនឹងពាក្យ " បទ "។

ខ. ចូរបំពេញល្បះខាងក្រោមដោយប្រើសញ្ញា " ? " និង " ។ "

១. គេពុំដឹងប្រាកដថា អ្នកណាបង្កើតឧបករណ៍ភ្លេងឡើយ ...

២. តើបទភ្លេងខ្មែរប្រគំឡើងក្នុងពិធីបុណ្យអ្វីខ្លះ ...

៣. ហេតុអ្វីបានជាបទភ្លេងខ្មែរ ធ្វើឱ្យអ្នកស្ដាប់ពីរោះជាប់ចិត្ត ...

៤. បទភ្លេងខ្មែរ មានទាំងអស់ជាងប្រាំមួយរយបទ ...

គ. ចូរតែងល្បះដោយប្រើពាក្យនាម គុណនាម និងកិរិយា ។

១. ភ្លេង ............................................................ ។

២. រុងរឿង ........................................................ ។

៣. ភ្លេច ............................................................ ។

ឃ. ចូរសរសេរអក្សរផ្គង់ព្យញ្ជនៈ " ឃ " និងពាក្យ " ឃឹម "។

មេរៀនទី
៦២

# ខ្ញុំស្រឡាញ់ទឹកដីខ្មែរ

**អំណាន ៖** ចូរច្រៀងចម្រៀងខាងក្រោម រួចឆ្លើយនឹងសំណួរ ។



## ចម្រៀង ៖ លំនាំបទចង្វាក់ដើរ១-២

ដែនដីខ្មែរប្រែថាសុវណ្ណភូមិ
ជាដរាបតមកតាំងពីបុរាណ
ថ្ងៃមួយមានសត្រូវប្រទូសរ៉ាយ
សឹកសង្គ្រាមឈាមស្រស់លើប្រឹថពី
កម្ពុជាឯករាជ្យបានឃ្លាតពីទុក្ខ
សូមទេវតាឱ្យពរសព្ទសាធុការ

ខ្មែរគ្រប់ភូមិរមណីយដ្ឋាន
ខ្មែរគ្រប់ប្រាណស្វាគមន៍សាមគ្គី ។
ខ្មែរគ្រប់កាយសុខចិត្តប្តូរជីវី
ឱ! ព្រះភូមិឫទ្ធិវង្សគង្គា ។
ខ្មែរបានសុខទាំងអស់គ្រប់អាត្មា
មហាក្សត្រយើងគ្រប់គ្រងផែនដី ។

## ការរៀនពាក្យ

ក. អំណានពាក្យ

សុវណ្ណភូមិ អានថា សុ-វ៉ាន់-ណៈ-ភូម

រមណីយដ្ឋាន អានថា រៈ-មៈ-នី-យៈ-ថាន

ប្រទូសរ៉ាយ អានថា ប្រ-ទូសៈ-រ៉ាយ

ស្វាគមន៍ អានថា ស្វា-គំ

ប្រឹថពី អានថា ប្រិត-ថៈ-ពី

ខ. ពន្យល់ពាក្យ

សុវណ្ណភូមិ (ន.) : ភូមិមាស ដែនដីមាស ។

រមណីយដ្ឋាន (ន.) : ទីកន្លែង ដែលជាទីរីករាយ សប្បាយ ។

ប្រទូសរ៉ាយ (កិ.) : បៀតបៀន រករឿង រកហេតុធ្វើឱ្យអាក្រក់ឱ្យវិនាស ។

ប្រឹថពី (ន.) : ផែនដី ផ្ទៃដីទាំងមូល ។

សព្ទសាធុការ (ន.) : សំឡេងដែលបន្លឺថា " សាធុ " ។

ស្វាគមន៍ (ន.) : ដំណើរមកដល់ដោយប្រពៃ ។

គ. បដិសព្ទ

សត្រូវ ≠ មិត្ត

សង្គ្រាម ≠ សន្តិភាព

ឃ. វេវចនសព្ទនឹងពាក្យ " សុវណ្ណ "

សុវណ្ណ មាស

ង. សទិសសព្ទនឹងពាក្យ " សឹក "

សឹក (គុ.) : ដែលរេចរឹល រឹលរេច ។

សឹក (កិ.) : ផ្លាស់ភេទពីព្រះសង្ឃមកជាគ្រហស្ថ ។ *ឧទាហរណ៍* លោកសឹក ។

សឹក (ន.) : ចម្បាំង សឹកសង្គ្រាម ។

## សំណួរ

១. នៅពេលមានសត្រូវមកយាយី តើប្រជាជនខ្មែរបានធ្វើដូចម្ដេច ?

២. តើប្អូនមានអារម្មណ៍ដូចម្ដេច ចំពោះមាតុភូមិរបស់ប្អូន ?

## លំហាត់

១. ចូររកបដិសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ ។

២. ចូររកវេវចនសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ ។

៣. ចូររកសទិសសព្ទពីក្នុងអត្ថបទខាងលើឱ្យបានមួយពាក្យ ។

៤. ចូរស្រង់ពាក្យដែលមានបន្តក់ " ◌់ " ពីក្នុងអត្ថបទ ។

# សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យវគ្គចម្រៀងខាងក្រោម ។

ដែនដីខ្មែរប្រែថាសុវណ្ណភូមិ ខ្មែរគ្រប់ភូមិរមណីយដ្ឋាន
ជាដរាបតមកតាំងពីបុរាណ ខ្មែរគ្រប់ប្រាណស្វាគមន៍សាមគ្គី ។
ថ្ងៃមួយមានសត្រូវប្រទូសរ៉ាយ ខ្មែរគ្រប់កាយសុខចិត្តប្ដូរជីវី
សឹកសង្គ្រាមឈាមស្រស់លើប្រឹថពី ឱ ! ព្រះភូមិឫទ្ធិវង្សគង្គា ។

ខ. ចូរបំពេញវគ្គចម្រៀងខាងក្រោម ។

ដែនដីខ្មែរប្រែថា ........ ខ្មែរគ្រប់ភូមិ ............... ដ្ឋាន
.......... តមកតាំងពីបុរាណ ខ្មែរគ្រប់ប្រាណ ......... សាមគ្គី ។
ថ្ងៃមួយមានសត្រូវ ............. ............. សុខចិត្តប្ដូរជីវី
.......... ឈាមស្រស់លើប្រឹថពី ឱ ! ព្រះ ............ វង្សគង្គា ។

គ. ចូរបំពេញលេខនៅក្នុងប្រអប់នៃវគ្គចម្រៀងខាងក្រោមឱ្យបានត្រឹមត្រូវ ។

☐ ថ្ងៃមួយមានសត្រូវប្រទូសរ៉ាយ ខ្មែរគ្រប់កាយសុខចិត្តប្ដូរជីវី
សឹកសង្គ្រាមឈាមស្រស់លើប្រឹថពី ឱ ! ព្រះភូមិឫទ្ធិវង្សគង្គា ។

☐ ដែនដីខ្មែរប្រែថាសុវណ្ណភូមិ ខ្មែរគ្រប់ភូមិរមណីយដ្ឋាន
ជាដរាបតមកតាំងពីបុរាណ ខ្មែរគ្រប់ប្រាណស្វាគមន៍សាមគ្គី ។

☐ កម្ពុជាឯករាជ្យបានឃ្លាតពីទុក្ខ ខ្មែរបានសុខទាំងអស់គ្រប់អាត្មា
សូមទេវតាឱ្យពរសព្ទសាធុការ មហាក្សត្រយើងគ្រប់គ្រងផែនដី ។

ឃ. ចូរសរសេរតែងសេចក្តីពណ៌នាពីទីកន្លែង កម្សាន្តនៅស្រុកស្រែពេលរដូវវស្សា តាមគម្រោងខាងក្រោម ។

## គម្រោង

១. សេចក្តីផ្តើម

- ពេលវេលា ទីកន្លែងដែលអ្នកបានឃើញ
- ទេសភាពពេលព្រឹក នៅវាលស្រែរដូវវស្សា ។

២. តួសេចក្តី

- បង្ហាញពី ទិដ្ឋភាព ដែលនៅជុំវិញខ្លួន វាលស្រែ ពណ៌បៃតង សន្ទូងខៀវខ្ចី ព្រះអាទិត្យចាប់ផ្តើមរះ ខ្យល់បក់រំភើយ រុក្ខជាតិ យោលយោករណ្តំគ្នា សំឡេងបក្សាបក្សីស្រែកច្រៀង ។

៣. សេចក្តីបញ្ចប់

- ចំណាប់អារម្មណ៍របស់ប្អូន ចំពោះទេសភាព ។
- នៅពេលសរសេរចប់ ប្អូនផ្ទៀងផ្ទាត់តាមសំណួរដូចខាងក្រោម ៖
    - តើសំណេររបស់ប្អូនមានផ្តើមសេចក្តី តួសេចក្តី និងសេចក្តីបញ្ចប់ឬទេ ?
    - តើប្អូនមានដាក់សញ្ញាផ្សេងៗ ដូចជា ។ ? ! បានត្រឹមត្រូវឬទេ ?

ង. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ “ ឈ ” និងពាក្យ “ ឈប់ឈរ ” ។

# មេរៀនទី ៦៣ ផលប្រយោជន៍នៃបច្ចេកវិទ្យាព័ត៌មាន

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។



បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាតាមប្រព័ន្ធកុំព្យូទ័រ ឬទូរស័ព្ទដៃ ជាមធ្យោបាយមួយសម្រាប់ទាក់ទងគ្នាតាមបែបទំនើប និងរហ័សទាន់ចិត្ត ។

បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាបានផ្តល់ និងចែករំលែកនូវចំណេះដឹងបទពិសោធ ជំនាញបច្ចេកទេស និងបំណិនជីវិតផ្សេងៗ រួមទាំងការរកឃើញថ្មីៗបំពេញឱ្យគ្នាទៅវិញទៅមក ។ វាមិនចាំបាច់ចំណាយពេលវេលាដើម្បីបញ្ជូនតាមប្រៃសណីយ៍ រថយន្ត ឬអ្នកនាំសារនោះទេ ។ ការបញ្ជូនសារ និងព័ត៌មានគ្រប់ប្រភេទនេះមិនគ្រាន់តែរហ័សទាន់ចិត្តប៉ុណ្ណោះទេ ថែមទាំងជាមធ្យោបាយដ៏ប្រសើរ ដែលអាចរក្សាការសម្ងាត់ ហើយភាគច្រើន គឺបានទៅដល់អ្នកទទួល ជាពិសេសទូរស័ព្ទដៃ ។ សិស្សអាចទទួលព័ត៌មានតាមរយៈទូរស័ព្ទទំនើប ។

ការរីកចម្រើននៃបច្ចេកវិទ្យាថ្មីៗនេះ មានសារប្រយោជន៍ដល់មនុស្សគ្រប់រូបលើពិភពលោក ក្នុងការផ្តល់ និងទទួលព័ត៌មានថ្មីៗ ដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព ។

## ការរៀនពាក្យ

ក. អំណានពាក្យ

គមនាគមន៍ អានថា គៈ-មៈ-នា-គំ

ប្រៃសណីយ៍ អានថា ប្រៃ-សៈ-នី

ប្រព័ន្ធ អានថា ប្រ-ពាន់

ខ. ពន្យល់ពាក្យ

គមនាគមន៍ (ន.) : ដំណើរទៅ និងមក ផ្លូវទាក់ទងសម្រាប់ធ្វើដំណើរទៅមក ។

ប្រព័ន្ធ (កិ.) : ចងរឹតរួត ឆ្វាក់ជំពាក់ ។

ប្រៃសណីយ៍ (ន.) : ក្រុមរាជការទទួលបន្ទុកខាងការបញ្ជូន និងការនាំសំបុត្រ ស្នាមផ្សេងៗ ។

គ. បដិសព្ទ

រហ័ស ≠ យឺត ចំណាយ ≠ ចំណូល

ឃ. វេវចនសព្ទនឹងពាក្យ " ទំនើប "

ទំនើប ថ្មី ទាន់សម័យ

ង. សទិសសព្ទនឹងពាក្យ "សារ"

សារ (ន.) : ខ្លឹម សេចក្ដីខ្ចាប់ខ្ជួន មាំមួន ។ *ឧទាហរណ៍* សារលិខិត ។

សា (កិ.) : មូរឡើងវិញ ។ *ឧទាហរណ៍* សាកន្ទេល ។

សា (ន.) : ស្រូវឬដំណាំពួកខ្លះ ដែលដុះលូតលាស់ពីគល់ចាស់ ឬពីជញ្ជ្រាំង ។ *ឧទាហរណ៍* សាស្រូវ សាឪឡឹក ។

## សំណួរ

១. តើបច្ចេកវិទ្យាព័ត៌មានប្រើសម្រាប់ធ្វើអ្វី ?

២. តើបច្ចេកវិទ្យាព័ត៌មាន ជាឧបករណ៍យ៉ាងដូចម្ដេច ?

៣. តើបច្ចេកវិទ្យាព័ត៌មាន មានសារប្រយោជន៍ដូចម្ដេចខ្លះ ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " សម្ងាត់ "។

២. ចូររកវេវចនសព្ទនឹងពាក្យ " រហ័ស "។

៣. ចូររកសទិសសព្ទនឹងពាក្យ " ដ៏ "។

៤. ក្នុងចំណោមពាក្យខាងក្រោមនេះ តើពាក្យណាខ្លះជានាម ? ចូរគូសភ្ជាប់ពីចំណុច(ក) ទៅ (ខ) តាមគំរូ ។

| ក | ខ |
|---|---|
| ពាក្យជានាម | រថយន្ត<br>ទំនើប<br>កុំព្យូទ័រ<br>ទូរស័ព្ទ<br>បញ្ជូន |
| ពាក្យជាគុណនាម | រក្សា<br>ថ្មីៗ<br>ពិភពលោក<br>ទំនើប<br>ប្រសើរ |
| ពាក្យជាកិរិយាសព្ទ | ព័ត៌មាន<br>ទទួល<br>ចំណេះ<br>ចែករំលែក<br>ចំណាយ |

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### បច្ចេកវិទ្យាព័ត៌មាន

បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាតាមប្រព័ន្ធកុំព្យូទ័រ ឬទូរស័ព្ទដៃជាមធ្យោបាយមួយសម្រាប់ទាក់ទងគ្នាតាមបែបទំនើប និងរហ័សបំផុត ។ បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាបានផ្តល់ និងចែករំលែកនូវចំណេះដឹង បទពិសោធជំនាញបច្ចេកទេស និងបំណិនជីវិតផ្សេងៗ រួមទាំងការរកឃើញថ្មីៗបំពេញឱ្យគ្នាទៅវិញទៅមក ។

ការរីកចម្រើននៃបច្ចេកវិទ្យាថ្មីៗនេះ មានសារប្រយោជន៍សម្រាប់មនុស្សគ្រប់រូបក្នុងការផ្តល់ និងទទួលព័ត៌មានថ្មីៗ ដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព ។

### សំណួរ

១. តើនៅសម័យទំនើបគេប្រើមធ្យោបាយអ្វីដើម្បីទាក់ទងគ្នា ?

២. តើបច្ចេកវិទ្យាព័ត៌មាន មានសារប្រយោជន៍ដូចម្តេចខ្លះ ?

### លំហាត់

១. ចូរពន្យល់ពាក្យ " គមនាគមន៍ ប្រព័ន្ធ " ។

២. ចូររកបដិសព្ទនឹងពាក្យ " រហ័ស " ។

៣. ចូររកវេវចនសព្ទនឹងពាក្យ " ទំនើប " ។

៤. ចូររកសទិសសព្ទនឹងពាក្យ " សារ " ។

ខ. ចូរបំពេញល្បះ និងបញ្ចប់ល្បះដោយប្រើសញ្ញាសួរ " ? " និងសញ្ញា " ។ "

១. ហេតុអ្វីបានជាការនាំសារបច្ចុប្បន្នឆាប់រហ័ស ...

២. បច្ចេកវិទ្យាថ្មីនេះ បានជាប្រយោជន៍ដល់មនុស្សគ្រប់រូប ...

៣. ចូរបង្ហាញពីការប្រើទូរស័ព្ទដៃ ...

គ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ " ញ " និងពាក្យ " ញញឹម " ។

មេរៀនទី
៦៤

# សមាគមអាស៊ាន

**អំណាន ៖** ចូរអានអត្ថបទខាងក្រោម រួចឆ្លើយនឹងសំណួរ ។




អាស៊ានជាសមាគមនៃប្រជាជាតិអាស៊ីអាគ្នេយ៍ដែលមានដប់ប្រទេសជាសមាជិក ។ សមាគមអាស៊ានត្រូវបានបង្កើតឡើងនៅថ្ងៃទី០៨ ខែសីហា ឆ្នាំ១៩៦៧ ។

ប្រទេសជាសមាជិកអាស៊ានមាន ឥណ្ឌូណេស៊ី ម៉ាឡេស៊ី ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ ឡាវ មីយ៉ាន់ម៉ា វៀតណាម និងព្រះរាជាណាចក្រកម្ពុជា ។ អាស៊ានមានទង់និមិត្តសញ្ញាទៅតាមលក្ខណៈនៃប្រទេសក្នុងតំបន់ ។ ទង់ប្រជាជាតិអាស៊ានតំណាងឱ្យសមាគមអាស៊ានមួយ ដែលមានស្ថិរភាព សន្តិភាព រួបរួមគ្នាប្រកបដោយថាមពល ។ សមាគមនេះបង្កើតឡើង ដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអាគ្នេយ៍ ។

នៅឆ្នាំ ២០១២ ព្រះរាជាណាចក្រកម្ពុជា គឺជាប្រធានអាស៊ាន ។ តួនាទីនេះជាមោទនភាពជាតិមួយ ដ៏ឧត្តុង្គឧត្តមរបស់ជាតិខ្មែរយើង ។

*" អាស៊ានសហគមតែមួយ វាសនាតែមួយ "*

## ការរៀនពាក្យ

ក. អំណានពាក្យ

សមាគម អានថា សៈ-ម៉ា-គំ

ស្ថិរភាព អានថា ថិ-រៈ-ភាប

វប្បធម៌ អានថា វ័ប-បៈ-ធ័រ

វឌ្ឍភាព អានថា វ័ត-ឍៈ-នៈ-ភាប

ខ. ពន្យល់ពាក្យ

ថាមពល (ន.) : កម្លាំងដ៏លើសលប់ កម្លាំងដ៏ស្វាហាប់ ។

វប្បធម៌ (ន.) : ការផ្សាំបណ្ដុះវិជ្ជា និងប្រាជ្ញាស្មារតីឱ្យបានលូតលាស់ចម្រើន ។

សេដ្ឋកិច្ច (ន.) : មុខរបរជាប្រយោជន៍សំខាន់ក្នុងប្រទេស ។

វឌ្ឍនភាព (ន.) : ដំណើរនាំឱ្យរីកចម្រើន ។

គ. បដិសព្ទ

បង្កើត ≠ បំផ្លាញ រួបរួម ≠ បែកបាក់

ឃ. វេវចនសព្ទនឹងពាក្យ " រួបរួម "

រួបរួម សាមគ្គី ចងបាច់ ប្រមូលផ្ដុំ

ង. សទិសសព្ទនឹងពាក្យ "ចក្រ"

ចក្រ (ន.) : កង់មានកាំ វង្វង់មូល ប្រទេស ។

ចាក់ (កិ.) : បុះដោយគ្រឿងប្រហារមានមុខស្រួច ។

## សំណួរ

១. ដូចម្ដេចដែលហៅថា " អាស៊ាន " ?

២. តើសមាគមអាស៊ានមានប៉ុន្មានប្រទេស ? ប្រទេសណាខ្លះ ?

៣. តើទង់និមិត្តសញ្ញាអាស៊ានតំណាងអ្វីខ្លះ ?

៤. តើអាស៊ានបង្កើតឡើងដើម្បីអ្វី ?

៥. នៅឆ្នាំ ២០១២ ប្រទេសណាជាប្រធានសមាគមអាស៊ាន ?

## លំហាត់

១. ចូររកបដិសព្ទនឹងពាក្យ " ស្ថិរភាព "

២. ចូររកវេវចនសព្ទនឹងពាក្យ " នាយក "

៣. ចូររកសទិសសព្ទនឹងពាក្យ " វឌ្ឍ "

៤. ចូរផ្គូផ្គងពាក្យនាម គុណនាម និងកិរិយាសព្ទ ខាងក្រោម ។

| | |
|---|---|
| ជោគជ័យ | អភិវឌ្ឍ |
| តំបន់ | អាស៊ី |
| សមាជិក | ធំធេង |
| សមាគម | ប្រជាជាតិ |
| សង្គម | អាស៊ាន |

៥. ចូរប្រាប់គំនិតសំខាន់ៗរបស់អត្ថបទ " សមាគមអាស៊ាន " ។

## សំណេរ

ក. ចូរសរសេរតាមអានត្រួតពិនិត្យអត្ថបទខាងក្រោម ។

### សមាគមអាស៊ាន

ប្រទេសសមាជិកអាស៊ានមានចំនួនដប់ គឺប្រទេសឥណ្ឌូណេស៊ី ម៉ាឡេស៊ី មីយ៉ាន់ម៉ា ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ វៀតណាម ឡាវ និងកម្ពុជា ។ សមាគមអាស៊ានបង្កើតឡើងដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអាគ្នេយ៍ ។

នៅឆ្នាំ ២០១២ ព្រះរាជាណាចក្រកម្ពុជា គឺជាប្រធានអាស៊ាន ។ តួនាទីនេះ ជាមោទនភាពជាតិមួយ ដ៏ឧត្តុង្គឧត្តមរបស់ជាតិខ្មែរយើង ។

## សំណួរ

១. តើអាស៊ាន មានប្រទេសណាខ្លះ?

២. តើឆ្នាំ ២០១២ប្រទេសណាជាប្រធានអាស៊ាន?

៣. តើអាស៊ានបង្កើតឡើងដើម្បីអ្វី?

## លំហាត់

១. ចូរពន្យល់ពាក្យ “ សេដ្ឋកិច្ច វប្បធម៌ ”។

២. ចូររកបដិសព្ទនឹងពាក្យ “ បង្កើត ”។

៣. ចូររកវេវចនសព្ទនឹងពាក្យ “ ឧត្តុង្គឧត្តម ”។

៤. ចូររកសទិសសព្ទនឹងពាក្យ “ ចក្រ ”។

ខ. ចូរបំពេញល្បះ និងបញ្ចប់ល្បះដោយប្រើសញ្ញាសួរ “ ? ” និងសញ្ញា “ ។ ”

- តើប្រទេសដែលជាសមាជិក ........មានប៉ុន្មាន ...........
- សមាគមអាស៊ានត្រូវបាន .......ឡើង នៅថ្ងៃទី ០៨ ខែ ........ឆ្នាំ១៩៦៧ ...
- តួនាទីនេះ ជា ........ជាតិមួយ ដ៏ឧត្តុង្គឧត្តមរបស់ជាតិយើង ......

គ. ចូរតែងល្បះនឹងពាក្យនីមួយៗខាងក្រោមមួយពាក្យឱ្យបានមួយល្បះ ។

- ប្រទេស : ...................................................... ។
- ធំធេង : ...................................................... ។
- បង្កើត : ...................................................... ។

ឃ. ចូរសរសេរអក្សរផ្ចង់ព្យញ្ជនៈ “ ណ ” និងពាក្យ “ តំណាង ” ។

# បទានុក្រម

## ក

| | | | |
|---|---|---|---|
| កតញ្ញូ | (ន.) | : | ការដឹងគុណ សេចក្ដីដឹងឧបការគុណដែលអ្នកឯទៀតបានធ្វើដល់ខ្លួនអ្នកដែលមិនភ្លេចគុណ មិនរមិលគុណ ។ |
| កន្ត្រាក់ | (កិ.) | : | ទាញកញ្ឆក់ដោយប្រញាប់ ទាញកញ្ឆក់យ៉ាងខ្លាំង ។ |
| កន្ទប | (ន.) | : | សំពត់ចាស់ៗប្រើសម្រាប់ជូតសម្អាត ។ |
| កម្រៃ | (គុ.) | : | ដែលចំណេញ ថវិកាចំណេញ ។ |
| កសិករ | (ន.) | : | អ្នកធ្វើស្រែចម្ការ ។ |
| កសិដ្ឋាន | (ន.) | : | កន្លែងធ្វើកសិកម្ម ។ *ឧទាហរណ៍* កសិដ្ឋានចិញ្ចឹមសត្វ កសិដ្ឋានពិសោធពូជស្រូវ ដំណាំ ។ |
| ការដ្ឋាន | (ន.) | : | កន្លែងធ្វើការងារ ទីធ្វើការងារ ។ |
| កេរមរតក | (ន.) | : | ទ្រព្យដ៏ប្រសើរដែលបានបន្សល់ទុកមកតាំងពីដូនតា ។ |
| កោយ | (ន.) | : | មេអង្គញ់ ។ |
| ក្រុមប្រឹក្សាកុមារ | (ន.) | : | កុមារមួយក្រុមដែលគេបង្កើតឡើង សម្រាប់ពិគ្រោះផ្សេងៗ ។ |

## ខ

| | | | |
|---|---|---|---|
| ខុប | (គុ.) | : | ដែលងចូល កោងចូល ។ |
| ខេមរា | (ន.) | : | ជនជាតិខ្មែរ ។ |
| ខ្ចី | (កិ.) | : | យកពីគេមកប្រើហើយឱ្យទៅគេវិញ ។ |
| ខ្ជាប់ខ្ជួន | (គុ.)ឬ (កិ.វិ.) | : | ខ្ជាប់ណាស់ មាំមួនណាស់ ។ |
| ខ្ពង់ខ្ពស់ | (គុ.) | : | ថ្កើងថ្កាន, ប្រសើរ ។ |
| ខ្ទីឃ្មាត | (កិ.) | : | ខំប្រឹង សង្វាតខ្លាំង ។ |
| ខ្លា | (ន.) | : | ឈ្មោះសត្វចតុប្បាទសាហាវ រូបរាងដូចឆ្មា តែធំជាងតែងនៅក្នុងព្រៃបរិភោគសាច់ ។ ខ្លាមានច្រើនគឺប្រភេទខ្លាធំ ខ្លារខិន ខ្លាត្រី ។ ខ្លាមួយប្រភេទទៀតខ្មៅបរិភោគឃ្មុំជាអាហារហៅថាខ្លាឃ្មុំ ។ |
| ខ្លាច | (គុ.) | : | ដែលមិនហ៊ាន, មិនអាច ។ |

ខ្លឹមសារ (ន.) : អត្ថន័យសំខាន់ ខ្លឹមសំខាន់ ។

ខ្សត់ (គុ.) : ទ័លក្រ ។

ខ្សោយ (គុ.) : ដែលមានកម្លាំងតិច ។

## គ

គមនាគមន៍ (ន.) : ដំណើរទៅ និងមក ផ្លូវទាក់ទងសម្រាប់ធ្វើដំណើរទៅមក ។

គ្រឿងទេស (ន.) : គ្រឿងសម្រាប់ស្លមានដូចជា អំបិល ប៊ីចេង ខ្ទឹម ស្ករ ម្រេច ... ។

## ឃ

ឃឹម (ន.)(ថិ.) : ឈ្មោះគ្រឿងភ្លេងម្យ៉ាង មានខ្សែធ្វើដោយលួស មានស្នូក ។

ឃើញ (កិ.) : ឆ្លុះយល់រូបប្រាកដដោយភ្នែក ។

ឃុំ (ន.) : នាទីក្នុងអំណាចមេឃុំមួយ គឺប្រជុំភូមិច្រើន ឬតិចតាមបញ្ញត្តិរាជការរដ្ឋបាល ។

ឃ្លាត (កិ.) : ងាកចេញពីគ្នា ឬបែកពីគ្នាទៅឆ្ងាយ ។

## ង

ងាយ (កិ.វិ.)(គុ.) : មិនពិបាក គឺដែលស្រួល ។

## ច

ចរាចរណ៍ (ន.) : ការដើរទៅមក ដំណើរខ្វាត់ខ្វែងចុះឡើង ដំណើរតាមផ្លូវសាធារណៈតាមតែផ្លូវណាក៏ដោយ ។

ចរិយា (ន.) : ការប្រព្រឹត្តិ ព្រេង សំណាង ។ *ឧទាហរណ៍* កូនស្រីតូចមានចរិយាល្អណាស់ ។

ចិញ្ចឹម (កិ.) : គ្រប់គ្រងរក្សាបន្តជីវិត បីបាច់រក្សាឱ្យរស់ ឱ្យធាត់ធំ ។

ចិន្តា (ន.) : សេចក្តីគិត(គំនិត) ។

ចៃដន់ ឬចៃដន្យ (ន.) : ដំណើរដែលបណ្តាលឱ្យកើតមានឡើង ។
*ឧទាហរណ៍* វាជារឿងចៃដន្យ ។

ចោរកម្ម (ន.) : អំពើលួច ឆក់ ប្លន់ ។

## ឆ

ឆក់ (កិ.) : ចាប់យកដោយប្រញាប់ ។

ឆាប (ន.) : គ្រឿងភ្លេងមួយប្រភេទសម្រាប់ចាប់ទង្គិចទទួលចង្វាក់ភ្លេង ឬចង្វាក់ចម្រៀង ។

ឆាប់ (កិ.វិ.): ដែលប្រញាប់,រួសរាន់ ។

ឆេវឆាវ (គុ.កិ.) : ឆាប់ខឹង ។

ឆៃយ៉ាំ (ន.) : ឈ្មោះភ្លេងមួយបែប គេច្រើនលេងកម្សាន្តក្នុងពិធីបុណ្យកឋិន ឬបុណ្យផ្កា ។

ឆ្ងល់ (កិ.) : វិមវាម សង្ស័យក្នុងចិត្ត ពិភាល់ យល់មិនសព្វគ្រប់ ។

ឆ្នើម (គុ.) : ដែលលើសដាច់គេ,ឆើត ។

ឆ្នេរ (ន.) : មាត់សមុទ្រ ឬមាត់ទន្លេ ស្ទឹង ត្រង់ដែលមានសណ្ឋានជ្រាលមានផ្ទុកខ្សាច់រាបស្រួល ។

ឆ្មាំ (ន.) : អ្នកចាំរក្សា ។

ឆ្លាត (គុ.) : ប៉ិន ប្រសប់ ស្ទាត់ ។

ឆ្លៀត (កិ.) : រំលែកពេលធ្វើកិច្ចការអ្វីៗ លួចល្បក់ធ្វើ ។

## ជ

ជជែក (កិ.) : និយាយពិគ្រោះគ្នាឱ្យឃើញសេចក្ដីប្រាកដ ។

ជម្រក (ន.) : ទីកន្លែងសម្រាប់ជ្រក ទីជ្រក ។

ជម្រាប (កិ.) : ប្រាប់, ឱ្យដំណឹងឱ្យជ្រាប ។

ជម្រះ (កិ.) : ធ្វើឱ្យជ្រះ ឱ្យស្អាត ធ្វើឱ្យដាច់ស្រេច ។

ជម្លោះ (ន.) : វិវាទ ដំណើរឈ្លោះ ។

ជរា (គុ.) : ដែលគ្រាំគ្រា ដែលទ្រុឌទ្រោម ទ្រម ចាស់ ។

(ន.) : សេចក្ដីគ្រាំគ្រា ទ្រុឌទ្រោម ទ្រម ចំណាស់ ។

ជាតិ (ន.) : កំណើត,មនុស្សដែលមានសញ្ជាតិផ្សេងគ្នា ។

ជានិច្ច (និ.) : គ្រប់កាល គ្រប់ពេល ដែលឥតចន្លោះ ឥតល្ហែ ឥតឈប់ ។

ជីរ (ន.) : ឈ្មោះដំណាំមួយពួក សម្រាប់ប្រើស្លឹកជារបោយ ឬបង់បំបាត់ក្លិនឆ្អាប ជីរមានច្រើនយ៉ាងគឺ ជីរនាងវង ជីរលីងលាក់ ជីរស្លឹកគ្រៃ ជីរអង្កាមជាដើម ។ បណ្ដាជីរទាំងនោះ ជីរខ្លះមានគ្រាប់ទុំប្រើត្រាំទឹកឱ្យរីក ហើយលាយស្ករធ្វើបង្អែមបាន ។

ជីវភាព (ន.) : ភាពនៃការរស់នៅ ការចិញ្ចឹមជីវិត ។

ជីវិត (ន.) : ដំណើររស់នៅ អាយុ ។

ជីវី (ន.) : ជីវិត អាយុ ។

ជូត (កិ.) : សម្អាតដោយយកសំពត់ ឬកំណាត់សំពត់ជាដើម ជុសជម្រះ មន្ទិល ឬឱ្យស្ងួតទឹក ។

ជួញ (កិ.) : លក់ដូរសារពើទំនិញយកចំណេញ ។

ជំងឺ (ន.) : ភាវៈឈឺ សេចក្តីឈឺចាប់ អាពាធ រោគ ។

ជំនន់ (ន.) : ដំណើរដែលជន់ ទឹកដែលជន់ ។

ជំនាញ (គុ.) : ដែលជាញ គឺដែលវាងវៃ ប៉ិនប្រសប់ ស្ទាត់ ដែលចេះប្រាកដ ។

ជំរំ (ន.) : ទីសម្រាប់ជ្រកអាស្រ័យបណ្តោះអាសន្ន ។

ជោះ (កិ.) : អុកគោះលើក្បាលជង្គង់ ដោយគ្រាប់អង្គញ់ចំនួនពីរ មួយផ្តេក មួយបញ្ឈរ ។

ជោះ (កិ.) : ឆ្កិះ ចោះ គោះបំបែក ។

ជ្រុល (កិ.)(កិ.វិ.) : ហួសកំណត់ ។

ជ្វាលា (ន.) : សេចក្តីរុងរឿង ពន្លឺដែលភ្លឺព្រោងព្រាត ។

## ឈ

ឈប់ (កិ.) : បង្អង់នៅស្ងៀម លើកលែងធ្វើ លែងប្រព្រឹត្ត ។

ឈាម (ន.) : អាការៈរាវ(ធាតុទឹក) សម្បុរក្រហម ជ្រួតជ្រាបសព្វសរសៃក្នុង សារពាង្គកាយ ។

ឈិង (ន.) : ឈ្មោះគ្រឿងភ្លេងមួយប្រភេទក្នុងវង់ភ្លេងខ្មែរ ។

ឈុត (ន.) : ពាក្យសម្រាប់ប្រើហៅរបស់ដែលប្រមូលរួមចូលជាពួកមួយ ជាមួយគ្រឿង ។

ឈូង (ន.) : រមូរសំពត់ដែលចងក្របួចចុងសម្រាប់កាន់បោះ ឬចោលក្នុងល្បែងឈូង ។

ឈ្នះ (កិ.) : មានជម្នះ ប្រកបបានពីលើគេ ។

ឈ្មោល (គុ.) : ដែលមានភេទជាប្រុស(និយាយតែពីសត្វតិរច្ឆាន និងដើមឈើខ្លះ) ។

## ញ

ញៀន (កិ.) : ជាប់ចិត្តដោយមានចំណង់ អត់មិនបានដោយធ្លាប់ប្រព្រឹត្ត ធ្លាប់ជក់ ធ្លាប់ស៊ី លុះដល់កំណត់, ដល់វេលាដែលធ្លាប់ ក៏បណ្ដាលឱ្យនឹកចង់អត់មិនបាន ឬក៏ទៅជាធ្វើទុក្ខមិនស្រួលខ្លួន ។

## ដ

ដរាប (និ.) : រៀងរាប ត្រឹម កំណត់ត្រឹម ។

ដារលាន (ន.) : ឈ្មោះពិធីបុណ្យដែលប្រជាជនធ្វើរួមគ្នាតាមភូមិ ប្រារព្ធធ្វើនៅពេលប្រមូលផលស្រូវរួច ។

ដុស (កិ.) : ខាត់ រំលីង ពូត ជម្រះ ដោយសាប៊ូ ។

ដូនតា (ន.) : យាយ និងតា ។

ដេញ (កិ.) : កេះ ត្រេះ ផ្ទាត់ខ្សែតន្ត្រី ។

ដេរ (កិ.) : ភ្ជាប់អ្វី ដោយម្ជុល និងចេស ។

ដេរដាស (កិ.)(កិ.វិ.) : ដែលដាសពាស ពាសពេញ ត្រៀបត្រា ។

ដែក (ន.) : លោហជាតិមួយពួក កើតពីជាតិថ្មមានពណ៌ក្រមៅ ជាធាតុរឹងជាងពួកលោហជាតិទាំងពួង មានប្រយោជន៍ប្រើការបានច្រើនយ៉ាងជាងលោហជាតិទាំងពួង ។

ដែន (ន.) : រដ្ឋ ប្រទេស ផែនដី ។

ដំបូន្មាន (ន.) : សេចក្ដីទូន្មាន ឱវាទ ពាក្យប្រដៅ ។

## ឋ

ឋានសួគ៌ (ន.) : ទីដែលបរិបូរដោយសេចក្ដីសុខ ច្រើនហៅ ឋានទេវតា ។

## ឌ

ឌឺដង (កិ.) : និយាយដៀមដាម ឱ្យខឹង ឱ្យឈឺចិត្ត ។

## ណ

ណាមរា (ន.) : ក្ងាន ហង្ស ។

## ណ

ណែនាំ (កិ.) : ប្រាប់ទំនង ប្រាប់ឱ្យយល់ ឱ្យភ្លឺ ។

*ឧទាហរណ៍* សូមជួយណែនាំវាឱ្យផង ។

## ត

តម្រា (ន.) : សេចក្តីកត់ត្រាទុក រឿងដែលកត់ទុកដោយសង្ខេបក្បួន ក្បួនតូចៗ ។

តូរ្យតន្ត្រី (ន.) : គ្រឿងភ្លេង ដេញ ដំ ផ្លុំ កូត ។

ត្រសុំ (គុ.) : ដែលមានបរិមណ្ឌលល្អមូលជុំគ្នា ។

*ឧទាហរណ៍* មែកឈើត្រសុំ ម្លប់ត្រសុំត្រសាយ ។

## ថ

ថាមពល (ន.) : កម្លាំងដ៏លើសលប់ កម្លាំងដ៏ស្វាហាប់ ។

ថែរក្សា (កិ.) : មើលថែទាំ ។

ថ្នាំងថ្នាក់ (ន.) : សេចក្តីអន់អាក់ចិត្ត ។

ថ្មើរជើង (ន.) : ការធ្វើដំណើរដោយដើរ ។

## ទ

ទីសាធារណៈ (ន.) : កន្លែងទូទៅសម្រាប់ទាំងអស់គ្នា ។

*ឧទាហរណ៍* ផ្លូវឬសួនច្បារសាធារណៈ ។

ទឹម (កិ.) : ដាក់នឹមលើករួមគ្នា បំពាក់ឱ្យសត្វពាហនៈ ឱ្យអូសនង្គ័ល ។

ទុក្ខ (ន.) : សេចក្តីព្រួយ ការលំបាក (កាយ និងចិត្ត) ។

ទូន្មាន (កិ.) : ប្រដៅ ក្រើនរំលឹក ឱ្យឱវាទ ។

ទេសចរណ៍ (ន.) : ការធ្វើដំណើរកម្សាន្ត ។

ទេសនា (ន.) : ការនិយាយទូន្មាន ។

ទោចក្រយាន (ន.) : យានជំនិះដែលមានកង់ពីរ ។ *ឧទាហរណ៍* កង់ជិះ ។

ទោចក្រយានយន្ត (ន.) : យានជំនិះដែលមានកង់ពីរ ដើរដោយម៉ាស៊ីន ។

*ឧទាហរណ៍* ម៉ូតូ ។

ទ្រុឌទ្រោម (គុ.) : ដែលចាស់គ្រាំគ្រាណាស់ ទ្រុឌផងទ្រោមផង ។

ទ្វេហារ (ន.) : ពីរនាក់ ទាំងពីរប្រាណ(ច្រើនប្រើតែក្នុងកាព្យ) ។

## ធ

ធម្មជាតិ (ន.) : សភាវៈកើតឡើងឯងៗ ។

ធុរៈ (ន.) : រវល់ ដំណើរជំពាក់ដោយកិច្ចការ ។

ធូលី (ន.) : ផង់ លម្អង ល្អង ។ *ឧទាហរណ៍* ធូលីដីហុយទ្រលោម ។

ធ្នុង (ន.) : តួសរសៃខ្នាញ់ដែលត្រកួញ ឬធ្លូញ ។

## ន

និទ្រា (ន.) : ដំណើរដេកលក់ ។

និព្វាន (ន.) : លែងកើត លែងស្លាប់ អស់មានកម្មដែលៗតទៅទៀត ។

## ប

បច្ចុប្បន្ន (ន.) : ពេលឥឡូវនេះ ។

បញ្ញាំ (ន.) : ការដាក់ទ្រព្យរបស់អ្វីមួយទុកជាភស្តុតាងដើម្បីយកប្រាក់មកប្រើប្រាស់ ។

បញ្ហា (ន.) : ពាក្យ ឬសម្ដីដែលមានអាថ៌កំបាំង ទាល់តែមានអ្នកប្រាជ្ញាទើបអាចដឹងបាន(ចំណោទ ប្រស្នា) ។

បដិសព្ទ (ន.) : ពាក្យទាំងឡាយដែលមានន័យផ្ទុយគ្នា ។
*(ដកស្រង់ចេញពីព្រឹត្តិបត្រក្រុមប្រឹក្សាជាតិភាសាខ្មែរលេខ ៤ ឆ្នាំ ២០១២ ទំព័រទី ៥២)*

បណ្ដុះ (កិ.) : ធ្វើឱ្យដុះ ។ *ឧទាហរណ៍* បណ្ដុះសណ្ដែក ។
(គុ.) : ដែលគេធ្វើឱ្យដុះហើយ ។ *ឧទាហរណ៍* សណ្ដែកបណ្ដុះ ។

បទបញ្ជា (ន.) : ការបង្គាប់ ។

បន្ទុក (ន.) : កិច្ចការធុរៈខុសត្រូវសព្វគ្រប់ ។

បរិភោគ (ន.) : ការហូបចំណីអាហារ ។

បរិវេណ (ន.) : ទីជិតខាងដែលព័ទ្ធជុំវិញ ។

| | | |
|---|---|---|
| បវរ | (គុ.) : | ប្រសើរ លើសលែង ថ្លៃថ្លា ។ |
| បារម្ភ | (ន.) : | ដំណើរនឹកព្រួយជាមុន ។ |
| បុគ្គលិក | (ន.) : | ភ្នាក់ងាររាជការដែលធ្វើការក្នុងក្រសួង រាជការផ្សេងៗ ។ បុគ្គលិកក្របខ័ណ្ឌ ។ |
| បុត្រ | (ន.) : | កូន ។ |
| បុព្វ | (គុ.) : | មុន ខាងដើម ពីមុន ។ |
| បូជា | (ន.) : | ការថ្វាយ ឬជូនវត្ថុអ្វីៗ ចំពោះបូជនីយបុគ្គលដែលគួរជូនឬថ្វាយ ។ |
| បំពាន | (កិ.) : | ពានពារលើ រំលោភលើ ធ្វើបំពានលើច្បាប់ ។ |
| ប្រជាខេមរា | (ន.) : | ប្រជាជនខ្មែរ ។ |
| ប្រជាប្រិយ | (គុ.) : | ដែលប្រជាជននិយមចូលចិត្ត ។ |
| ប្រទូសរ៉ាយ | (កិ.) : | បៀតបៀន រករឿងរកហេតុធ្វើឱ្យអាក្រក់ឱ្យវិនាស ។ |
| ប្រប | (ន.) : | ជិត កៀ្បរ ទៀប ។ *ឧទាហរណ៍* ប្របផ្លូវ កៀ្បរផ្លូវ កៀ្បរខ្លួន ។ |
| ប្រព័ន្ធ | (កិ.) : | ចងរឹតរួត បណ្ដាញប្រទាក់គ្នា ។ |
| ប្រពៃ | (គុ.) : | ល្អ ល្អហ្មត់ហ្មង ។ |
| ប្រមឹក | (គុ.) : | អ្នកដែលកាន់ទម្លាប់ផឹកសុរាដល់ស្រវឹង ដែលញៀន ឬជាប់សុរា ។ |
| ប្រយ័ត្ន | (ន.) : | ការប្រុងដោយមិនធ្វេសប្រហែស ។ |
| ប្រាជ្ញា | (ន.) : | ការយល់ដឹងជាក់ច្បាស់ ។ |
| ប្រារព្ធ | (ន.) : | ការផ្ដើមធ្វើអ្វីមួយ ។ *ឧទាហរណ៍* ប្រារព្ធពិធីបុណ្យចូលឆ្នាំខ្មែរ ។ |
| ប្រឹថពី | (ន.) : | ផែនដី ផ្ទៃដីទាំងមូល ។ |
| ប្រៃសណីយ៍ | (ន.) : | ក្រុមរាជការទទួលបន្ទុកខាងការបញ្ជូន និងការនាំសំបុត្រស្លាមផ្សេងៗ ។ |

## ផ

ផលា (ន.) : ផលដំណាំសំខាន់ៗ ផលដំណាំបន្ទាប់បន្សំរាយរងផ្សេងៗ ។

ផលិតផល (ន.) : ផលដែលបានសម្រេចក្នុងមុខរបរផ្សេងៗ (កសិកម្ម ឧស្សាហកម្ម) ។

ផ្គត់ផ្គង់ (កិ.) : គឺទំនុកបម្រុងមិនឱ្យខ្វះខាត ។

ផ្ទៀវ (ន.) : ឈ្មោះឈើមួយប្រភេទ មានផ្លែចេញពីមែក ឬពីដើមជាចង្កោមៗ មានរសជាតិជូរអែម ឬជូរ បរិភោគជាចំណីបាន ។

ផ្តាំ (កិ.) : ផ្ញើពាក្យ ផ្ញើសម្តីទុកឱ្យអ្នកទទួលចងចាំហើយធ្វើតាម ។

## ព

ព័ត៌មាន (ន.) : ព្រឹត្តិការណ៍ ដំណឹងក្នុងបច្ចុប្បន្ន ។

ពាក្យស្លោក (ន.) : ពាក្យសម្រាប់អប់រំ ទូន្មាន ។

ពាណិជ្ជករ (ន.) : អ្នកលក់ដូរ ។

ពិការ (គុ) : ដែលខូចអវយវៈណាមួយ ប្រើការមិនកើត ដូចជាបាក់ដៃ បាក់ជើង ។

ពុទ្ធបរិស័ទ (ន.) : អ្នកជឿពុទ្ធសាសនា អ្នកកាន់ពុទ្ធសាសនា ។

ពេស្យាចារ (ន.) : ស្រីផ្កាមាស ស្ត្រីរកស៊ីផ្លូវភេទ ។

ព្យាបាល (ន.) : ការថែរក្សាជំងឺ ។

ព្រ័ត្រ (ន.) : ខ្សែម្យ៉ាងធ្វើពីស្បែកគោ ឬក្របី ។
*ឧទាហរណ៍* ព្រ័ត្រគោ ព្រ័ត្រក្របី ។

## ភ

ភារកិច្ច (ន.) : ការទទួលបន្ទុកការងារ

ភ្ញៀវ (ន.) : អ្នកទីទៃក្រៅពីគ្នាឯងក្នុងផ្ទះ ឬក្នុងបន្ទុកជាមួយដែលគេមករក ។

ភ្លឺស្រាង (ន.) : ជិតព្រឹក ។

ភ្លើងស្តុប (ន.) : ជាភ្លើងសម្រាប់បញ្ជាការធ្វើដំណើរទៅមកដែលមានបីពណ៌ ដើម្បីសម្រួលការធ្វើដំណើរកុំឱ្យកកស្ទះ ឬមានគ្រោះថ្នាក់ ។ (ពណ៌បៃតង បញ្ជាឱ្យទៅ ។ ពណ៌ក្រហម បញ្ជាឱ្យឈប់ ។ ពណ៌លឿង បញ្ជាឱ្យប្រុងប្រយ័ត្ន) ។

## ម

| | | |
|---|---|---|
| មណ្ឌលសុខភាព | (ន.) : | ទីកន្លែងសម្រាប់ពិនិត្យព្យាបាលអ្នកជំងឺ ។ |
| មនោរម្យ | (ន.) : | មានភាពរីករាយ ឬសប្បាយចិត្ត ។ |
| មន្ត្រី | (ន.) : | អ្នកបម្រើការងាររាជការ ។ |
| មមៃ | (កិ.) : | ភ្នកនឹករឿយៗមិនភ្លេច នឹកមមៃ គិតមមៃ ។ |
| មហាវិថី | (ន.) : | ផ្លូវធំនៅក្នុងរាជធានី ។ |
| មាតុភូមិ | (ន.) : | ភូមិកំណើត ស្រុកកំណើត ។ |
| មារយាទ | (ន.) : | សណ្ដាប់ធ្នាប់ របៀបបទុកពា ។ |
| មិត្តភក្តិ | (ន.) : | អ្នកដែលរាប់អាន ស្រឡាញ់គ្នាជិតស្និទ្ធ ។ |
| មេគ្រួសារ | (ន.) : | អ្នកទទួលរ៉ាប់រងគ្រប់បែបយ៉ាងក្នុងគ្រួសារ ។ |
| ម្រឹគីម្រឹគា | (ន.) : | ពួកសត្វចតុប្បាទញីឈ្មោលដែលរស់ក្នុងព្រៃ ។ |

## យ

| | | |
|---|---|---|
| យានយន្ត | (ន.) : | គ្រឿងដឹកនាំដោយម៉ាស៊ីន ។ |
| យាយី | (កិ.) : | បៀតបៀន ជន្លជន្លេញ បន្លាច ។ |
| យីកេ | (ន.) : | ល្បោះល្បែងមហោស្រពមួយប្រភេទ លេងស្រដៀងនឹងល្ខោន តែមានទះស្គរតូចខ្លះធំខ្លះបញ្ចើចជាមួយនឹងការច្រៀងរាំ ស្គរទាំងអស់នោះមានរាងមូលខ្លីៗដាសតែម្ខាង(ហៅលិកេក៏បាន) ។ |
| យូរយារ | (គុ.) : | យូរជ្រុល យូរហួសកំណត់ ។ |
| យោធា | (ន.) : | ទាហានទាំងឡាយ ពួកទាហាន ។ |

## រ

| | | |
|---|---|---|
| រងា | (គុ.) : | ដែលមានសម្ផស្សត្រជាក់ខ្លាំងបណ្ដាលឱ្យជ្រួតជ្រាបព្រឺសាច់ព្រឺរោម ។ |
| រក្សា | (កិ.) : | ថែទាំ បីបាច់ ថិញ្ចឹម ការពារ ។ |
| រថយន្ត | (ន.) : | ឡាន ។ |
| រដ្ឋ | (ន.) : | ដែន ប្រទេស ។ |
| រដ្ឋាភិបាល | (ន.) : | អ្នកត្រួតត្រាដែន, អ្នកគ្រប់គ្រងរក្សាប្រទេស ។ |

រណ្តៅ (ន.) : ក្រហូងរាក់ ឬជ្រៅកើតអំពីជីក កកាយឬ ដាប់ជាដើម ។

រមណីយដ្ឋាន (ន.) : ទីកន្លែង ដែលជាទីរីករាយ សប្បាយ ។

រលំ (កិ.) : ដួលដេកទាំងស្រុង ទាំងជំហរ ។

រហ័ស (កិ.វិ.) : ដែលឆាប់រួសរាន់ ដែលមិនយឺត ។

រហូត (និ.) : ដរាបដល់ ។

រាជការ (ន.) : ការរបស់ព្រះរាជា ការរបស់ផែនដី ការរបស់ប្រទេសជាតិ ។

រាជបុរី (ន.) : ប្រទេសដែលមានព្រះមហាក្សត្រ ។

រូតរះ (កិ.) : ស្រូតរូត រវៀសរវៃ មុឺម៉ា ។

រើសអើង (កិ.) : រើសយក ប្រកាន់យកតែតាមគាប់ចិត្ត ។

រំឭក (កិ.) : ធ្វើឱ្យរឭកឃើញ គឺឱ្យនឹកឃើញ ឱ្យភ្ញាក់ស្មារតី ឱ្យចាំឡើងវិញ ។

រំលង (កិ.) : ផ្លោះ បង្ហួស ។

## ល

លទ្ធផល (ន.) : ផលនៃការងារដែលបានសម្រេចហើយ ។

លាមក (ន.) : ឧច្ចារៈ អាចម៍ ។

លេច (កិ.) : ចេញពីទីកំបាំង ។ *ឧទាហរណ៍* លេចមុខចេញមក ។

លំ (គុ.) : ដែលគ្រាន់តែសម្រួលបន្តិចៗមិនទាន់សម្រេចយកជាការ ច្បោល ឬច្បោលៗ ។

## វ

វង់ (ន.) : ក្រុម ។

វង្វេង (កិ.) : ភ្លេច ឬភ័ន្តស្មារតី ច្រឡំចាំពុំបាន ។

វឌ្ឍនភាព (ន.) : ភាវៈ ឬដំណើរនាំឱ្យរីកចម្រើន ។

វត្ស ឬវស្ស៍ (ន.) : ឆ្នាំ ។ *ឧទាហរណ៍* សតវត្ស៍ ។

វប្បធម៌ (ន.) : ការផ្សាំបណ្តុះវិជ្ជា និងប្រាជ្ញាស្មារតីឱ្យបានលូតលាស់ចម្រើន ។

វ័យ (ន.) : អាយុ កំណត់អាយុ ។

វាចា (ន.) : សម្តី ។

វារី (ន.) : ទឹក គង្គា ។

| | | |
|---|---|---|
| វិន័យ | (ន.) : | ការដឹកនាំទៅរកផ្លូវល្អ ច្បាប់ប្រដៅឱ្យប្រព្រឹត្តត្រឹមត្រូវ ។ |
| វិនាសកម្ម | (ន.) : | អំពើនាំឱ្យអន្តរាយ នាំឱ្យបាត់បង់ ។ |
| វិមាន | (ន.) : | លំនៅ ប្រាសាទ ដំណាក់ដែលល្អវិសេស ។ |
| វិស្វករ | (ន.) : | អ្នកសម្រេចការហត្ថកម្មទូទៅ អ្នកបច្ចេកទេសផ្ទះ ស្ពាន ថ្នល់ ។ |
| វិហារ | (ន.) : | លំនៅ កុដិធំ ទីវត្ត (ទាំងមូល) សម្រាប់ពួកបព្វជិតពុទ្ធសាសនិក ។ |
| វេន | (ន.) : | កាលកំណត់ដំណើរធ្វើការផ្លាស់គ្នាតាមប្តេជ្ញា ។ |
| វេវចនសព្ទ | (ន.) : | ពាក្យមានប្រភេទដូចគ្នា និងអាចជំនួសគ្នាបានដោយឥតបណ្តាលឱ្យល្បះមានន័យផ្សេង ។ *(ដកស្រង់ចេញពីព្រឹត្តិបត្រក្រុមប្រឹក្សាជាតិភាសាខ្មែរលេខ ៤ ឆ្នាំ ២០១២ ទំព័រទី ៥២)* |

## ស

| | | |
|---|---|---|
| សក្ការៈ | (ន.) : | ការគោរព សេចក្តីគោរព ។ |
| សញ្ជប់ | (កិ.) : | ជ្រប់មុខ ស្រពោន ស្រពាប់ ក្រៀមក្រំ ។ |
| សញ្ញា | (ន.) : | ការសម្គាល់ ការចំណាំ ។ |
| សញ្ញាណជាតិ | (ន.) : | ជាគ្រឿងសញ្ញាសម្គាល់របស់ជាតិ ។ |
| សទិសសព្ទ | (ន.) : | ពាក្យដែលមានន័យផ្សេងគ្នា តែមានរូបដូចគ្នា ឬមានសូរដូចគ្នា ។ *(ដកស្រង់ចេញពីព្រឹត្តិបត្រក្រុមប្រឹក្សាជាតិភាសាខ្មែរលេខ ៤ ឆ្នាំ ២០១២ ទំព័រទី ៥១)* |
| សន្តិភាព | (ន.) : | ភាពស្ងប់ គ្មានសង្គ្រាម ។ |
| សព្ទសាធុការ | (ន.) : | សំឡេងដែលបន្លឺថា " សាធុ " ។ |
| សមាគម | (ន.) : | ការរួមគំនិតគ្នា ដំណើររួបរួមកិច្ចការជាមួយគ្នា ។ |
| សមាជិក | (ន.) : | អ្នកដែលចូលរួមប្រជុំ សមាជិកអង្គការក្នុងសហគមន៍គ្រួសារ ។ |
| សមិទ្ធផល | (ន.) : | ផលដែលសម្រេចបាន ។ |
| សមុទ្រ ឬសមុទ្ទ | (ន.) : | អន្លង់ទឹកធំធេងជ្រាលជ្រៅ ល្វល្ហេវសន្លឹមបាត់ត្រើយដែលមានអំបិល ឬរសជាតិប្រៃស្មើភាគគ្នានឹងទឹកសាគរ ។ |
| សម្បូរ | (គុ. ឬកិ.) : | ពេញពាស បរិបូរពេកក្រៃ ។ |

សម្លាញ់ (ន.) : អ្នកជាទីស្រឡាញ់ ។

សមរម្យ (គុ. ឬកិ.វិ.) : ដែលត្រូវបែបត្រូវយ៉ាង មិនទាស់ភ្នែក ។

សរ (កិ.) : រលឹកឃើញ ។ *ឧទាហរណ៍* សរជាតិ ដឹងជាតិ ។

សហគមន៍ (ន.) : ប្រជុំភូមិ ឬតំបន់ដែលមានប្រជាជនរស់ជាមួយគ្នា ។

សា (កិ.) : មួរឡើងវិញ ។ *ឧទាហរណ៍* សាកន្ទេល ។

សា (ន.) : ស្រូវឬដំណាំពួកខ្លះ ដែលដុះលូតលាស់ពីគល់ចាស់ ឬពីជញ្ជ្រាំង ។ *ឧទាហរណ៍* សាស្រូវ សាឪឡឹក ។

សារ (ន.) : ខ្លឹម សេចក្តីខ្ទាប់ខ្ជួន មាំមួន ។ *ឧទាហរណ៍* សារលិខិត ។

សាសនា (ន.) : ពាក្យទូន្មានប្រៀនប្រដៅ ។

សិទ្ធិ (ន.) : អំណាច ការសមតាមបំណង មុខការដែលត្រូវសម្រេចខ្លួន ។

សិប្បកម្ម (ន.) : ការជាងផ្សេងៗ ។

សុខភាព (ន.) : ភាពជាសុខ សេចក្តីសុខ ។

សុខសាន្ត (គុ.) : ដែលសុខស្ងប់ ។

សុជីវធម៌ (ន.) : ការរស់នៅដោយល្អ ។

សុភមង្គល (ន.) : សេចក្តីសុខ ។

សុវណ្ណភូមិ (ន.) : ភូមិមាស ដែនដីមាស ។

សុវត្ថិភាព (ន.) : ការមានសួស្តី ការប្រកបដោយសេចក្តីសុខ ។

សួនជីវៈចម្រុះ (ន.) : កន្លែងដាំរុក្ខជាតិច្រើនមុខ(រុក្ខជាតិទឹក គោក និងអាកាស) ។

សេដ្ឋកិច្ច (ន.) : មុខរបរជាប្រយោជន៍សំខាន់ក្នុងប្រទេស ។

សេវាកម្ម (ន.) : អំពើនៃការបម្រើ ។ *ឧទាហរណ៍* សេវាកម្មទេសចរណ៍ ។

សោភណភាព (ន.) : ភាពប្រសើរក្រៃលែង ។

សំពង (កិ.) : វាយពេញកម្លាំងដៃដោយដំបង ឬកំណាត់ឈើ ។

សះស្បើយ (គុ.) : ជាពីជំងឺ ។

ស្ថិរភាព (ន.) : ភាពឋិតថេរ ។

ស្ពានអាកាស (ន.) : ស្ពានដែលគេសង់ខ្ពស់លើផ្លូវដើម្បីបញ្ចៀសការកកស្ទះចរាចរណ៍ ។

ស្មោះសរ (ន.) : សេចក្ដីរីករាយរាក់ទាក់ ។

ស្វាគមន៍ (ន.) : ដំណើរមកដល់ដោយប្រពៃ ។

## ហ

ហិង្សា (ន.) : ការបៀតបៀន ការធ្វើអាក្រក់ដាក់គ្នា ការធ្វើទុក្ខគ្នា ។

## ឡ

ឡោម (កិ.) : ព័ទ្ធជុំជិត ឡោមជុំជិត ។

## អ

អគារ (ន.) : មន្ទីរ ផ្ទះ រោង ។

អគ្គិសនី (ន.) : ភ្លើងចង្កៀង ភ្លើងគោម ភ្លើងអេឡិចត្រូនិច ។

អគុណ (ន.) : សភាពមិនមែនជាគុណ(ទោស) ។

អត្តសញ្ញាណជាតិ (ន.) : គ្រឿងសម្គាល់ជាតិមួយ សញ្ញាសម្គាល់ជាតិមួយ ។

អនាគត (ន.) : កាលដែលមិនទាន់មកដល់ ។

អនាចារ (ន.) : ការប្រព្រឹត្តខុសបែបបទ ការប្រព្រឹត្តអាក្រក់ មារយាទអាក្រក់ ។

អនាម័យ (ន.) : ដំណើរមិនមានរោគ សេចក្ដីសុខសប្បាយ ។

អនុវត្ត (គុ.) : ដែលធ្វើតាម ប្រតិបត្តិតាម គោរពតាម ។

អនុស្សាវរីយ៍ (ន.) : ការដែលគួររលឹកនឹកឃើញ ចងចាំនៅក្នុងចិត្តឥតភ្លេច ។

អន្តរាយ (ន.) : សេចក្ដីវិនាស ។

អន្ទាក់ (ន.) : ប្រដាប់ធ្វើដោយខ្សែ ឬដោយចម្រៀកផ្ដៅជាដើមមាន
ក្រវិលរូត បានសម្រាប់ទាក់ដាក់ឱ្យជាប់សត្វ ។

អាជីព (ន.) : ការប្រកបមុខរបរចិញ្ចឹមជីវិត ។

អាណាព្យាបាល (ន.) : អ្នកគ្រប់គ្រងរក្សា។

អារម្មណ៍ (ន.) : គ្រឿងតោងរបស់ចិត្ត គំនិត ការដឹង ។

អាសន្ន (គុ.) : ហេតុដែលគួរឱ្យខ្លាចនៅជិតបង្កើយ ឬតាមប្រកិតជិតមក ។

អីវ៉ាន់ (ន.) : វត្ថុ ឬរបស់នេះខ្លះ នោះខ្លះ ពុំចេញឈ្មោះ របស់ដែល
ហៅរួម ។

អុរ (ន.) : មុខមាត់ដែលទើបភ្ញាក់ពីដេកមិនទាន់លុបលាងមុខនៅឡើយ ។

អួត (កិ.) : និយាយបំភ្លើសការពិត ប្រកាសគុណ និយាយហួសការពិត ។

ឧបករណ៍ (ន.) : គ្រឿងទប់ទល់ គ្រឿងប្រុង គ្រឿងប្រកបផ្សំគ្នា ។

ឧបត្ថម្ភ (ន.) : ការទំនុកបម្រុង ការផ្តល់ឱ្យ ។

ឧស្សាហ៍ (គុ.) : ដែលខិតខំ ព្យាយាម ប្រឹងប្រែង ។

ឧស្សាហកម្ម (ន.) : ការបង្កើតរបស់ប្រើប្រាស់តាមសម័យទំនើប ។

ឧស្សាហករ (ន.) : អ្នកធ្វើឧស្សាហកម្ម ការដែលកើតមានឡើងដោយសេចក្តីខំប្រឹង ។

## សម្គាល់ ៖

(កិ.) : កិរិយាសព្ទ

(កិ.វិ.) : កិរិយាវិសេស

(គុ.) : គុណនាម

(គុ.វិ.) : គុណនាមវិសេស

(ន.) : នាម

(ឧ.) : ឧទាហរណ៍

(និ.) : និបាតសព្ទ

(អា.និ.) : អាយតនិបាត

(ចិ.) : ចិន ភាសាចិន